៣៨៧. បំរើព្រះបាទនរបតី សួរសព្វឥន្ទ្រីយ
ល្បើងនូវសព្វមម្រឹគា ។

៣៨៨. រាជសីហាគជសីហសិង្ហខ្លា គោតោ(1) មហិង្សា
ដើរត្រេចរង្គាត់ភ្នំជង្រុក ។

៣៨៩. បក្សីសួរសព្វទៅមក ទីទុយអាអូតអក(2)
ខ្លែងស្រាកនូវខ្លែងខ្លោច(3)មាន ។

៣៩០. ទាំងទោចសំពោចស្វាស្វាន ឆ្កែព្រៃព្រុសសាំន
អនេកនូវសព្វនានា ។

៣៩១. ខ្សែងហៀនចក្កចនជលកា(4) មច្ឆករភូមភា
ភោះរៃររូសួរសោពសម ។

៣៩២. ត្បូងឥន្ទ្រីយត្រៃបីប្រគំ ព្រះបាទជ័យឧត្តម
សម្តេចនារាយនិទ្រា ។

៣៩៣. រូបឯកអង្គអគ្គជាយា ដូចសុខ្សោភា
ទន្ទឹមមណ្ឌលព្រះចន្ទ្រ ។

៣៩៤. រំព្រះលក្សប្រថ្ងន់នូវកៅទណ្ឌ ឧក្ខភាជកុខ័ន
កររការ់លំពែងចាំនៅ ។

៣៩៥. នាគូររាស្រមងក្រៅ គយឃ្លាំឃ្លាឃ្លៅ
ប្រយ័ត្នអម្រឹគយាំងឃ្លង ។

៣៩៦. កូខិនខ្សឹកខ្ជុលសួរសង ទូលក្លាងយំផង
ព្រះលក្សអនុជចក្រី ។

៣៩៧. ទំនាងកន្លឹងព្រះធរណី សេពសាងបារមី
តបះអនេកក្រាស់ក្រៃ ។

៣៩៨. ទើបបានជាព្រះរាមទេពថ្លៃ មកប្រថ្ងន់ថ្កុ -
ក្រោមរាជធានីនេះណា ។

៣៩៩. នេះម្តងម្តេចព្រះរាមា ស្តេចពុំបានជា
គិតសួរដ៏ថ្កុំក្រោមវិញ ។

៤០០. សមនាងព្រះធរណីមិញ ពុំបានបំពេញ
សំណាងសំណូមប្រាថ្នា ។

៤០១. ហេតុអំពើពៀរវេរា ទុក្ខវិតកម្មា
នៃនាងកន្លឹងព្រះធរណី ។

៤០២. ឯងឲ្យព្រះបាទនរបតី ចរចាកចេញពី
បុរីនគរស្រីអយុធ្យា ។

(1) MBN : got go
(2) RIB : ā-ūt ūḷa
(3) RIB : khlaeṅ khloc
(4) RIB : jalikā

២០៣. ព្រះលក្ស ព្រះរុក្ខាភាជា ចាំយាមសាលា
ក៏ពុំនិទ្រាសោះនិត្យ ។

២០៤. ព្រះលក្សមានមោហានមិទ្ធ[1] មួយយុលចុះស្និត
សង្កត់នៃព្រះមនិន្ទ្រីយ[2] ។

២០៥. ឈ្មោះនាងនិទ្រាទេពី គ្រប់ចក្ខុន្ទ្រីយ
ស្រូបព្រះនេត្រក្សត្រថ្លៃ ។

២០៦. ស្ដេចបីនៅចង់ក្ដីក្រៃ មោះព្រះហឫទ័យ
ពិជ័យមានៈមោហា ។

២០៧. ស្ដេចហៅនៃនាងនិទ្រា ទេពីឧប្បា-
តិកដើរចេញមកកាន់អញ ។

២០៨. ក្សិណនោះនាងនិទ្រាវិញ ផ្លោះផ្លាកចាកចេញ
មកស្ថិតចំពោះព្រះភក្ត្រ ។

២០៩. ទូលថាបពិត្រនរបលក្ស[3] ខ្ញុំប្រណីអ្នក
នូវនឿយពុំបាននិទ្រា ។

២១០. ប្រារព្ធព្រៃឯអ្នកយាត្រា ជងព្រះជេដ្ឋា
ក៏កើតអន្សោកពុំក្សាន្ត ។

២១១. ហេតុនោះខ្ញុំទូលមកប្រាន ឲ្យព្រះអង្គបាន
សំរានព្រះកាយពលណា ។

២១២. ព្រះលក្សស្ដេចប្ដេជ្ញាថា ហៃនាងនិទ្រា
តាំងពីថ្ងៃនេះទៅនាងចាំ ។

២១៣. អញ្ជុងបានបួនដណ្ដប់ឆ្នាំ អញប្ដេជ្ញាដាំ
កុំមានចំណាប់និទ្រា ។

២១៤. ទោះទាំងអាហារភោក្ដា អញពុំប្រាថ្នា
ចិត្តចេតនាសន្និដ្ឋាន ។

២១៥. ឲ្យប្រាសនិរាសវិលវប្លាន អង្គអញក្សេមក្សាន្ត
ចំរើននូវកាយពលស្តុល ។

២១៦. ឲ្យអង្គអញទ្រង់ឫទ្ធិពល និរភេតនិមល
សកលមនោសយនា ។

២១៧. ដងនោះនាងនាថនិទ្រា ទេពីកល្យាណ៍
ក៏ព្រមព្រះហឫទ័យថ្វាយ ។

២១៨. ចំរើនព្រះពរពន្ទ្រាយ[4] ព្រះលក្សប្រាជ្ញប្រាយ
ប្រាកដបិទដូចព្រះចិន្តា ។

(1) MBN et RIB : mohinamiddh
(2) RIB : braḥ nidrī
(3) RIB : narapat(i) laks(ṇ)
(4) RIB : baṇṇarāy (pas.)

៦១៩. ស្ដេចនិរាហារភោក្តា    និរនេសនិទ្រា
ក៏ក្សេមព្រះអង្គអភិរម្យ ។

៦២០. ក្នុងឯឯងដូចទេពសាបសម(1)    នៅសុត្ថាវាសព្រហ្ម
ប្រុះប្រិមប្រតិភិក្ខា ។

៦២១. លុះព្រឹកស្រាងស្រេចទិវា    ព្រះសូរ្យយាត្រា
នូទ័យពីបូព៌ទិសឡើង ។

៦២២. ទើបព្រះនារាយរាមឫទ្ធិធ្មើង    ស្ដែងស្ដេចតើនឡើង
ដំរះព្រះអង្គសោភា ។

៦២៣. ស្ងួតសារស្តុតិវន្ទា    ដោយមៃសយសាស្ត្រា
មហាឫសីសិទ្ធិក្រម(2) ។

៦២៤. ស្រេចស្ដេចចេញចាកដ៏អាស្រម    ថ្វាត់ថ្វាយបង្គំ
ក្រាបលាព្រះមហាឫសី ។

៦២៥. ចរចុះលុះដល់ឆ្នេរនទី    អស់ឫសីមុនី
វន្ទដ់ស្រណោះមហាក្សត្រ ។

៦២៦. សឹងសោយសោកតិណាបន្ទាត់    ឃាឫទ័យក្ដួចកាត់
ស្រម្ញាញ់ពុំចង់ឃ្លាតឃ្លា ។

៦២៧. ចុះទៅដល់ឆ្នេរគង្គា    ដោរជលនេត្រា(3)
ទីវៃអាល័យដ៏ព្រះអង្គ ។

៦២៨. រិព្រះរាមសូរិយោពង្ស    ពន្លរត្នដ៏ឧត្តុង្គ
ស្ដេចចង់ត្រៃអាលយាត្រា ។

៦២៩. ងាវៃហាកូខ័នធូរបា    ថ្វាត់នាំនាវា
ចំលងទៅនេះដ៏ត្រើយ ។

៦៣០. កូខ័នទូលទាស់ព្រះភូ-    ជរជាខ្ញុំនូវ
សូមមានអញ្ជើញព្រះអង្គ ។

៦៣១. ពាំងបីមហាក្សត្រាវរវង្ស    វិសេសស្ដេចគង់
សំរានានៅស្ថានអញខ្ញុំ ។

៦៣២. ខ្ញុំបំរើប្រតិបត្តិបង្គំ    ព្រះបាទដ៏ឧត្តម
ទាំងបីព្រះអង្គក្សត្រិថ្លៃ ។

៦៣៣. ខ្ញុំពុំឲ្យព្រួយព្រះហឫទ័យ    វែលងស្ដេចគង់ញ
នូវឃ្លានតិមានត្រឹក្សា ។

៦៣៤. ពោះមានសត្រូវពាធា    ដាវខ្ញុំនានា
នូវផ្លាញសត្រូវនោះបង់ ។

(1) MBN : debv sansaṃ
(2) RIB : riddhi kram
(3) MBN : jūt jalanetrā
RIB : jūn jalanetrā

៤៣៥. មួយសោតព្រះស្ដេចចង់ប្រើ ស្បែកម្រឹគនុំផ្ទប់
បីឌុចសំឡីអ្នកឆ្អែត ។
៤៣៦. យកថែនដីសិលាសំរេច ដាច់មុនកែវស្រេច
ក្រណាត់ទិព្វទេពបីបន្ទំ ។
៤៣៧. មានតាំងស្វេតឆត្រអភិរម្យ ខ្នើយខ្ពស់ព្រៃព្រំ
រាំងននពិតាននូវកំរាល[1] ។
៤៣៨. មានតាំងនុជាវសអាហារ ច្រើនពណ៌ប្រការ
ត្រកាលអនេកនានា ។
៤៣៩. មានឃ្មុំត្រីសាច់សាភ្លា រុក្ខមូលបុប្ផា
អចិការឱណាជង ។
៤៤០. ព្រះតាំងទេពតាស្មគ្គិផង ពុំអាចដ៏កន្លង
ប្រស្ថិចនូវននុនុយ្យាន ។
៤៤១. តាំងទឹកស្រះស្រង់ក្រមុំកម្សាន្ត ស្រះថ្លាមើលមាន
បទុមក្រមុទឧត្បល ។
៤៤២. សូមពានអញ្ជើញស្ដេចដល់ សួគ៌ពានជ័មណ្ឌល
តំបន់អញខ្ញុំមួយថ្ងៃ ។
៤៤៣. ព្រះស្ដាប់សួរសព្ទសម័យ[2] កុខ័នស្ដេចថ្លៃ
អញ្ជើញព្រះអង្គពនេចរ ។
៤៤៤. ជាថ្ងៃកុខ័នអញអរ ជាស្មោះស្មានស[3]
គួរហោងអញឈប់ដោយជា ។
៤៤៥. គឺនោះនាយើងយាត្រា ដោយចិត្តចិន្តា
នូវចង់ចំរើនឫទ្ធិពារ ។
៤៤៦. ចតុទ្ទសវស្សាវិងចរ ធូលផ្ការព្រះនគរ
បុរីរត្នភជិអយុធ្យា ។
៤៤៧. បើបរិបូណ៌យើងយាត្រា វិញមកយល់ជា
ជ័ជាយយាមិត្រហោង ។
៤៤៨. កុខ័នស្ដាប់ព្រះបន្ទូលផង ស្រេចហើយចម្លង
តាំងបីព្រះអង្គលុះដល់ត្រើយ ។
៤៤៩. ព្រះអង្គចុះស្រង់ស្រេចហើយ តាំងស្បូរស្បងឡើយ
រិះរួសក្រសាលយាត្រា ។
៤៥០. ព្រះឯណ្ដឹងថ្ងៃកុខ័នជា ជិងដើមមាគ៌ា
បដ្ឋាញនូវដើរដោយបទ ។

(1) MBN : nūv bitān braḥ krāl
(2) RIB : sramai
(3) RIB : sar

៤៩១. យើងនូវទៅជិតត្រកួនបពិត សាងសីលពារព្រត
ព្រហ្មា(1)វនេគោចរ ។

៤៩២. ក្ងិនក្រញូញក្រាបកាយករ បង្គំព្រះភូធរ
កំទូលដោយជានមាគ៌ា ។

៤៩៣. បពិត្រជម្ពាយផ្លូវណា ស្ដេចនឹងយាត្រា
អំពីនេះទៅទុរគម ។

៤៩៤. សឹងមានមុនីនាជជ័អាស្រម ស្រះស្រង់ងារធំ
អំពាល់នូវដលគង្គា ។

៤៩៥. ខ្ញុំដឹងរឹងរដើមមាគ៌ា ស្មះសញ្ញព្រឹក្សា
សិលានូវជ្រុំង ជ្រោយជ្រែក ។

៤៩៦. ខ្ញុំដឹងរឹងរងើរសព្វលង្វែក ផ្លូវបត់ផ្លូវបែក
ដំរិកគិរីគោហា ។

៤៩៧. ហោញហោងឆកឈ្លូងគង្គា បឹងបួរបញ្ចតា
ជន្លោះជ្រលងដងងារ ។

៤៩៨. ត្រាំងត្រាក់(2)ផ្នូផ្នាក់ផ្នល់ផ្នារ សឹងសិលាដា
រអាងរអិលជ្រោះភ្នំ ។

៤៩៩. សូមពានស្ដេចកុំព្រារម្ភ ផ្លូវនោះងារខ្ញុំ
នូវនាំព្រះអង្គយាត្រា ។

៥០០. ខ្ញុំដឹងផ្លូវកាចផ្លូវងា ផ្លូវមានម្រឹគា
សហ័សសាហាវយង់ឃ្លង ។

៥០១. ខ្ញុំនូវតាមរួមរក្សាត្រង ផ្លាញអស់ម្រឹគផង
មកបៀតប្រមាថដ៏ព្រះអង្គ ។

៥០២. ខ្ញុំនូវយកខ្លួនខ្ញុំទ្រទ្រង់ ជាសាការត្រង
អម្រឹគណាមកពាធា ។

៥០៣. ពោះបីមានសត្វហឹង្សា ខ្ញុំយកនូវអាត្មា
ចេញផ្លាញសត្រូវនោះបង់ ។

៥០៤. ខ្ញុំតាំងឲ្យជិតដល់ព្រះអង្គ ពោះពាល់ពិសយង់
កាំងក្អែបនូវខ្មួយសត្វកាច ។

៥០៥. ទុយភោមរព្យាមនូវរបាច ស្មុចសោតនូវមមាច
មមង់នូវមូសស្លួយដងៃ ។

៥០៦. ខ្ញុំតាំងឲ្យជិតដល់មានបោង ខ្ញុំនៅរក្សាត្រង
កាំងបីព្រះអង្គវរលក្ខណ៍ ។

(1) MBN : prahā
RIB : brahā
(2) RIB : prāk'

៤៦៧. ពោះនូវស្នំ ពោះនូវដើរ ពោះនូវដាក់ ពោះនូវធ្វើព្រះដំណាក់
ដំណែងដំណើរមាគ៌ា ។

៤៦៨. ខ្ញុំនាំពលពាលយោធា តាមផែនរក្សា
លុះដល់សំនៅស្តេចស្តោះ ។

៤៦៩. ស្តេចស្តាប់គូខិនទូលស្នោះ ពាក្យពិតពិរោះ
នូវគុណសប្បុរសមហិមា ។

៤៧០. ទើបស្តេចបន្ទូលត្រាស់ថា ហៃហាគូខិនជា
មហាមានគុណគិតប្រមាណ ។

៤៧១. សមជាដាញាតិពីបុរាណ អញអធិស្ឋាន
ជាឯងស្មើឯកឧទរ ។

៤៧២. នាយើងចេញចាកព្រះនគរ ត្រេចត្រៃព្រៃពនចរ
មកជួបនឹងជានេះឥឡូវ ។

៤៧៣. សប្បុរសគុណជាតិតគូ គិតអ្នកឯណានូវ
មកផ្ទឹមគុណជាដ៏កន្លង ។

៤៧៤. រីអង្គអញឯងជាច្បង អណ្តាប់ជាហោង
ព្រះលក្ស្មណ៍ជាប្អូនពៅជា ។

៤៧៥. រីឯរត្នភាពសីតា នេះជាថ្លៃ[1]ជា
មហាបុរាណវរមិត្រ ។

៤៧៦. ទាំងប្អូនស្មើខ្លួនស្មើចិត្ត ស្មើឯកជីវិត
កុំគិតជាអង្គទីទៃគ្នា ។

៤៧៧. ពោះបីអញនូវមានទុក្ខា ឈឺជរដល់ជា
ជាកើតនិមិត្ត[2]ទាំសុខ ។

៤៧៨. ពោះបីជាឯងមានទុក្ខ អញទុំព្រលាក
រំជួលក្តួងចិត្តចិន្តា ។

៤៧៩. គេដឹងខ្ញុំប្តេជ្ញាថា ពាក្យពិតសត្យា
សច្ចាអធិស្ឋានដ្បិតឯង ។

៤៨០. ពោះបីញាតិវង្សាជាឯង ស្មើញាតិអញហោង
នូវអស់ទាំងសាច់សន្តាន ។

៤៨១. រីវង្សាអញសោតសឹងមាន អញអធិស្ឋាន
ស្មើញាតិសន្តានជាហោង ។

៤៨២. ប្អូនអញទាំងពីរសោតត្រង ភស្តេពិភពផង
ទម្ងន់ថ្លៃក្រោមអយុធ្យា ។

៤៨៣. រីគូខិនឯងសោតជា ដាភាពត្រីរក្សា
រក្សាបរិវេណព្រះព្រៃ ។

(1) RIB : thlai
(2) RIB : nirmitr

៤៨៤. អស់ញាតិជាសោតសព្វថ្ងៃ ក្រុមក្សត្រាហាឫទ័យ
អាស្រ័យតាំំងនាក់ជាហោង ។

៤៨៥. នេះតិប្អូវជានូវផង់ទៅផង អញតើនរណាគ្រង
អស់ញាតិភរិយាបុត្រា ។

៤៨៦. ជាផង់ចេញចាកឃ្លាតឃ្លា ក្រែងសត្រូវពាធា
នូវបៀនមណ្ឌលជាគ្រង ។

៤៨៧. បងសូមលាជាទៅហោង ទោះម្រឹតយង់ឃ្លង
ពន្លឹកនូវយក្សឃោរឃៅ[1] ។

៤៨៨. បងនូវថ្លៃងថ្លាញអស់សត្រូវ ដោយតេជឫទ្ធិផ្សុ
នូវឫទ្ធិសរសក្តិថ្លា ។

៤៨៩. កុំខំនស្តាប់ព្រះករុណា ជលនេត្រធារា
សស្រាក់សញ្ជាប់សុបនៅ ។

(1) MBN : yaks cām̤ phlūv

# កណ្ឌ ទី៦

៤៩០- ឯងនោះស្តេចលេណាទៅ ចេញចាកលំនៅ
មណ្ឌលនៃរុក្ខភងា ។

៤៩១- គាប់កាលគិម្ហន្តមាសា សៃងសូរ្យយាត្រា
សម្រួមតម្កួតទិធី ។

៤៩២- ហែងហួតស្ងួតប្រេះប្រថពី ចែងចាំងរស្មី
ធំហាយហាហាវិជ័យវេហា ។

៤៩៣- ផ្កាយផ្កូញស្រប់ព្រៃព្រឹក្សា ភាយរុះផ្លែផ្កា
រស្កោះសន្លឹកប្រួញព្រាយ ។

៤៩៤- ស្លឹកខ្លះខ្លោចខ្លះបីក្រហម ស្បូវស្លោកស្រែងព្រោម
វិនាសក្នុងភ្លើងព្រៃងាល ។

៤៩៥- តេជះព្រះបាទភូវនាថ [1] ពង្សពោធិសម្ភារ
ក៏នាំទេពីលេណា ។

៤៩៦- ដើលបានព្រៃព្រឹក្សសាខា សងខាងមាគ៌ា
ស៊ីងប្រែត្រដាក់ដ៏សប្បាយ ។

៤៩៧- លួតណាស់មាលាបីបន្លាយ [2] ជុះងាលរៀបភាយ
រួបានរបៀបអភិរម្យ ។

៤៩៨- ស្រោងស្រីងឈរឈឹងដង្គំ ស្លឹកស្លោឋបីត្រសុំ
ត្រសាយត្រសៀកវាតា ។

(1) RIB : bhāvanā
(2) RIB : mālā lec lāy

៤៩៩- បក់បុស្បក្លិនរសគន្ធា ផរផុំសោះសា
ល្អុយល្អប់ត្រឡប់ផ្លូវខ្លួន[1] ។

៥០០- ពោះព្រៃមន្ទុភមន្ទុករ ភ្ញូមរាភ្ញូមរ
ថ្វីហើរត្រេចត្រាច់ត្រឹបផ្កា ។

៥០១- សត្វដូចតន្ត្រីយសោភា ញូវល្វើងសីអង្គា
ស្រឡាត់[2] ព្រះព្រៃពនេចរ ។

៥០២- ស្បូវសែងថាំងថៃវងអម្ពរ ដូចព្រះចន្ទ្រចរ
ត្រចះកំពេញបូណ៌មី ។

៥០៣- ពុំអាចនូវក្តៅក្បត្រកាំងបី ហេតុព្រះបារមី
សម្តេចនាភាយវេលា ។

៥០៤- ស្តេចត្រេចដោយដងមាគ៌ា ឃើញល់ដើមផ្កា
មានផ្កាតែមួយច្រាស់ច្រាល[3] ។

៥០៥- មានទងនៅវល្លិវារ ផ្ការីកដ៏ត្រកាល
តែមួយ[4] នៅលើផ្កាផ្កា ។

៥០៦- ផ្កាដុះជិតដើមចំប៉ា ចំប៉ាសោតផ្កា
តែមួយក៏រីកបីតំរួត[5] ។

៥០៧- លើផ្កាននោះជាក់ស្លូត ជិតជាបីប្របួត
ក៏ជួរតួនូវកេសរគន្ធ[6] ។

៥០៨- មានកន្លងពីរសោតសម្ពន្ធ ដុះធូលជាប់គន្ធ
ត្រឹបត្រងលំអងបុស្ប ។

៥០៩- ក្សណានោះព្រះបាទនរបតី បង្គាញភជទេពី
ជាវៃបាមើលអស្ចារ្យ ។

៥១០- ឧបមាបុប្ផាពិពណ៌ ផ្កានេះគឺផ្ការ[7]
ក៏ដេះកំលុងភ្លើងប្រាល ។

៥១១- រីផ្កាននោះងនៅកណ្តាល ដូចសុពណ៌កាល
រលាយនូវមាសមានរស្មី[8] ។

(1) MBN : ap' is mārgā
l-ap' l-aṅ kesar
(2) MBN : trasāk'
(3) MBN : mān phkā tae muoy ṭa prākaṭ
---------------------------
mān maek sākhā ṭa caṃhut
sliḳ slom parisuddh
prākaṭ nūv phkā crās' crāl
(4) MBN : tamruot
(5) MBN : trapak pupphā pī tamruot
(6) RIB : tamruot nūv kesar gandh
(7) RIB : chgār (pas.)
(8) MBN : raṃlāy nūv mās haem līoeṅ

៤១២. រីផ្កាចំប៉ាពិសី ប្រាណប្រួតលើភ្នី
នទៅឯភាយវិកបុប្ផា(1) ។

៤១៣. នោះគឺនពគុណសុវណ្ណា ផ្ការផ្ទុំកែមគ្គា
រណាយច្រមុំរស្មី ។

៤១៤. រីអង្គកន្លង់បក្សី គឺឮ្យូងអប្រិយ
ទីណាមន្ទិលតុំផ្ទើង ។

៤១៥. រីត្របកផ្កាឈ្ងាប្រាលឡើង នោះគឺអណ្តាតភ្លើង
ក៏ដេះនៃផ្ការនោះណា ។

៤១៦. អង្គអញឯងដូចផ្កាឈ្ងា ជាផ្ការជានា
មាចអត់នូវកំដេវអគ្គី ។

៤១៧. នទៅឯនោះគឺសីតាទេវី ចំប៉ាជ័ពិសី
គឺអង្គព្រះលក្សអនុជា ។

៤១៨. នាយើងទាំងបីអង្គា ឯកចិត្តចិន្តា
ដូចផ្ការនូវមាលនោះហោង ។

៤១៩. រីកន្លង់នោះគឺឮ្យូងឯង ជាមន្ទិលឃ្លាង
ដូចពាក្យនាងកៃកេសី ។

៤២០. ស្តេចចង់ប្រាថ្នាបុស្បី លោមភាជទេវី
ពន្លកជង្ហើមហាឫទ័យ ។

៤២១. យាងយាត្រាត្រេចត្រីក្សត្រា តន្លេងតន្លៃ
សុវណ្ណវនេគោចរ ។

៤២២. ដូចមហាមករតដ៏បវរ ក្លាស់(2) រស្មីស្ករ
ដ៏ឡើងទាំងពៃព្រៃព្រឹក្ស ។

៤២៣. ស្តេចយល់បុស្បបុស្បនាគនា រីកកេសរផ្កា
សុភោចសុគន្ធាធរ ។

៤២៤. កន្លង់ទាំងគូភ្មរ ត្រងត្របកេសរ
ជញ្ជៀបននៀលតន្ទាយក ។

៤២៥. កន្លង់ញីនោះស្មៀតសឹក ស្មៀតជ្រែកនៅត្របក
បុស្បនាគបុប្ផាភាយភរ ។

៤២៦. ស្អិតល្អងជង់ជងខ្វាយខ្វរ វុំភ្ញែកភ្មរ
ក៏ស្តេចមមីបួរម៉ៅ ។

៤២៧. ពុំយល់ផ្លូវផ្លោះហើរទៅ ភ្លាត់ភ្លៀលភៀបនូវ(3)
ប្រហឹងវង្វេងវិលវល់ ។

(1) MBN : rī phkā campā ruṅ rfoeṅ
rasmī thaem lfoeṅ
pruot loe anujapupphā

(2) MBN : kaem

(3) RIB : daṃ nau

៤២៨. រីកន្លង់ឈ្មោលមិញដឹងកល់ កន្លង់ញីពុំយល់
ទើបបាននឹងហើរទៅស្ថាន ។

៤២៩. ឆ្អៀលឆ្នាត់រង្កាត់ដើរដារ ស្មោះទំនៀបក្រោណ
ប្រហឹងបន្លឺសព្ទឮព្រៃ ។

៤៣០. កន្លង់ញីឮហើយហើរដោយ ដល់ជិតតាមក្រោយ
ទៅលុះដូចចិត្តចិន្តា ។

៤៣១. ស្ដេចបង្ហាញអភិអគ្គជាយា មេមើលភូមភា
ក៏នាំនៃភូមរីហើរ ។

៤៣២. ដូចប្អូនមិត្រមាសដ៏ប្រសើរ អាចត្រេចនៃព្រៃដើរ
ក៏តាមអញបងនេះណា ។

៤៣៣. រូបអង្គរូបឯកមាត៌ា រូបស្ថាននិទ្រា
ពុំគិតលំបាកពនេចរ ។

៤៣៤. បើស្ថិតនៅនាព្រះនគរ ដូចកណកេសរ
ក៏រុំភូមរបក្សី ។

៤៣៥. ហើយនូវកើតអង្គឯងអប្រិយ មានបន្ទិលស្រី
ដំណិះដំណៀលលោកឯង ។

៤៣៦. មេអាចស្មះស្មៀងតាមបង ដើរដោយនូវគន្លង
ការនូវសារពេជ្ញពោធិញាណ ។

៤៣៧. បងនូវនាំមេកន្លងវែងស្ថាន អរិដ្ឋាបីបង្ខាន
បង្វែងបង្វិលភពចក្រ ។

៤៣៨. បងនូវនាំមេមាសទៅដាក់ ដល់ស្ថានតតដំពាក់
គឺបហានិរោធនិព្វាន ។

៤៣៩. ស្ដេចលោមព្រះប្អូនកល្យាណ បណ្ដើរទៅបាន
ដល់ស្ថានមណ្ឌលស្រះស្រី ។

៤៤០. មានបុស្បាបោក្ខរណី ក្រពុំពេជ្រពី
គង្គាប៉ប្រឹបទឹងទ្រឹង(1) ។

៤៤១. ស៊ីងក្សុនធ្វើរនៃព្រលែងប្រហឹង វៃវាលបាចទៅវិង
កញ្ច្រោកកញ្ច្រៀវព្រមគ្នា ។

៤៤២. ខ្លះដកដើមបទុមា តាំងក្រពុំផ្កា
បណ្ដាលបណ្ដែតតាមយក ។

៤៤៣. គាប់កាលខ្យល់បក់នូវលក ដើមឈូកណាត់មក
ដីពាក់តាំងទងទើរនៅ ។

៤៤៤. មានមេមយូរីហើរទៅ ឃោតុសត្វដ៏កន្សោ(2)
ក៏យល់បទុមទងស្រស់ ។

(1) RIB : gaṅgā trīep trịm daṅ trịṅ
(2) MBN : phsār satv sau ṭau

៥៤៥. ត្រូវខ្យល់យល់បាក់ដូចរស់ គិតស្មានជាពស់
ក៏ចឹកចាប់ពាំនាំទៅ ។

៥៤៦. ទើរទុកសំបុកដ៏លំនៅ បក្សីរួមនៅខ្លា(1)
ពុំដឹងដើមទងល្បុកឡើយ ។

៥៤៧. មានកូនពីរពេញក្រាសហើយ កូននោះយំឆ្លើយ
មកមេពារភក្ត្រភោក្តា ។

៥៤៨. ឯមេមយូរឆ្លើយថា ថាកូនពាំងា
កុំយំអារម្មញពារ ។

៥៤៩. ថ្ងៃនេះពុំបានអាហារ ត្រកល់ត្រកាល
ចំណីចំណាប់នេះជម្លូក ។

៥៥០. ក្សិណាមេមយូរចឹកថែក ចំពុះពាំថែក
ទនទងបទុមបីភយ ។

៥៥១. ពុំបានបរិភោគសប្បាយ កូនខំងរនិងម្តាយ
បង្កើតជាទោសដួយលា ។

៥៥២. ជាឈឺដៃទន្ទឹងអាហារ ល្មះល្បាចឥតការ
ពុំបានអាហារភោក្តា ។

៥៥៣. ស្តេចស្តាប់កូនក្មេងថា បង្កើតទោសា
ទនមេមយូរបីកម្ពស់ ។

៥៥៤. ស្តេចបញ្ជាញទេពនិមិល ថាមេមាសយល់
ទនបក្សីមយូរបុត្រ ។

៥៥៥. មួយនោះដូចចៅភិរុត មួយទៀតត្រាកដ
ដូចចៅសុត្រុតម្នួនមញ ។

៥៥៦. សមនឹងរកបដិបងសំឡាញ់ បន្តោសម្តាយវិញ
គឺអង្គនាថៃកកេសី ។

(1) MBN : paksī sau ṭau

# កណ្ឌ ទី៧

៥៥៧. ព្រះឈោមព្រះភគវតី អបរអគ្គមហេសី
បណ្ដើរដោយដងព្រៃភ្នំ ។

៥៥៨. ទៅជិតមណ្ឌលអាស្រម ស្ថានរម្យដ៏ចង្ក្រម
នៃមហាឫសីស្មឹងស្មាធិ ។

៥៥៩. ព្រះនាងគសីតារត្ន ក្ដត់ភ្នែនព្រះបាទ
ចំរើនចតុពេទសាស្ត្រ ។

៥៦០. ចូលដល់ខាងមណ្ឌលអភិកាស ព្រះអង្គកាយពាតពាស(1)
នូវស្បែកអម្រឹគគីដ៏ធ្វើ ។

៥៦១. ស្លាយស្លៀងស៊ីងសំបកឈើ សិទ្ធិសក្តិនូវអំពើ
អំពល់ពិធីកណ្ឌការ ។

៥៦២. អស់អញលំគេញដោយនូវធម្ម ចំរើនភេសពណ៌(2)
ជាមហាឫសីស្ងាត់ស្ងៀម ។

៥៦៣. មានពុកចង្កាគីដ៏វែង មើលមុខគួរស្ញែង
មហាឫសីសាស្ត្រសុទ្ធ ។

៥៦៤. តាំងព្រះព្រហ្មស៊ីងដ៏ធំជំហុត ពិធីពារព្រត
មហាមុនីនឹកក្សាន ។

៥៦៥. គោះនូវធ្វើសិល្បសាស្ត្របាន បរិបូណ៌មែនមាន
តេជះតបះបុណ្យក្រៃ ។

៥៦៦. យល់ព្រះពោធិសត្វថ្លៃ ក្រៃត្រេកជាហឫទ័យ
ក៏ត្រេកត្រអាលអាក្ដាត់ ។

(1) MBN : kān' smiṅ bāk' bās
(2) RIB : camroen bes barṇā

៤៦៧. ដូចបុរសមួយមានតំកាត់ ទៀបហៀបនូវឃាត់
ជីវិតនឹងលុះមរណា ។

៤៦៨. យល់ព្រះដូចយល់ពេទ្យា យកឱសថា
វិញទេពមកប្រស់ប្រោសប្រាណ[1] ។

៤៦៩. ជាពោះបាបអញមិនមាន តេជះអញបាន
ប្រសប់ពុទ្ធក្បួរវៃឆ្លួ ។

៤៧០. អស់បាបទាំងនោះសឹងក្ស័យ អង្គអញឥតភ័យ
ទេវានុទេវរឹងសួង ។

៤៧១. ពោះបាបបុរាណចាំចង ច្រើនជាន់កន្លង
ពុំអាចនូវរងជ័ទេវា ។

៤៧២. ស្រេចព្រះមុនីនាថចិន្ដា ឲ្យដងត្រដាយា
ឈើច្រត់នូវកណ្ដីចរ ។

៤៧៣. ចេញចាកមណ្ឌលស្ថានប- រមសាលាសារ
ពោតព័នៅស្ថានជ័ចក្រុម ។

៤៧៤. ទើបព្រះនារាយរាជជ័ឧត្តម បេះបុស្បក្រពុំ
បទុមទាំងទេវមាលា ។

៤៧៥. ចរចូលបីជ័ទូលបុប្ផា ថ្វាត់ថ្វាយអភិវាទ៍
នៃមហាឫសីជ័មុនី ។

៤៧៦. ព្រះមុនីអរនុបចក្រី ត្រេកត្រេះមេត្រី
សំណោះសំណាលសួរជា ។

៤៧៧. ហៃហាក្សត្រឲ្យបឫទ្ធិចេស្ដា ស្ដេចមកពីឯណា
កន្សាស្រីរត្នជ័ប្រសើរ ។

៤៧៨. អញនូវចង់ដឹងដើមដំណើរ ស្ដេចត្រេចត្រៃត្រាដើរ
ត្រមោចព្រះរៀមអនុជា ។

៤៧៩. ហើយព្រះអង្គតំរិះពង្សក្សត្រា ស៊ិងប្រែប្រាណជា
មហាឫសីមុនីនាថ ។

៤៨០. ឲ្យសំបកឈើពាក់សង្វារ ស្ញុំសក់ជដាធារ
មោះពោតុប្រការកលម្ដេច[2] ។

៤៨១. ទើបព្រះមុនីនាថសារពេជ្ញ ប្រាប់ប្រការកិច្ច
មហាឫសីអស់អាជី ។

៤៨២. ទើបមហាឫសីសង្ហា ជាបាបបុរាណកាល[3]
វៀតចៀសចាកពុំបាន ។

(1) MBN : sahās mak pras' pros prāṇ
(2) RIB : pañ' bibhab bhār
mak mān prakār kal mtec
(3) RIB : purāṇakār

៥៨៣- វិស័យសត្វកើតក្នុងស្ថាន ភពចក្រប្រែប្រួលា
ប្រដូចទិវារាត្រី ។

៥៨៤- ក្សិណាភ្លឺសាយសព្វទិសទី ដោយតេជរស្មី
ពន្លឺនៃព្រះសុរិយា ។

៥៨៥- លុះព្រះសុរ្យសោតយាត្រា កំបាំងជ្រុងមហា-
សុមេរមណ្ឌលបរិស្របប់ ។

៥៨៦- ប្រែជាងងឹតឈឹងល្អប់ អន្ធការសោតសព្វ
ទិសានុទិសពុំយល់ ។

៥៨៧- នេះគួរនាដូចកម្មផល កុសលអកុសល
អំពល់អំពើពីរមុខ(1) ។

៥៨៨- បង្កើតកាលកបនូវសុខ ហើយបង្កើតទុក្ខ
ពុំដែលនូវចៀសចាកឡើយ ។

៥៨៩- លុះបាននិព្វានដាប់ស្បើយ ឥតមានកំដឹងឡើយ
រដោះលែងជាតិជរា(2) ។

៥៩០- ពុំអន្ទោលទៅមកឡើយណា និរនេសុក្ខា
មហាបរមសកល ។

៥៩១- និរាសប្រាសវែងកង្វល់ អង្គគត់អំពល់
ក៏ក្សេមសប្បាយត្រេកអរ(3) ។

៥៩២- ព្រះមហាឫសីសាធរ នាំព្រះភូធរ
ទេពីនូវព្រះអនុជា ។

៥៩៣- ចូលទៅក្នុងបរមសាលា ថ្វាយព្រឹក្សផលា
ទាំងបីព្រះអង្គសោយសាន្ត ។

៥៩៤- ស្ដេចផ្ទុំនៅសាលាស្ថាន សុខស្កល់ក្សេមក្សាន្ត
បង់អស់មួយរាត្រីកាល ។

៥៩៥- លុះព្រឹកស្រាងស្រេចភូបាល ស្ដេចតើនបវិត្រអាល
ជំរះព្រះអង្គសោភា ។

៥៩៦- ស្ដេចនាំទេពីអនុជា បង្គំព្រះមហា-
ឥសីនូវណាជីរជរ ។

៥៩៧- ព្រះមហាមុនីសិទ្ធិករ ជំរើនព្រះពរ
សម្ដេចនារាយភរិយា ។

៥៩៨- ព្រះឫសីដណ្ដឹងវិញថា នាអ្នកលេណា
មកនៅកំលុងព្រះព្រៃ ។

(1) RIB : bī mukh
(2) RIB : noḥ nai doep spoey
raṭoḥ laeṅ jāti jārā
(3) St. 590 et 591 : manquent dans RIB

២៩៩. ធ្វើក្រឹត្យក្រមតបះគុណាក្រៃ ព្រតសិល្បសាស្ត្រវៃឈ
ប្រពៃពិធីកុណ្ឌកម្ម[1] ។

៣០០. លុះអំលុងអំបាលខែឆ្នាំ ហើយស្តេចក៏នឹងនាំ
ទេពីអនុជគូធរ ។

៣០១. វិលវិញត្រើចព្រៃពនេចរ ចូលស្ថានព្រះនគរ
ពិភពបុរីរាជស្ថាន ។

៣០២. ទើបស្តេចទូលស្នងវិញស្ថាន ថាខ្ញុំទៅបាន
លុះប្អូនជិតស្លាប់ឆ្នាំណា ។

៣០៣. ស្រេចហើយវិលវិញយាត្រា ស្ថានស្រីអយុធ្យា
ពិភពមណ្ឌលស្ថានស្ថិត ។

៣០៤. សូមលាព្រះបាទជ័យពិត្រ មុនីសាស្ត្រសុចរិត
ស្តេចចៅនៃរាជគិស្ថាន ។

៣០៥. ពីនេះទៅតើចម្ងាយម៉ាន យើងខ្ញុំក៏នូវបាន
ដល់ចិត្តគូជបពិត ។

៣០៦. ព្រះមុនីប្រាប់ដោយនូវកំណត់ ថាដប់យោជគត់
គណនាស្តេចទៅពីអាយ ។

៣០៧. លុះកណ្តាលវៃផ្លូវវាលវែងឆ្ងាយ ងារធំទូលាយ
លលីមលញៀកសោតសល់ ។

៣០៨. ទុរគមក្រៃក្រដើរដល់ ផ្លូវនោះជ័អំពល់-
នូវខ្សាច់ក្រួសក្រៀមក្តៅក្តាត់ ។

៣០៩. ប្រណាំទេពីស្រីរត្ន ឥឡូវអញសូមឃាត់
ស្តេចគង់នៅស្ថាននេះណា ។

៣១០. ពោះនូវធ្វើព្រតត្រីទ្ធសាស្ត្រ[2] អញឯងជានា
កុំឲ្យព្រួយព្រះហឫទ័យ ។

៣១១. ស្តេចស្តាប់ព្រះមុនីមានវៃម- ត្រីឃាត់ក្សត្រវៃថ្លៃ
ក៏ស្តេចបន្ទូលវិញស្នង ។

៣១២. បពិត្រគ្រូខ្ញុំនៅហោង ពុំគួរនូវកន្លង
ព្រះឱស្ឋពិសេសអាជ្ញា[3] ។

៣១៣. មោះខ្ញុំយល់ស្ថាននេះណា ទៀបនឹងអយុធ្យា
ជំរោះៗពតិមាន ។

៣១៤. ទៅតាល់ដេវពណ៌ជ័សណ្តាន បងប្អូនខ្ញុំមាន
នូវមករកខ្ញុំឯងហោង ។

(1) RIB : prabai bidhī kāyakarm
(2) MBN : doḥ nūv dhvoe prathamasilpasāstrā
(3) MBN : braḥ osṭh braḥ aṅg ājñā
RIB : braḥ osṭh bises cintā

៦១៥. ស្រេចព្រះបន្ទូលសារសង កុំឲ្យមានហ្មង
នឹងព្រះឥសីសីលា ។

៦១៦. ស្ដេចថ្វាយនមស្ការអភិវាទ៍ ប្រទក្សិណាលា
មហាមុនីចរចេរ ។

៦១៧. ស្ដេចត្រេចត្រៃព្រលុះលេចដល់ឆ្នេរ គង្គាគម្ភីរ
ពន្លឹកជ័យមហានទី ។

៦១៨. ទ័ឈ្មោះស្ទឹងនោះនាមតី ព្រោងហៅកាលតី
នទីទូលាយជ្រាលជ្រៅ ។

៦១៩. ព្រះអង្គចុះស្រង់បន្ទោ មន្ទិលសោះក្ដៅ
បន្ទូលនឹងព្រះអនុជា[(1)] ។

៦២០. ថាវៃហាវរលក្ស្មស្នេហា អញបងបានជា
ជាប្អូនសព្វថ្ងៃស្មើចិត្ត[(2)] ។

៦២១. វៃហាលក្ស្មស្ទឹងនេះធំក្ដាត់ ប្រាំរម្ភស្រែងសត្វ
វារីគោចរពាធា ។

៦២២. អាស្ងូរសិតាបងជា សមនិងកើតកយា
ម្រាងមើយនូវអាចឆ្លងបាន ។

៦២៣. ព្រះលក្ស្មស្ដាប់ព្រះបន្ទូលក្ដាន ហោតុព្រះអង្គមាន
ឃាឬទ័យបំរុងជេស្ឋា ។

៦២៤. កុំឲ្យព្រួយព្រះចិន្ដា ស្រេចយកខ័នថ្លា
ទៅកាត់ក្រៃបេលឈើចង ។

៦២៥. ជាក្បួនមានត្រៃទេនក្លឹង បេះបុស្សក្រាលក្រង
ទាំងទេងមាណាបីសណាប់ ។

៦២៦. ជាព្រះក្រាលទិព្វស្រេចស្រាប់ លើទៃនទិព្វគាប់
នូវក្បួនបវរពិចិត្រ ។

៦២៧. ថ្វាត់ថ្វាយព្រះបាទជ័បពិត្រ ពីរព្រះអង្គស្ថិត
ព្រះលក្ស្មក៏វៃហាលនាំឆ្លង ។

៦២៨. ទៅបានត្រើយត្រាណាដូចបំណង ក្បូត្រក្បាន្តតិតហ្មង
ទាំងពីរព្រះអង្គយាត្រា ។

៦២៩. ត្រេចត្រង់ព្រៃព្រឹក្សបព្វតា លុះលេចអង្គា
ស្ដេចកាត់ឆ្លងវាលវៃងឆ្ងាយ ។

៦៣០. សិងភ្លឹងព្រៃព្រះគេះព្រោងព្រាយ ច្រាលច្រាស់ថ្មៃងឆ្ងាយ
ចំហាយព្រះសូរ្យរង្សី ។

(1) RIB : braḥ anujaratn
(2) St.620 : manque dans RIB

៦៣១- ស្ដេចឮ្យានស្លូតសាស្ត្រស្មូតិ៍ ដោយតេជពិជ័
ព្រះពិស្វាមិត្រអភិទេស(1) ។

៦៣២- ទិព្វមន្តខ្លឹមគុណជ័វិសេស ស្ពានសោះនិរទេស
ចំហាយព្រះសូរ្យយាត្រា ។

៦៣៣- ត្រដាក់ដូចចន្ទ្រដាយា ល្អតណាស់ត្រីក្សា
បុប្ផាផលជឺងបិរឈ្មួរ ។

៦៣៤- ដូចនន្ទោទ្យានស្ថានសួគ៌ សួគ៌គឺជ័គួរ
បន្ទូងសម្ដេចឥន្ទ្រា ។

៦៣៥- អស់ផ្ញើរព្រៃស្មៀងម្រឹគា សោតសឹងប្រែជា
មេត្តាអាស្រូសត្វផង ។

៦៣៦- រីអស់អម្រឹគយង់ឃ្នង សឹងជាសត្រូវផង
បំបាត់ជីវិតគ្នាមិញ ។

៦៣៧- សឹងប្រែចិត្តជាសំឡាញ់ ស្គាល់ស្នេហាស្និទ្ធវិញ
ដោយភាសាសត្វមេត្រី ។

៦៣៨- គជបុត្របៅមេរាជសីហ៍ គជរាជហាត្ថី
បំបៅបុត្ររាជសីហាភ្វា ។

៦៣៩- ក្តុះប្រើសប្រែបៅមេខ្លា មេប្រើសប្រែជា
បំបៅបុត្រខ្លាស្នេហាស្និទ្ធ ។

៦៤០- អស់ម្រឹគបក្សីសុចរិត ក្បួនក្សត្រមូលមិត្រ
រក្សាសុបាលស្នេហាស្និង ។

៦៤១- ពោះក្អែបខ្មួយពស់ពិសផង សព្វសត្វយង់ឃ្នង
នូវពិសជ័ឃោរតតប្រមាណ ។

៦៤២- ពោះទំពោះកិស្មួលប្រួលប្រាណ អ្នកណាបើមាន
ទៅត្រូវនូវពិសបិ៍ចំហុត ។

៦៤៣- ដូចអ្នកយកទិព្វជ័ឱសថ មកប្រួសប្រាកដ
កំណាត់រូបរោគាពាធ ។

៦៤៤- សាន្តសះសព្វសារពើញាច អង្គឯងស្មែងស្អាត
និមិត្តអប្រិយជ័ពិសស្អែង ។

៦៤៥- ពោះបិ៍ម៉េមផលរុក្ខវែង ពិសពុលស្ទប់ស្មែង
ក្រៃវែងអាសិរពិសផង ។

៦៤៦- សឹងប្រែមានរសរឹងបោង បង្គុរសជ័កន្លង
ក្រអូបក្រអែបក្លិនក្លាយ ។

៦៤៧- ស្ដេចវេលាមាគ៌ាសោះផ្ញាយ សឹងសូរភីភាយ
ព្រាប្លប់ត្រណោមគន្ធា ។

(1) RIB : ṭoy tej bar bī
brah̤ bisvāmitr abhides

៣៤៨. តេជៈព្រះបារមីតា ស្តេចស្តែងជាតិជា
ឥស្សរកំពូលពុទ្ធពង្ស ។

៣៤៩. លះលាភធរមាកចេញបង់ ព្រះនគរព្រះអង្គ
ប្រយោជន៍ធំទើរសាស្ត្រ ។

៣៥០. កាលនោះព្រះស្តោះវេលា រសៀលសុរិយា
ហៀបទៀបនូវអស្តង្គត ។

៣៥១. ស្តេចដល់ចិត្រកូដបព៌ត មហាគិរីដ៏ប្រាកដ
កំពូលកំពស់ពេយមា ។

៣៥២. អស់ទាំងពពួកទេវតា សោតសឹងនាំគ្នា
មកលេងលើខ្ពង់ព្រះភ្នំ ។

៣៥៣. មានដើមដូងស្លាដ៏ល្បី បរិវេណធារធំ
ជង្គំនូវព្រឹក្សាករ ។

៣៥៤. អស់មហាឥសីពានត្តរ[1] យល់ព្រះភូធរ
នូវព្រះមេតីអនុជា ។

៣៥៥. ពនេចរចេញបរមសាលា ទទួលព្រះភមា
នូវព្រះអនុជមេតី ។

៣៥៦. ឥសីសិទ្ធិពរនរបតី នរបតិន្ទភោគី
សិទ្ធិព្រះពរជ័តិរេកា[2] ។

៣៥៧. វុឌ្ឍីពរវុឌ្ឍីវរវណ្ណការ វុឌ្ឍីជន្មសុរម្យា
វុឌ្ឍីភមាជាភាគុល[3] ។

៣៥៨. ព្រះរៀមព្រះមហោសីស្គាល់ ព្រះអនុជនិម៌ល
បីខ្វល់រណ្តាប់រចនា ។

៣៥៩. ប្រៀបប្រុងសប់បរមសាលា លើខ្ពង់បព្វតា
ដ៏ជាអាស្រមព្រះបតិត្រ ។

៣៦០. យកមយូរត្រយព្រាយដ៏វិចិត្រ ប្រុះប្រក់ប្រួតជិត
ជាស្បូវនូវពិតានជាស ។

៣៦១. ហើយដៃរៃធនតំបារមាស បិតបាំងពេញពាស
លើត្រយមយូរកែមការ[4] ។

៣៦២. ជញ្ជាំងជុំ[5]សឹងសុពណ្ណ គ្រុះស្តៅដ៏ពព្រាល
ពព្រាងពព្រាយបីសស្តៅ ។

៣៦៣. ស្តេចនាំមហោសីស្ថិតនៅ គយគន់ទតទៅ
អាស្រមប្រសើរសោភា ។

(1) RIB : mahāmunī sīl sar
(2) RIB : nara:po ṭă tirekā
(3) RIB : ṭal'
(4) MBN : kaem kāl
(5) RIB : ciñcāc traṭāc

៣៣៤. ព្រះសរសើរថាវៃហាលក្បួនបា ចេះជាងរចនា
ឈាណាត្រកាលដ៏វិស័យ ។

៣៣៥. ជារងទម្ងន់បងថ្លៃ ហងមកនៅថ្ងៃ
អាស្រ័យធ្វើទុក្ខបាហោង ។

៣៣៦. ព្រះអនុជឱនសិរទៀបរង ក្រាបក្រោមបាទបង
បង្គំប្រណម្យទូលថា ។

៣៣៧. បពិត្រសូមព្រះករុណា កុំមានព្រះជិន្តា
ប្រណីទម្ងន់នូវព្រួយ ។

៣៣៨. ខ្ញុំជាបុរសកម្មករ (1) មួយ ធ្វើផ្លែះពុំព្រួយ
ពុំគ្រាន់ជំណាប់ភក្ដី ។

៣៣៩. ដូចកាលនាងកៃកេសី ឯស្ដើមភាសៀពី
ព្រះអង្គក៏ឲ្យព្រះភិរុត ។

៣៤០. ខ្ញុំប៉ងថ្លែងសរធ្វើគត់ យកភាសៀថ្វាយបទ
ព្រះអង្គពិសេសឃាត់ឯង ។

៣៤១. ហេតុព្រះទ័យទិញប្រាបឈ្មោង ប្រុះប្រាជ្ញាក្រែង
ទេភានុទេវវិងស្នង ។

៣៤២. ពីថ្ងៃនេះទៅសោតហោង ខ្ញុំនូវយករូបរាង
ព្រះជន្មព្រះបាទជេស្ឋា ។

៣៤៣. ពោះមានសត្រូវពាធា ដារខ្ញុំធាធា
នូវរងទម្ងន់ព្រះបពិត្រ ។

៣៤៤. ស្ដេចស្ដាប់ព្រះអនុជស្នេហាស្និទ្ធ ឈ្មោះសសុចរិត
សំលូតសំឡាញ់ភក្ដី ។

៣៤៥. ក្បួត្រាមយាមហេសី តាំរព្រះអង្គបី
នូវព្រះអនុជមូលមិត្ត ។

៣៤៦. ស្ដេចជំទើនពារពោទសាស្ត្រសិទ្ធ តបះការក្រមក្រិត្យ
ប្រព្រឹត្តលើ (2) ខ្លួនបពិត ។

(1) RIB : kammakār
(2) RIB : loes

# កណ្ឌ ទី៨

៦៧៧. កាលព្រះបាទស្រីទសរថ ស្មោយទិវង្គត
រលត់ព្រះជន្មអនិច្ចា ។

៦៧៨. ព្រះមុនីវរសិទ្ធិ(1) មហា- ឫសីចេះរចនា
ធ្វើលើកព្រះសពសំស្ការ ។

៦៧៩. ទេពីព្រះក្រុមបរិពារ អស់ស្រីស្រីង្គារ
សឹងសោកស្រណោះក្សត្រថ្លៃ(2) ។

៦៨០. ទាំងមុខមន្ត្រីជិតទៃ សឹងសោកអាល័យ
បង្កើតនូវទុក្ខសល់ខ្លាត(3) ។

៦៨១. ស្រេចវិះរកពូជពង្សក្សត្រ ត្រង់រាជសម្បត្តិ
សំបូណ៌ប្រវេណីនាថ ។

៦៨២. វរសិទ្ធិមុនីតែងរាជសារ មករាជបុត្រា(4)
គឺព្រះភិរុតរាជហោង ។

៦៨៣. នឹងឲ្យសេពសោយរាជ្យរង ទម្លន់ថ្កុំក្រោមត្រង
ប្រជារាស្ត្ររដ្ឋជ័យបុរី ។

៦៨៤. ក្សិណនោះនាងកៃកេសី ក្រាបព្រះមុនី
កុហកនូវកលជំមាយា ។

៦៨៥. លបលួចផ្ដាំដោយសារថា រាជសារនៃមហា-
ឫសីសុមេធវរសិទ្ធិ ។

(1) RIB : visiṭṭh (pas.)
(2) RIB : siṅ soy sokaṇal' ktāt'
(3) St. 680 : manque dans RIB
(4) RIB : rājaputr pāl

៣៨៦. រីនូវនាងកៃកេសី ឲ្យសារសរវនីយ
មេត្រីមកព្រះរាជបុត្រ ។

៣៨៧. ត្រាស់ឲ្យអញ្ជើញព្រះភិរុត នូវព្រះសុត្រុត
នូវផ្ញើមង្គលអតិរេក ។

៣៨៨. នូវប្រដាប់ប្រដាអភិសេក ព្រះរាមជាឯក
ឲ្យគ្រងពិភពអយុធ្យា ។

៣៨៩. ស្នងព្រះទសរថរាជា ព្រះវរបិតា
ដំកល់ព្រះរាជរាមហើយ ។

៣៩០. កុំព្រះភិរុតយូរឡើយ សត្វសារដល់ហើយ
នូវព្រះសុត្រុតយាត្រា ។

៣៩១. ទៅក្នុងបុរីរាជអយុធ្យា អភិសេកព្រះជេដ្ឋា
រាមាធិរាជគ្រប់គ្រង ។

៣៩២. ដងនោះអស់រាជទូតផង នាំរាជសារស្នង
ព្រះឱស្ឋព្រះអង្គបីសម័យ[1] ។

៣៩៣. យាងយាត្រាត្រេចត្រាំក្នុងព្រៃ ទៅតាំងយប់ថ្ងៃ
ប្រាំពីរទិវាពនេចរ ។

៣៩៤. ស្រេចបានដល់ស្ថានព្រះនគរ សម្ដេចព្រះវរ-
បិតានៃកៃកេសី ។

៣៩៥. ថ្វាយសារសុចរិតមេត្រី ព្រះភិរុតនរបតី
នូវព្រះសុត្រុតក្សត្រក្សាន្ត ។

៣៩៦. ថាបទ[2] នាងកោកល្យាណ នាងកៃកេសីសាន្ត
ក៏ស្នួមព្រះតារតិធី ។

៣៩៧. ឲ្យព្រះរាមទេពធិបតី[3] គ្រងរាជបុរី
បុរាណស្រីអយុធ្យា ។

៣៩៨. ព្រះវរបិតាមាតា គឺអង្គក្សត្រា[4]
ស្ដេចត្រាស់ប្រើយើងខ្ញុំមក ។

៣៩៩. នានាំព្រះបណ្ដាំរួសរក អញ្ជើញព្រះពន្លក
ទាំងពីរ[5] ព្រះអង្គលេណា ។

៤០០. ឲ្យទាន់ការប្រដា- ភិសេកព្រះជេដ្ឋា-
ធិរាជនារាយរាមទេព ។

៤០១. វរសិទ្ធិព្រះមុនីសារសេព[6] ស្ដេចជាខ្លឹមក្លួប

(1) RIB : braḥ osṭh braḥ aṅg bhisamăy
(2) RIB : thā bīr
(3) RIB : oy rāmadeb debī
(4) RIB : pī aṅg ksatrā
(5) MBN : dāṃṅ pī
(6) RIB : siddhī braḥ munī sā seb

ត្រកូលអំបូរពង្សក្សត្រ ។

៧០២. ក្សណនោះព្រះភិរុតអរក្ដាត់ ថ្នមព្រះសុពណ៌បាទុក
ដំកល់មណ្ឌលសិរសា ។

៧០៣. ទ្រៃប្រស្នោះស្នោះព្រះភក្ត្រា ត្រង់នគរអយុធ្យា
លុតលើកព្រះករប៉បង្គំ ។

៧០៤. តាំងព្រះសុត្រុតត្រេកមនោរម្យ[1] សំពះថ្វាយបង្គំ
ចំពោះស្រុកស្រីអយុធ្យា ។

៧០៥. ទ្រាមប្រើអស់អង្គសេនា មុខមន្ត្រីត្រា
យោធាអមាត្យមូលមក ។

៧០៦. ឲ្យងគរស្គរភេរីរក ដុំពលព្រឹន្ទុយក
គ្រឿងគ្រប់ប្រដាប់អង្គា ។

៧០៧. ព្រាហ្មណ៍ព្រឹទ្ធបុរោហិតហោរា រកពារដ៏ពេលា[2]
ជាតិជាដំណើរមង្គល ។

៧០៨. យោគយាត្រាត្រេចកបកល ត្រៀបរៀបហៃពល
ប្រកិតអាវុធឆ្វេងស្តាំ ។

៧០៩. ខ្មាន់ធ្នូករកាន់ធ្នូកាំ ខ្មាន់ស្នាបីចំណាំ[3]
រលៀបរលេនប្រួញព្រួស ។

៧១០. ខែលវ័នរួនទណ្ឌាបីប្រទើស ស្រុះស្រើបជ្រៀវជ្រើស
សន្ធឹកឆាភាគុយដង់ ។

៧១១. ខ្មាន់គជជិះ[4]គជរៀបរង់ ខ្មាន់អស្សពាហាឆ្វង់
ប្រដាប់នៃតាជីជុំ ។

៧១២. សព្វសេះសៀងសូរសៃងសម ក្លីងក្លូសអភិរម្យ
វិភាយរំភើយពាសពាត់ ។

៧១៣. បៃបង្អន់សែនត្វាន់ភាយភត់ ភាជរថខិបខាត់
តិជិត្រនូវរត្នសុវណ្ណា ។

៧១៤. ទង់ជ័យត្បូងភាជរថា ទិព្វទង់ជ័យជា
ជរង្គឃ្លាណាស្រួចស្រាប់ ។

៧១៥. ស្រេចព្រះអាជ្ញាបីប្រញាប់ ស្ដាប់ប្រើប្រដាប់
សំរាប់អស់ភាជបរិវារ ។

៧១៦. ព្រះភិរុតភាជរិះវេលាកាល ព្រះសុត្រុតដ៏ត្រអាល[5]
ធ្វូលថ្វាយបង្គំក្រាបលា ។

(1) RIB : trek ar ṭă bhiramy
(2) RIB : ṛksabār ṭă belā
(3) RIB : khmān' dhanū2 dhnịm kār kāṃ
khmān' snā2 nāṃ
(4) RIB : bandh
(5) RIB : trakāl

៣៨៦. រីឯនាងកៃកេសី ឲ្យសារសវិនីយ
មេត្រីមកព្រះរាជបុត្រ ។

៣៨៧. ត្រាស់ឲ្យអញ្ជើញព្រះភិរុត នូវព្រះសុត្រុត
នូវគ្រឿងមង្គលអតិរេក ។

៣៨៨. នូវប្រជាប់ប្រជាភិសេក ព្រះរាមជាឯក
ឲ្យគ្រងពិភពអយុធ្យា ។

៣៨៩. ស្នងព្រះទសរថរាជា ព្រះវរបិតា
ដំកល់ព្រះរាជរាមហើយ ។

៣៩០. កុំព្រះភិរុតយូរឡើយ សត្វសារដល់ហើយ
នូវព្រះសុត្រុតយាត្រា ។

៣៩១. ទៅធ្លានបុរីរាជអយុធ្យា អភិសេកព្រះជេដ្ឋា
ភាតាធិរាជគ្រប់គ្រង ។

៣៩២. ដងនោះអស់រាជទូតផង នាំរាជសារស្នង
ព្រះឱស្ឋព្រះអង្គបីសម័យ[1] ។

៣៩៣. យាងយាត្រាត្រេចត្រាំក្នុងព្រៃ ទៅតាំងយប់ថ្ងៃ
ប្រាំពីរទិវាតានេចរ ។

៣៩៤. ស្រេចបានដល់ស្ថានព្រះនគរ សម្ដេចព្រះវរ-
បិតានៃកៃកេសី ។

៣៩៥. ថ្វាយសារសុចរិតមេត្រី ព្រះភិរុតនរបតី
នូវព្រះសុត្រុតក្សត្រក្សាន្ត ។

៣៩៦. ថាបទ[2] នាងកោកល្យាណ នាងកៃកេសីសាន្ត
ក៏សួមព្រះពរពិធី ។

៣៩៧. ឲ្យព្រះរាមទេពធិបតី[3] គ្រងរាជបុរី
បុរាណស្រីអយុធ្យា ។

៣៩៨. ព្រះវរបិតាមាតា គឺអង្គក្សត្រា[4]
ស្ដេចត្រាស់ប្រើយើងខ្ញុំមក ។

៣៩៩. នានាំព្រះបណ្ដាំរួសរក អញ្ជើញព្រះពន្លក
តាំងពីរ[5] ព្រះអង្គលេលា ។

៤០០. ឲ្យទាន់ការប្រជា- ភិសេកព្រះជេដ្ឋា-
ធិរាជនាយរាមទេព ។

៤០១. វរសិទ្ធិព្រះមុនីសារសេព[6] ស្ដេចជាខ្ញឹមក្លែប

(1) RIB : braḥ osṭh braḥ aṅg bhisamăy
(2) RIB : thā bīr
(3) RIB : oy rāmadeb debī
(4) RIB : pī aṅg ksatrā
(5) MBN : dāṃṅ pī
(6) RIB : siddhī braḥ munī sā seb

ត្រកូលអំបូរពង្សក្សត្រ ។

៧០២. ក្សិណនោះព្រះភិរុតអរក្កាត់ ថ្នមព្រះសុពណ៌បាទ
ដីកល់មណ្ឌលសិរសា ។

៧០៣. ទៃប្រឡោះ ឆ្ពោះព្រះភក្ត្រា ត្រង់នគរអយុធ្យា
លុតលើកព្រះករបីបង្គំ ។

៧០៤. តាំងព្រះសុត្រុតត្រែកមនោរម្យ(1) សឹងថ្វាយបង្គំ
ចំពោះស្រុកស្រីអយុធ្យា ។

៧០៥. ក្រាមប្រើអស់អង្គសេនា មុខមន្ត្រីត្រា
យោធាអមាត្យមូលមក ។

៧០៦. ដូងទ្រស្គរភេរីរក ផ្លុំពាលព្រឹន្ទុយក
គ្រឿងគ្រប់ប្រដាប់អង្គា ។

៧០៧. ព្រាហ្មណ៍ព្រឹទ្ធបុរោហិតហោរា រកពារដំពេលា(2)
ជាតិជាដំណើរមង្គល ។

៧០៨. យោគយាត្រាត្រៃធកបកល ត្រៀបរៀបហៃពល
ប្រកិតអាវុធឆ្វេងស្តាំ ។

៧០៩. ខ្មាន់ធ្នូ ករកាន់ធ្នូកាំ ខ្មាន់ស្នាប៉ីធំណាំ(3)
រលៀបរលេនប្រួញព្រឹស ។

៧១០. ខែលទ័នទូនទណ្ឌាប៉ីប្រទីស ស្រុះស្រើបជ្រៀវជ្រើស
សន្ធឹកឃាភាគុយដង់ ។

៧១១. ខ្មាន់គជជិះ(4)គជរៀបរង់ ខ្មាន់អស្សពាហាទ្វង់
ប្រដាប់នៃពាជីជុំ ។

៧១២. សព្ទសេះសៀងសូរសៃងសម ក្លីងក្លស់អភិរម្យ
រំភាយរំភើយពាសពាត់ ។

៧១៣. ទៃបមន់ចៃសនត្វាន់ភាយភាត់ ភាជរថខិមខាត់
តិជិត្រនូវរត្នសុវណ្ណ ។

៧១៤. ទង់ជ័យត្បូងភាជរថា ទិព្វទង់ជ័យជា
ជរង្គហ្វណាស្រួចស្រាប់ ។

៧១៥. ស្រេចព្រះអាជ្ញាបីប្រញាប់ ផ្ដាប់ប្រើប្រដាប់
សំរាប់អស់ភាជបរិពារ ។

៧១៦. ព្រះភិរុតភាជរិះវេលាកាល ព្រះសុត្រុតជ័ត្រអាល(5)
ធូលថ្វាយបង្គំក្រាបលា ។

(1) RIB : trek ar ṭă bhiramy
(2) RIB : ṛksabar ṭă belā
(3) RIB : khmān' dhanū2 dhnịm kār kāṃ
khmān' snā2 nāṃ
(4) RIB : bandh
(5) RIB : trakāl

៧១៧. ព្រះអយ្យកោធិភជា នូវព្រះអយ្យិកា
ក្សត្រក្សត្រទាំងពីរដ៏ព្រះអង្គ ។

៧១៨. ស្រេចឡើងគង់រថដ៏បញ្ចង់ ទឹមអស្សពាហាពង្ស
សិន្ធពប្រទេសទិព្វយាន ។

៧១៩. ពីរព្រះអង្គអរក្សេមក្សាន្ត ស្រួលស្រើបស្មោះស្មាន
ជាបានយល់រៀមភាមា ។

៧២០. លេងល្បែងពលព្រើសគ្រប់គ្នា សាន្តសេពនូវសុភា(1)
រៀងដោយមាគ៌ានូវចម្ងាយ ។

៧២១. ត្បូងតន្ត្រើយព្រៃស័ង្ខសាយ សេពសមសួរឆ្ងាយ
រំពាងព្រៃព្រៃអឹងអាប់(2) ។

៧២២. ភ្លេងភ្លយព្រើសព្រមសំរាប់ ក្រោតក្រមុះតប់(3)
ជាប៉ីកូរប៉ីអងង ។

៧២៣. តាខេខ្មែរដៀវដេញលេង អង្គ្លូចគ្រប់ភ្លេង
ដ៏ល្បែងនូវសព្ទស្គរគង ។

៧២៤. ស្រាផ្អាត់ពួចពាងនូវពិន្ទុង(4) ស្រាប្រាលដិបដង
ដិបរងអារ៉ងរៀបរៀង ។

៧២៥. ស្រាឯកចែកអ្នកលេងល្បែង(5) ពលព្រើសព្រមព្រៀង
ល្បែង(6)ល្បែងសាទរ ។

៧២៦. លុះថ្ងៃភ្លឺព្រឹកពីរពាននេះជរ រៀបទៅព្រះនគរ
បុរីអយុធ្យាយល់ ។

៧២៧. ស្ងប់ស្ងាត់ស្ងួនស្ងោះសាសល់ នរអ្នកទុក្ខទល់
អិតល់អំពើសោកសាយ ។

៧២៨. ព្រោះព្រាសនិភាសព្រះនារាយ ភាមទេពទៅឆ្ងាយ
តាំយល់ព្រះអង្គដ៏នុត្តម ។

៧២៩. អស់ប្រុសស្រីស្រុកតូចធំ នរគាមជ៏និគម
ចំណាត់ជនបទជួញឆ្ងាយ(7) ។

៧៣០. ធ្វើរធ្វើទិសទីទេសនាយ ទល់ទុក្ខសោកសាយ
សឹងសោកសម្ដេចដេស្ឋា ។

៧៣១. រំឭលទាំងព្រះចន្ទ្រសុរិយា ខិទុរភិក្សា
ស្រែទំទាំងមេឃដ៏មណ្ឌល ។

(1) RIB : staeṅ stec līlā
(2) MBN : rambaṅ braḥ brai īṅ āy
basadhār sdoer niṅ kralāp'
(3) RIB : daḥ dāp'
(4) RIB : srā chmāt' buoc boeṅ biṅ daṅ
(5) RIB : caek as' anak spīeṅ
(6) RIB : lpaṅ
(7) RIB : nagar gām nigam
campat janapad juon chnay

៧៣២. ខែដើមឆ្នាំហើយពុំយល់ អ្នកស្រែខ្វាយខ្វល់
នង្គ័លរនាស់រាស់ង្គួរ ។

៧៣៣. ក្រៀមក្រាំងរាំងរីងបឹងបួរ ស្រូវស្រែមានមួរ
ស៊ីងស្ងួតស៊ីងស្វិតស្លឹកស្លោម ។

៧៣៤. ពោះទាំងព្រៃព្រឹក្សាព្រោម ខ្លះខ្លោចជ័រស្លោម (1)
ក្រយាមសន្លឹករុះរោយ ។

៧៣៥. បុប្ផាផលាផងផោយ ដើមជាលបីរប៉ោយ (2)
របេះស្រែតាប់ទុំខ្ចី ។

៧៣៦. ពេញស្ពានឧទ្យានស្រះស្រី គតបុរសនារី
នូវរិះរកទើសភោគ្គា ។

៧៣៧. អន្តរធានទាំងភ្ញីផ្កា រោយរុះព្រៀបត្រា
គិតអ្នកនូវក្រងជួតជៀត (3) ។

៧៣៨. ទីរដែផ្លាប់លាយលាបនូវរមៀត លាយពោះពង់ស្មៀត
ពុំធ្វើប្រដាប់ខ្លួនឡើយ (4) ។

៧៣៩. វិរងស្ពាងអង្គទ្រង់ជាត្រើយ មិញមិនយល់ឡើយ
ពុំទ្រង់នូវផ្ទិមអម្ពរ (5) ។

៧៤០. ពីប្រាសនិរាសព្រះភូធរ អស់អង្គអ្នកនគរ
ស៊ីងសោកសង្រេងទល់ទុក្ខ ។

៧៤១. គតឯល្អស្ដើយសាន្តសុខ ស៊ីងស្ងប់ស្ងួតមុខ
ប្រមូលប្រឡាក់ទឹកភ្នែក ។

៧៤២. ដាត់ទាំងចំរៀងរាំរែក លែងសើចស្រួលស្រែក
ក៏ស្ងាត់ពាក្យពុំឮឡើយ ។

៧៤៣. ព្រោះប្រាសព្រះមាសត្រាណាត្រើយ សោកសោះគតស្ដើយ
គតល្អនូវទុក្ខវេទនា ។

៧៤៤. សំពត់ស្បៃអាវអាត្មា ពុំផ្លាស់ឡើយណា
មន្ទិលមិនទើងបោកបង់ ។

៧៤៥. ស្លូតស្លូតវរវេទព្រាទ្រង់ ស្លូតសោតស៊ីងបង់
ពុំបានបូជាព្រះនគរ ។

៧៤៦. អ្នកជិះសារសេះបើកបរ លះលែងចេញចរ
ត្រឡប់វិលវល់ជាជាយ ។

៧៤៧. អ្នកប្រត់ (6) រាជរជៀបរាយ បំបោលបរឆ្ងាយ
បង្អាក់បង្អួស់គោគ្នា ។

(1) RIB : khlaḥ khloc smuk smom
(2) RIB : pī poy
(3) MBN et RIB : cuot cīet
(4) RIB : bum praṭāp' dhniṃ ambar(ṇ)
(5) St.739 : manque dans RIB
(6) RIB : anak par

៧៤៨. សឹងបាត់ស្ងាត់ទាំងអាគ៌ា នរម្នាក់យាត្រា
រទ្រាំងរទ្រៀលទៅមក ។

៧៤៩. គ្រប់គ្រឹះស្ថានស្ថិតវិវង្វក គន្លាធុជមក
ផុតដោយមណ្ឌលមុជអាប់ ។

៧៥០. រួសរុំវិថ្យងថ្មុំថ្មាយថ្មីៗ សឹងសូន្យប៉ីរង្វាប់
រង្គោះរង្គើគ្រឹះស្ថាន ។

៧៥១. អ្នកធ្វើស្រែស្រូវដោយដាន ទុំទៀបទឹកមាន
ស្រះស្រង់អន្លង់ដលសា ។

៧៥២. ឥតអ្នកមួយមកជីកជា ប្រឡោះប្រឡាយគង្គា
បង្ហូរបង្ហូតទឹកទៅ ។

៧៥៣. ដិតដើងស្រែស្រុកជ្រាលជ្រៅ ក្រាំងក្រៀមក្តាត់ក្តៅ
ខ្លៀតខ្លិតល្វៀនលេចស្លុកស្លឹង ។

៧៥៤. ឥតនរវៃនរំរៃតរំតឹង បាចបើកបូរបឹង
បង្ហូតបង្ហូរដោកដាំ ។

៧៥៥. ក្របីគោធូលដាន់ដំណាំ បាក់(1) បង់តុំចាំ
រយាបរបើកខ្ទាត់ខ្ទាយ ។

៧៥៦. ដើលសព្វសេដ្ឋីទាំងឡាយ វិវងធ្វើទ្រង់ព្រាយ
សំអាតសំអាងគ្រឹះស្ថាន ។

៧៥៧. ដៃដៃនគ្រាក់ប្រុះបុះបាន ភាយរត្នបាសមាន
សន្ធឹកបង្ហួចដើយដាយ ។

៧៥៨. សំពត់សំពាយព្រៃព្រាយ ខោខៀនលេចលាយ
ណាណាតបាលបាលដំល្បិ ។

៧៥៩. ស្រស់ស៊ីជំពូ(2) ទេសរុំ កាសាសូត្រសម
នូវយមណាពាក់ពាត់(3) ។

៧៦០. ពីគ្រាសនិភាសមហាក្សត្រ សោះសូន្យស្ងប់ស្ងាត់
នាក្នុងកំលុងព្រះនគរ ។

៧៦១. ព្រះភិរុតព្រះសុត្រុតចិរចរ ស្តោះទីឧត្តរ
ក៏ធូលដោយទូរបន្ទាយ ។

៧៦២. យល់បាត់ឆត្រទង់ព្រាត់ព្រាយ ចង្ក្រង់ភាត់ភាយ(4)
រំលោលរលានគ្រាសា ។

៧៦៣. ស្ងាត់មុខមន្ត្រីអមាត្យ គង់គាល់ព្រះបាទ-
សិរីទេសរជិភជា ។

(1) RIB : cāk
(2) MBN et RIB : srī jambū
(3) MBN et RIB : nūv yamanā bāk' bāt'
(4) RIB : rat(n) rāy

៣៦៤. ស្លាក់ព្រាហ្មណ៍ព្រឹទ្ធសុំ ស្នូមយា- ចកចូលប្រាថ្នា
ប្រែង បានព្រះរាជទានទៅ(1) ។

៣៦៥. សេនាយោធាក្នុងក្រៅ ពលទេវៃរងនៅ
សំរាប់ព្រះមហាក្សត្រា ។

៣៦៦. សឹងស្លាក់ស្លូតស្ងប់ភក្ត្រា ទុរភិក្ខុភារា
ពាន់ពីរប្រការពេកក្រៃ ។

៣៦៧. មួយបទប្រាសព្រះជេស្ឋជ័យ សោយព្រះរិលាល័យ
មួយប្រាសព្រះរាមរាជបុត្រ ។

៣៦៨. ទាំងរាជសីតាទ្រង់ព្រត ព្រះលក្ស្មលំអុត
ភក្ដីព្រះរៀមរាមា ។

៣៦៩. ទាំងបីព្រះអង្គយាត្រា ចេញចាកអយុធ្យា
ក៏ដេងទាំងរាជបុរី(2) ។

៣៧០. ព្រះភិរុតរិះជាហេតុអ្វី យល់អគ្គីក្ដី
ពុំដូចរៀងមកពីបុរាណ ។

៣៧១. នេះសមបុរីរាជស្ថាន ទន្ទុំក្រោមក្រៃងមាន
កោលាហលហើយពុំវៃង ។

៣៧២. ព្រះសុត្រុតបង្គំទូលថ្លៃង សមនូវកើតទុក្ខស្ដែង
ដីជាទម្ងន់ពុំស្រាល(3) ។

៣៧៣. ដោយខ្ញុំយល់ហេតុនូវប្រការ ថ្លកថ្នកបីរង្គាល
មហាទុរយស យើងហោង ។

៣៧៤. បទព្រះរាមទេពពុំគ្រង ប្រទេសីរាជវង
ទម្ងន់ពិភពជ័យបុរី ។

៣៧៥. ស្ដេចខ្វាល់ព្រោះព្រះជននី អ្នកសូមពរពី(4)
សម្ដេចព្រះវរបិតា ។

៣៧៦. ជាឲ្យអង្គអញឯងជា ក្សត្រសោយរាជណា
ពិភពអយុធ្យាគ្រង ។

៣៧៧. យល់ពុំករុណាអ្នកហោង អ្នកសោតជាច្បង
រំលងម្ដេចព្រះជេស្ឋា ។

៣៧៨. នេះឥឡូវសមព្រះរាមា ស្ដេចត្រេចយាត្រា
ចេញចាកពីព្រះនគរហើយ ។

៣៧៩. វីព្រះជនកសោកឥតស្បើយ ទល់ទុក្ខឥតស្បើយ
សោកស្ដាយសព្វរាត្រីវេលា ។

(1) RIB : raeṅ pān pradhān pradān dīeṅ dau
(2) RIB : kamphaeṅ dāṃṅ rājapūrī
(3) RIB : thā nāy neḥ eṅ
sam koet dukkh dhṅan' buṃ srāl
(4) RIB : dūl sūm rājy bī

| | | |
|---|---|---|
| ៨១៣. | ពុញជាតិក្សត្រទាំងវង្ស<br>ដូចព្រះធម្មធារព្រហ្មស្ថាន | ស្ដេចឡើយព្រះអង្គអន្តរធាន<br>រលាយកណ្ដាលសមុទ្របង់ (1) ។ |
| ៨១៤. | កាលក្សត្រ (2) វិសេសសុទ្ធ<br>កម្ពុតបះបុដាប - | ស្ដេចស្ដែងដត់ពិធីទ្រង់<br>កើតជាបុត្របុរសប្អូន ។ |
| ៨១៥. | ស្ដេចរួមរក្សាគ្រប់គ្រង<br>ផ្ដើមថ្ងៃដើមខ្លួន | គតឯឃ្លាងបិតាស្ងួន<br>ខ្ញុំព្រះរាជបុត្រភ្ញា ។ |
| ៨១៦. | យើងខ្ញុំបុត្រទាំងនេះនៃ<br>ទិអាសូរព្រះរាមា | ស្ដេចពុំអាល័យទ្រង់ករុណា<br>ស្ដេចស្ងួនពុំដែលឲ្យមានឃ្លាង ។ |
| ៨១៧. | ក្រែងអស់យើងខ្ញុំទាំងប្អូនបាន<br>ដឹងរអ៊ីយស្ដេចដោយចង | ធ្វើខុសមែនមានទោសក្ដាំក្ដង<br>ហឫទ័យក្រោធបោះបង់បុត្រ ។ |
| ៨១៨. | ឱះឱខ្ញុំនាំព្រះជន្មដាក់<br>តំរប់ជ្រាំមួយឆ្នាំគត់ (3) | ព្រះជនកអ្នកដ៏គង់ជិត<br>កំណត់ព្រះជន្មព្រះបិតា ។ |
| ៨១៩. | បង្កើតយើងខ្ញុំបុត្រប្អូន<br>ទិតប្បូវលះលេលា | បរិបូណ៌ស្ងួនសល់ស្នេហា<br>បោះបង់បុត្រភ្ញាអសារសោះ ។ |
| ៨២០. | កាលកើតកោលាហល<br>បរទុស្ដអសូរនោះ | ដោតអសូរមួយមានឈ្មោះ<br>មកដណ្ដើមយកពិភព ។ |
| ៨២១. | ត្រៃត្រឹង្សព្រះឥន្ទ្រា<br>សឹងដួលដកគោរព | អស់ទេវតាភិតភ័យស្ទើងស្លាប់<br>អញ្ជើញព្រះអង្គស្ដេចទៅឆ្ពោះ ។ |
| ៨២២. | បរទុស្ដអសូរយល់<br>បរទុស្ដអសូរនោះ | ស្ដេចស្ដែងដល់ត្រៃត្រឹង្សស្មោះ<br>ដោះទ័ពរត់ចាញ់ចេស្ដា ។ |
| ៨២៣. | ឥឡូវព្រះអង្គបាត់<br>ទៅជួយព្រះឥន្ទ្រា- | ក្រែងមហាក្សត្រស្ដេចលេលា<br>ធិរាជឬយើងពុំយល់ ។ |
| ៨២៤. | ទិព្រះទិស្តព្រះទិប្ការ<br>ស្រីណោះបន្ទួលសល់ | វិះរាជសារទៀងទៅដល់<br>សឹងសោះសូន្យអសារ (4) ពេក ។ |
| ៨២៥. | ប្រមូលអស់យើងខ្ញុំ<br>ព្រះរាមព្រះទៀមឯក | ទុំវធ្វើបរមាភិសេក<br>តិរេករាជពិភពគ្រង ។ |
| ៨២៦. | ឱះឱព្រះជន្មស្ងល់-<br>បានបរិបូណ៌ដូចនូវបំណង | ស្លាប់បានយល់បុណ្យបុត្រឡើង<br>បំណាច់ចំណាប់ព្រះហឫទ័យ ។ |
| ៨២៧. | ទិស្ដេចឡើយប្រាសឃ្លាតឃ្លា<br>ស្មោយស្ទក់ព្រះវិណាល័យ | ព្រួយព្រះចិត្តាដល់ក្សត្រក្ស័យ<br>និរាសរកពុំយល់ឡើយ ។ |

(1) MBN : ralāy soḥ sūny poḥ paṅ'
(2) RIB : braḥ osṭh
(3) MBN : oḥ o cāṃ braḥ aṅg s-āt
nā braḥ pād srīdasarath
prāṃ muoy hmịn chnāṃ gat'
(4) RIB : āsūr

៨២៨- ព្រះភិរុតព្រះសុត្រុតតតត្រើយ[1] សោយសោកពុំស្បើយ
សង្រេងនឹងព្រះបិតា ។

៨២៩- នាងកៃកេសីសោកា ខ្លួមភជបុត្រគ្នា
ដាក់លើទិភជ័ព្រាកដ ។

៨៣០- នាងបន្ទូលថាឱហាបុត្រ នាបីកំណត់
សត្វសាវលអស់អង្គមនុស្សផង ។

៨៣១- ពុំដែលនានឹងកន្លង ធៀសចាកឲ្យរង
អំពើអំពល់ពុំដែលបាន ។

៨៣២- ជាតិជរាមរណាមាន ជាតិកើតបាន
ជារូបចំរើនអង្គា ។

៨៣៣- ពុំវៃលងឡើយលុះជរា ចាស់ចាកមរណា
ដោយក្តីសភាពស្លាប់ហោង ។

៨៣៤- ដូចកលផលបុប្ផាផង ក្រពុំរឹចពីទង
ស្រទាប់ត្របកបុស្បបទរ[2] ។

៨៣៥- សឹងរីកវៃងភាយកេសរ ក្លិនក្លែបជឹបទរ[3]
ក្បិណាប្រែស្បើយស្បើយតន្ទា ។

៨៣៦- ក្តិបរឹចលេចពីទងវា ខ្ចីចាស់ផលា
ស្រពោនហើយទុំទៀងហោង ។

៨៣៧- ក្បិណាធ្លាក់ចុះចាកវៃលងទង ដូចកំណើតសត្វផង
អន្ទោលអន្ទាក់ភពស្ថាន ។

៨៣៨- ក្រុងពាលកណ្តាលចាស់មរមាន ជាបរិយោសាន
សំរេចសំរាប់សត្វសាវល ។

៨៣៩- ក្នុងភូមិភពចក្របរិល សង្សារវឹងវិល
លង្វែកក្នុងមហាសមុទ្រ[4] ។

៨៤០- ទោះបីព្រះបាទទសរថ មានព្រះជន្មកំណត់
មួយសែនកោដិកប្បស្គល់ស្គប់ ។

៨៤១- លុះអំណើសសែនកោដិកប្បគ្រប់ ពុំអាចទល់ទប់
សឹងលុះនូវក្តីមរណា ។

៨៤២- ឱហាបុត្រពន្លកមាតា រីជាតិជរា
មរជាសំរាប់រូបហោង ។

៨៤៣- ព្រះភិរុតរំលត់ទុក្ខផង ហើយទើបទូលស្នង

(1) RIB : trāṇ troey
(2) RIB : sradāp' trapak pak pusp
(3) RIB : bañ' beñ gandh
(4) RIB : rūp rañ kamm cañ pī kañval'
ṭūc kal gambhīr ma-
hāmahant ṭă samudr

ជណ្ដឹងនាងកៃកេសី ។

៤៦៤. បពិត្រព្រះវរជននិ　　ព្រះបិតានរបតី
នោះមិញសុគតហើយហោង ។

៤៦៥. រីព្រះរាមទេពដ៏កន្លង　　ព្រះរាជបុត្រច្បង
តម្រូវស្ដេចគង់ស្ថានណា ។

៤៦៦. នាងប្រាប់ថាឱហាបុត្រភ្ងា　　ម្ដាយណាក់អ្វីបា
បណ្ដូលបណ្ដាច់ថ្លើមថ្លៃ ។

៤៦៧. រីព្រះរាមចៀមក្រោធក្រៃ　　នាំទេពីថ្លៃ
នូវព្រះលក្សណ៍យាត្រា ។

៤៦៨. ដោះបង់ចេញចោលនគរា　　ត្រេចដៃព្រៃព្រឹក្សា
ពុំដឹងដំណួចស្ថានស្ថិត ។

៤៦៩. ព្រះភិរុតព្រះវរមិត្រ　　ចៀមរាជដ៏បពិត្រ
ដ៏ត្រេចព្រះព្រៃយាត្រា ។

៤៧០. ដូចអ្នកយកអគ្គីសោះសា　　ដាលដុតទ្រា
នូវថ្លើមដង្ហើមពោរពុះ ។

៤៧១. ដូចនូវបែកធ្លាយខ្ចាយចុះ　　ដូចខ្លោចឈ្លោចឈ្លុះ
ទិភារន្ធត់ក្រោធក្រៃ ។

៤៧២. ទើបខំទប់ទូលនាងកៃ-　　កេសីនូវសម័យ
ព្រះរាមព្រះចៀមរត់ទៅ ។

៤៧៣. នោះព្រះរាមចៀមពោលជ្រៅ　　ពោលទាស់ក្រៃក្រៅ
នូវច្បាប់បុរាណក្សត្រា ។

៤៧៤. ព្រះបាទទសរថរាជា　　ព្រះវរបិតា
ស្ដេចក្រោធបណ្ដេញបរបង់ ។

៤៧៥. ឬមួយតឿរត្រៀងព្រះអង្គ　　ព្រះរាមវិះចង់
ទៅនៅនាព្រៃនោះឯង ។

៤៧៦. ដោយកម្មវិបាកបង្វែង　　ឬមួយសោតក្រែង
មហាឫសីសិទ្ធី ។

៤៧៧. ឲ្យអាក់ខ្វាល់ខ្វាក់កលអ្វី　　ព្រះជន្មានរបតី
ស្ដេចខ្វាល់[1] ពុំនៅព្រះនគរ ។

៤៧៨. ឬមួយពោលពីព្រះវរ-　　លោកល្បាបរ
បណ្ដេញព្រះរាមរត់ទៅ ។

៤៧៩. មួយសោតព្រះបាទចោមចៅ　　ទសរថរាជចៅ
ព្រះជន្មាននៅឡើយ ។

៤៨០. ឬស្ដេចស្ដែងសុគតហើយ　　ព្រះអង្គតតត្រើយ[2]

(1) RIB : stec khmās
(2) RIB : trāṇ troey

គឺរត់ទៅនៅនាព្រៃ ។

៨៦១- នាងប្រាប់សព្វសព្ទសម័យ សំណោះជាហៃហា
ភិរុតរូបរត្នស្ងួនភ្ញា ។

៨៦២. កាលព្រះរាមទេពបងបា នាំភជសីតា
ព្រះលក្ស្ម អនុជចេញទៅ ។

៨៦៣. នោះព្រះជនកបានៅ ស្ដេចសោកក្ដាត់ក្ដៅ
ហាឫទ័យទល់ទុក្ខវេទនា ។

៨៦៤. ពេលទាំងនេះអង្គីព្រះបិតា ខ្វាល់បរបងបា
លុះលះវៃងរាជបុរី ។

៨៦៥. មួយសោតអង្គីពាក្យពី មុនីវរសិទ្ធិ
មហាឫសីផ្គាំផ្គង ។

៨៦៦. នាងកោកល្យាសោតហោង តិតឯមានប្លាង
រកាំរកៀសហាឫទ័យ ។

៨៦៧. នាព្រះរាមទេពក្រោតក្រៃ រត់ទៅនៅព្រៃ
នោះហេតុពាក្យពីប្ដេជ្ញា ។

៨៦៨. អញឯងសូមសត្យវាចា ពីព្រះជនកបា
នូវឲ្យបាឯងជាក្សត្រ ។

៨៦៩. សេពសោយរាជ្យរម្យរាស្ត្ររដ្ឋ គ្រប់គ្រងសម្បត្តិ
សំបូណ៌បុរីអយុធ្យា ។

៨៧០. មួយសោតអញសូមប្ដេជ្ញា ឲ្យព្រះរាម-
ជរាជចេញចាកព្រះនគរ ។

៨៧១. ទៅធ្វើតបះការករ ឮដៃព្រៃពនេចរ
អំណុងលុះប្អូនដណ្ដប់ឆ្នាំ ។

៨៧២. ឲ្យសាងសីលវិញការកម្ម ស្រេចហើយនៃនាំ
ទេពីនូវព្រះអនុជា ។

៨៧៣. វិលមកស្រីអយុធ្យា នោះព្រះជនកបា
ប្រសិទ្ធព្រះពរអញហោង ។

៨៧៤. ឈ្មោះឯងព្រះរាមបុត្រច្បង អាក់អាក់ខ្វាល់ជង
ជាភេទទុំនៅព្រះនគរ ។

៨៧៥. ញោះបង់សម្ដេចព្រះភូធរ ទសរថព្រះវរ-
បិតាកាលស្ដេចពុំទាន់សុគត ។

៨៧៦. លុះឮជាព្រះរាមរត់ ស្ដេចសោករាជបុត្រ
សង្រែងសោះសោយវិលាល័យ ។

៨៧៧. ព្រះភិរុតស្ដាប់សព្ទសម័យ ពាក្យពីនាងកៃ-
កេសីប្រាយប្រាប់ទាំងពិលាប ។

៨៧៨. ដើមឡើយប្រណាម្យក្រញូញក្រាប លុះឮជាក់ច្បាប
ជាព្រះរាមរត់បទនោះ ។

៨៧៩. ព្រះភិរុតរិះរឹងខ្ញាល់សោះ - សាសំល់ក្បួនណានោះ
ក៏ញ័រព្រះបាទវ័យក្រោធ ។

៨៨០. យកព្រះហស្តចុកព្រះសោត ទាំងពីរពុំកោត
ពុំស្ដាប់បន្ទូលនាងឡើយ ។

៨៨១. នេត្រច្រាលដែងដាលឥតស្បើយ(1) ទះព្រះហស្តហើយ
បំជួចរន្ទះខ្ទរខ្ទរ ។

៨៨២. ក្រោធក្រោកដាលដោះឡើងឈរ ដូចទួរភ្លូកព្រះនគរ
ទាំងព្រះសុមេរញាប់ញ័រ ។

៨៨៣. សាគរពុះពោរអស្ចារ្យ ព្រះភិរុតរាជខ្ញាល់
កក្រើកអំពើកប្រថពី ។

៨៨៤. ជានូវកាប់នាងកៃកេសី កាចកាឡកិណី
សម្លាប់ព្រះបាទទសរថ ។

៨៨៥. ឲ្យព្រះអង្គលុះសុគត ទោសទាំងនេះបទ
តៃស្រីចណ្ឌាលរឹងមាត់ ។

៨៨៦. គិតគួរអញឯងកាប់កាត់ ជាពីរបីកំណាត់
តម្រូវឲ្យក្ស័យជន្មា ។

៨៨៧. គឺមោះបទជាមាតា ចិញ្ចឹមរក្សា
អញ្ជួរស់បទក្បីរគាត់ហោង ។

៨៨៨. រីទោសគាត់ធ្ងន់ដ៏ក្នុង ក្រៃលែងស្រីឯង
កំប្រេតប្រាកដលោកីយ ។

៨៨៩. នាងធ្លាប់វិស័យជាស្រី នៅនឹងប្ដីសី
សប្បាយបងប្អូនកូនចៅ ។

៨៩០. ម្ដេចដល់បណ្ដាលពោសជ្រៅ ឲ្យរំដួលក្ដៅ
ក្រៃក្រៅវិស័យក្សត្រី ។

៨៩១. ចណ្ឌាលកាចកាឡកិណី សល់សម្លាប់ប្ដី
ជាក្សត្រប្រសើរសុគត ។

៨៩២. បទបានពាក្យម្ដេចថ្លាមត់ ទើបព្រះទសរថ
ស្ដេចពុំរិះរេពាក្យសត្យ ។

៨៩៣. ពុំអាចឲ្យរាជសម្បត្តិ ព្រះរាមរៀមរត្ន
ដ៏ជាព្រះរាជបុត្រច្បង ។

៨៩៤. បទទើសពាល់ពាក្យពេចន៍ហោង ស្ដេចខ្លាសរាស្ត្រផង
ស៊ូរត់ទៅនៅនាព្រៃ ។

៨៩៥. ព្រះជនកសោកមហាទៀបព្រៃ លុះព្រះជន្មក្ស័យ
ពុំបង់ពាក្យសត្យមេត្រី ។

(1) MBN : netr crāl jrāp jruot it spoey
RIB : netr crāl ṭaeṅ ṭāl jā troey

៨៩៦. ចាំបើនាងកៃកេសី នេះពុំស្រដី
នោះតើមានទោសអ្វីឡើយ ។

៨៩៧. បើយកនាងនេះជាត្រើយ ស្មើយកកេសកើយ
លើព្រះអគ្គីត្បូងហោង ។

៨៩៨. មួយបាបបុរាណអញផង នាអញមករង
ទម្ងន់ចាប់ប្រតិសន្ធិ ។

៨៩៩. ក្នុងវង្សនាងកៃកេសី ឈ្មោះមាយាស្រី
កុហកមុសាវាទខ្លាត ។

៩០០. បើអញសោយរាជ្យជាក្សត្រ នេះហើយក៏នូវស្លាត់
ប្រយោជន៍កើតក្តីអន្តរាយ ។

៩០១. វិសត្រូវទៀតសោតមើលងាយ ពុំអោតឡើតម្តាយ
ចដើកបំបែកស្រុកទេស(1) ។

៩០២. អង្គអញសោតកុំប្រហែស រកទៀនសិល្បវិសេស
អាំពីលោកីយនេះហោង ។

៩០៣. ទើបនូវបាននាំរូបខ្ពស់ខ្ពង់ លះវៃលងវំលង
ចំណងចំណាំទេរា ។

៩០៤. ក្លូរ ថ្វាយបង្គំក្រាបលា នាងកោកល្យា
ទេពីពិសុទ្ធសីលវៃសយ ។

៩០៥. បំបាត់បាបវេរាភ័យ កំណើតក្បួនក្ស័យ
ចវៃប្រិអង្គអញបីស្រលះ ។

៩០៦. ហើយនូវសាងសីលសុទ្ធតបះ- កម្មកបនូវជំរះ
មន្ទិលអសោចបាបបង់ ។

៩០៧. អញនូវតាមដោយខ្លួនព្រះអង្គ ព្រះរាមស្តេចគង់
ស្ថានណាអញទៅស្ថាននោះ ។

៩០៨. សម្តេចព្រះភិរុតគិតស្មោះ នូវព្រះសុត្រុតស្ពោះ
ប្រាសាទនាងកោកល្យា ។

៩០៩. លុតជង្ឃង្គុនអង្គសិរសា ក្រុញក្រាបដ៏ក្រលា
មហាមណ្ឌលប្រថពី ។

៩១០. ឆ្វាប់ឆ្វាស់ព្រះលលាដដល់ដី វែលជាក់សិរសី
នោះព្រះចរណីក្រោមបុត ។

៩១១. ព្រះលលាដព្រះជង្ឃជ៏ជ្រត់ វែលព្រះភិរុត
ជាកេរតិគន្ធងស្អាមនៅ ។

៩១២. នាងកោកល្យាហាហោង ព្រះភិរុតឡើងទៅ
នូវព្រះសុត្រុតអនុជា ។

(1) RIB : pampaek nūv kul bhines

៤៧៩. ព្រះភិរុតរិះរឹងខ្លាស់សោះ - សាសល់ក្បួនណានោះ
ក៏ញ័រព្រះហឫទ័យក្រោធ ។

៤៨០. យកព្រះហស្តចុកព្រះស្រោត តាំងតីរពុំកោត
ពុំស្តាប់បន្ទូលនាងឡើយ ។

៤៨១. នេត្រច្រាលដែងដាលតតស្បើយ(1) ទះព្រះហស្តហើយ
បីដូចរន្ទះខ្ទារខ្ទរ ។

៤៨២. ក្រោធក្រោកដាលដោះឡើងឈរ ដូចនូវភ្លូកព្រះនគរ
តាំងព្រះសុមេរញាប់ញ័រ ។

៤៨៣. សាគរពុះពោរអស្ចារ្យ ព្រះភិរុតរាជខ្លាស់
កក្រើកអំពើកប្រែធពី ។

៤៨៤. ជានូវកាប់នាងកៃកេសី កាចកាឬកិណី
សម្លាប់ព្រះបាទទសរថ ។

៤៨៥. ឲ្យព្រះអង្គលុះសុគត ពោសតាំងនេះបទ
តែស្រីចណ្ឌាលរឹងមាត់ ។

៤៨៦. គិតគួរអញឯងកាប់កាត់ ជាពីរបីកំណាត់
តម្បូវឲ្យក្ស័យជន្មា ។

៤៨៧. គឺមោះបទជាមាតា ចិញ្ចឹមរក្សា
អញ្ជូរស់បទក្បីរគាត់ហោង ។

៤៨៨. រីទោសគាត់ធ្ងន់ដ៏កន្លង ក្រៃលែងស្រីផង
កំប្រែតប្រាកដលោកីយ ។

៤៨៩. នាធ្លាប់វិស័យជាស្រី នៅនឹងប្ដីសី
សប្បាយបរិបូរណ៍កូនចៅ ។

៤៩០. ស្ដេចដល់បណ្ដាលពោលជ្រៅ ឲ្យរំដួលក្ដៅ
ក្រៃក្រៅវិស័យក្សត្រី ។

៤៩១. ចណ្ឌាលកាចកាឬកិណី សល់សម្លាប់ប្ដី
ជាក្សត្រប្រសើរសុគត ។

៤៩២. បទបានពាក្យស្ដេចខ្លាមត់ ទើបព្រះទសរថ
ស្ដេចពុំរិះរេពាក្យសត្យ ។

៤៩៣. ពុំអាចឲ្យរាជសម្បត្តិ ព្រះរាមរៀមរត្ន
ដ៏ជាព្រះរាជបុត្រច្បង ។

៤៩៤. បទទើសពាល់ពាក្យពេចន៍ហោង ស្ដេចខ្វាសរាស្ត្រផង
ស៊ូរត់ទៅនៅនាព្រៃ ។

៤៩៥. ព្រះជនកសោតមហាទៀងព្រៃ លុះព្រះជន្មក្ស័យ
ពុំបង់ពាក្យសត្យមេត្រី ។

(1) MBN : netr crāl jrāp jruot it spoey
RIB : netr crāl ṭaeṅ ṭāl jā troey

៨៩៦. ចាបើនាងកៃកេសី នេះពុំស្រដី
នោះតើមានទោសអ្វីឡើយ ។

៨៩៧. បើយកនាងនេះជាត្រើយ ស្មើយកកេសកើយ
លើព្រះអង្គឪឡូវហោង ។

៨៩៨. មួយបាបបុរាណអញឯង នាអញមករង
ទម្ងន់ចាប់ប្រតិសន្ធិ ។

៨៩៩. ក្នុងដៃខ្ញុំនាងកៃកេសី នោះមាយាស្រី
កុហកមុសាវាទខ្លាត ។

៩០០. បើអញសោយរាជ្យជាក្សត្រ នេះហើយក៏នូវខ្លាត
ប្រយោជន៍កើតក្តីអន្តរាយ ។

៩០១. វីសត្រូវទៀតសោតមើលងាយ ពុំកោតជ្រិតឆ្ងាយ
ចចើកបំបែកស្រុកទេស(1) ។

៩០២. អង្គអញសោតកុំប្រហែស រកទៀនសិល្បវិសេស
អាំពីលោកីយនេះហោង ។

៩០៣. ទើបនូវបាននាំរូបខ្ពស់ខ្ពង លះវៃវងវិលវង
ចំណងចំណាំទេវា ។

៩០៤. ក្សត្រថ្វាយបង្គំក្រាបលា នាងកោកល្យា
ទេវីពិសុទ្ធសីលវិស័យ ។

៩០៥. បំបាត់បាបទេវាភ័យ កំណើតក្បុំណាក្ស័យ
ចវៃជ្រៃអង្គអញបីស្រលះ ។

៩០៦. ហើយនូវសាងសីលសុទ្ធតបះ- កម្មកបនូវជំរះ
មន្ទិលអសោចបាបបង់ ។

៩០៧. អញនូវតាមដោយដួងព្រះអង្គ ព្រះរាមស្ដេចគង់
ស្ថានណាអញទៅស្ថាននោះ ។

៩០៨. សម្ដេចព្រះភិរុតគិតស្មោះ នូវព្រះសុត្រុតខ្ពោះ
ច្រាសាទនាងកោកល្យា ។

៩០៩. លុតជង្ឃន្ទុនអង្គសិរសា ស្រួញក្រាបជ័ក្រលា
មហាមណ្ឌលប្រថពី ។

៩១០. ង្គាប់ង្គាល់ព្រះលលាដដល់ដី វិជលជាក់សិរសី
នោះព្រះធរណីក្រោមព្រិត ។

៩១១. ព្រះលលាដព្រះជង្ឃជ័ជ្រិត វិជលព្រះភិរុត
ជាកេរតិគន្លងស្នាមនៅ ។

៩១២. នាងកោកល្យាហាហៅ ព្រះភិរុតឡើងទៅ
នូវព្រះសុត្រុតអនុជា ។

(1) RIB : pampaek nūv kul bhines

៩១៣. នាងទ្រង់ព្រះកន្សែងសោកា ព្រះបាស្ដីប្រទា
ទិនទុបអង្គព្រះភិរុត ។

៩១៤. នាងឮញព្រះបាទទសរថ ពិលាបលុះលត់
រលាយរំសាយសោកសួរ ។

៩១៥. ក្លៀវតាំងទឹកនេត្រអាក់អួល ដង្ហើមខ្សឹកខ្សួល
ស្រក់ទឹកព្រះនេត្របិរលាម ។

៩១៦. នាងក្រាប់ដោយដំណើរព្រះរាម វត់ស្ដេចឲ្យតាម
ទៅឃាត់មិនឲ្យចេរចរ ។

៩១៧. អ្នកពុំវិលថ្កានព្រះនគរ ល្បើយលុះចេញចរ
ក៏ត្រេចព្រះព្រៃយាត្រា ។

៩១៨. ព្រះបាទទសរថភាជា សោកព្រះរាមា-
ធិរាជលុះស្ដេចសុគត ។

៩១៩. នាងក្រាយក្រាប់ព្រះភិរុត ដូចដើមពាក្យមត់
នាងកៃកេសីសូមពរ ។

៩២០. វរសិទ្ធិមុនីប្រើសារល អញ្ជើញព្រះភិរុតចរ
គូវព្រះសុត្រុតអនុជា ។

៩២១. មកលើកព្រះសពព្រះបិតា ព្រះអង្គអនិច្ចា
លុះសោយព្រះទិវង្គត ។

៩២២. នាងកៃកេសីឋកមត់ ប្រើក្រាប់ព្រះភិរុត
ថានូវរណ្ដាប់ប្រជិមា- ។

៩២៣. ភិសោកព្រះរាមភាជា . ល្អព្រះបិតា
នោះសីងម្ហូសាវាទទេ ។

៩២៤. នាងក្រាប់អស់សាជិតតទេ[1] ក្សិណានោះឯងឯ
ព្រះភិរុតរឹងក្រេវក្រោធក្រៃ ។

៩២៥. ដឹងដើមសារសព្វសម័យ ពាក្យពីនាងកៃ-
កេសីក៏ប្រើក្អើកល ។

៩២៦. ឯងនោះមហាមុនីនិមល មកថ្កានមណ្ឌល
ក្រាសាទនាងកោកល្យា ។

៩២៧. ព្រះភិរុតព្រះសុត្រុតអនុជា យល់វរសិទ្ធិមហា-
ឫសីមកសួរពត៌មាន ។

៩២៨. ទុបយំលើក្រាសាទស្ពាន លុះបន្ទោសោកស្រាន
ស្រែចសួរព្រះបាទគិសី ។

៩២៩. ក្រាយក្រាប់អស់ពាក្យពេចន៍ពី ព្រះជនកនរបតី
ក៏សោកព្រះរាមរាជបុត្រ ។

៩៣០. ជាវៃឃាព្រះស្រីជីភិរុត ព្រះជនកជាសុគត

(1) RIB : it dve

ដ៏ក្រៃឯណ្ដាប់ទៅ ហើយ ។

៩៣១. ពុំគួរយើងស្រែកស្រូងឡើយ បន្ធោសោកស្បើយ
សំរេចព្រះសពសំស្ការ ។

៩៣២. នាព្រះភិរុតព្រះសុត្រុតកុមារ ស្ដាប់ព្រះបន្ទូលសារ
មហាឫសីវរសិទ្ធិ ។

៩៣៣. ឲ្យរួចទូស្គរជ័យភេរី ដំ មុខមន្ត្រី
នូវពលសកលយោធា ។

៩៣៤. ប្រដាប់មណ្ឌបសុវណ្ណា ភាយរត្នរចនា
រូបរានពិមានត្រៃត្រឹង្ស ។

៩៣៥. លើខ្លួងព្រះសុមេរស្អឹមស្អឹង បរិពន្ធ[1] ជុំវិញ
សឹងរត្ននូវនពសុវណ្ណា ។

៩៣៦. ហើយយកព្រះសពព្រះបិតា ដ្កល់ធ្វើបូជា
ព្រះភ្លើងសំរេចសំស្ការ ។

៩៣៧. ស្រេចមហាឫសីមុនីអាទ្យ[2] ព្រាហ្មណ៍ព្រឹទ្ធគណាចារ្យ
មន្ត្រីសេនាដ៏អនេក ។

៩៣៨. នូវប្រដាប់មង្គលអតិរេក ប្រជមាភិសេក
ព្រះភិរុតឲ្យសោយរាជ្យវង ។

៩៣៩. ទម្ងន់ទ្វេក្រោមគ្រប់គ្រង សេពសោយរាជ្យស្នង
សម្ដេចព្រះវរបិតា ។

៩៤០. ព្រះភិរុតក្រោធទ្រង់ព្រះចិន្តា ឥតចិត្តចេតនា
នូវចង់សោយរាជសម្បត្តិ ។

៩៤១. ដូចអ្នកយកពិសពស់[3]ក្ដាត់ ដាក់ជិវ្ហាខ្វាត់
ស្មើរក្ស័យព្រះជន្មកាលនោះ ។

៩៤២. ស្ដេចទ្រង់ព្រះចិន្តាជាពោះ អញសោយរាជ្យផ្ដោះ
ស្នាលស្នងព្រះវរបិតា ។

៩៤៣. ដោយពាក្យអ្នកតំងនេះណា សឹងហៅបានហា
ដូចពាក្យនាងកៃកេសី ។

៩៤៤. លោកនឹងដល់សម្លាប់ប្ដី ឆ្មេះតើគាប់អ្វី
ក៏នឹងចូលចិត្តព្រមដង ។

៩៤៥. គួរព្រះរាមរាជបុត្រច្បង ស្ដេចសោយរាជ្យស្នង
សម្ដេចព្រះវរបិតា ។

(1) MBN : paribā
RIB : paribhaṇḍ
(2) RIB : munī āth
(3) RIB : bis bal

៩៤៦. លុះស្ថិតភាពនោះកាលណា ទើបយកអនុជា
ដំកល់ប្រគល់ភរិយារម្យ ។

៩៤៧. ហេតុចិត្តឧត្តាស[1] ចង់បំ- បែកជាពួកធំ
បង្កើតកោលាហលក្រៃ ។

៩៤៨. ព្រោះបើឲ្យអញសោយរាជ្យនៅឡ. ព្រះនគរនេះនៃ
អញទើបតាំងចង់ប្រាថ្នា ។

៩៤៩. អញនូវយកព្រះច័ន្ទទេវីថ្លា ទំលាយអគ្គទិភា
អញឃាំងឲ្យលុះអន្តរាយ ។

៩៥០. មួយសោតអញនូវតាមពោថ្វាយ បង្គំព្រះបាទនារាយ
ហើយសូមអញ្ជើញស្ដេចមក ។

៩៥១. ព្រោះបីព្រះរាមជ័ពន្លក ពុំវិលវិញមក
ប្រយោជន៍ប្រវេណីក្សត្រ ។

៩៥២. អញនូវបំរើប្រតិបត្តិ ព្រះបាទទៀមរត្ន
បីដូចព្រះលក្ស្មណ៍នោះហោង ។

៩៥៣. ឯមហាឫសីព្រាហ្មណ៍ជង ឯកមន្ត្រីផ្សង
វៃរងវិរៈតំរង់មហាក្សត្រ ។

៩៥៤. ពុំអាចនូវទូលទាំងឃាត់ ព្រះភិរុតខ្វល់ក្ដាត់
ប្រើព្រះសុត្រុតអនុជា ។

៩៥៥. ឲ្យទូងគោរីឃោសនា ផ្ដុំរាជយោធា
សេនាមុខមន្ត្រីជង ។

៩៥៦. ខុនគជកៀបគជផ្សរផ្ដង ខុនពាជីជង
គ្រឿងគ្រប់ប្រដាប់ភ្ជិតភ្ជង់ ។

៩៥៧. ខុនរថកៀបរថបីរយាង សោតសឹងគ្រាលាផ្លុង
ប្រដាប់សំភារៈរថរាយ ។

៩៥៨. ខុនពលធ្វើរជើងទាំងឡាយ ក្រោមគ្រាប់សព្វសាយ
សឹងសោមនស្សសាទរ ។

៩៥៩. ញូជាព្រះភិរុតនឹងជរ ទៅទូលព្រះភូធរ
វិលមកមណ្ឌលស្ថានស្ថិត ។

៩៦០. ដូចអ្នកយកទឹកអម្រឹត មកស្រោចស្រប់ចិត្ត
ត្រកាលត្រជាក់ធ្វើឲ្យក្រៃ ។

៩៦១. សោតសឹងព្រមព្រើសបាប្ញ័យ ហេតុក្ដីអាល័យ
អាណោះសម្ដេចអនុវតាធំ ។

៩៦២. ព្រះភិរុតព្រះសុត្រុតកុមារ ពាសពាក់ជងជា
សង្វារសំបកឈើជ្រង ។

(1) RIB : opās

៩៦៣. ប្រែប្រាណាបីរូបមានមាក់អង្គ ឫសីសិទ្ធពរពង្ស
ពិសេសពិសុទ្ធសីលា ។

៩៦៤. ឡើងលើរាជរថយាត្រា គគឹកដូចជា[1]
គេគោះទាំងរាជដ៏បុរី ។

៩៦៥. នាងកោកល្យាក្សត្រី នាងកៃកេសី
ប្រតីនូវនាងស្រមុត ។

៩៦៦. សឹងឡើងគង់លើរាជរថ តាមព្រះភិរុត
សន្ធឹកធារាធរណី ។

៩៦៧. អស់ភ្លេងភ្លាត់តូរ្យតន្ត្រីយ ត្រៃសំង្ខភេរី
រៀបរៀងដោយដងមាគ៌ា ។

៩៦៨. ស្ដេចទៅទាំងទុក្ខសោកា ស្ងួតព្រះភក្ត្រា
ឱភាគាន់តឹងរលួលក្រំ ។

៩៦៩. ស្ដេចប្រាមពុំឲ្យដំឌ្លុំ តន្ត្រីយសេពសម
ប្រគំបំរើឡើយហោង ។

៩៧០. លុះទៅដល់ព្រះបាទបង ឈេងភ្លេងភ្លាត់ផង
ដងរង្គបំរើព្រះអង្គ ។

៩៧១. រាជរថព្រះភិរុតស្ដេចគង់ ក្ដុល់ផ្តើងមាក់អង្គ
មណ្ឌលនៃព្រះចន្ទ្រា ។

៩៧២. អស់មុខមន្ត្រីសេនា ស្រីស្នំព្រៀបព្រា
រូបមានតាភាកាសធរ ។

៩៧៣. ស្ដេចចេញចាកញូរព្រះនគរ ពល់ក្រាស់វិករ
កក្រើកអំពើកប្រថពី ។

៩៧៤. ផ្ទាំផ្ទួយផុនអភ្ភេភគិនី ព្រះភិរុតនរបតី
នូវព្រះសុត្រុតយាត្រា ។

៩៧៥. ស្ដេចចរលុះស្បៀលសុរិយា ស្ដេចដាក់នៅនា
ឧទ្យានវៃឯលព្រះរៀមផ្ទុំ ។

៩៧៦. ស្ដេចលុតលើកករបីបង្គំ គក់ឱភាយំ
ស្រណោះព្រះរៀមដេស្សា ។

៩៧៧. លុះព្រឹកស្រាងស្រេចទិវា រំស្តងស្ដេចលេលា
ទៅដល់ឆ្នេរមហានទី ។

៩៧៨. សួរសព្ទសេនាសេនីយ រាជរថពាជី
នូវពលសកលយោធា ។

៩៧៩. សន្ធឹកត្រៃព្រឹក្សបញ្ចា ឆ្លាក់ឆ្លាយសេលា
មហានទីបីរលក ។

(1) RIB : dau jā

# កណ្ឌ ទី៩

៩៨០- ឯវៃនោះកុខ័នចេញមក ដោកបើកក្រៃដក
កំមើលទៅយល់យោធា ។

៩៨១- យល់អស់រាជរថអស្សពាហា គជសារសេនា
នូវរេពលពាលក្រាស់ក្រៃ ។

៩៨២- កុខ័នក្រោធញ័រឃាឫទ័យ គិតអញ្ជាស្រ័យ
ថានេះនាងកៃកេសី ។

៩៨៣- អភិសេកព្រះភិរុតជាត - សូររាជបុរី
បុរាណនៃស្រីអយុធ្យា ។

៩៨៤- នេះសមព្រះភិរុតរាជា នាំពលយោធា
មកតាមព្រះរាមនូវព្រះលក្ស ។

៩៨៥- លោកដែលជស្ដើមរាជ្យអ្នក បានត្រងរាស្ត្ររក្ស
ដោយពាក្យនាងកៃកេសី ។

៩៨៦- ស្ដេចពុំឃ្លានរាជបុរី ឡើយនាំទេពី
ជាបីនូវព្រះអនុជា ។

៩៨៧- មកនៅនាព្រៃបព្វតា ធ្វើតបះកម្មជា
ឫសីពិសេសសិទ្ធតារ ។

៩៨៨- ស្ដេចឡើយព្រះភិរុតនាំប - រិពារពលនិករ
មកតាមធ្វើគត់ព្រះអង្គ ។

៩៨៩- ពោះបីព្រះភិរុតនេះខ្ទង[1] - ពលមកត្រែចត្រង់
អញ្ជើញព្រះរាមនរបតី ។

(1) RIB : baṅs

៩៩០. វិលទៅសោយរាជ្យនាបុរី នោះអញមេត្រី
សំណោះសំណាលស្នូរសាន្ត ។

៩៩១. ស្ដីកបើភ្នេសភ្នើហៅបាន ដោះមករុករាន
បំពានតិឃាតបីព្រះអង្គ ។

៩៩២. អញនូវផ្លាញព្រះភិរុតប្លែងប្លង ឲ្យវិនាសបង់
ទាំងពលសកលយោធា ។

៩៩៣. ហើយអញយកព្រះភាមា ទៅសោយរាជ្យនា
ស្រីអយុធ្យាដ៏ប្រាកដ ។

៩៩៤. យល់បាទព្រះភិរុតរាជបុត្រ ព្រះបាទទសរថ
ក៏ធៀបសរអញបានឬ ។

៩៩៥. ក្នុងខ័នផ្ទុំបំពង់ឫស្សី រំពងទាំងនៃត្រៃ
អស់ពលប្រាំមួយម៉ឺនមក ។

៩៩៦. ឲ្យម្នុស្សទូកទាំងម៉ឺនសឹក ក្នុងនៃត្រៃហើយយក
នូវគ្រឿងអាវុធសស្ត្រា ។

៩៩៧. ធ្នូលជាំសព្វច្រកអទ្ធា ដោយភ្នែកគង្គា
បង្កប់នូវកិច្ចក្លំមក្លាត់(1) ។

៩៩៨. ប្រាប់ជាគ្នាយើងប្រយ័ត្ន អញនូវផ្លាញក្សត្រ
នេះឲ្យវិនាសអន្តរាយ ។

៩៩៩. ពោះទាំងទេពតាស្ដួគនាយ អញនូវបាញ់ឲ្យខ្ចាយ
ប្រល័យទាំងស្នួគ៏វិនាសបង់ ។

១០០០. ស្ដេចឲ្យព្រះរាមទេពទ្រង់ សំពកឈើគង់
ត្រមោចព្រះអនុជទេវី ។

១០០១. នេះបទនាងនៃកកេសី ជំណើមរាជ្យពី
ព្រះរាមមកឲ្យព្រះភិរុត ។

១០០២. អញនូវផ្លែងសរបីប្រាកដ ឲ្យខ្ចាត់ដល់សមុទ្រ
បង្ហើរទាំងពលយោធា ។

១០០៣. ក្នុងរ័នទីងខែងឯមហិមា រៀបពលត្រៀបត្រា
បណ្ដាក់ដោយភ្នែករទី ។

១០០៤. កាលនោះអង្គឯកមន្ត្រី ទូលព្រះនរបតី
ព្រះស្រីភិរុតរាជា ។

១០០៥. បពិត្រសូមព្រះចិន្ដា នាំយើងយាត្រា
មកដល់នគរនេះនៃ ។

១០០៦. មានប្រមាញ់មួយជាស្ដេចនៃត្រ ឈ្មោះក្នុងនៃត្រ
នូវឫទ្ធិតេជះបីនុការ ។

(1) RIB : cūr cāṃ sabv crak ādhvā
pan̊kap' atmā
pan̊kot hoey buon klaṃ klāt'

១០០៧- រីកម្លាំងគីតូគជសារ[1] ស្ទោះខ្លាំងពេញពល
មានពលប្រាំមួយម៉ឺនដៃ ។

១០០៨- កូវ័នខ្ពស់ធំស្មើមហាស្កុ ស្ទោះស្មើភ្នំនៃ
មហាមេរុរយោជន ។

១០០៩- កាលព្រះរៀមស្តេចដល់ស្ថាន នេះព្រះរៀមបាន
ជាមិត្រនឹងកូវ័ននោះ ។

១០១០- កូវ័នស្មើស្តុំពុងពោះ ចងចិត្តស្មើស្មោះ
សំឡាញ់សំលូតតតគ្គង ។

១០១១- ហើយកូវ័នឯងចម្លង ព្រះរាមស្តេចឆ្លង
លុះរួចទៅត្រើយខាងណា ។

១០១២- នេះតម្រូវព្រះអង្គយាត្រា នាំពលយោធា
ពលកងពាជីសារថី ។

១០១៣- បរិពារពាសពេញប្រឹថពី មកដល់នទី
ខិជនជាន ព្រះរៀមនេះតម្រូវ ។

១០១៤- ក្រៃងស្ថានស្តេចនាំពលព្យូហ មកដាសត្រូវ
នឹងព្រះរៀមរាជភាមា ។

១០១៥- ក្រៃងកូវ័នខឹងពុះពារ ការព្រះជេស្ឋា
ប្រយ័ត្ននឹងព្រះនរបតី ។

១០១៦- គាត់ពុំដឹងដើមមកនូវក្តី ជាតិជាមេត្រី
បង្គំព្រះរៀមក្សត្រិថ្លៃ ។

១០១៧- ព្រះភិរុតក្រាបព្រះហឫទ័យ ដឹងដើមធ្វើវៃព
ពន្លឺកនូវឫទ្ធិចេស្តា ។

១០១៨- ឯងនោះកូវ័នយាត្រា លុះឆ្នេរគង្គា
ប្រយោជន៍ទទួលសឹកសារ ។

១០១៩- មើលយល់អស់រាជបរិពារ គប់គាល់ក្រាស់ក្រាល
អនេកអនន្តជាសជា ។

១០២០- ព្រះភិរុតព្រះសុត្រុតជាតិជា ស្ទាប់ស្ទាត់ព្រះភក្ត្រ
ក៏ប្រួញពុំត្រើសរួសរាយ ។

១០២១- សោតសឹងទល់ទុក្ខសព្វសាយ ពិតពុំសប្បាយ
ទាំងពលរេរាជបរិពារ ។

១០២២- ព្រះភិរុតព្រះសុត្រុតកុមារ សឹងពាក់ជងជាធារ
សង្វារសំបកឈើទ្រង់ ។

១០២៣- កូវ័នសន្ធប់លុតជង្ឃ ស្រយាកអស់អង្គ
ក៏ធ្លាក់ធ្លុ កាំពីដៃ ។

(1) RIB : rī kamlāṃṅ git ṭă gajendr sār

១០២៤. ដាក់ជាព្រះភិរុតមកវៃ - ត្រើរកទៀមវៃថ្ងៃ
អាល័យសម្ដេចភាមា ។
១០២៥. ក្ខូខិនលុះឈាន់មាត់ជា អះអញស្មានជា
ព្រះភាមនូវព្រះជ៍ភិរុត ។
១០២៦. ស្ដេចខ្ញាល់សំដាគ្នាប៖ ព្រះដា៖៖សរេជ
ដោយពាក្យតាងកៃកេសី ។
១០២៧. អភិសេកព្រះភិរុតជាត - ស្ទូវភាជជ័យបុរី
ព្រះភាមព្រះទៀមខ្ញាល់យោង ។
១០២៨. ហើយព្រះភិរុតមោះមកប៉ង ជាសត្រូវផង
សម្ដេចនាភាយភាមា ។
១០២៩. តុំដឹងដើមព្រះភិរុតជា ឈ្មោះ៖ក្ខូវណា
គម្ពូវមកចាំង៖ក្ខូ៖ល់ ។
១០៣០. ក្ខូខ័នអត្យាស្រ័យយល់ សព្វប្រការកល
ដំណែាងដំណើរនោះផង ។
១០៣១. ជឿជាសុភាពតិតយោង ទើបក្ខូខ័នគ្គង
ថ្វាត់ថ្វាយបង្គំកាលនោះ ។
១០៣២. ព្រះភិរុតយល់ក្ខូខ័នស្មោះ មកថ្វាយបង្គំស្មោះ
សំលូតតិតតីហាឫទ័យ ។
១០៣៣. ស្ដែងស្ដេចលើកព្រះហស្ដាវៃថ្ងៃ នមសការធ្មើរវៃព្រ
វឹងហើយសំណោះស្នេហាស្និទ្ធ ។
១០៣៤. ក្ខូខ័ន៖ូលជាបពិត្រ នាស្ដេច៖ង់ក្រិត្យ
ព្រះក្រមតិសុទ្ធសីលា ។
១០៣៥. តីរអង្គព្រះលក្ស្មអនុជា សឹងប្រែប្រាណជា
មហាឫសីសុន្ទរ ។
១០៣៦. ហើយស្ដេចចេញចាកព្រះនគរ ត្រេចវៃព្រពនេចរ
មកជាក់ទ័ពទីវុគម ។
១០៣៧. នាំចាំង៖តីព្រះស្នំ បរិវារនារដំ
អនន្តអនេកពេកក្ដាត់ ។
១០៣៨. ស្ដេចពុំសោយភាជសម្បត្តិ បរិបូណ៌ជាក្សត្រ
អស់តិភពតារមយុត្យា ។
១០៣៩. ដឹងនោះព្រះភិរុតឆ្លើយថា ។ហាក្ខូខ័នបា
ដ៏ជាតស្ទូវស្ដេចវៃព្រ ។
១០៤០. នាព្រះភាម៖ពថ្លាវៃថ្ងៃ ភាជបុត្រប្ដូជាន
ស្ដេចពុំសោយភាជ្យក្សត្រភាស្ដ្រ ។
១០៤១. ម្ដេចឡើយអង្គអញ១ឃ្លាស[1] ណោភលុះប្រាណប្រាស

(1) RIB : upās

តាភយនរបតី ។

១០៤២. នេះឥឡូវអញបង់ដីបុរី ប្រយោជន៍យកសិរសី
មករង់ព្រះបាទារពិន្ទ(1) ។

១០៤៣. សូមអញ្ជើញសម្ដេចព្រះភូមិន្ទ ភជាធិបតិន្ទ្រ
នូវព្រះទេពីពន្ធិតា ។

១០៤៤. ទិលថ្កានស្រុកស្រីអយុធ្យា សេពសោយភក្សជា
តស្មូរកិត្តិលពង្សក្សត្រ ។

១០៤៥. ដងនោះកុវ័នអរក្កាត់ ក្រឹញក្រាបប្រណិប័ត
បង្គំក្រាបក្រោមបាទ ។

១០៤៦. សរសើរព្រះភិរុតថា ក្រោសវែលងលោភា
ឆន្ទា មោហោភ័យដង ។

១០៤៧. ពាក្យពិតទៀងឥតក្លង ដើរដោយនូវគន្លង
ព្រះធម្មអាប្បសត្យសញ្ញ ។

១០៤៨. នាស្ដេចមកយកគោរព ប្រតិបត្តិអង្គអ-
ភិវាទអញ្ជើញព្រះបង ។

១០៤៩. កាលព្រះរៀមស្ដេចយកក្លង អស់មហាឫសីផង
សឹងអរទទួលព្រះអង្គ ។

១០៥០. នេះឯងស្ថានដែលស្ដេចគង់ ហើយស្ដេចផ្ទុំក្នុង
អាស្រមស្រេចមួយរាត្រី(2) ។

១០៥១. លុះព្រឹកស្ដេចនាំព្រះទេពី ព្រះអនុជនរបតី
លាចេញចាកព្រះអាស្រម ។

១០៥២. ព្រះភិរុតក្រាបថ្វាយបង្គំ ស្ថានដែលស្ដេចផ្ទុំ
ក៏ញ័រព្រះអង្គពិចំប្រប់ ។

១០៥៣. ស្ដេចទ្រង់ព្រះកន្សែងសន្លប់ ឃើញស្ថានស្ងាល់ស្ងប់
អាណោះសម្ដេចព្រះចក្រី ។

១០៥៤. ស្ដេចផ្ទុំអស់ឯករាត្រី(3) មួយនៅនាទី
អាស្រមដែលព្រះជេដ្ឋា ។

១០៥៥. ព្រឹកស្រេចវិស្ដងស្ដេចលតលា សម្ដេចព្រះមហា-
ឥសីមុនីថ្វាយពរ ។

១០៥៦. កុវ័នក្រោមប្រើអស់ប- រិពារផ្លូងស្ទើងចរ
ទៅនាំនាវាសព្វព្រែក ។

១០៥៧. ទូកកាំងមួយម៉ឺនមីមក ពុំគ្រាន់ឡើយយក
អស់ទូកប្រមាញ់បរិពារ ។

(1) RIB : braḥ pād narabin
(2) RIB : āsram srap' muoy rātrī
(3) RIB : stec phdam̩ luḥ as' rātrī

១០៥៨- បានជាប្រាំបីកោដិក្រាស់ក្រាល(1) ខ្ជាន់ខ្ជាប់ទាំងនារ
មហានទីខ្ចរខ្ចាយ ។

១០៥៩- ជន់ជោរពេញពោរសព្វសាយ ជ្រាំងបាក់ធ្លាក់ធ្លាយ
ពន្លឹកពន្លូកបង្ហូរហៀរ ។

១០៦០- ចម្លងអស់ពលបរិវារ ពាជីគជសារ
នូវពលរថក្រាស់ក្រៃ ។

១០៦១- សព្ទកងរំពងព្រឹក្សព្រៃ លុះដល់អាស្រមនៃ
ព្រះភារទ្វាជឥសី ។

១០៦២- ទូលថ្វាយបង្គំព្រះមុនី សួរសព្វសេចក្ដី
អំពីព្រះរាមស្ដេចខ្វល់ ។

១០៦៣- ព្រះមុនីប្រាយប្រាប់អស់អាថិ ពាក្យពេចន៍សិបាល
ដំណឹងដំណើរព្រះភូធរ ។

១០៦៤- ស្រេចព្រះមុនីសាន្តសារ ព្រះបាញ្ញ័យអរ
នឹងព្រះភិរុតរាជា ។

១០៦៥- ឲ្យលៀងអស់ពលយោធា បំភុលភោជភោគ្គា
នូវក្បួនបំពេញពិធី ។

១០៦៦- បូជាក្នុងកើតជំណើ ទិដារសធី
តុំព្រានូវផ្អែតផ្អូនជិន ។

១០៦៧- ករក្រើកទៅដល់ព្រះតិន- ព្រៃសរិន្ទ
ត្រេកត្រាសបន្ទូលបញ្ជា ។

១០៦៨- ឲ្យអស់ទេវបុត្រទេវតា ទាំងទេពកញ្ញា
ចុះមកជួបជុំនិម្មិត ។

១០៦៩- គ្រឹះគ្រែគ្រប់គ្រឿងស្ពានស្ថិត សឹងរត្នពិចិត្រ
ប្រពៃព្រះពិស្ណុការធ្វើ ។

១០៧០- បង្អួររភ្លីស្គួតសាចលើ ទេសទិញនូវអំពើ
អំពីជោរជាលគង្គា ។

១០៧១- ត្រឡប់ផ្កាយផ្សេងៗទិសា គ្រឿងផ្ទិមពាស្ត្រា
អនេកអនន្តសព្វសាយ ។

១០៧២- គ្រាន់គ្រប់សព្វភស្ត្រទាំងឡាយ សឹងសុខសប្បាយ
ហំភលទិព្វទន់នៃបនិត្យ ។

១០៧៣- បាក់បានពិមានសួគ៌ស្ថិត ទាំងរស់ជីវិត
ពិតតុំរំលងរូបកាយ ។

១០៧៤- ទាំងអាហារទិព្វសួគ៌នាយ ភាជនាសរៀបរាយ
គ្រាន់គ្រប់ទាំងពលបរិវារ ។

(1) MBN : pān jāp tiko krās krāl

១០៧៥. ទាំងស្មៅតាដីគដសារ ធ្លាក់ពីកណ្ដាល
អាកាសពេញពាសប្រថពី ។

១០៧៦. ទោះក្របីគោសេះដំរី ដើរដេកឈរស៊ី
សឹងវ៉ែងពត្រអាលស្លាប់ស្គល់ ។

១០៧៧. ព្រះភិរុតផ្ទុំលើមណ្ឌល ទេវទិពនិម៌ល
បង្អស់ឯកភាត្រីត្រេក ។

១០៧៨. អស់ក្សត្រសេនាពលរេដក លក់លង់នូវដំណេក
ដំណែងទិព្វទន់សុខសល់ ។

១០៧៩. លុះព្រឹកព្រះភិរុតនិម៌ល តើនតឿនរេពល
សកលយោធាចេញចរ ។

១០៨០. នមស្ការមុនីនាថសាទរ ជំរើនឫទ្ធិពារ
សុរេចស្ដេចចរយាត្រា ។

១០៨១. សព្វសេះសារស្វរយោធា ភាជរថគជា
សន្ធឹកញាប់ញ័រប្រថពី ។

១០៨២. ល្បិតល្បូន់ដុយផង់ធូលី អាប់អស់ទិសទី
មណ្ឌលអាកាសស្លប់ស្នែង ។

១០៨៣. អឺងអរខ្ទាយខ្ទរក្ដល់ក្លែង លាន់ឮសព្ទសៃង
គគឹកគគុកដាសដេរ ។

១០៨៤. ពៅទៀបមណ្ឌលបរិវេណ៍ ព្រះគង់រូតម្ពីរ[1]
រលកសមុទ្របីរំដែង ។

១០៨៥. ពុះពោរបោកបែកផ្កាត្រែង មុខក្បួរស្លប់ស្នែង
សន្ធឹកដាភាឆរណី ។

១០៨៦. ព្រះលក្សណ៍លើកករអញ្ជលី ដាក់ដល់សិរសី
បង្គំទូលព្រះភាសា ។

១០៨៧. បពិត្រសូមព្រះករុណា ស្ដេចទ្រង់ចិន្ដា
នូវព្រះទិព្វញាណចក្រី ។

១០៨៨. នាព្រះភិរុតគ្រងរាជបុរី ឈ្មោះហៅព្រះស្រី-
ភិរុតពុំពេញចិត្តសោត ។

១០៨៩. ហេតុអ្វីព្រះភិរុតដ៏ពិរោធ រិះរកកលក្រោធ
ក៏នាំសេនាពលញ៉ូយា ។

១០៩០. មកតាមព្រះអង្គនេះតម្រូវ ប្រយោជន៍ជាសត្រូវ
ពិឃាតព្រះបាទដេស្លា ។

១០៩១. បពិត្រខ្ញុំសូមក្រាបលា លើងនឹងសេនា
យោធាភិរុតឫទ្ធិរឹង ។

(1) MBN : kuṃbhel
RIB : gambher

១០៩២. ស្ដេចបានវាក្យហើយប្រែប្រឹង ពាក្យពុំទំពឹង
រំពៃមិនមានមេត្តា ។

១០៩៣. នាព្រះអង្គជាជេដ្ឋា ស្ដេចពុំប្រាជ្ញា
ប្រកួតប្រយោជន៍រាជ្យរម្យ ។

១០៩៤. ចរចេញសាងសីលក្រឹត្យក្រម ភិក្ខុតរឹងទំងន់
មកតាមពិឃាតហេតុអ្វី ។

១០៩៥. ពោះព្រះភិក្ខុតរស់លោកិយ លុះបរលោកក្ដី
ពុំចៀសដំណៀលនិន្ទា ។

១០៩៦. ព្រះភិក្ខុតពុំរួចចតុរា- បាយបាបបទជា
មោហាអធម្មកម្មក្រៃ ។

១០៩៧. ព្រះភិក្ខុតពុំរួចពៃឯភ័យ សរសក្ដិសិទ្ធជ័យ
ប្រល័យវិនាសនេះតម្រូវ ។

១០៩៨. ខ្ញុំនូវផ្កាញអស្សុពាហពលព្យូហ គជរថបីត្រជួរ[1]
រួចភ្លើឯកល្បកើតដ៏ពិឃាត ។

១០៩៩. ឲ្យជាចំណីក្អែកត្មាត ក្ងៀលក្ងាត់ព្រោយព្រាត
ពាសពេញពាំងមហាទេហា ។

១១០០. លុះលាយឈាមតជអស្សុពាហ ឈាមគោមហិង្សា
នូវឈាមសេនាពលយុទ្ធ ។

១១០១. ពាំងឈាមព្រះសុគ្រិតនូវភិក្ខុត ជន់ជោររួសមុទ្រ
ស្រីមៃជាជលសាគរ[2] ។

១១០២. ព្រះលក្ស្មណ៍ទូលព្រះភូធរ ស្ដាយបិតាស្ដីសរ
ព្រះករកំទ្រង់កៅទណ្ឌ ។

១១០៣. ព្រះអង្គសឹកសៀតនូវព្រះខ័ន ពេជ្រព្រះករកាន់
សរសក្ដិគ្រឿងផ្ដាប់ថ្មីម្ហ ។

១១០៤. ដងនោះព្រះនារាយរាមា ឃាត់ព្រះអនុជា
បន្ទូលមធុរសារសព្ទ ។

១១០៥. ថាវៃហាលក្ស្មណ៍បាទូលស្ដាប់ បងបាននូវប្រាប់
ដោយច្បាប់ពីព្រេងដ៏បុរាណ ។

១១០៦. អស់ទេវតាប្ដូរតណាដ៏សន្ដាន យើងសោកសឹងមាន
ដ៏ណាប្រវេណីក្សត្រ ។

១១០៧. សោយរាជ្យរៀងមកច្រើនភ្លាត់ សោកសឹងប្រតិបត្តិ
នូវសត្យៈធម៌រៀងគាប់ ។

១១០៨. សឹងសោយរាជ្យដោយគំនាប់ ជនកច្បងច្បាប់
អណ្ដាប់អណ្ដោយអនុជា ។

(1) RIB : trajū
(2) RIB : sumeru jā jal sāgar

១១០៩. លោកពុំដែលដល់ហឹង្សា ប្រមាថពាធា
ផ្តើមដោយចិត្តចើកចង់ ។

១១១០. មួយសោតព្រះភិក្ខុភាជទ្រង់ សត្យធម៌ពេញពុង
បណ្ដូលផ្ដើមហឫទ័យ ។

១១១១. គាត់គំនាប់ធ្ងរធ្ងន់ក្រៃ ក្រាស់អធ្យាស្រ័យ
រូបបានសុមេរុដ៏គិរី ។

១១១២. អាចទប់ទល់ខ្យល់ពាំងព្រំបី ទិសបោកបក់ក្តី
ពុំអាចកម្រើកឡើយណា ។

១១១៣. ពោះបីនាងកៃកេសីជា ម្តាយឯងឫស្សា
នូវចង់បង្កើតទោសក្ការ ។

១១១៤. ពុំអាចញុះញង់ចេញបាន ព្រះភិក្ខុគាត់មាន
មនោពុំក្រោធឆន្ទា(1) ។

១១១៥. មួយសោតកាលយើងយាត្រា លះវៀងអយុធ្យា
មកនៅនាព្រៃពនេចរ ។

១១១៦. ព្រះភិក្ខុចេញចាកព្រះនគរ ហើយយើងចេញចរ
មកធ្វើតបះកម្មព្រត ។

១១១៧. ក្រែងក្រោយយើងនេះព្រះភិក្ខុ វិលមកបីធំហុត
សោយរាជ្យពិភពអយុធ្យា ។

១១១៨. ស្រេចហើយគោះគៀរសេនា មករកដេស្ណា
សំឡាញ់សំលូតចង់យល់ ។

១១១៩. បោលក្បួនធូរបាមើលកល អស់បរិវារពល
ដំណាក់ដំណែងនោះម្តេច ។

១១២០. បើជាសត្រូវកលកិច្ច នោះហើយបងម្ចាស់
ធ្វើឡើយឲ្យត្រូវដល់បា ។

១១២១. បងដូចសាគរដលសា ដន់ដោរពោរពា
លុះលត់លើអគ្គីគល់ ។

១១២២. ព្រះលក្ខណ៍ព្រះអនុជនិម៌ល ស្តាប់ព្រះទសពល
បន្ទូលមធុរសារសត្យ ។

១១២៣. លុតជង្ឃដាក់ធ្នូសរទ្វាត់ ក្រួញក្រាបប្រណិប័ត
បង្គំព្រះបាទដេស្ណា ។

១១២៤. ដឹងនោះព្រះភិក្ខុយាត្រា ទៅលុះបញ្ចា
អាស្រមព្រះបាទនរបតី ។

១១២៥. ដល់ដាក់ទ័ពព្យួបគិរី រៀបពលសេនី
នូវរាជសកលយោធា ។

(1) MBN : mano dhiro chandā

១១២៦. ស្រេចទើបព្រះភិរុតភជា ព្រះសុត្រុតយាត្រា
តែពីរព្រះអង្គទុរគត ។

១១២៧. ពានឡើងលើខ្ទងបព៌ត ត្រេចត្រង់អាស្រមបទ
ព្រះបាទនាភយភងា ។

១១២៨. ស្តេចយល់ពីរព្រះអនុជា ដោរជលនេត្រា
សស្រាក់អំភ្លាងដើរមក ។

១១២៩. សីងពាក់ជជាន្ទុរសំបក - ឈើប្រែប្រាណយក
គៀសជាតិសីសិទ្ធីពង្ស ។

១១៣០. ដើរដាក់សំលួតព្រះអង្គ អាក់ស្កួលបីរលង់
រលាមព្រះនេត្រជ្រួតជ្រាប ។

១១៣១. ព្រះភិរុតព្រះសុត្រុតក្រាប ក្រោមបាទជ័ស្រពាប
សន្លប់បាក់ហៀបមរណា ។

១១៣២. ស្តេចឱបអង្វែលអនុជា ដលនេត្រធារា
ល្អែងហូរលើព្រះបិដ្ឋី ។

១១៣៣. បាក់ដូចផ្លែករត្នជ័មណី ធ្លាក់លើរស្មី
សុពណ៌សុវិណ្ណជលកា (1) ។

១១៣៤. ស្តេចថ្នមបីព្រះអនុជា ក្បិតព្រះភក្ត្រា
លុះបានស្មារតីបង្គ ។

១១៣៥. ក្រាបក្រោមព្រះបាទជ័ឧត្តម សោកសោះខ្លួញយំ
ពិលាបសង្រេងខ្លួញជា ។

១១៣៦. ទុំខ្ញុំគិតស្មានជាប្រាស និរាសរូបរត្នព្រះភងា
នាភយភជរិងឫទ្ធ កាលណាកើតទ្រង់ធរណី ។

១១៣៧. ទភ័ព្វប្រាំប្រការក្រៃ ភ័ព្វមួយនៃចក្ខុន្ទ្រីយ
ភ្នែកខ្ញុំសោតត្រើសប្រស្រើ បានយល់ព្រះភក្ត្រនិម៌ល ។

១១៣៨. ភ័ព្វមួយនាសោតិ - ន្ទ្រីយទ្រង់ឥន្ទ្រីយសោតសល់
ស្រោតត្រេកវិញ្ញាណស្តល់ ឮព្រះសូរមធុរសារ ។

១១៣៩. ភ័ព្វមួយនាឃានិ - ន្ទ្រីយអចិន្ត្រៃយត្រកាល
នាសិកសោតគន្ធា ជុំសុគន្ធសុមាលា ។

១១៤០. ភ័ព្វមួយនាអង្គតិ - ន្ទ្រីយជិវ្ហាន្ទ្រីយជិវ្ហា
អណ្តាតជាលមុខា បានស្មេហាស្នងបន្ទូលថ្លៃ ។

១១៤១. ភ័ព្វមួយនាកាយិ - ន្ទ្រីយាចិន្ត្យាវិណ្ណស្រ័យ (2)
ខ្លួនខ្ញុំបានប្រសប់នៃ ព្រះបាទប្រសើរវិសេសសាន្ត ។

១១៤២. អស់ឥន្ទ្រីយប្រាំប្រការ កបនាយនោវិញ្ញាណ

(1) RIB : subarṇ suvaṇṇaracanā
(2) MBN : cantāvaṇṇāsrai
RIB : ciṇṇavaṇṇāsrăy

ដរាបទិដ្ឋីបាន　　　　បើកបរិបូណ៌ដ៏ព្រៃសង្ហា

១១៦៣-　ឯឯនោះព្រះបាទក្សត្រា　　　　ទាំងប្រាំអង្គា
　　　　បន្ទោទុក្ខសោកបីរំលត់ ។

១១៦៤-　ព្រះរៀមត្រាសដាវៃហាភិរុត　　　　ចៅសុគ្រុតទ្រង់ព្រាត
　　　　ភៀសដិក្សសីសិទ្ធីពារ ។

១១៦៥-　ប្អាអាចគោះកៀរអស់ប-　　　　រិពារពលនិករ
　　　　មកតាមរករៀមនេះតិប្បូវ ។

១១៦៦-　បងប្រាវរជ្ជក្រៃឯរាជសត្រូវ　　　　បៀតបៀនព្រះវុ-
　　　　ធរាភជិតិសេសសុន្ទរ ។

១១៦៧-　ស្ដេចប្អាលះវៃងព្រះនគរ　　　　ឃោះបង់ព្រះវិរ-
　　　　បិតាធិរាជធិបតី ។

១១៦៨-　ឃួយព្រះកោកល្យាណី　　　　នាងកៃកេសី
　　　　នូវនាងស្រីមុតកល្យាណា ។

១១៦៩-　ញាំងក្សត្រស្នេហាស្និទ្ធក្បួមក្បាន្ត　　　　ឬព្រះអង្គមាន
　　　　ដំរាភោគាញ្ញាធី ។

១១៧០-　ឯឯនោះព្រះភិរុតអភី-　　　　វាទវរវន្ទី
　　　　បង្គំប្រណាម្យទូលស្នង ។

១១៧១-　អាក់អួលខ្សឹកខ្សួលសួរសង　　　　ទ្រង់ព្រះកន្សែងផង
　　　　ព្រះនេត្ររូបានភោហិណី ។

១១៧២-　ទូលថាបពិត្រព្រះចក្រី　　　　រីព្រះនរបតី
　　　　ដ៏ជាព្រះវិរភជបិតា ។

១១៧៣-　កាលក្រោយព្រះរៀមយាត្រា　　　　លះវៃងអយុធ្យា
　　　　ស្ដេចត្រេចព្រះព្រៃពនេចរ ។

១១៧៤-　ព្រះបាទព្រះបិតាភូធរ　　　　សោះសោកគក់គរ
　　　　ទ្រះសង្រៀងឥតស្បើយ ។

១១៧៥-　ព្រះអង្គសុគតលុះដល់ត្រើយ　　　　ប្រិទ្ធូវទៅហើយ
　　　　សំរេចព្រះជន្មអនិច្ចា ។

១១៧៦-　ក្សិណានោះព្រះបាទភរតា　　　　ជ្រាបថាព្រះបិតា-
　　　　ធិរាជស្ដែងស្ដេចសុគត ។

១១៧៧-　ព្រះហឫទ័យញ័របីរន្ធត់　　　　ពុំអាចបីទូវអស់ (1)
　　　　សោកលុះសន្លប់ប្រះប្រាណា ។

១១៧៨-　ទាំងព្រះទេពីកល្យាណា　　　　នូវព្រះលក្ស្មណ៍ព្រោសប្រាណា
　　　　សន្លប់លើគ្នាឯបញ្ចា ។

១១៧៩-　ឯឯនោះនាងកោកល្យា　　　　នាងស្រីមុតសោភា

(1) RIB : buṃ āc ṭoem at'

នាងកៃកេសីក្សត្រី ។

១១៦០- នាំអស់បរិវារសេនី ឡើងលើគិរី
អាស្រមព្រះបាទភរតា ។

១១៦១- ផ្ទូលឱបក្រសោបបុត្រថ្លា សឹងសោយសោកា
សន្លប់លើខ្នងគិរី ។

១១៦២- អស់អមាត្យមុខមន្ត្រី បរិវារប្រុសស្រី
អនេកអនន្តគណនា ។

១១៦៣- សឹងសោកគគក់គរនិភា សន្លប់លើបត្ថា
ននៀលបំរះប្រែះប្រាណា ។

១១៦៤- លល់លុះភ្ញាក់ស្មារតីបាន បន្ទោសោកស្រាន
ក្សត្រក្សាន្តក្សួរគង់តិតឃ្លាង ។

១១៦៥- ទាំងទេពីមុនីឫសីផង ទេពលមីងកង
ជុំមុខមន្ត្រីរីករវ ។

១១៦៦- សឹងលុតសឹងលើកទសករ បង្គំព្រះភូធរ
នាភាយភរតាវរវង្ស ។

១១៦៧- ទើបព្រះភិរុតភាជនិនអង្គ លើកអញ្ជលីផ្គង់
បង្គំព្រះរៀមធិបតី ។

១១៦៨- ក្រាបទូលអញ្ជើញព្រះចក្រី វិលឋានព្រះបុរី
បុរាណស្រីអយុធ្យា ។

១១៦៩- សេពសោយរាជ្យស្នងព្រះបិតា គ្រងរាស្ត្រជ័ប្រជា
រង្គាភិសេពជ័យមណ្ឌល ។

១១៧០- នេះតម្បូវរាស្ត្រផងទាំងស្កល់ កើតកោលាហល
បោត្យក្រោសព្រះបាទជេស្ឋា[1] ។

១១៧១- សូមទានសូមថ្វាយព្រះមេត្តា កុំផងទោសា
យកទោសនាងកៃកេសី ។

១១៧២- បទគាត់កាចកាប្បកិណី ទើបព្រះចក្រី
ស្តេចខ្វាល់ចេញចោលព្រះនគរ ។

១១៧៣- លុះវេលាលះព្រះវរ- បិតាជល់មរ
ព្រោះសោកព្រះអង្គឯងណា ។

១១៧៤- ដឹងនោះព្រះនាភាយភរតា បន្ទូលសារសត្យា
សំណោះចាំហោព្រះភិរុត ។

១១៧៥- នាព្រះបិតាសុគត ក្បួយព្រះជន្មបទ
ព្រះអង្គតាំងបង់ពាក្យសត្យ ។

១១៧៦- ស្តេចនូវឲ្យបាសោយសម្បត្តិ ស្តេចឡើយបាកាត់
ព្រះស្បូរបន្ទូលប្តេជ្ញា ។

(1) RIB : pañrās nirās jesṭhā

១១៧៧. បើបងសោយរាជ្យមុនបា បង់ព្រះសត្យា
សម្ដេចព្រះជិនករនរបតី ។

១១៧៨. ធូរបារីងត្រងជ័បុរី មណ្ឌលធានី
នគរស្រីអយុធ្យា ។

១១៧៩. ឲ្យគង់បន្ទូលដេជ្ជា ព្រះវរបិតា
ដោយសត្យធម៌ព្រះវិណាង ។

១១៨០. បើបាចង់ប្រណិប័តបង បារិលទៅគ្រង
មហានគរអយុធ្យា ។

១១៨១. បាយកសុពណ៌បាត នេះទៅទុកនា
សំរាប់បន្តុំស្ពានស្ថិត ។

១១៨២. ហើយបារក្សាប្រណិប័ត ធ្វើដោយក្រមក្រឹត្យ
ធំទើនមង្គលសួស្ដី ។

១១៨៣. បងនូវធ្វើតបៈការវុឌ្ឍី ដោយក្រមព្រះមុនី
លុះប្អូនដិណ្ដាប់ឆ្នាំណា ។

១១៨៤. ហើយបងវឹងវិលលេលា ឋានស្រីអយុធ្យា
ពិភពបុរីត្រាណត្រើយ ។

១១៨៥. ស្ដេចបានបន្ទូលស្រេចហើយ ពិតពុំលង់ឡើយ
ស្ដេចដោះសុពណ៌បាត ។

១១៨៦. ឲ្យព្រះភិរុតរាជអនុជា ទូលទុកសិរសា
ពិណាបស្រណោះព្រះភូធរ ។

១១៨៧. ស្រេចហើយក្រាបលាចេរចរ វិលឋានព្រះនគរ
បុរីស្រីអយុធ្យា ។

# កណ្ឌ ទី១០

១១៨៨. ដីឯនោះនាភយភាមា ស្ដេចទ្រង់ព្រះចិន្ដា
នឹងព្រះអនុជនូវទេពី ។

១១៨៩. ថាយើងនៅមណ្ឌលទី ចិត្រកូដគិរី
នេះទៀបអយុធ្យាព្រះនគរ ។

១១៩០. ក្រែងព្រះភិរុតនាំប- រិពារមកអង្វរ
សំបូងសំរូងអញបង ។

១១៩១. ខិតខំឲ្យអញទៅគ្រង រាស្ត្រពិភពស្នង
សម្ដេចព្រះវរបិតា ។

១១៩២. ឈ្មោះគួរយើងជាវេលា លះវៃងបញ្ចា
ទៅរកទីស្ថានទុរគម ។

១១៩៣. អញនូវធ្វើតបះការក្រម សាងសីលបីសន្សំ
វិវេកចំរើនសាស្ត្រា ។

១១៩៤. ព្រះអង្គទ្រើសទ្រង់ព្រះចិន្ដា ស្រេចនាំព្រះជាយា
នូវព្រះអនុជសារពេជ្ញ ។

១១៩៥. ជីឯនោះព្រះមហាក្សត្រស្ដេច ទាំងបីអង្គស្រេច
កណ្ដាលព្រៃក្បែរព្រៃអង្វា ។

១១៩៦. ក្បែរណានោះមានយក្សមួយណា ឈ្មោះវៃស្វងប្រើកា
ប្រហារប្រហ័ស(1) ខ្ទីខ្ទាន ។

១១៩៧. នាក្នុងព្រៃស្មគ៌ពានស្ថាន ស្រេចត្រង់ហោមពាន
ដំណៃដដំណើរសិហានាទ ។

(1) MBN : prahā prahāp'
RIB : prahār prahāt'

១១៩៨. យក្សនោះនាមឈ្មោះពិភេក សម្ដេង[1] គ្រឹមគ្រាត
គាំភាមគាំរោះសោះសា ។

១១៩៩. ករការស្មូល[2] សក្តិថ្លៃងថ្លា ភាងរូបពិក្រា
ក្រតើនក្រមួសសោតសល់ ។

១២០០. ចាប់សេះសិង្ហសីហាខ្លាឃ្មុំ ចាប់ព្យាឃ្រប្រែកដងសល់
គិឃាតអម្រឹតភោគ្គភក្ស[3] ។

១២០១. ពារព្រៃត្រីកូដបែកបាក់ សព្វសត្វបីអនម៉ិ
អនេកនូវកើតការភ័យ ។

១២០២. ដំណើរយក្សយាដ៏ឫទ្ធិក្រៃ ឬ មិនិរភ័យ
កក្រកកាំងព្រៃត្រីកូដ ។

១២០៣. ដីងចាំងរៀងបើលចាក់ ចេញចរយាត្រា
ប្រទះសម្ដេចកូជរ ។

១២០៤. ទៀបអាស្រមព្រៃមុនីសរ សាងសីលដ៏បវរ
ពិសុទ្ធសន្សំបារមី ។

១២០៥. ឯងនោះពិភេកដ៏អប្រិយ យល់ព្រះទេពី
ពិសេសពិសុទ្ធសុន្ទរ ។

១២០៦. ពិភេកតិរច្ឆត្រេកអរ មិតចាំងថាឯករ
មមិចមមៀវបោយរៃ ។

១២០៧. ស្មុះស្មៃងបីក្រញែងខ្លួនរៃន ញ័រក្រុងហាប្ញថ័យ
ប៉ះធុកប៉ះបបីលលាម ។

១២០៨. អញហោងហៅពិភេកនគ្រាម[4] ត្រេចធូលមកតាម
ដំរីរមាសស្លៀងខ្លា ។

១២០៩. អញបុត្រព្រះកាលដ៏មហា វាកតេងអញជា
ក្រុងទណ្ឌការញៀពន ។

១២១០. អញមានដ៏តេជះបុណ្យ គប្បូវណាភលន់
ប្រៃះដ៏តីងតីរហោង ។

១២១១. យក្សចារហៅបស្វីដង ពីងសោតសិរចង
ដងជាបីដើរគតព្រែង ។

១២១២. ព្រៃនេះខរឲ្យអញលេង ភរិយាតីងឯង
អញនឹងនូវយកតុំវៃលង ។

១២១៣. ប្រូងពីងអញពុះនូវសំពែង ឲ្យទេពតាដងស្រៀង

(1) RIB : ṛddhi riṅ
(2) RIB : mūl
(3) RIB : cāp' byaggh pī racal'
kă cāp' gajendr bhog bhăks
(4) MBN : nattagrām
RIB : nuttagrām

អំណាចនៃអញ្ញមហិមា ។

១២១៤- តិភងពោលពាក្យវាចា ធូលដក់សីតា
ទេពីតីព្រះនរបតី ។

១២១៥- ពៀងពារយកមកដល់ទី អភិឯងឥតបី
នានឹងផ្កាថ្លៃងឧបមា(1) ។

១២១៦- ឯងនោះព្រះនាភយភរា ទ្រង់ព្រះក្រោធា
បីដូចភ្លើងដុតនៃអគ្គី ។

១២១៧- ស្រេចស្ដេចដាក់ព្រាតពិធី ហើយព្រះចក្រី
ក៏ទ្រង់កោះខ្លោសរថ្លា ។

១២១៨- ក្បួនណានោះព្រះលក្ស្មណ៍អនុជា ទូលព្រះជេដ្ឋា
ធិភាជសូមសុំព្រះពរ ។

១២១៩- ខ្ញុំសូមលាលាយកវរ- ជាយាត្រាយប-
រមនាថបពិត្រនេះតទ្បូវ ។

១២២០- ទូលស្រេចស្ដេចទ្រង់ឫទ្ធិឆ្កួ សរសក្តិព្រះភូ-
ចរេន្ទ្រ ធិភាជនោះក៏ទ្រង់ ។

១២២១- តោះកាំជាញជ័យរឿណារង្គ យក្សាបីទ្រនង់
ដំនាញដំនះមហិមា ។

១២២២- រត់ធូលង្កានព្រះអនុជា ដូចកលបត្ថតា
ទាំងពីរប្រទះប្រតិពល ។

១២២៣- ដូចព្រះពាយពាតបោកបក់ដល- សាសាត់ជោមដល់
រលករលុបពសុធា ។

១២២៤- ព្រះអនុជធូលយុទ្ធយក្សា យក្សសោតមហិមា
ក្រពាក្រទូសពាស់ខែង(2) ។

១២២៥- ស្មុះធូលជាប់ព្រះស្ដេចថ្លៃង សភាសំដែង
សំញែងនូវតេជោជ័យ ។

១២២៦- ឯងនោះព្រះរាមឫទ្ធិក្រៃ យល់ព្រះអនុជនៃ
ប្រយុទ្ធនូវយក្សដាក់ដើរ ។

១២២៧- ទើបព្រះនរនាថជីប្រសើរ យល់ព្រះអនុជស្មើរ
ក៏ថ្លៃងសភាសរដ្ឋល ។

១២២៨- ព្រះធូលចាប់យក្សាថ្លៃ យក្សយុទ្ធប្រែប្រួល
បំណាងនឹងចាប់ព្រះចក្រី ។

១២២៩- យក្សការកាន់ស្ទូលជ័យស្រី ធូលចាប់ព្រះចក្រី
ត្រវីព្រះខ័នវាត់វាយ ។

(1) Stance mal imprimée, illisible dans RIB ; reconstituée d'après la leçon de MBN.
(2) MBN : kradā kradūs khās khaeṅ

១២៣០. យក្សនឹងអនុជនាថនាភាយ(1) រំជួលពសុធាធ្លាយ
កម្លាំងពន្លឹកយុទ្ធក្រៃ ។

១២៣១. ស្តេចដេបសិល្បសរជ័យវិជ័យ ផ្លែងផ្លាញក្បាលក្ស័យ
ពិរាធក៏ដួលដីធារា ។

១២៣២. ធ្លាក់ត្រីក្បូវត្រៃបែកបញ្ចា អស់ទេពគិរិន្ទ្រា
ស្តុតិវិជ័យថ្វាយពរ ។

១២៣៣. ស្តេចផ្តួលពិរាធដ៏មារ ដោយតេជះសរ
ស្រេចដុតអសុរធាបី ។

១២៣៤. ព្រះអង្គព្រះអនុជទេពី គង់ក្រឹត្យប្រក្រតី
នៅទណ្ឌការណ្យពាន ។

១២៣៥. ព្រះលក្សគិតខ្លួនប្រជុំជួន បើបង់បញ្ញាក្នុង
រំលាបអស់អង្គរូបា ។

១២៣៦. លើកអញ្ជលីទូលវិរធា ខ្ញុំសូមក្រាបលា
បពិត្រព្រះរៀមទ្រង់ធម្ម ។

១២៣៧. ខ្ញុំទៅធ្វើតបះដោយមាំ ក្រៃពេទសាស្ត្រា
ភិនេស្រុមតសីដង ។

១២៣៨. ព្រះរាមបន្ទូលវិងស្នង អះរៃងធ្លាត់នាក់ឯង
តប្បវិស្តេចហោងធ្លាពៅឯកអាត្មា ។

១២៣៩. អះប្អូននូវរៀមអ្នកដូចឆាយា វីរៀមបង់ធ្លា
អនុជអនាថសោកសោត ។

១២៤០. ព្រះរាមទល់ទុក្ខសែនកោដិ ដាបដួយដ័យដោត
ព្រះទ័យតតឯសាទរ ។

១២៤១. ព្រះលក្សលុះព្រឹក្សាករ កាន់ខ័នដ៏យឈរ
បវរប៉ងអធិស្ឋាន ។

១២៤២. ដោយក្រមតសីស្នាធិដ្ឋាន ដបហោមពិធីញាណ
បង្គំប្រណិប័តនិរន្តរ ។

១២៤៣. បក្សីនាំដណាករ ថ្វាត់ថ្វាយអស់វិរ-
វិសុទ្ធសីលឧបេក្ខា ។

១២៤៤. ឯងនោះអនុជអសុរិន្ទ្រា ឈ្មោះសូរបនខា
ដំណោកដំណើរពនេចរ ។

១២៤៥. ដួងលឿនដល់មហាសាគរ ដើរដល់ក្រុងខរ
បង្គំសំណោះភក្តី ។

១២៤៦. ខ្ញុំឮពីព្រះឆត្រី មានព្រះមហេសី
ព្រះអង្គអនុជតីរអង្គ ។

(1) MBN : anuj nāth saranrāy

១៧៤៧. ហើយជាប្រែរូបបីបញ្ចូល ឲ្យព្រះអនុជទ្រង់
ជាភជងទេពីស្នេហាស្និទ្ធ ។
១៧៤៨. ស្រេចត្រិះប្រែរូបាក្រឹត[1] ពន្រាយជ័ពិចិត្រ
ដូចស្រីសុភាង្គណនា[2] ។
១៧៤៩. ដើរត្រេចព្រៃពនបព្វតា ដល់ស្ពានភោ-
ជិភងហើយស្លាប់អស់អង្គ ។
១៧៥០. រីឯសិតសក់ខាត់ជាត់ជង់ ចូលទៀបស្ដេចគង់
គន្លងគន្លងក្រោយគរ ។
១៧៥១. នោះទើបព្រះបាទភូធរ យល់អសុរីចរ
បីណាងចំណាប់ស្នេហា ។
១៧៥២. ព្រះបន្ទូលថាស្រីសោភា នោះមេគ្រាថ្លា
ប្រយោជន៍មេមកនេះឥឡូវ ។
១៧៥៣. នោះអសុរីភងទូទូ ទូលថ្លែងព្រះភូ-
ធរនូវសិងឯអាត្មា ។
១៧៥៤. ខ្ញុំជាប្អូនក្រុងភពណា- សូរសោយលង្កា
យសាធិភជជ័ពិពណ៌ ។
១៧៥៥. បងមួយឈ្មោះក្រុងកុម្ភការ បងមួយចេះធមិ
ហៅឈ្មោះពិភេកហោរា ។
១៧៥៦. ត្រិះរិះគិតនូវអាពាហ- ពិពាហ៍សិងស្លាតស្លា
កង្វល់នៃការក្នុងក្រោម ។
១៧៥៧. នោះទេពាពង្សទ្រង់សោម ឆាយាតិងល្អឯលោម
អញតាំងត្រេកអរដោយចិត្ត ។
១៧៥៨. ខ្ញុំៗព្រះពីរជ័បពិត្រ ខ្ញុំពេញចិត្តគិត
ព្រះអង្គហាក់ដូចៗយល់ ។
១៧៥៩. នោះទេពីព្រះត្រោចដល់ ជំនុំខ្ញុំទល់
ជំណាំសម្ដេចទេវី ។
១៧៦០. វែងព្រះបាទព្រះនរបតី យកខ្ញុំជាស្រី
ព្រះស្នំសម្ដេចភាមា ។
១៧៦១. ឯឯនោះព្រះរាមក្សត្រា បើកបន្ទូលថា
វៃហាមេមានរូបជ័ប្រពៃ ។
១៧៦២. អង្គអញឥឡូវនេះនៃ ឃ្លាតឃាតសង្ស័យ
អំពល់នឹងភរិយាហើយ ។
១៧៦៣. តាំងនៅស្រលះទេឡើយ ដោយអញគិតហើយ[3]

(1) RIB : rūpākrịty
(2) MBN : ṭūc srī surāṅ gannār
(3) RIB : ṭoy aṅ mān hoey

ព្រះលក្ស្មណ៍អញនោះហោង ។

១២៦៤. កម្លោះឥតគូស្នេហាស្នង ត្រូវឲ្យគេគ្រង
រូបមេជាស្រីសោភា ។

១២៦៥. យល់ភ័ក្ត្រព្រះលក្ស្មណ៍ស្ដេចប្រា- កដបានមេជា
ទេពីប្រពាន់ត្រឹងហោង (1) ។

១២៦៦. ទើបសូរបនខាឆ្លើយស្នង ណាព្រះដោយដង
គិរីត្រែងស្ដោះនរបតី ។

១២៦៧. លុះឡើបអាស្រមព្រះឥសី បង្ហើរូបនូវឫទ្ធិ
អំពើអំពើកអស់អង្គ ។

១២៦៨. ដើរដល់ស្រេចលុតជង្គញ្ញដង្ហែ ករកោមលង្គង់
បង្គុំប្រណម្យទសពល ។

១២៦៩. ទូលថ្លែងថាខ្ញុំបានដល់ ស្ថាននេះខ្ញុំយល់
ជាភ័ក្ត្រខ្ញុំឥតគណនា ។

១២៧០. ខ្ញុំៗព្រះរៀមភាសា បានភងសីតា
បំរើព្រះរៀមស្គាល់អង្គ ។

១២៧១. ខ្ញុំៗព្រះអង្គឯកអង្គ ខ្ញុំគិតខ្ញុំចង់
សម្បត្តិនៃទេពខ្ញុំបំង ។

១២៧២. ទោះព្រះករុណាខ្ញុំហោង ភងនោះព្រះដ៏គ្រង
ទម្ងន់ត្រៃលោកាករ ។

១២៧៣. ព្រះលក្ស្មណ៍ឆ្លើយមិនសាទរ អញឥតចិត្តអារ
នូវភងទេពីស្រីស្ដី ។

១២៧៤. អញសុខសាងសីលភិនេស្រ្កម ដូចសុត្តវាសព្រហ្ម
មហាវិសុទ្ធសីលក្រឹត្យ ។

១២៧៥. តាំងថ្កានព្រះរាមដ៏បពិត្រ ស្ដេចស្គាល់ព្រះចរិត
វិសេសដ៏ត្រង់ចរណី ។

១២៧៦. សីតាជាភងទេពី តាំងជាទុតិយ-
ទេពីអណ្ដាប់សោតហោង ។

១២៧៧. ទើបសូរបនខាសារសង ណាព្រះដោយដង
បីលុះសម្ដេចរាមា ។

១២៧៨. ទូលថ្លែងដើមព្រះអនុជា កុំយកសារណា
និមន្តនៃអញខ្ញុំឡើយ ។

១២៧៩. ស្ថានជាព្រះអនុជយកហើយ ឥឡូវខ្ញុំឥតត្រើយ
មិនត្រៃនឹងព្រះអង្គឯង ។

១២៨០. ព្រះរាមព្រះបាទវ័យល្បែង ឃ្លាមេតីព្រោង
បីហោអ្នកសាងចរិយា ។

(1) RIB : braḥ bīr prabandh trek hoṅ

១៧៨១. ទោះបីអ្នកមានប្រាថ្នា (1) និយន្តម្តងនោះណា
មិនគួរបីអ្នកយកមក ។

១៧៨២. គួរមេទៅជាពីរវិត (2) មេថ្លែងដោយពុត
ចំណាស់នៃអ្នកប្រោសមេ ។

១៧៨៣. នោះសួរបនខាដើរល្វេ វិលវិញក្រោយកែ
ដល់ព្រះអនុជលោតយោង ។

១៧៨៤. ទូលថាខ្ញុំមកនេះម្តង យកខ្លួនស្លាប់ផង
នៅព្រះបាទពុំឃ្លាតឃ្លា ។

១៧៨៥. ទោះព្រះពុំយកខ្ញុំជា ភរិយាខ្ញុំស្វា -
មីយកព្រះជាប្តីឯង ។

១៧៨៦. ព្រះលក្ស្មណ៍ក្រេវក្រោធគគក្រែង ឈេះយក្សបីប្រវែង
ប្រលោមល្អមលោមតណ្ហា ។

១៧៨៧. ទើបព្រះខ័នជ័យពេជ្រថ្លា ចាប់សួរបនខា
ក៏ជាន់កណ្តាលប្រថពី ។

១៧៨៨. ស្តេចនឹងកាត់កោរកេសី អសុរស្រែកប្រថពី
កក្រើកអំពើកពសុធា ។

១៧៨៩. ក្បុលាប្រែប្រឹងប្រាណរូបា ក្រៀសជាយក្សា
សំញៀងនូវយក្សអសនី ។

១៧៩០. ស្រែកពោលពីព្រះនរបតី ឮលុះដល់បុរី
នាទណ្ឌការញៀពាន ។

១៧៩១. សួរបនខាស្រែកបីជន្លន់ ភរត់បីរលន់
រលះរលំងខាស់ខំ ។

១៧៩២. ខរឮសួរបនខាយំ ខរក្រោធជាដំ
ភេរីរន្ទះ (3) យោធា ។

១៧៩៣. ប្រើទូតថាជាយអសុរពាហ៍ យក្សសួរបនខា
ឲ្យដឹងប្រការនោះផង ។

១៧៩៤. ទូតទៅនូវកំសាំងបោះជ្រូង ដល់ដូចបំណង
ក៏យល់នៃសួរបនខា ។

១៧៩៥. យល់រូបអាស្រូវចោរថ្នា បង់កេរតិមេធា
កាច់ខ្នាស់កាច់យសបងប្អូន ។

១៧៩៦. ឯអត្តិការនោះស្លុង ខាស់ខំលលូន
ទូតយល់អាណិតសោកា ។

១៧៩៧. យំភ្លាងលើកសួរបនខា ដាក់លើអសុរពាហ៍

(1) RIB : doḥ pī mān anak prāthnā
(2) MBN : vudh
RIB : vutt
(3) RIB : randaḥ

បីលុះនគរនោះណា ។

១២៩៨- លុះលើស្ថានរាជអស្សពាហ[1] អស្សូររាជកញ្ញា
ក៏ឲ្យដក់កន្សែងសោកសល់ ។

១២៩៩- ក្រុងខរក្រេវក្រោដានល អះមេនិម៌ល
បង់កេរតិអសោចជំអាស្រូវ ។

១៣០០- ធូរមេណៃឈ្មោះជ័សត្រូវ កាំងព្រះម្រឹត្យូវ
បីជួយជីវិតអ្នកកាច ។

១៣០១- អញនឹងដេញព្រះម្រឹត្យូវរាជ ផាប់ផោរជំកំណាច
បីលុះកណ្តាប់ដៃបង[2] ។

១៣០២- បងនឹងពិឃាតវិជស្នង ឲ្យអន្តរាយហោង
ជីវិតលុះមរព្រាបព្រិក ។

១៣០៣- ខរដូងកេរីរើសរក ពលត្រឹន្នជងមក
ជុំនៅព្រះរាជសីហា ។

១៣០៤- ស្រេចស្រាវយក្សយប់យោធា ត្រៀបរៀបគ្រឿងអា-
វុធអាវុធកាងករ ។

១៣០៥- សឹងជិះនូវជំនិះចេញចរ ជិះនាគជិះមករ
ខ្លះជិះជំនិះម្រឹគា ។

១៣០៦- ជិះគោជិះគោមហិង្ស ខ្លះជិះសៀងភា
ខ្លះសោតក៏ជិះរាជសីហា ។

១៣០៧- ខ្លះជិះសេះនូវក្របី ជិះគជហាត្ថី
ជំរឺរមាសក្លោដខ្លា ។

១៣០៨- ជិះទិដ្ឋជិះគោតជុំពា[3] ជិះសិង្ហជិះណា
សោតសឹងពាហុសុវិជ័យ ។

១៣០៩- ខុននោះសឹងមានថ្វីដៃ កាន់ពលមួយកៃ
សហាស្សនីមួយគ្រប់ខ្លួន ។

១៣១០- សឹងស្រែកអួតអង្គបីកក្ដួន បស្វីពីងពួន
ស្ថានណាបីគង់ដៃជើង ។

១៣១១- សឹងជិះនូវជំនិះពលជើង គុលីឡប់ឡើង
ស្រឡប់ទាំងសែងសុរិយា ។

១៣១២- ព្រះអង្គពីរពង្សក្សត្រា យល់ពលយក្សា
មហាកុម្ភណ្ឌាសោតសល់ ។

១៣១៣- លើកទ័ពកងកោណាហាល ក្សត្រឲ្យដល់ឫទ្ធិពល
នឹងចេញប្រយុទ្ធយក្សហោង ។

(1) pī luḥ ... assabāh : manque dans RIB
(2) RIB : paṅ'
(3) RIB : jiḥ khot jumbā ~ jiḥ khot jiḥ bā

១៣១៤. ព្រះលក្ស្មណ៍ក្រាបបាទទូលស្នង បពិត្រនាពលផង
សំរាប់សម្ដេចសល់ភង ។

១៣១៥. ពោះៗលើកពលជំអាច ចេញដេញនូវអំណាច
ព្រះបាទសម្ដេចប្រើយោធា ។

១៣១៦. នេះឥឡូវខ្ញុំមួយអាត្មា ខ្ញុំសូមអាសា
ដូចប្រាអមាត្យ(1) នោះហោង ។

១៣១៧. សូមព្រះស្ដល់ព្រះអង្គហោង ខ្ញុំនឹងចេញប្រយុង
ប្រយុទ្ធយកជីវិតថ្វាយ ។

១៣១៨. ដងនោះព្រះរាមសន្តាភាយ ប្រឹមប្រីយអភិប្រាយ
បន្ទូលនឹងព្រះអនុជា ។

១៣១៩. ហៃលក្ស្មណ៍នាសូរបនខា បាហោងពាធា
អសុរកំក្រោធបីពន្លឹក ។

១៣២០. ក្រទាពលយក្ស្សបីអនិក បានឹងនានាសឹក
រំលោងអសុរជ័ទុទារ ។

១៣២១. ក្រែងដូចបងនូវភាការ សឹកនេះភ្នាក់ងារ
បាឯងឡើតសូរបនខា ។

១៣២២. គឺយោះឡើតមានបងបា បងនឹងនានា
ឡាំងឯងកំបាព្រួយចិត្ត ។

១៣២៣. បងនឹងចេញខ្នែងសំដែងឫទ្ធិ យកយក្សទុច្ចរិត
កណ្ដាលរឿណរង្គពសុធា ។

១៣២៤. ផ្សរបាមើលជ័យចេស្ដា ជ័យដោតជយា
ទូទាំងត្រៃលោកពុសាយ ។

១៣២៥. ជងនោះអសុរសហ័សសប្បាយ រៀបពលជង(2)ខ្វាយ
ទុលីត្រឡប់ទេវហា ។

១៣២៦. លើកដល់ដែនព្រះភជា ទើយព្រះរាមា-
ធិរាជសមនូវមរណា ។

១៣២៧. អស់ពលចតុរង្គគជសារ សេនាពលមារ
កក្រើកជំទាំងធាត្រី(3) ។

១៣២៨. ពេញពាសទាំងដែនធរណី ចង្អៀតទាំងបុរី
សន្ធឹកនូវសព្ទយក្ស ។

១៣២៩. ខរជីងក្រោធក្រៃមហិមា ហៅទុនទូសជា

(1) MBN : ţūc mūv
RIB : ţūc hmū
(2) RIB : ţaṅ
(3) RIB : ţă rajjadhātrī
Le MBN contient un supplément qui semble être une interpolation (entre st.1326 et st.1327), dont les vers sont d'un mètre extrêmement confus.

អនុជនាថនៃព្រះអង្គ ។

១៣៣០. ហោះហួសបក្សីពីរពង្ស ធ្រុះធ្រឹសធ្រើសធ្រង់
ធ្នូសិល្បនៃសរសក្តិថ្លា ។

១៣៣១. ហួសបក្សីស្វែងចរិយា ធុត្តកម្ម[1] មោឃា
មហាកម្លៀកាចសល់ ។

១៣៣២. ធ្វើពាសសូរបនខ្យល់ អាប់អង្គទុរពល
ពុំខ្លាចអំណាចយើងណា ។

១៣៣៣. ធុរបានាំពលសេនា ពហានអាសា
ពលាធិការក្រាស់ក្រៃ ។

១៣៣៤. ទៅចាប់បក្សីសុរិជ័យ លែងជើងតេជនៃ
ឫទ្ធិតបះនូវអំណាច ។

១៣៣៥. បក្សីនោះពីរអង្គអាច ទុការឫទ្ធិភាជ
ជ័រុកជ័ភនភាវី ។

១៣៣៦. ផ្លែងផ្លាញលាញពលសេនីយ យក្សអសុរី
បីកក្រើកព្រះនគរ ។

១៣៣៧. ជាសីងបានសិទ្ធិព្រហ្មពរ ប្រើសិទ្ធិសិល្បសរ
មួយម៉ឺននៃភាមនូវលក្ស ។

១៣៣៨. ដោយតេជបាទ្រង់សិល្បសក្តិ ផ្តាលផ្តាបបំបាក់
នៃភាជសត្រូវមហិមា ។

១៣៣៩. ខុនទូសថ្វាយអញ្ជលីលា ក្រៀបរថអស្សពាហា
អនេកអនន្តសែនសល់ ។

១៣៤០. ជ័សំបូណ៌នូវយសសក្តិស្គល់ បៀវពោះរូបខ្យល់
កំណើតនៃអាជានេយ្យ ។

១៣៤១. ផាផាក់ផ្សៀលផ្ទាត់ភពាក្រៃ ហិចពោះវិលវៃ
ចំហុតបីដូចចិន្តា ។

១៣៤២. រាយភត់រថទេវពស្តា- ករណ៍ពណ៌ភូសា
សុពណ៌នូវរត្នសេះសារ ។

១៣៤៣. ខុនទូសទ្រង់សិល្បបីប្រហារ ពីរព្រះភូវនាថ
ករកាន់សុលីជ័យឈរ ។

១៣៤៤. ប្រែប្រឹងភុជពីរភូធរ ពលយក្សនិករ
កំស្រែកកៀជ័យមហិមា ។

១៣៤៥. គោះគងជ័យដែងនូវឫទ្ធ ដល់ព្រះភាឃា
កំភាយពលចាក់ចោមបាញ់ ។

១៣៤៦. បោះសីងសុលីសក្តិពេញ ស្លុលសក្តិប្រែវិញ
ត្រឡប់កំជាលជាភ្និ ។

(1) RIB : dhujakamm

១៣៤៧. ខុនទូសយក្សយកអសនី បាញ់ព្រះនរបតី
ក៏ជាលបុប្ផាកររងោយ ។

១៣៤៨. ជាមាលារត្នបីត្រសាយ កេសរវិកភាយ
កំរងព្រះបាទដ៏សុពណ៌ ។

១៣៤៩. ពាលយក្សាសែននិករ ប្រះឆ្លូសិល្បសរ
ក៏ចាប់សិខរ(1) ជាលដេញ ។

១៣៥០. ព្រះស្តេចស្ដែងស្តេចចរចេញ ចាប់យក្សាវិញ
សំដែងនូវតេជោពល ។

១៣៥១. យក្សាមហិមាវែងខ្ពស់ ចាប់ព្រះទសពល
ដ៏ថ្កប់នូវឫទ្ធិចេស្តា ។

១៣៥២. ព្រះចាប់ខុនទូសយក្សា យក្សយំដ៏ប្រែវា
ក្រោធនឹងចាប់ព្រះវិជ ។

១៣៥៣. ព្រះវាត់កៅទណ្ឌឫទ្ធិរឹង កាងករប្រែប្រឹង
ករកោះសភាសរផ្លែង ។

១៣៥៤. ត្រូវត្រង់ខុនទូសដួលស្មុង យក្សយំស្លប់ស្មែង
ក៏ជ្រកដោយជ្រោះគោហា ។

១៣៥៥. អស់ទេពស្ថិតនូវគិរិន្ទ្រា ថ្វាយរត្នមាលា
ពិសេសពិសួរ(2) មកថ្វាយ ។

១៣៥៦. ស្ពូតីនរនាថនាភាយ ធំទើនជ័យប្រុះក្រាយ
នូវណាដសុគន្ធភ្ញីថ្កា ។

១៣៥៧. ក្រុងខរក្រេវក្រោធមហិមា ឃោរត្រីមុខជា
ព្រះរាជបុត្រស្នេហាស្មូង ។

១៣៥៨. ចាវៃបាត្រីមុខដ៏កន្លង បាឯងថ្មើសឃ្លង
ធ្វើសឹកចំបុតមានជ័យ ។

១៣៥៩. ធូរបាចេញតតេជវៃជ យុទ្ធយកដោគជ័យ
តិជ័យសម្ដេចភាមា ។

១៣៦០. ជងនោះត្រីមុខមហិមា បង្គំក្រាបលា
ក៏ចេញទទួលរឿណារង្គ ។

១៣៦១. ត្រីមុខសុបវរថ្មើសថ្ងង់ កាន់កៅទណ្ឌទ្រង់
ក៏ចេញកណ្ដាលរង្គព្យូហា ។

១៣៦២. ខុនទីងទិតខ្លួនចងខ្នុរ ចិញ្ចើមក្រញូវ
គគ្រឹតកម្លួនស្រែកថា ។

១៣៦៣. ត្បូងបំរៃដប្បូនសោះសា កាន់គ្រឿងអាវុធា

(1) MBN : sikh
RIB : sīr khar
(2) RIB : bises bī suorg

ក៏គ្រប់ចតុដៃកាន់ ។

១៣៦៤- ដៃឆ្វេងកាន់សរសក្តិខ័ន ដៃស្តាំកោទណ្ឌ
នូវចក្រក៏បោះបែនបត់ ។

១៣៦៥. ក្រោះក្រាយ[1] ភត់ភាយសោតសុទ្ធ ក្រាស់ក្រៃដ៏ប្រាកដ
ប្រដាប់នូវរត្នរចនា ។

១៣៦៦. សង្វារមកុដកែវកុណ្ឌលពា- ហុរត្ន[2] រចនា
មហាប្រាកដឫទ្ធិក្រៃ ។

១៣៦៧- ទ្រង់គជសារខ្លាំងដាញជ័យ កាន់គ្រឿងគ្រប់ដៃ
ក៏ពើសនូវចិត្តគឺដ៏ហ៊ាន ។

១៣៦៨- គ្រឿងគ្រប់ពណ៌ពេជ្រសឹងមាន ការអង្គាប្រាណ
ប្រយ័ត្នពុំឲ្យមុតសរ ។

១៣៦៩- ពលយក្សាសែននិករ ស្រែកសព្ទរូគ្គរ
សំញើញសំញែងពីរក្សត្រ ។

១៣៧០. យល់ដល់ព្រះដំព្រះចាប់ ព្រះស្រែកសន្ធាប់
អំណាចអំណត់មហិមា ។

១៣៧១. ដៃឆ្វេងព្រះទ្រង់ធ្នូភ ដៃស្តាំភដា
ស្តេចចាប់នៃអង្គអសុរ[3] ។

១៣៧២. ស្តេចកាប់អសុរដួលដាល ឈាមហូរបីរហាល
រូបហាននៃជលធារា ។

១៣៧៣. ឈាមហូរដូចស្ទឹងយមុនា ដោរដន់សោះសា
រហែងរហាចគឺដ៏ធូល ។

១៣៧៤- ពុងពោះធ្លាភច្រាលច្រួល ក្រុងក្រោចបោះធូល
ក៏កាងនូវករពេភំ ។

១៣៧៥- ខុនខែងខឹងខ្លួនរឹងទាំ មាត់ស្លាងងុំាងុំា
ត្របាសត្រែបងវែងកាំ ។

១៣៧៦. កោះសរសក្តិវែងបីហត្ថ ខុនចក្រព្រះហស្តស្តាំ
ត្រវីត្រែវាសបោះបាច ។

១៣៧៧- បាញ់ព្រះនរិន្ទ្រភាមសរសាច ធូលយុទ្ធនូវអំណាច
ប្រគួតប្រកឹងចេស្តា ។

១៣៧៨- រុកភានរួសរាន់យាត្រា ព្រះចាប់យក្សា
យក្សាប្រទូសវិលវឹង ។

១៣៧៩- ព្រះកោះសរសក្តិប្រៃប្រឹង វែងផ្លាញអសុររឹង
អសុរក៏ដួលដ៏មរ ។

(1) RIB : kroḥ krā
(2) RIB : bāhūratn
(3) RIB : asurāsar

១៣៨០- ដងនោះអសុរខុនខរ ដឹងឫទ្ធិព្រះភូធរ
បវរក៏ទ្រង់សរផ្លាញ ។

១៣៨១- បង់ធ្នូសបង់ត្រីមុខជាញ[1] ពលព្រៃនុលុះណាញ
រលំពំងដែនដែនដុង ។

១៣៨២. ក្រេវក្រោធពោលពាក្យបីទ្រនង់ អះអញបរអង្គ
នឹងចូលប្រយុទ្ធយកជ័យ ។

១៣៨៣- អស់ធ្នូអស់ត្រីមុខក្ស័យ[2] បង់ពលព្រៃនុព្រៃ
រលំរលត់មរណា[3] ។

១៣៨៤. អះអញឯកោមុខ្លា ដូចអង្គពួក-
ពតអ្នកកាត់កយកក្បាក ។

១៣៨៥. ពោះបីនៅដោយកាមសុខ អសុរនិរទុក្ខ[4]
លោកជាប្រុសតតអំណាច ។

១៣៨៦. កើតជាក្សត្រខ្សោយខ្លាខ្លាច ចិត្តចងរ័កភាជ្យ[5]
ពុំអាចដំណើមចេស្តា ។

១៣៨៧- អះហោសរិលសត្វលោកា ពុំដែលធៀសកាលា
ព្រះម្រឹត្យូវនឹងយកប្រាណ ។

១៣៨៨- ពោះបីនៅសុខសួស្តីក្សេមក្សាន្ត ពុំដែលហោមាន
អាយុយូរយឺនរួចកាល ។

១៣៨៩- អំណាចទុរយសទុរដមិ[6] អនេកសង្វេយ្យកល្ប
អ្នកជងឯនឹងជៀលជាខ្លាច ។

១៣៩០- ខរត្រិះរិះឯងនូវអំណាច និរភិតតិតខ្លាច
ប្រដាប់នូវអង្គអាត្មា ។

១៣៩១. ឡើងរថទឹមទៀមអស្សពាហា ពាក់ពេជ្រជ័យមាលា
ប្រដាប់នូវកងកែវកន់[7] ។

១៣៩២- ទ្រង់មកុដកុណ្ឌលកៅទណ្ឌ ដត្រឆាយាកាន់
មយូរនូវព្រួយព្រាយព្រៃ ។

១៣៩៣- ខែលខ័នកៅទណ្ឌសំសៃ[8] ធ្នូព្រួញត្រៃយព្រៃ

(1) GB : lāñ
(2) RIB : aḥ dūs aḥ trīmukh khsăy
(3) MBN : nīddhā
RIB : kaniṭṭhā
(4) GB : asūr năk duk
MBN : asur rū bī duk
RIB : asur rū bhīniradukkh
(5) RIB : raks rāj
(6) RIB : dūr dāl'
(7) RIB : kañ kaudaṇḍ
(8) GB : jāv see
RIB : sāv sai

ទ្រហឹងបីហោះខ្ញៀវខ្ញារ ។

១៣៩៤. ជិះគជជិះសិង្ហរងា ប្រជតីញាប់ញ័រ
អស្ចារ្យកក្រើកពសុធា ។

១៣៩៥. ស្រឡូប់សែងស្នូរមេឃា ទាំងទេពតិន្រ្ទា
ងងឹតពុំយល់សូរ្យសែង ។

១៣៩៦. ពលហោះឡើងជ័យក្ដើងក្ដែង ប្រជតីគ្រៃលែង
រលើងរលំបញ្ញតា ។

១៣៩៧. ចូលយុទ្ធនឹងព្រះភជា ព្រះទ្រង់សរថ្លា
ក៏ថ្លែងសរភសរសំា ។

១៣៩៨. រងិបីរយះកង់កាំ ដាក់បែកខ្ទិខ្ទាំ(1)
រទុះរូបានជង់ធុលី ។

១៣៩៩. ដាច់សេះអង្គសេះសារថី ដាច់កពាជី
ស្រលាក់ប្រពាក់លើគ្នា ។

១៤០០. ខែលចន់កៅទណ្ឌធ្នូស្នា គ្រប់គ្រឿងអាវុធា
ប្រយុទ្ធប្រយ័ត្នរឿណារង្គ ។

១៤០១. ខ្មោចខ្មៅ(2) ស្លុតស្លាប់ដាត់បង់ ឈាមប្លុរច្រាលបង់(3)
រូបាននៃជលសាគរ ។

១៤០២. អស់ពលយក្សយង់ដីមរ ដីសពកៀរគរ
សឹងឈាមរូបានដាស្ទឹង ។

១៤០៣. ខុនខែងទឹកខ្ទួនខះទឹង ប្រើប្រែប្រាណប្រឹង
សំរក់ទឹកមាត់បាត់បា ។

១៤០៤. ទ្រង់សរថ្លែងផ្កាញនូវគ្នា សរព្រះភជា
មហាប្រទះសរខ្វាយ ។

១៤០៥. សរពាន់សរពិសសញ្ញសាយ សរបែក(4) ព្រាត់ព្រាយ
ច្រវាត់កណ្ដាលនភី ។

១៤០៦. សរខរដាញ់បែកជាភ្លឺ សរព្រះនរបតី
សឹងសុទ្ធអាវុធផ្កាញផ្លា ។

១៤០៧. សរខរថ្លែងជានាគា សរព្រះភជា
ជាគ្រុឌច្រវាត់ឆ្វាត់ឆ្វៀល ។

១៤០៨. សរខរជាគជបីសំទៀរ សរព្រះផ្គាច់ពៀរ
ជាគជសីហាសារសិង្ហ ។

(1) RIB : pī radāṃ
(2) RIB : khmoc khmāṃṅ
(3) GB : crāl thmaṅ
RIB : crāl khbaṅ
(4) RIB : samraek

១៦០៩. សរវរជាផ្កាផ្លែក[1] រីង    សរព្រះផ្លែងរីង
សឹងពេជ្រមហាពេជ្រផ្លា ។

១៦១០. សរវរជាភ្លើងបរិយ្យាហ    សរព្រះផ្លែងជា
កក្កាពន្លឹកឈើសលត់ ។

១៦១១. ក្សត្រតីរបហិមាដីក្រាកដ    ជាញជ័យអាចអត់[2]
អំណាត់អំណាចនូវឫទ្ធ ។

១៦១២. សឹងផ្លែងសរផ្លាស[3] នូវគ្នា    សរព្រះភជា
មហាប្រឹះបាញ់បាន ។

១៦១៣. បាញ់ព្រះព្រះបាញ់រឹងផ្កាន    ចាប់ព្រះព្រះប្រាន
ពុំអាចនូវទៅទៀបព្រះ[4] ។

១៦១៤. ដឹព្រះព្រះដំនូវតបះ    ព្រះចាប់ខរប្រះ
ខរខឹងក្រោធក្រៃដ៏កន្លង ។

១៦១៥. ចាប់ព្រះព្រះចាប់រឹងស្នូង    កៅទណ្ឌបីសំពង
ក៏ទរទៅខរបាបី ។

១៦១៦. ខររុកភានចាប់ព្រះចក្រ    កាន់ចំនបីក្រវី
សំទៀរសន្ធាប់ឲ្យព្រះអង្គ ។

១៦១៧. ជាល[5] ដកបញ្ចូតាកាន់ទ្រង់    បោះអង្គត្រូវអង្គ
នរបតីទ្រង់ជេញដំ ។

១៦១៨. ខរខឹងករកាច់កាន់ភ្នំ    សិលាធារធំ
ប្របោះប្របាចសាចសរ ។

១៦១៩. ព្រះសព្វអឺអឺងខ្លាយខូរ    កក្រើកតាំងអម្ពរ
មហាពន្លឹកផ្សែងស្លុប ។

១៦២០. ដេយាសុរិយាបីស្រឡប់    ញ័រទាំងត្រៃភព
សឹងភ្លឹកន្លងតេជោជ័យ ។

១៦២១. ខុនខឹងស្រែកសព្ទភ្លាំងក្រៃ    កាន់កៅទណ្ឌជ័យ
ក៏ផ្លែងសពខ្ចាតខ្ចី ។

១៦២២. ពោលពាក្យអសុរសនរបតី    ជាទៀយបញ្ញី
អប្រិយចិត្តចោរមិច្ឆា ។

១៦២៣. អស់ពលអញអសង្ខេយ្យា    ឯងផ្លែងសរផ្លា
លុះមរក្រោកឯដីវិនាស ។

១៦២៤. នេះតម្រូវតើងពុំគិតខ្លាស    អាត្មាទ្រង់សាស្ត្រ

(1) RIB : phkā phlek
(2) RIB : āc pat'
(3) RIB : phlāñ
(4) RIB : cāp' braḥ praḥ prāṇ
bum̤ āc nūv dau dīet braḥ
(5) RIB : ṭal'

ពុំគិតព្យេរពន់ពេកក្រៃ ។

១៦២៥. ចង់ទៅសោយទុក្ខស្ពានភ័យ កោដិកល្បអសង្ខៃយ្យ
ពុំដឹងរូបរាមរណា[1] ។

១៦២៦. នោះព្រះបន្ទូលត្រាស់ថា ហើយយក្សមិច្ឆា
មហាចិត្តចោរអប្រិយ ។

១៦២៧. មឹងមិនដឹងតេជឫទ្ធិ អង្គអញឫទ្ធិ
គឺព្រះនារាយកាណា ។

១៦២៨. អស់ទេពសោឡសសួគ៌ា និមន្តអញមកជា
ព្រះរាមទេពនូវតបះ ។

១៦២៩. មិនដឹងអញទ្រង់នូវតេជះ ចុះមកជ័យជំនះ
អសុរដ៏កាចយាយី ។

១៦៣០. មឹងដូចសំរាមនឹងសំឡី អញដូចអគ្គី
បីនេះរចល់ច្រួលច្រាស់ ។

១៦៣១. មឹងពុំដឹងតេជអញជាម្ចាស់ មឹងមកទប់ទាស់
នូវឫទ្ធីអញមហិមា ។

១៦៣២. ឯងនោះយក្សយប់ឃាត់ឃា រត់ជ្រកគោហា
រណ្ដាប់ពិធីរបាយក្រម ។

១៦៣៣. ឯបហោមយេស្ដុឡានប្រណម្យ[2] សូត្រសាស្ត្រដ៏អាគម
រំលឹកពិធីមន្តមក ។

១៦៣៤. ឯបជួយអាត្មាបីសំកុក សម្ងាត់នូវព្រៃជ្រកជ្រក
កំលុងគោហាជាទំ ។

១៦៣៥. ព្រះដឹងខរមន្តអាគម ព្រះទ្រង់ធ្នូដំ
ក៏វាយបពិតនោះដ៏ប្រេះ ។

១៦៣៦. ហើយខរមឹងខ្លាំងតតចំណោះ ហោះមឹងពុំត្រេះ
ក៏រត់តែខ្លួនរួចជ្រក ។

១៦៣៧. មឹងនេះហៅប្រុសតម្រក់ អញ្ជើញមឹងមក
ប្រយុទ្ធប្រឡងចេស្ដា ។

១៦៣៨. ក្រុងខរស្ដាប់ព្រះអាជ្ញា ប្រឹងច្រាណអាត្មា
ក៏ក្រោធក្រដូររូភ្លើង ។

១៦៣៩. បង់ព្រតពិធីឯាលឡើង អាត្មាផ្កាភ្លើង
ប្រយុទ្ធនូវរាមសង្ហាភយ ។

១៦៤០. ឃោកបាក់នូវសិលាផ្លាក់ផ្លាយ ៗព្រៃព្រឹក្សខ្ទាត់ខ្ចាយ
រលុះជាជ្រោះជ្រៅងារ ។

១៦៤១. កក្រើកក្ដូទាំងសួគ៌ណា ទេពាង្វាយសាធុការ

(1) RIB : bum̤ ṭịṅ pad pāp gaṇanā
(2) RIB : dhyān bar brahm

ចំរើនសម្ដេចនរបតី ។

១៤៤២. ព្រះបាទនរនាថភូមី ថ្លាញយក្សយាយី
លុះក្ស័យជីវិតសូន្យបង់ ។

១៤៤៣. ព្រះស្ដេចជាតិជាញរឿណារង្គ អសុរយក្សយង់
ក៏អស់ព្រះជន្មលុះជ័ងរ ។

១៤៤៤. ព្រះស្ដេចសំរេចឫទ្ធិករ(1) ថ្លាញពលក្រុងខរ
ទូទិសរសម្ដេចថ្លាថ្លាញ ។

១៤៤៥. ទាំងមូលអសុរាជ័ណាញ ត្រីមុខជាងជាញ
ក៏មរកណ្ដាលពសុធា ។

១៤៤៦. កក្រើកជល់ចក្រវាលា សុមេររាជមហា-
គិរិន្ទ្ររង្គួលញាប់ញ័រ ។

១៤៤៧. ទាំងទេពទសសហាស្សចក្រវាល សុបណ៌បក្សា(2)
សីឯហោះមកថ្វាយព្រះពរ ។

១៤៤៨. ថ្វាយឆាណាវត្ថទេពបវរ ថ្វាយបង្គំជក់
សំអងនៃកេសរភ្ញី ។

១៤៤៩. ព្រះអង្គព្រះអនុជមហេសី មហាក្សត្រត្រៃត្រី
ប្រសើរជ័លើសលោកា ។

(1) RIB : samrec siddhī braḥ kar
(2) MBN et RIB : dāṃṅ deb sahassadharm
satasahass braḥ supār

# កណ្ឌ ទី១១

១៤៥០- ដងនោះអសុរសូរបនខា យល់ឫទ្ធិរាមា
ធិរាជជ័យឫទ្ធិពល ។

១៤៥១- យល់ទូសយល់ត្រីមុខយល់ ក្រុងខរនិស្វល
នូវពលអសុរត្រឹន្ទជ័យរ ។

១៤៥២- មួយអង្គចេញចាកព្រះនគរ ឆ្លងសាគរចរ
ក៏លុះបុរីលង្កា ។

១៤៥៣- ដល់ចូលទូលក្រុងរាពណា- សូរថ្លែងចេស្តា
ព្រះរាមនរបតីព្រះលក្ស ។

១៤៥៤- តាំរអង្គផ្លាញទូសប្រត្យក្ស ផ្លាញក្រុងត្រីភក្ត្រ
ក៏ផ្លាញខរាធិបតី ។

១៤៥៥- ផ្លាញទាំងពិរាធជ័យឫទ្ធី ផ្លាញពលពាជី
គជេន្ទ្រនូវរថធ្លាក់ធ្លាយ ។

១៤៥៦- នគរទណ្ឌកាអន្តរាយ ពលត្រឹន្ទខ្ចាត់ខ្ចាយ
ទាំងបរមមណ្ឌលទិព្វសូន្យ ។

១៤៥៧- ក្រុងរាពណាស្តាប់សូរ- បនខាថ្លែងទូល
រន្ធត់ហឫទ័យប្រះព្រាណ ។

១៤៥៨- ក្រុងខរធិរាជប្រធាន ឫទ្ធិរឹងអប្រមាណ
ម្ល៉េះហើយបាបកម្មរណា ។

១៤៥៩- ក្បែរណាត្រារនេត្រាអសុរា យល់លក្ខណ៍កេសា
នៃសូរបនខាពិត ។

១៤៦០- ហៃណាសូរបនខាសុចរិត យល់រូបាក្រឹត(1)
នៃមេតិការស្តែងយល់ ។

(1) GB : rūpākr̥ṣ(ṇ)
RIB : rūpākri̥ty

១៤៦១. អះមេមានរូបដ៏ បវរសុទ្ធនិម៌ល
ស្រីសួគ៌សុភគ្គយល់(1) ដ៏រូបមេប្រសើរក្រៃ ។

១៤៦២. អ្នកណាមានបើអាច ពុំខ្លាចអញដ៏ជាត-
ស្នូរលោកទាំងភពត្រៃ ត្រៃភពត្រូវដ៏សាកល ។

១៤៦៣. អាចឲ្យដ៏ភ័យមេ អញពន្លឹកសល់
មេថ្លែងនូវប្រការកល កិច្ចអំពើមោះដ៏អស្ចារ្យ ។

១៤៦៤. នោះស្នូរបនខាបដ្តំ ប្រណាម្យថ្លែងសំដែងអាថ៌
ខ្ញុំពុះបស្សីពិសុទ្ធធម៌ មោះប្រសើរដ៏ពីរពាង្ស ។

១៤៦៥. ខ្ញុំធ្លូលបំរើប្រយោជន៍ យកកុសលបវរម -
ក្តីលក្ខះក៏គ្រោធទ្រង់ នឹងអញខ្ញុំបង់កេរតិយស ។

១៤៦៦. ជាខ្ញុំពុំកោតខាម ត្រែចតាមមករកប្រុស
បស្សីនោះគ្រោធខុស កំហុសច្រើនពុំយល់ក្តី ។

១៤៦៧. ទ្រង់ច័នបីកាត់ករ កាត់កាំយា(2) នូវកេសី
ខ្ញុំគិតខ្លាចពុំរស់ជីវី ពុំពាន់យល់ព្រះភក្ត្រា ។

១៤៦៨. ក្រុងខរក៏គ្រោធក្រៃ ព្រះហឫទ័យរន្ធត់ស្ដ្រា
ចេញយុទ្ធនូវរាមា(3) ដល់បីក្ស័យព្រះជីវី ។

១៤៦៩. បស្សីនោះទ្រង់នាម ឈ្មោះលក្សភាមសុមេត្រី
បស្សីដ៏មានស្រី ស្នួតសេពសមបំរើនិត្យ ។

១៤៧០. នាមនាងសីតាភក្ត្រ បវរលក្ខណ៍ដ៏ទ្រង់ក្រឹត្យ
កបនូវមារយាទចរិត ប្រសើរលើសនៃលោកា ។

១៤៧១. ដូចចន្ទ្រខុទ័យប - រិបូណ៌តតមន្ទិលជា
អាចតំរេកនៃកាមា ព្រះហឫទ័យដ៏ស្នេហាស្និទ្ធ ។

១៤៧២. ក្សូរនឹងស្ដេចព្រះ - ទៀមអតិរេកដ៏រឹងឫទ្ធិ
យកជាមហោសីបពិត្រ សន្សំភាជស្នួស្តីស្រី ។

១៤៧៣. ក្រុងភាពឲ្យដូងភេរី ដំនុំមុខមន្ត្រី
អនេកអសុរសេនា ។

១៤៧៤. ក្រុងភាពបន្ទូលព្រះអាជ្ញា មហាភជយោធា
ឲ្យស្ដាប់(4) អនុជទូលថ្លែង ។

១៤៧៥. មោះបីយើងក្រីតាពល(5) ខ្ទង ធ្លូលចាប់ជាញដែង
ក៏បានបស្សីងាយសល់ ។

១៤៧៦. ក្រែកងទុរយសយើងដូចដល់ ល្មះបរព្រឹន្ទពល
នឹងចាប់បស្សីសាមាន្យ ។

(1) RIB : trīsūr kruṅ rāb(ṇ) yal'
(2) RIB : kāt' kām
(3) RIB : ṭă nūv braḥ rāmā
(4) RIB : oy stec
(5) RIB : kradā bal

១៤៧៧. យើងធ្វើកលមួយឲ្យបាន    បក្សីអួតហាន
ក៏ចាប់ឧបាយនូវកំហាល់ ។

១៤៧៨. យើងយកសីតាដោយកល    បានបក្សីទល់
មហាទុក្ខាសល់សោក ។

១៤៧៩. ស្នងសូរបនខាអមោឃ (1)    នឹងខរលើសលោក
ក៏មរនូវសរបក្សី ។

១៤៨០. កាលនោះអស់រាជមន្ត្រី    ថ្វាយករអញ្ជលី
ស្លុតតីតសូរទ្រង់ឫទ្ធិ ។

១៤៨១. ជាព្រះប្រាជ្ញាដ៏បវិត្រ    ពិសេសព្រះគំនិត
អញ្ជើញស្តេចប្រើធ្វើថ្វាត់ ។

១៤៨២. ស្តេចប្រើអមាត្យមួយនិពន្ធ    ទ្រង់នាមប្រសិទ្ធ
ហៅមហារិករត្នពន្រាយ ។

១៤៨៣. ប្រើប្រែរូបអង្គឆោមឆាយ    ជាម្រឹគពន្រាយ
ប្រសើរក្រៃលែងម្រឹគា ។

១៤៨៤. ជាឃៃមហារិក    ព្រះស្តែងដំណែងរូបា
ជាម្រឹគរត្នមហា-    ប្រសើរក្រៃលែងម្រឹគឯង ។

១៤៨៥. លល្អងព្រះរាមដ៏ច្បង(2)    ឲ្យបរបាញ់ល្បង
ករកាន់ធ្នូសរក្តាប់ក្តឹង    ចេញលៃងអាស្រមឃ្លាតឃ្លា ។

១៤៨៦. បានអញនឹងយក    រត្នភគវតីសីតា
មហោសិបក្សីណា    នឹងបានសំរិទ្ធិប្រាកដហោង ។

១៤៨៧. ឯងនោះមហារិកបង្គំ    ប្រណម្យជុំលីស្នង
អញខ្ញុំសុំណាពោលកន្លង    អាជ្ញាក្សត្រដ៏ប្រើប្រាណ ។

១៤៨៨. អគ្គីអញខ្ញុំដ៏ដឹងឫទ្ធិ    សម្តេចព្រះរាជហោហាន
លេះអញខ្ញុំចូលស្ថាន    ជីវិតខ្ញុំពុំរួញរា ។

១៤៨៩. បុះនិសម្តេចព្រះមេ(3)    អញខ្ញុំប្រចបត្រឹទ្ធ
ជាកាកនាសូរដ៏ប្រា-    កដសហាសអសូរឯង ។

១៤៩០. ចូលចាប់រំលង    យេក្ខយញ្ញដ៏ហោមឯង
លងតបះរាមដ៏កន្លង    អំណាចក្រៃដ៏មហិមា ។

១៤៩១. កាលនោះស្តេចដបសិល្ប    ពេទត្រៃ(4)សំដែងនៃព្រះចេស្តា
ផ្លែងផ្លាញព្រះមេខ្ញុំនៅនា    ហោះក្រែកតិវិត្តផ្ទាប់ ។

១៤៩២. សរស្តេចដូចព្រះម្រឹត្យូវ    នូវដោយសរិលជាប់

(1) RIB : paṅ sūrapanakhā āmokkh
(2) GB : braḥ rām toy lpaṅ
RIB : rām ṭă sraṃ(ṇ)
(3) RIB : mahima samtec braḥ me
(4) RIB : koet trai

មរនូវសរព្រះតីដ៏ស្លាប់ (1) ជីវិតក្ស័យដ៏លាញអង្គ ។

១៤៩៣. តប្បូវបីនឹងល្អួចភគវតី មហោសីដ៏បវរម -
ក្តលស្តេចក៏ក្រោធទ្រង់ ដ៏នូវគ្រូសំដែងឫទ្ធិ ។

១៤៩៤. ឯស្តេចសំរេចសិល្ប សំរេចព្រតសំរេចក្រឹត្យ
ផ្កាញរាជបរមសួរជីវិត ដ៏នូវឫទ្ធិទេពតា ។

១៤៩៥. ផ្កាញមូសនូវត្រើកក្រ្ត ផ្កាញតិរាជធារា
មរនូវសំរឹទ្ធិព្រា - កជជ្ជួចមនះភ្លើង (2) ។

១៤៩៦. ឫទ្ធិរាមតបះជបសិល្ប បីព្រះនៅផ្ទៃក្តង់ផ្ទើង
លេះយើងនឹងយកជបយើង រំលាឯលត់ដ៏លាញដ្រះ ។

១៤៩៧. ក្រុងរាពក្រេវក្រោធដ៏មានះ មនោជាអះ
ស្ដ្រះបីមឹងអង្គអាចខ្ពី ។

១៤៩៨. មឹងអាងអួតអង្គហារី មឹងជាបស្ញុំ
សរសើរសរសើរសោះសា ។

១៤៩៩. មឹងពុំខ្លាចអញគីដ៏ងា តិសួរមឹងជា
បស្ញុំក៏មានឫទ្ធិក្រៃ ។

១៥០០. មឹងកៀចកាចគួរត្រូវវៃ វៃអញដ៏យក្រៃ
តិដ៏យនៃលោកាករ ។

១៥០១. មឹងជាអួតជ័យមឹងអរ ជ័យព្រះហរិសរ
តិជ័យនៃជយាយើង ។

១៥០២. មហារីកបីបត្តិឡើង ខ្ញុំខុសស្ដេចចើង
ស្ដ្រះបីលើកជ័យលើសលោក ។

១៥០៣. ខ្ញុំក្ដៅស្ដោចិត្តស្ដួដោក យល់ក្រុងខរសោក
ក៏មរនូវសរអនិច្ចា ។

១៥០៤. តប្បូវខ្ញុំយកសិរសា សូមទទួលអាជ្ញា
ព្រះបាទសម្ដេចស្ដេចប្រើ ។

១៥០៥. ខ្ញុំសូមសាឯធមិខ្ញុំធ្វើ កុសលខ្ញុំជ្រើ
ត្រកូលនឹងបុត្រស្នេហា ។

១៥០៦. សូមព្រះទ្រង់ព្រះករុណា វិសេសខ្ញុំនា
ព្រះបាទព្រះបរមបពិត្រ ។

១៥០៧. មហារីករិលវឹងស្លាបស្អិត ធ្វើធម៌ជាវិត
អាណិតនូវក្ស័យជន្មា ។

១៥០៨. ស្រេចមហារីករួសកាលា ទទួលព្រះអាជ្ញា
ទៅដោយបណ្ដាំទសកណ្ឋ ។

១៥០៩. ចេញចាកបុរីភជស្ពាន ខំអញមរស្ពាន់

(1) RIB : mar(ṇ) nūv sar braḥ ṭit phlā
(2) RIB : ṭūc manaḥ tloeṅ

ហេតុដោយអំណាចមោហា ។

១៥១០. មហារីកស្រេចប្រែកាលា ជាម្រឹគជ័សហ្សា(1)
ប្រសើរក្រៃលែងម្រឹគឯង ។

១៥១១. មិនមានមៀងមូលនូវសុរង ប្រែប្រាណផ្លៀងផ្លង
ប្រដូចនូវទេងលតាមាស ។

១៥១២. នេត្រនីលយល់យង់ដ៏ឱភាស ដូចនីលរត្នជាស
ក៏ជាំក្នុងវង់នេត្រា ។

១៥១៣. ដូចផ្កាយព្រឹក(2) ពីរផ្ទឹមគ្នា ដូចកលតាភា
ព្រះសូរ្យតី ពីរស្មោះ ។

១៥១៤. ស្មែងស្និទ្ធ ពីរព្រៃកក្បុំក្បោះ ត្រូងច្រាងស្មើស្មោះ
ប្រកបនូវព្រះរត្នភាយ ។

១៥១៥. ដូចអ្នកឆ្លៀងឆ្លាក់ព្រោងព្រាយ ជាំក្បូងភាត់ភាយ
នូវរត្នជ័រៀបរេខា ។

១៥១៦. ថ្ពង់ថ្កូងបីប្រៃពសោភា សោភ័ណជយា
ភក្ត្រាភក្ត្រ័ព្រើសព្រើត ។

១៥១៧. ល្អល្អះសំបុរឆាយឆើត យាក់ធម្មជាតិកើត
កំណើតកំណត់ស្រស់ស្រាប់ ។

១៥១៨. រូប(3) ពិស្ណុការជ័ប្រជាប់ ប្រជាក្តូរក្តាប់
របបរបៀបរចនា ។

១៥១៩. ជាំកែវមណីមាលមុខា មើលម្តងសោតណា
បីដូចពពាលរត្នភាយ ។

១៥២០. រស្មីផ្ទះផ្លាស់ព្រោងព្រាយ ដូចកលពិពយ
ពិទូរ្យទិមរូសូរ្យកាន្ត ។

១៥២១. ដូចរត្នកោមលមាសមាន រស្មីបីរូបាន
នៃលោហិតាឆ្លែករត្ន ។

១៥២២. ម្តង ដូចមរកតកាលវាត់ រូបអ្នកយកបទុមរត្ន
នូវរត្នទៅឆ្លៃរចនា ។

១៥២៣. ដូចបរស(4) កែវកែមនូវគ្នា អស់អង្គរូបា
ចិញ្ចាចសឹងមាសនពគុណ ។

១៥២៤. កៀងគូញីញង់ដើរមុន ឈរឈប់ស្ទួលស្ទួន
សំអិតសំអាងរូបា ។

១៥២៥. អង្គនិនល្បៀនលិតបាទា យាងយាសយាត្រា

(1) RIB : ṭă sahăs
(2) RIB : phkāy pūrbabriks
(3) RIB : rūp
(4) MBN : pus
RIB : puras

គន្លងគន្លៃដើយឯរ ។

១៥២៦. ត្រេចត្រង់អាស្រមបវរ ទៀបព្រះភូធរ
ក៏រឹងអំពើមួយសា ។

១៥២៧. រឹងដើយរឹងឯរស្កាប់ខ្វារ រឹងថ្លៃកង់ត្រកាល[1]
ត្រចះត្រចង់សោភា ។

១៥២៨. ឃាក់ដូចពីត្រៃត្រឹង្គ ដូចព្រះឥន្ទ្រា -
ធិរាជក៏អាចនិម្មិត ។

១៥២៩. ដូចម្រឹគមាសមាលជ័ពិចិត្រ រូបព្រះអាទិត្យ
នាទៀប[2]ខុទ័យផុសឡើង ។

១៥៣០. ដើតដាយពន្លាយយល់ភ្លើង ដើណាឯក្រចកដើង
បីដូចនូវមយាមរកត ។

១៥៣១. ស្អាតស្អំសក្តិសមដើមប៉ ដូចនូវថ្លើលដូចនូវរត់
ក៏ត្រេចត្រង់សាលារង់ ។

១៥៣២. ក្បែរលានោះសម្ដេចភគវតី មហេសីសីតាបង់
ព្រះនេត្រយល់ម្រឹគរត្នមាសបញ្ចាប់ បញ្ចៀចចិត្តជ័រិករាជ[3] ។

១៥៣៣. ទូលព្រះជ័ទ្រង់ព្រត ពិពណ៌ទ្រង់អំណាចអាច
មៀងមើលម្រឹគមាសចិញ្ចាច ពន្លាយរត្នប្រដាប់ដូង ។

១៥៣៤. គួរស្ដេចពិឃាតយក សុពណ៌ស្បែកប្រសើរគង់
ជល់ស្ដេចស្ពល់ព្រះអង្គ អភិសេកភក្ស្យអម្រឹតជេរ[4] ។

១៥៣៥. ក្រាលលើមាសមុខរត្ន មាសប្រសើរកិរតី
ឥន្ទ្រាពិសេសពិសុទ្ធិ រូបក្រពត្តិ៍រាជា ។

១៥៣៦. នោះភាមភក្ត្រស្ដេចយល់ ម្រឹគមាសកលយាត្រា
ហៃវាលក្បបាមើលម្រឹគា អស្ចារ្យប្រែរូបាក្រឹត ។

១៥៣៧. បារក្សាសីតាបង នឹងពិឃាតអស្សូរសំដែងឫទ្ធិ
ដោយតេជសរស្សុរិជិត្រ[5] កុំឃាកយក្សនូវពាធា ។

១៥៣៨. ទើបព្រះប្រើព្រះអនុជា រក្សាភាជពនិតា
ព្រះអង្គបរិយារ[6] ចេញធរ ។

១៥៣៩. យាងព្រះបាទជ័បវរ ឯកអង្គព្រះភូធរ
នរបតីអាចទ្រង់ ។

១៥៤០. ទ្រូសរសិល្បសក្តិនូវបំពង់ ឯកអង្គស្ដេចត្រង់
គិរិន្ទ្រនូវព្រៃព្រឹក្សា ។

(1) RIB : tracā
(2) RIB : nā deb
(3) RIB : rīk rāj
(4) RIB : am riḍdhī
(5) RIB : sar puras vijit
(6) RIB : brahā

១៥៤១. នុកភានពារពានបត្តា ដល់ដេញម្រឹគា
កក្រើកសិលាបែកខ្ចាយ ។

១៥៤២. អម្រឹគយក្សភ្លឹកឫទ្ធាភាយ នរិន្ទ្រឫទ្ធីពាយ
ពន្លឹកពន្លកព្រឹក្សព្រៃ ។

១៥៤៣. លុះព្រះសុរិយាល្ងាចថ្ងៃ ខ្យដបៀនពោះព្រៃ
ទ្រហឹងនូវសត្វសូរស្នែង ។

១៥៤៤. ព្រះរិពឹងព្រះអនុជព្រះឯង ព្រះបារម្ភខ្លាចក្រែង
អសុរដ៏ទ្រើសឫស្យា ។

១៥៤៥. ល្បងព្រះអនុជធិរាជា ខ្មាយកលមាយា
អសុរាក៏ល្បួចមហោសី ។

១៥៤៦. សឹំងហាឫទ័យនរបតី បារម្ភរាជទេពី
សីតាវិសុទ្ធទ្រង់ពរ ។

១៥៤៧. ស្រេចព្រះទ្រង់សរថ្លែងសរ អម្រឹគនូវមរ
នឹងសរសម្ដេចនរបតី ។

១៥៤៨. អសុរម្រឹគា ស្រែកសព្ទយំជា រូ[1] ព្រះចក្រី
ដង្ហោយស្រែកហៅ សុមិត្រមេត្រី អសុរអប្រិយ
នេះគឺយក្សា ។

១៥៤៩. បីអាចប្រមាថ បីអាចពិឃាត ព្រះរៀមហៅឯណា
ដង្ហោយរស្រែកហៅ ហៃលក្សកើយបា អសុរពាធា
លក្សកើយជួយបង ។

១៥៥០. ក្សណាឮសូរសព្ទអសុរស ទេពីប្រើស្ដោះ
ព្រះលក្សគឺព្រះអនុជា ។

១៥៥១. ហៃលក្សចូរបាយាត្រា ស្រេចតាមជេស្ឋា
ធិរាជដ៏រងទុក្ខទល់ ។

១៥៥២. ព្រះលក្សក្រាបបាទយុគល ប្រណាម្យទូលថ្លែងកល
កុហកអសុរមាយា ។

១៥៥៣. សូមទានព្រះអង្គកុំព្រះចិន្តា បារម្ភព្រះជេស្ឋា
ធិរាជនោះឡើយតិឡូវ ។

១៥៥៤. សរព្រះដូចព្រះម្រឹត្យូវ ពោះបីសែនសត្រូវ
សាហ័សសហាចដល់ព្រះអង្គ ។

១៥៥៥. ព្រះឯងព្រះអង្គអាចទ្រង់ សរព្រះពិស្ណុពង្ស
ពិឃាតសត្រូវពាធា ។

១៥៥៦. ដូចព្រះនេត្រព្រះពនិតា យល់ឯងកាលណា
ព្រះស្ងាញ់នៃរាមបរមសូ ។

(1) RIB : rūp

១៥៥៧- ហើយព្រះមកឆ្លាញ់ខរទុរ- យសញាតិនិប្រយុរ(1)
ក៏លាញទាំងទូសត្រីសិរ ។

១៥៥៨- លាញពលនូវតិភាគមារមី ពះពាធពលពីរ
ប្រទះព្រះឆ្លាញជ័យមរ ។

១៥៥៩- សូមព្រះមហេសីជឿសរ ជឿតេជព្រះករ
ព្រះអង្គព្រះពង្សពិស្ណុ ។

១៥៦០- នោះរាជសីតាសោកព្រះទុ- ធរទ្រង់ឫទ្ធិក្ខុ
ព្រះទៀមអសូរពាធា ។

១៥៦១- ស្រែកហៅហៃលក្សអើយជា នាព្រះរាមា
ឥរាជឥតសូរយើងហោង ។

១៥៦២- អញនឹងជាជាខ្ញុំអ្នកគ្រង បំរើព្រះហោង
ទម្ងន់សម្ដេចព្រះរាមា ។

១៥៦៣- នេះតម្បូវជ័ខុស្តអាជ្ញា ហៅថាលក្សជា
តាំអឹងនូវអាជ្ញាក្សត្រ ។

១៥៦៤- ញាំងមានអាជ្ញាមួយឃាត់ ជាបានប្រណិប័ត
នូវព្រះរាជអាជ្ញានោះ ។

១៥៦៥- នេះតម្បូវតែអាជ្ញាស្មោះ ហៅជំជាឆ្គោះ
អសូរប្រមាថជេស្មា ។

១៥៦៦- ពោះបើជាពុំចរយាត្រា ក្រែងលោកនិន្ទា
ថាជានឹងមិនត្រង់បងឯង ។

១៥៦៧- ព្រះលក្សមិនបរិសុទ្ធឈ្មោង ហេតុកម្មនឹងបង្វែង
ព្រះអង្គនៅមានវេរា ។

១៥៦៨- លើកអញ្ជលីទូលពនិតា ខ្ញុំគិតព្រះរាជា
ជននិបស្តើត ខ្ញុំនៃ ។

១៥៦៩- លេះឲ្យខ្ញុំដឹងព្រះហឫទ័យ ដោយអធ្យាស្រ័យ
ហឫទ័យសម្ដេចប្រើខ្ញុំហោង ។

១៥៧០- ព្រះលក្សអធិស្ឋានផ្សង ហៃទេពតាឯង
ជំមាននៃព្រះធរណី ។

១៥៧១- ទេពារក្សអារក្សគិរី ទេពារក្សព្រឹក្សី
ក៏គង់នៃព្រៃពនាន្ត ។

១៥៧២- ខ្ញុំសូមផ្ញើព្រះពនិតា សូមព្រះករុណា
រក្សាសម្ដេចមហេសី ។

១៥៧៣- ក្សិណានោះព្រះលក្សនរបតី លាព្រះទេពី
សម្ដេចនឹងយាត្រាត្រេច ។

(1) MBN : yāt subraḥyav
RIB : yād suprayūr

១៥៧៤- ចេញវៃលែងព្រះអាស្រមពៅតិច ទើបព្រះអង្គស្ដេច
ស្រេចដល់ព្រះរៀមភាមា ។

១៥៧៥- ដងនោះក្រុងភពអសុភ យល់ព្រះអនុជា
ត្រេចតាមព្រះរាមដ៏បពិត្រ ។

១៥៧៦- ភពព្រៃកាណាឫសីសិទ្ធ ចងដងដាដើរព្រឹទ្ធ
ស្រគត់[1] រូបព្រាហ្មភណាចារ្យ ។

១៥៧៧- កាន់សង្វៀតស្លឹកស្មី ពាក់ថ្កាំស្លូតឥដ៏ហោមការ
ធៀរថើមចាប់ភក្ត្រពាក់សង្វារ ដ៏ស្អូតសាស្ត្រាមន្តសេពដូង ។

១៥៧៨- ដូចក្រមឫសីសិទ្ធ សីលាក្រឹត្យប្រសើរទ្រង់
ត្រៃពេទសាស្ត្រឫសីពង្ស ប្រព្រឹត្តរូបព្រាហ្មភណាចារ្យ ។

១៥៧៩- ឯកអង្គដ៏ត្រេចព្រៃ ដោះសំដៅនៃពនាន្ត
ទីអាស្រមបទនាងណា ព្រាហ្មណ៍ថ្លំសង្ខក្លាងសំដែងនោះ ។

១៥៨០- ក្បួណនោះព្រះភគវតី មហេសីសីតានេត្រ
យល់យល់ព្រាហ្មព្រឹទ្ធសំដែងនោះ ពាត់ពាក់ពស្ត្រាសង្វារទ្រង់ ។

១៥៨១- ស្មានព្រាហ្មពិសុទ្ធសីល គឺដ៏នាងប្រណម្យផ្ចង់
ឲ្យសាសនាពរម- ង្គលដ៏គាប់គំនាប់មារ ។

១៥៨២- ក្បួណភពណាស្ងួរ យល់មហេសីនិមិលនមសការ
ក្នុងថ្លើមយាក់រូប្រែយារ ប្រយាប់ដុតយាឫទ័យខ្ពុរ ។

១៥៨៣- ហៃរមេដ៏មានទ្រង់ រូបបញ្ចង់ដ៏បវរ
ពោះទេពតាំងនិករ អប្សរកញ្ញាដ៏ស្អុតិស្រី ។

១៥៨៤- ពុំអាចនឹងត្រៀបត្រាប់ រូបមេដ៏មហេសី
អញស្មាននាងឧមាភគវតី ប្ដីខេរទីងបំបាបង់ ។

១៥៨៥- ណេះមេដ៏មានលក្ខណ៍ បវរភក្ត្រប្រសើរទ្រង់
ពោះទេពនូវមនុស្សបីនឹងចង់[2] ប្រសប់មេដង្ហើមស ។

១៥៨៦- ម្ដេចមេមកនៅព្រៃភ្នំ ទុរគមសឹងបិសាចចរ
សឹងម្រឹគត្រេចម្រឹគឈរ ម្រឹគដ៏ចាំម្រឹគដ៏ចាប់ ។

១៥៨៧- គួរមេពៅនៅនគរ បរិបូណ៌ពលប្រដាប់ស្រាប់
គួរមេស្ថិតស្ពានគាប់ គស្ងួរសេពដ៏គង់គាល់ ។

១៥៨៨- ស្រីគ្រឿអតិរេក អនេកដ៏រៀងរាល់
គួរមេស្រីក្សេមដ៏ក្រសាល[3] ក្រសោបបុស្បក្រចេះទ្រង់ ។

១៥៨៩- យល់អញមហាភ័ព្វ មហាបុណ្យបានយល់អង្គ
ធ្វើម្ដេចកុលភ្នែកគឺដ៏យង់ មួយសែនសោតនឹងមើលគ្រាន់ ។

(1) RIB : sugat
(2) RIB : pī pañcaṅ'
(3) MBN : guor metriy khsaem ṭa krasāl
RIB : guor me krasaet ṭă krasāl

១២៩០- ធ្វើម្ដេចនឹងគុណខ្លួន | គុណអណ្ដាតបានមួយសែនពាន់
បងនឹងសរសើររូបចន្ទ្រ | ដ៏ច្រាលថ្លៃនៃទេវា ។

១២៩១- ក្សណនោះសម្ដេចព្រះភគវតី | មហាសិរីក្នុងឋានបុរយា
ព្រាហ្មណ៍នេះពុំដូចព្រតដ៏សីលា | ភិណាចាប្បដ៏ប្រយុទ្ធ ។

១២៩២- សួរអញសរសើររូប- | ម្ដីព្រះនរិន្ទ្រដ៏ឥតសួរ
ឲ្យព្រាហ្មណ៍ដ៏កំណាចមុ- | រជនជិងជើងព្រះចេស្ដា ។

១២៩៣- ក្សណនោះសម្ដេចភគវតីវរលក្ខណ៍ | ដាក់ព្រះភក្ត្រខុនសិរសា
លើកអញ្ជលីស្ដោះនរា- | ធិបតិន្ទ្រដ៏រឹងឫទ្ធិ ។

១២៩៤- ថាព្រាហ្មណ៍អញជាមហេសី | ព្រះហរិន្ទ្រាជសម្ដេចស្ថិត
សេពសោយរាជពិភពត្រីត្យ | បរមរាជស្រីអយុធ្យា ។

១២៩៥- ស្ដេចលើកត្បូងសិល្បសរជ័យ | អធិកក្រៃពុំដឹងស្គាល់
ផ្ដាញរាពបរមសូរ្យដ៏មហា- | ឫទ្ធិតេជោដ៏ខុតារឃ្លាង ។

១២៩៦- ស្រេចស្ដេចអភិសេកអញ | ពីឆ្នាំមួយដល់ដប់ឆ្នាំហោង
ស្ដេចត្រេចព្រៃពនានាង | ព្រៃព្រឹក្សាដ៏សាងសីល ។

១២៩៧- ស្ដេចត្រេកឫសីសិទ្ធ | សីលាត្រីត្យព្រះពុំដែលខ្វិល
នាស្ដេចវេលាហើយនឹងទិល | លុះដល់ស្ពានត្បូងហោង ។

១២៩៨- ចូរព្រាហ្មណ៍ចរយាត្រា | កាន់អាសនាដ៏រូបរាង (1)
ជាស្ពានតិដត្បូងហោង | ក្សត្រទាំងពីរពុំដែលឆ្ងោះ ។

១២៩៩- ភាពបង់ភាពព្រាហ្មណ៍នោះ | ជាយក្សាឈ្មោះ
សំពៀងនូវយក្សាសព្វ ។

១៣០០- គុណមុខអភិមុខប្រជាប់ | គុណអម្ពរស្រាប់
ប្រដាប់នូវគ្រឿងបីចំពាស់ ។

១៣០១- គុណគុជកែវមួយចង់សស្ដ្រ | អាវុធដ៏ត្រចះ
អាវុធនោះដ៏សោះសា ។

១៣០២- គុណជើងជួនជាន់ពសុធា | គុណអាភរណ៍អា-
ភរណ៍គុណនូវអាភរណរត្ន ។

១៣០៣- គុណអង្គអធិកដ៏អាត្ម | អចមិអសត្យ
អនេកអនាធិទេពី ។

១៣០៤- យក្សយល់ថ្លែងច្បាស់នូវឫទ្ធិ | ហើយហៅមហេសី
សំដែងនូវយសដ៏សម្បត្តិ ។

១៣០៥- បងជាឥស្សរមហាក្សត្រ | អស់អង្គអមររត្ន
នៅតាវតិង្សភពស្ថិត ។

១៣០៦- សឹងមកទូលថាខបង | បងអាចឆក់ផ្កា
ពិមានព្រះពៃស្រពណ៍យក ។

(1) RIB : ṭă ruom raṅ

១៣០៧- បងអាចដេញព្រះយមរក　　យមកេងក៏ជ្រក[1]
ដ៏ជ្រោះគោហាសព្វស្ថាន ។

១៣០៨- បងអាចយកឥន្ទ្រដ៏ប្រធាន　　អមរនាគប្រៀនប្រាន
ប្រដាប់នូវរដ្ឋភព្វភស្ត្រ ។

១៣០៩- ហៃកលាសបតិតវិនាស　　ជាមង្គលអាសន៍
តស្ងូរពន្លឺកក្ខវិនាថ៍ ។

១៣១០- បងអាចឯកអង្គដ៏ឧទារ　　ផ្គាបសព្វស្នូតមារ
ជន្លំពាំងទេពបរិបូណ៌ ។

១៣១១- បងប្រជ័នាមភពណាសូរ　　សោយភព្វដ៏ប្រយូរ
ពិសេសពិភពលង្កា ។

១៣១២- បងព្ទរូបមួយអាត្មា　　ស្ថិតពនាន្តា
អនាថអលោចឯកអង្គ ។

១៣១៣- បងមកយកមេកោប្រជ័　　សោយភព្វបំរុង
ស្តេកស្តិតរួមរក្សាភស្ត្រ ។

១៣១៤- មេឯងគួរគង់លើអាសន៍　　ត្រីមុខមាលមាស
ប្រដាប់នូវរត្នរចនា ។

១៣១៥- អស់មុខមន្ត្រីសេនា　　ភជវង្សពង្សា
មកសូមព្រះពរយើងហោង ។

១៣១៦. មេឯងគួរគង់នៅនឹងបង　　អស់មន្ត្រីផង
ក៏ថ្វាយបង្គំបាទា ។

១៣១៧. ហៃរាពមនគឺពីងមិថ្យា[2]　　ប្រុះខ្ញែសភមា -
ធិភជក៏ល្បួចអញហោង ។

១៣១៨. អញបុត្រក្សត្រមិជិលាចង　　ពន្ធពារក្សត្រផង
ព្រះបាទទសរថភជា ។

១៣១៩- ទសរថរឹងឫទ្ធិចេស្តា　　រិព្រះភមា -
ធិភជនូវព្រះនរបលក្ស ។

១៣២០- បុត្រព្រះទសរថសិទ្ធិសក្តិ　　អង្គព្រះនារាយរក្ស
ដ៏លោកធាត្រី[3] ត្រៃតា ។

១៣២១- នេះតម្រូវទ្វាបរយុគា　　ប្រែជាព្រះភមា
មហាប្រសើរលើសត្រៃ ។

១៣២២- ពោះស្ទឹមទេពៗមហាត្រៃ　　ពោះនូវស្ទឹមក្សត្រៗថ្លៃ
ប្រសើរលែងក្សត្រាផង ។

(1) MBN : yaṃ tmīṅ rat jrak
(2) MBN : hai rāb biṅ bis mithyā
RIB : hai rāb(ṇ) min gī bīṅ mithyā
(3) RIB : lokadhātu

១៦២៣- ពោះនូវថ្នឹមសិល្បៗជ័កន្លង ពោះនូវថ្នឹមកម្លាំងផង
កម្លាំងសម្ដេចមហិមា ។

១៦២៤- អញជាវររាជជាយា អញចៀងសត្យា
នូវពាក្យសត្យព្រះភូធរ ។

១៦២៥- ទាំងទេពសួគ៌កាមាវចរ ពោះក្សត្រៗប-
រមភាជនូវចង់ណោមលង ។

១៦២៦- ពោះឥតនូវព្រះអង្គហោង អញសូមស្លាប់ផង
ព្រះបាទសម្ដេចភាមា ។

១៦២៧- អញពុំថ្លែកមើលក្សត្រា ទេពទាំងកាមា-
ពចរជ័អញឥតចិត្ត ។

១៦២៨- នេះឥឡូវដូចមិនយក្សមិ- ច្បាថ្មីស្ដមកគិត
រំលាងអធិស្ឋានអញ ។

១៦២៩- ព្រាត់ព្រះមហាព្រតជ័សំឡាញ់ មិនយកសារបាញ់
ពុះទ្រូងនៃអញនេះឥឡូវ ។

១៦៣០- វៃលងបានខ្មោចអញថ្លើភូ- ធរពីរព្រះឥន្ទ
មកលើកសពអញសិស្ការ ។

១៦៣១- ឥឡូវមិនអួតអង្គជ័ទុទារ ប្រាបសព្វសួគ៌មារ
ទាំងទេពក័ទូលបាទ ។

១៦៣២- នាលាក់លលោមល្អឯណា វិស័យជាក្សត្រា
សឹងទៀរអំពើល្អចហោង ។

១៦៣៣- ក្រុងភាពក្រែវភ្លាងសើចស្នង មេជេរពោលបង
វិស័យចិត្តស្រីរៃងរឹង ។

១៦៣៤- មេក្ដិចខ្វារបងជ័ព្រលឹង លុះអស់កំហឹង
ក្រចកក្រចៅបងសោត ។

១៦៣៥- បងអត់បងទុនពុំក្រោធ មេស្មានបងនោត
ដូចបស្វីប្ដីមេមុន ។

១៦៣៦- បងនូវយកមេទៅបង្ហាញបុណ្យ ហើយមេដឹងគុណ
ញញឹមញញែមរកបង ។

១៦៣៧- ទេពីក្រោធប្រះខ្លួនហោង ភាពទុបហោះឆ្លុង
អនាថកណ្ដាលវេហា ។

១៦៣៨- ជងនោះវររាជសីតា ដូចបូណ៌ចន្ទ្រា
គឺភាពណាល្អចទៅ ។

១៦៣៩- ករកាយបីបង្គំយំនៅ គក់ទ្រូងប្រាលឆ្លោ
ទ្រហោយាប្ញ័យសោកា ។

១៦៤០- ថ្កាំថ្ងៃព្រថ្កាំព្រឹក្សបព្វតា ថ្កាំទេពអប្សរា
ជីសិង(1)នៃគោឃាស្ថាន ។

(1) RIB : sịṅ

១៣៤១- ហៃទេពធុរទូលពត៌មាន ព្រះរាមក្សត្រក្សាន្ត
ប្រសើរតស៊ូរអញនៃ ។

១៣៤២- ក្រុងរាពណចោរចុះធ្វើសក្រៃ លួចលុះកណ្ដាប់ដៃ
តម្បូងកែវនាំទៅណា ។

១៣៤៣- អង្គអញជិតដោយយក្សា វិចិត្តល្អដ្ឋា
ស៊ូស្លាប់ពុំឲ្យអាស្រូវ ។

១៣៤៤- ពោះបីអញអស់ជន្មជាតិតទូ នោះនៃព្រះគុ-
ណទេវន្ទ្រធិរាជបងអញ ។

១៣៤៥- សីតាសោកព្រះជ័សំឡាញ់ ទឹកព្រះនេត្រពេញ
ព្រះភក្ត្រក៏ព្រាលសឹងឈាម ។

១៣៤៦- ឱព្រះបពិត្រនរបតីរាម ស្ដេចថ្លែងសរតាម
អស្សូររួសរក[1] ខ្ញុំភាំ ។

១៣៤៧- ខ្ញុំឈឺឥតថ្លែងឥតថា[2] ឈឺព្រះរាមា-
ធិរាជធម្មិកធារធម៌ ។

១៣៤៨- ឈឺមួយរាពណចុះធ្វើសមា- នុណាលួចលុះដោយការ
ដំនៀលនូវកើតចេរជ្រា ។

១៣៤៩- ឈឺមួយទៅព្រះនរា- ធិបេសូរិន្ទ្រា
ថាខ្ញុំពុំស្លូតភក្តី ។

១៣៥០- ឈឺមួយទៅព្រះចក្រី ជឿខ្ញុំអស់ក្តី
សម្ដេចនូវសោកខ្ញុំហោង ។

១៣៥១- ឈឺមួយព្រះពុំដែលមានប្អូង ស្ដេចឡើយចាញ់ល្បួង
អសូរកុហកកាចក្ដាត់ ។

១៣៥២- ឈឺមួយព្រះលក្សប្រណិប័ត អញឯងប្រើគាត់
ជាកម្មនឹងកើតអន្តរាយ ។

១៣៥៣- ឈឺមួយទៅព្រះជ័នារាយ ថាលក្សមើលងាយ
ពុំខ្លាចព្រះរាជអាជ្ញា ។

១៣៥៤- រឹងគិតរឹងស្មោយសោកា សែនសោកជ័យហា-
វិបត្តិវិបប៉ស្ពានស្ពិត ។

១៣៥៥- នាងស្រែកខ្ញួលយំជ័អាណិត ហាឫទ័យរឹងគិត
សម្ដេចព្រះនារាយភាមា ។

១៣៥៦- ក្រុងរាពណបោះទៅលង្កា នាំរាជសីតា
មនោមនះត្រេកអរ ។

១៣៥៧- ចុះគ្រឿងអាវុធកាងករ ការក្រែងព្រះភូធរ
នរបតីស្ដេចដល់ ។

(1) RIB : ār sur rat' rak
(2) RIB : it thlịṅ it thṃā

១៣៥៨. ហោះទៅកាំងយានមណ្ឌល នាងនាជមើលយល់
បក្សីលើខ្នងបព្វតា ។

១៣៥៩. នាងស្រែកយំស្លាងផ្តាំថា ផ្តាំកុកបក្សា
ឲ្យប្រាប់ព្រះរាមប្រតិពល ។

១៣៦០. កុកអើយទោះព្រះស្តេចយល់ ព្រះនរបតីដល់
នូវព្រះអនុជមកក្តង ។

១៣៦១. ថ្វាយទូលពាក់មានអញដង តម្រូវនេះហោង
អស្សូរក៏ល្អជអញណា ។

១៣៦២. អង្គអញតុក(1) ឯកអាត្មា ទល់ទុក្ខអនិច្ចា
មហាអនាថពេកសល់ ។

១៣៦៣. កុកអើយទោះព្រះបាទស្តេចដល់ ឲ្យព្រះទសពល
នូវព្រះអនុជនរបលក្ស ។

១៣៦៤. តីរអង្គពង្សពិស្ណុ(2) ឫទ្ធិសក្តិ ឲ្យស្តេចពិទក្ខ(3)
អស្សូរជ័ព្រះឫស្សា ។

១៣៦៥. ដោយឃាមុះមានះសោះសា ល្អជណាក់ពាធា
តម្រូវក៏នាំទៅហោង ។

១៣៦៦. ថ្វាយព្រះស្តេចទូលបាទក្តង ឲ្យព្រះអង្គហោង
តាមមកឲ្យទាន់អញណា ។

១៣៦៧. នាងផ្តាំត្រៃត្រឹក្សបព្វតា ផ្តាំទេពអប្សរ
ជ័សិង(4) នូវភូមិស្ថិតស្ថាន ។

១៣៦៨. ថ្វាយទេពដង់ទូលពតិមាន ព្រះរាមជ័ប្រធាន
តស្សូរនៃអញសព្វថ្ងៃ ។

១៣៦៩. មនគី(5) ភាពចិត្តចោរចង្រៃ ល្អជលុះកណ្តាប់ដៃ
តម្រូវនឹងនាំទៅណា ។

១៣៧០. អង្គអញជិតដោយយក្សា ចិត្តអញព្រួញា
ស៊ីស្លាប់ពុំឲ្យមាស្រូវ ។

១៣៧១. ពេលងបានខ្មោចអញផ្ញើភូ- ធរព្រះតនូ
មកលើកនៃសពាសំស្ការ ។

១៣៧២. ពេលបានយល់ព្រះភូវនាថ ម្តេចម្ល៉ើយអនាថ
មាស្រូវអសោចឆ្នេះនៃ ។

១៣៧៣. ទុះទុសម្តេចបពិត្រ សម(6) អ្នកនឹងមកអំពាំត្រៃ

(1) RIB : tuḥ
(2) MBN et RIB : bis
(3) MBN : bīr dāk
RIB : bidaks
(4) RIB : siṅ
(5) RIB : min gī (pas.)
(6) RIB : cañ'

ញុំាងបានម្រឹគឫអបរាជ័យ អសូរល្បួចមៃធិលី[1] លាក់ជ័នាំទៅ ។

១៣៧៤. អៈព្រះអង្គសម[2]នឹងមកពីព្រៃក្តៅ ម្ល៉េះសម[2]នឹងដង្ហោយហោ
មហោសីតាំងរាប់ ។

១៣៧៥. ស្រណោះព្រះផង់រកប្អូនរត្ន តប្អូវប្អូនព្រាលឹងព្រាត់
អសូរថ្វុះបំភាសហើយ ។

១៣៧៦. ព្រលឹងអម្ចាស់ប្អូនអើយ ព្រះស្រដីសុមិត្រឆ្លើយ
ឲ្យជ័ជាំអញប្អូនណា ។

១៣៧៧. ទុអញជាប្រៃចិត្ត ឲ្យសុមិត្រជ័យាត្រា
ពុំដឹងអសុភា ជ័លល្អឯបំភាសហោង ។

១៣៧៨. ទុអញធ្លាប់នៃបនិត្យ ស្អាលស្និទ្ធពុំដែលឆ្គង
ធ្លាប់យកកំភាលនូវរូបរង ម្រិក្រតីនិត្យ្យសញ្ញាថ្វៃ ។

១៣៧៩. ទសមុខមារមុះនិរភ័យ[3] ថ្មីមនាងគ្រៀវថ្ងៃ
ច្រឡំនូវស្សប្យរាជ្យ ។

១៣៨០. តើបពះលើក្រុងបក្សី ក្រៃវៃឯតន្ត្រី
គីនាមជតាយុយង់ ។

១៣៨១. បក្សីយល់ទសមុខថ្វង់ នាងនាថនៃបអង្គ
ទុរះក៏មើលភក្ត្រា ។

១៣៨២. បក្សីដឹងដើមសីតា ស្រែកសព្ទឃោសនា
សហ័សសហិចហើរហោះ ។

១៣៨៣. ឆៀងនាបធុរជាស្អាសស្អុះ ថ្វើយទសមុខមុះ
មិនកាចអាចលួចពនិតា ។

១៣៨៤. អ្នកនេះជាបុត្រប្រុសា ទសរថរាជា
ជាមិត្រសំឡាញ់អញហោង ។

១៣៨៥. អញនឹងផ្លាញមិនកាលនេះម្តង ឡិតមិនអាចក្រង
ទេតីនូវពុតពាណោ ។

១៣៨៦. ទសមុខឃហិមាមានោ ស្ទូតអាងតេជោ
ជយានុភាពជ័កម្លាំង ។

១៣៨៧. ជាថ្វើយសត្វស្លាបបីអហ - ង្ការកាចចង់ឃ្លាំង
ជម្ពើមមហោសីស្លូតិ ។

១៣៨៨. មិនជាសត្វស្លាបពុំគួរ ឆ្លៀលផ្ទាត់បឹងបួរ
បបួលនូវគ្នាពាំភស្ត ។

១៣៨៩. ក្រាបក្រុងស៊ុតរះវើញាស់ មិនអាចទប់ពាស់
សហ័សនៃអញផ្លាញផ្លា ។

(1) RIB : maidhulī
(2) RIB : caṅ'
(3) RIB : dasamukhamār mān bhoc bhăy

១៦៩០- មិងការពារដោះធងតណ្ហា យកខ្លួនជាជា
សំឡាញ់នៃក្សត្រពង្សពូជ(1) ។

១៦៩១- មិនបក្សីសាមាន្យយោធ បានពង្សក្រមោធ
ត្រលាំង(2)កំណើតទុរលក្សណ៍ ។

១៦៩២- ជតាយុឆ្លើយថើយមិនយក្ស អញស៊ីងស្មើរសក្តិ
ស្ដេចមិនក៏អាងសួតអង្គ ។

១៦៩៣- យកខ្លួនជាជាទេពពង្ស ជាតិដូចថ្មើសទ្រង់
អាវុធតុំគិតយុត្តិធម្ម ។

១៦៩៤- ក្សិណនោះជតាយុហើរមក កាងស្លាបអស្ចារ្យ
សហឹសនៃយោជនិង(3) ។

១៦៩៥- មេឃមិនសែងស្បៀបីកំពាំង ឲមិតទូតាំង
មហាវេហាសហាប់ខ្យល់ ។

១៦៩៦- ភពរះរូតរត់ធូលដល់ ជតាយុអស្វល
ក៏ថ្លាំងប្រណាំងជាញជ័យ ។

១៦៩៧- សីងជាញរណរង្គទីថៃ ខុការឫទ្ធិថៃក្រ
ក្រម្លេកក្រឡាប់ប្រតិរព ។

១៦៩៨- ចឹករេចងក់សេះបីជិប្រប់ វិលរេចបីក្រឡប់
ប្រយុទ្ធនៅវេហាសហា ។

១៦៩៩- ឋាក់រេចភជរេចជ័ប្រហារ ភពថ្លៃឯសរការ
កម្លាំងជតាយុយប់ ។

១៧០០- រ៉ាជតាយុយសរេចបង់ ស្អុះស្អាសផ្ដោះអង្គ
អរិត្រូភពនោះក៏ជាយ ។

១៧០១- ថ្លែងសរពាន់ពាត់ពិសសាយ រូបរូបជ័ភាយ
រំដួលនូវនាគគណា ។

១៧០២- រ៉ីថំពុះពេជ្រពាំអស្សពាហ បង់អស់ពាហាណ៍
ប្រកាប់ក៏ចឹករេចខ្ចាយ ។

១៧០៣- បង់រេចចឹកនាគជំរុះភាយ បង់នាគទាំងឡាយ
ទំលាយអាវុធសត្រូ ។

១៧០៤- ភពហោះវេហាសនូវជតា- យុហើរវេហា
មហាប្រុះយុទ្ធងាប់ ។

១៧០៥- ពួលើមេឃមហិមាសព្ទ ដូចស្ទួតនូវក្រឡាប់
ហាក់ផ្កាប់តាំងដែនធរណី ។

(1) MBN : baṅs bodh
RIB : baṅs bojjh
(2) RIB : traleṅ
(3) MBN : yoj kān kāṃṇ

១៧០៦- អស្ចារ្យអស់ទិសអស់ទី អសុរិន្ទ្ររបតី
ប្រយុទ្ធនូវគ្រុឌបីតគ្រែង ។
១៧០៧- ឮលើអម្ពរបីល្វែង សព្ទឮសព្ទឯង
អឺពាល់នូវសព្ទអសនី ។
១៧០៨- ដូចគង្គាកាលិន្ទី(1) មហាមេឃអប្រិយ
ប្រយោជន៍ប្រយុទ្ធយកជ័យ ។
១៧០៩- ភាពយុទ្ធអស់អង្គតេជវៃ ឥតជ័យជ័ពិជ័យ
ក៏រិះនូវរកកលធ្វើ ។
១៧១០- យល់ព្រះទំរង់រត្នលើសលើ ឥតថ្លៃបីនូវស្មើ
ពិចិត្រឥតឯតណា ។
១៧១១- នូវព្រះហស្តភានសីតា ទំងឫទ្ធិជ័មហា-
ពន្លឹកពន្លឺជិតដល់អង្គ(2) ។
១៧១២- លុះអសុរភាពនោះក៏ទ្រង់ ដោះអង្គត្រូវអង្គ
ជតាយុភាននោះក៏ធ្លាក់ ។
១៧១៣- ដើមស្លាបស្លុតធុះប្រត្យក្ស ឈាមហូរជ័សស្រាក់
សស្រោចក៏ពេញពសុធា ។
១៧១៤- ហេតុដោយតេជព្រះភាមា ការព្រះនៅជា
សម្ដេចព្រះនារាយនរនាថ ។
១៧១៥- ចក្រពត្តិពិសេសសល់ខ្លាត ស្ដេចទ្រង់ពិឃាត
អរិន្ទ្រអសុរសោះសា ។
១៧១៦- លុះព្រះជាព្រះភាមា ចក្រពត្តិគីជ័ជា
ពិសេសពិសុទ្ធព្រះទំរង់ ។
១៧១៧- លុះអសុរភាពនោះ(3)ក៏ទ្រង់ ដោះអង្គត្រូវអង្គ
ជតាយុភាននោះក៏ធ្លាក់ ។
១៧១៨- ដើមស្លាបស្លុតធុះប្រត្យក្ស ឈាមហូរបីសុភគ
សុភាគ(4)ក៏ពេញប្រថពី ។
១៧១៩- ក្រាបស្លប់ខាងភានគិរី ជន្មាពិជី
ពិណាបពុំលុះមរណា ។
១៧២០- ឯភាពសោតយល់មហិមា នាំភានសីតា
ក៏លុះនៃលង្កាស្ថាន ។
១៧២១- ដឹកលំទុកលើភានស្ថាន ទេពីប្រះប្រាណ
ធារម្ភសម្ដេចភាមា ។
១៧២២- ភាពក្រេវក្រោធភានសីតា យក្សយោធាអា-

(1) RIB : kās nadī
(2) RIB : git ṭă aṅg
(3) RIB : āsant rāb(ṇ) noḥ
(4) RIB : subhāj

មាត្យដងជួលជាំយោបាន ។

១៧២៣. នាំនាងទៅទុកនាស្ថាន                    អសោកឧទ្យាន
ជំណុចជំណាប់សោភា ។

១៧២៤. ឯឯនោះព្រះលក្សយាត្រា                    រសៀលរែសងសុរិយា
ត្រសៀករំភើយព្រះពាយ ។

១៧២៥. សព្វសត្វសឹងហើរទៀងភាយ                    ល្អងកេសរខ្ចាយ
ខ្ទះភាយសុគន្ធខ្ជរ ។

១៧២៦. ឯព្រះរាមសោតថ្លែងសរ                    បានម្រឹគដ៏បវរ
ក៏សៀតនូវខ័នសរសក្តិ(1) ។

១៧២៧. ព្រះរាមស្មឿងមើលព្រះលក្ស                    ព្រះលក្សក៏ដាក់
បំពង់តម្លោះកៅទណ្ឌ ។

១៧២៨. លុតជង្ឃ្មៃដដាក់ព្រះខ័ន                    ក្រាបបាទជូលកាន់
អម្រឹគពីព្រះជេស្ឋា ។

១៧២៩. ព្រះរាមដណ្តឹងឯឯយាបា                    រក្សរាជសីតា
ម្តេចឡើយបី(2) បាដកអាយ ។

១៧៣០. ព្រះលក្សទូលដោយអភិប្រាយ                    បតិត្រអញខ្ញុំនៅនាយ
បំរើព្រះរាជសីតា ។

១៧៣១. ឮព្រះឱស្ឋរាជឧង្ការ                    ថ្លែងស្រែកហៅខ្ញុំថា
អសូរប្រមាថព្រះអង្គ ។

១៧៣២. ព្រះទេពីសោយសោកាទ្រង់                    ប្រើខ្ញុំស្រេចគ្រប់
ព្រះឱស្ឋអម្ចាស់ហៅហោង ។

១៧៣៣. ខ្ញុំផ្ញើព្រះធរណីផង                    ឲ្យព្រះធរណីគ្រង
ទំពាំអញខ្ញុំទៅដល់ ។

១៧៣៤. ព្រះរាមថាឱបាផ្ទល់                    បាពុំគិតយល់
ដ៏ក្តី អនាគតកាល ។

១៧៣៥. នោះមានអសូរសហ័សពាល                    ព្រះធរណីបាល
ម្តេចសមពុំនៅគង់យក្សយក ។

១៧៣៦. លេះបាអាចបង់បងមក                    ដើរត្រេចព្រៃរក
នាអ្នកដ៏មានចេស្តា ។

១៧៣៧. ព្រះលក្សទូលព្រះករុណា                    បតិត្រព្រះរាជសីតា
ខ្ញុំផ្ញើនឹងព្រះធរណី ។

១៧៣៨. ខ្ញុំថ្លែងតេជព្រះចក្រី                    ទូលព្រះមហេសី
ពុំជឿទំនួលខ្ញុំសោត ។

១៧៣៩. រឹងតក់ឲ្យឯទ្រង់ព្រះក្រោធ                    ជេរថាខ្ញុំសោត

(1) RIB : ka nāṃ saṃtaeṅ sar sakti
(2) RIB : mleḥ sam pī

ពុំឈឺសម្តេចរាជា ។

១៧៤០- ខ្ញុំគិតនោះហោងខ្ញុំណា ព្រះរាជសីតា
ខ្ញុំធ្វើនៃព្រះធរណី ។

១៧៤១- ខ្ញុំមករកព្រះចក្រី ទោះទុសតាប់ក្តី
ពុំជេរនូវព្រះករុណា ។

១៧៤២- ស្រេចព្រះប្រើព្រះអនុជា រករាជសីតា
សម្តេចបរមទេវី ។

១៧៤៣- ព្រះអនុជរត់រកមហោសី សព្វស្ថានប្រក្រតី[1]
សីតាបតិត្រវៃឯកប់ ។

១៧៤៤- បើកទ្វារព្រះកុដិធូលត្រង់ បន្ទំព្រះពីរអង្គ
ពុំយល់សម្តេចទេវី ។

១៧៤៥- ស្រែកហៅហៃព្រះមហោសី ព្រះរៀម[2]នរបតី
បីស្តេចវិលមកហើយណា ។

១៧៤៦- ពុំឮសព្ទរាជសីតា វឹងផ្កានព្រះជេស្ឋា -
ធិរាជទូលផ្លាង ៗ យំ ។

១៧៤៧- ឯងនោះព្រះលក្ស្ម ស្តេចដាក់ធ្នូដ៏បគ្គំ
លើកអញ្ជលីដ៏ប្រណម្យ ក៏ទូលព្រះរៀមនៃភរិយា ។

១៧៤៨- បតិត្រខ្ញុំទៅ ស្រែកហៅព្រះរាជសីតា
ពុំឮសព្ទសូរមធុរស្ថា ក៏ឆ្លើយសងសារនៃខ្ញុំសោត ។

១៧៤៩- ស្រែកហៅដោយប្រជតី គិរីព្រៃដ៏គគ្គោត
ពុំឮសព្ទមហោសីសោត ស្រែកហៅរឹងសូន្យស្ងាត់ ។

១៧៥០- រកនាអាស្រម ក្រណាបន្ទំព្រះពីរក្សត្រ
ពុំយល់ព្រះទេពីរត្ន នៅអាស្រមនោះក៏ឡើយណា ។

១៧៥១- ស្តេចស្តាប់ព្រះអនុជនៃ ក្នុងព្រះហឫទ័យរន្ធត់ចាប់ស្លុត
ក្សិណខ្វាយព្រះនេត្រដ៏ធារា[3] ក៏ហូរស្នែងដ៏ពេញពាស ។

១៧៥២- ឱះឱសីតាមេជា ពាំងាបងស្តេចឡើយប្រាស
ឱមេត្រាលីងមាស ស្តេចឡើយប្រាសពីបងទៅ ។

១៧៥៣- ឱះឱមេដ៏ប្អូនស្រី ប្រក្រតីសព្វថ្ងៃនៅ
ស្តេចឡើយមេប្អូនពៅ ប្រែប្រាសទៅឥឡូវណា ។

១៧៥៤- ឱះឱរូបមេប្រសើរក្រៃ ស្រីទាំងត្រៃភពស្មូគា
ទាំងទូទសទិសា ពុំអាចបីស្មើបាន ។

១៧៥៥- ឱឈើងនេះអង្គបី ចេញវៃឯស្រីអយុធ្យាដ៏ពិមាន
ស្តេចឡើយឥឡូវមកនៅស្ថាន នេះហោងឥឡូវប្អូនបាត់ ។

(1) RIB : sabv thṅai prakratī
(2) RIB : braḥ rām
(3) RIB : ksiṇ khcāy yal' chṅay braḥ netr ṭă dhārā

១៧៥៦- នុសមមានទេវា
បងនឹងប្អូនស្មើនឹងលារត្ន
បំភាសសង្ហារគេឲ្យព្រាត់
អន្តរាយស្ងួនប៉ិផាត់បង់ ។

១៧៥៧- ទើបមកដល់យើងបោង
ប្រាសស្នងជីពីរអង្គ
ក៏អន្តរាយស្ងួនបង់
ឥឡូវនេះពុំយល់ប្អូនដ៏ល្អើយណា ។

១៧៥៨- បងចាំកេសីបីខ្មៅញាប់
ប្អូនក្រសោបថាប់ចងនូវក្តា
ក្រែមដូចប្រួតមាលា
អស់ក្តាសារពើភ្ញី ។

១៧៥៩- បងចាំនាថ្ងាស
បីដូចពពិលមាសមានរៃរស្មី
ដូចព្រះចន្ទពេញដ៏បូណ៌មី
លោកីយយល់ពន្លឺក្រៃ ។

១៧៦០- បងចាំចិញ្ចើមទ្រួយ
បីដូចចង្កួយកោងឆ្កាងដឹយ
កោងស្រួលម៉ត់ក្រៃកាលនៃ
ព្រះពិស្ណុការកាន់ធ្នូរតំរង់វាស ។

១៧៦១- បងចាំនាកាំភា
សស្អុលសោភាបីដូចភ្ញីមាស
ពាក់តាំងរត្នអភិកាស
ប្រសើរវៃវងរត្នអំពល់ជង[1] ។

១៧៦២- បងចាំព្រះនេត្ររងថ្លា
រូបានប្រពាលរត្នដ៏កន្លង
ចាំនាសាសស្ងួលមួលតតត្តង
ប៉ុនល្អងដ៏ល្មើយនៃ ។

១៧៦៣- ចាំធ្មេញខ្មៅជិត
ដូចអ្នកប្រកិតនឹលរត្នថ្លៃ
បងគន់សំគាល់នៃ
អំពាលរូបដ៏ប្អូនបង ។

១៧៦៤- បងចាំសំបុរប្អូនជិត
ក្រៃលែងស្រលិតលឿងខ្ញៀវដ៏កន្លង
វាផ្លែកសំបុរនោះដ៏បីដង
ប្អូយនៃធ្វើផ្ទឹងៗបំព្រងទុំ ។

១៧៦៥- បងចាំចង្កេះមូលក្តាប់
ក្រសោបថាប់ព្រះបាស្តធុំ
ដោះរូវផ្លែទន្លាប់មាសទុំ
បីជិតស្រពាប់ផ្កាប់លើទិភានៃ ។

១៧៦៦- បងស្រណោះប្អូនបង
ចង់ម្រឹគយក្ខមជិកប្រសើរក្រៃ
ប្អូនប្រៀបបងតាមអម្រឹតនៃ
ប្អូនចង់អម្រឹតដ៏រេកា[2] ។

១៧៦៧- បងកាន់ធ្នូសរថ្ងង់
ដោយចំណង់ប្អូនស្នេហា
ឥឡូវនេះបានអម្រឹតា
ដោយចំណង់នៃប្អូនស្រី ។

១៧៦៨- ស្តេចសោយសោកានល
ស្មើរនឹងដាច់ខ្យល់សម្តេចនរបតី
បំរះព្រះអង្គដោយប្រថពី
ននៀលប្រមៀលពីដោយព្រៃ ។

១៧៦៩- ឈឺក្នុងព្រះអង្គរន្ធត់
ពុំត្រង់ចំប្រប់ព្រះហឫទ័យ
ដូចនូវមេរដូចនូវក្បៀយ
ឈឺក្រៃសែនដ៏សោតសល់ ។

១៧៧០- ស្តេចសោយសោកា
មហិមាបីតតដល់
បម្រាសទេពកមល
ប្រសើរព្រះអង្គផាត់ ។

១៧៧១- តីរ[3] ព្រះដោះដាលឡើងផ្ទាត់
តាមទេតីរត្ន
អស្សុរក៏ល្អូចចេញចរ ។

១៧៧២- វ៉ោភាន ពានព្រឹក្សាករ
តតឈប់តតឈរ
ព្រះអង្គសង្វាតយាត្រា ។

(1) RIB : kambal phań
(2) RIB : ţă rekhā
(3) RIB : bī

១៧៧៣. លេចព្រៃពានលើបព្វតា ធ្លាក់ធ្លាយសិលា
រន្ធត់ទាំងដែនធរណី ។

១៧៧៤. ក្នុងព្រះហឫទ័យនរបតី ក្រោធដូចអគ្គី
ក៏ឆេះសុមេរគិរីគ្រា ។

១៧៧៥. ស្តេចចរល្ហាងខ្វាយនេត្រា ឈើភាជពានិតា
ហឫទ័យព្រះអង្គអួលក្តៅ ។

១៧៧៦. ដោយព្រៃទុរគមត្រេចទៅ ទាំងពីរព្រះចៅ
ស្រងាត់ត្រមោចសោតសល់ ។

១៧៧៧. ស្តេចសោយសែនសោកានល សែនទុក្ខសោកសល់
ដោយថ្មើរអាងព្រៃភ្នំ ។

១៧៧៨. ឮសព្វសូរសត្វនាងយំ លន្លង់ទុរគម
សម្តេចនារាយធិបតី ។

១៧៧៩. ស្តេចរត់តាមរាជទេវី ដោយតេជឫទ្ធី
កម្លាំងពីរក្សត្រជ័យដែង ។

១៧៨០. ក្បិណាពើបលើត្រីទូស្លប់ស្តែង យល់ឈាមច្រាលស្តែង
ក្រៃវែងសមុទ្រជលសា ។

១៧៨១. ព្រះជណ្តឹងបៃហក្រុងត្រូជា មោះមានអ្វីជា
សត្រូវប្រយុទ្ធអធិកក្រៃ ។

១៧៨២. ក្រុងត្រីទូស្តាប់ព្រះបន្ទូលថ្លៃ ស្តេចត្រាស់ជណ្តឹងនៃ
អំពីអាជីក្តីអង្គហោង ។

១៧៨៣. ក្រុងត្រីទូទូលព្រះរឹងស្នួង បពិត្រព្រះជ័កន្លង
ប្រសើរជ័ពីរភាងា ។

១៧៨៤. បពិត្រនារាជសីតា មនគីភាពអសុរា
ក៏នាំនាងនាជជ័យមកក្នុង ។

១៧៨៥. ដោយវេហាអាកាសស្ទួង ចះលើខ្ញុំហោង
ក៏ខ្ញុំយុទ្ធជងអសុរា ។

១៧៨៦. ខ្ញុំកាងស្លាបខ្ញុំមហិមា រាពាផ្លែងសរខ្លា
ក៏សរតុំដល់ខ្ញុំងាយ (1) ។

១៧៨៧. ខ្ញុំបោះស្ទុះស្គុសខ្ចាត់ខ្ចាយ លាញរងអន្តរាយ
ញាត់ញាយពាជីនិរនាស (2) ។

១៧៨៨. រាពារឹងផ្លែងសរដេរដាស សរពេញអាកាស
ពុំអាចបីមកដល់អង្គ ។

១៧៨៩. ល្មះរាពាឃ្លាតចក្រទំរង់ ពីព្រះហស្តទ្រង់
សីតាស្រីរត្នប្រសើរក្រៃ ។

(1) RIB : bum̩ ṭal' khñum̩ nai
(2) RIB : nīs nās

១៧៩០- ទៅត្រូវខ្ញុំ អបរាជ័យ ហេតុឫទ្ធិស្ដេចនៃ
តម្បូវខ្ញុំ លុះមរណា ។

១៧៩១. ស្ដេចស្ដាប់ក្រុងក្រុឌរថា ថ្លែងដើមអាត្មា
ក៏ឈឺព្រះអង្គឯងហោង ។

១៧៩២- ស្ដេចបើកព្រះនេត្រសួរសង ទ្រង់ព្រះកន្សែងផង
ជតាយុរាជអាណិតក្រៃ ។

១៧៩៣- ថាជតាយុមានគុណក្រៃ ឥតឯស្មើនៃ
បីអាចនូវសងគុណណា ។

១៧៩៤. អញនូវជូនព្រះស្ដេចឲ្យដល់សួគ៌ា បរិវារកញ្ញា
សម្បត្តិប្រាសាទរួតរត្ន ។

១៧៩៥- ក្រុងក្រុឌស្ដាប់ព្រះបន្ទូលក្សត្រ ស្រេចហើយមរត្វាត់
ទៅកើតនាសួគ៌ាល័យ ។

១៧៩៦- បានដោយបារមីបន្ទូលថ្លៃ សម្ដេចជេស្ឋជ័យ
អំពូរតជាគតណា ។

១៧៩៧- ស្ដេចលើកសពក្រុងជតា- យុលុះសួគ៌ា
ពិមានពិភពសម្បត្តិ ។

១៧៩៨- ស្ដេចសោយទុក្ខសោកច្រើនក្ដាត់ ពីរព្រះអនុជក្សត្រ
ក៏ស្ដេចសង្វាតយាត្រា ។

១៧៩៩- ដោយព្រៃទុរគមអត្ថា ទុកភានយាត្រា
ក្រវើនតាមព្រះភជទេពី ។

១៨០០- គាប់យល់យក្សយ័ងតិរ្វីយ ស្រែកហៅនរបតី
សន្ធាប់នូវសព្វហៅបាន ។

១៨០១. ព្រៃនេះជាបុរីស្ថាន ពោះយោបីមាន
សត្វអម្រឹកយប់ឃ្លងណា ។

១៨០២- អាចមកដើរក្នុងសីមា អញនឹងតោក្ដា
ដំអែតទទេរអញហោង ។

១៨០៣- តម្បូវមីងពីរមកក្នុង គាប់អញជង់ហោង
បរិភោគនៃមនុស្សពិសា ។

១៨០៤- ពោះពីងផ្ញើចិត្តក្រោធា តោះរីងអបរា-
ជ័យពីងអញហោកបីភាយ ។

១៨០៥- ជង់នោះព្រះពិស្ណុពង្សនាភាយ ថ្លាស់ឆ្លើយអភិប្រាយ
ព្រះនេត្រព្រះសួរទៅវិ ។

១៨០៦- ឪយយក្សយ័ងយសតិរ្វីយ មីងធ្លាប់ជាប់ស៊ី
អម្រឹកសព្វថ្ងៃតោក្ដា ។

១៨០៧. មីងពុំដឹងឫទ្ធិចេស្ដា យើងពីរភាជា
ពន្លឺកខ្ញុំភ្លើងកល្បក្រៃ ។

១៨០៨- មីងមួតប្រកួតតាំង ពុំដឹងខ្លួនក្ស័យ

តិរ្យូវនេះហៅឯថ្កូលស្តែង ។

១៨០៩- ក្រុងកពន្ធ[1] ខេរទឹងខាត់ខែង ស្រែកស្រួលនូវតំរិញែង
សន្ធាប់សំពើមភង្គា ។

១៨១០- កាងចូលជាប់ព្រះបាទា ព្រះហស្ដភង្គា
ក៏កាច់ចង្កូមយក្សប្រាក់ ។

១៨១១- ស្ដេចជំស្ដេចជាន់ស្ដេចផាក់ ស្ដេចច្រានស្ដេចចាក់
ស្ដេចហែករុះភាយធ្លោះបង់ ។

១៨១២- ឈាមហូរជ្រោះជ្រោកធ្លាយឆ្ង ជោរជន់លិចលង់
រូបានសមុទ្រដលដី ។

១៨១៣- ស្ដេចស្ទាញខ្លួនយក្សនូវឫទ្ធិ តាំងព្រះនរបតី
រិតឹងចេរចរយាត្រា ។

១៨១៤- ដងនោះតាំងព្រះភង្គា ត្រេចត្រៃត្រិតក្សា
លំបាកគោកយ៉ាកព្រះអង្គ ។

១៨១៥- ក្បែរណាកុកយល់ព្រះតាំងពង្ស ហើរចុះចូលថ្ងង់
បង្គំនរេន្ទ្រនរបតី ។

១៨១៦- បពិត្រនាងនាថមហេសី ជាយានរបតី
ក្រុងភពឯងហៅឯយកទៅ ។

១៨១៧- នាងគក់ទ្រូងនាងក្រោលស្ដៅ ទួញយំស្រែកហៅ
នាងស្ដាំនៃយើងខ្ញុំហោង ។

១៨១៨- ប្រើខ្ញុំទូលព្រះអង្គផង ប្រើស្ដេចថ្លែងក្តង
សភាពិសពាន់តាមនៃ ។

១៨១៩- ព្រះលក្ស្មណ៍ស្ដេចខ្វាល់ហឫទ័យ ហៃកុកបិចចៃ្រ
ស្ដេចឆ្មើងចចើងផុសា ។

១៨២០- មិនងរែងចីកអាហារភោក្តា ដោយស៊ីងបីងណា
នោះផ្សាប់កំណើតនៃហង ។

១៨២១- កុកស្ដាប់ព្រះអនុជគ្រោតផ្គង ជៀលសាត្រាហោង
ក៏សងវាចារីងតិះ ។

១៨២២- ហៃក្សត្រតាំងតតជំណោះ ស្ដេចស្បើយមកតិះ
នៃយើងជាដួសាផាន្ទ ។

១៨២៣- អញមានបុរីរម្យស្ថាន បរិពារដងមាន
ផ្សារយើងជាសត្វបក្សា ។

១៨២៤- ខ្លាចឯព្រះអង្គឯងណា មានរាជសីតា
តែមួយជារាជទេវី ។

១៨២៥- ហេតុពាលស្រាលតុំចេះក្ដី ផាញ់កលអសុរី

(1) MBN : kruṅ khbaṅ
RIB : kruṅ kumbandh

ឲ្យយក្សយកទេពីបាន ។

១៨២៦- នេះហោងហៅដូសាមាន្យ ស្តេចមកជៀលប្រាណ
នៃយើងជាសាមាន្យណា ។

១៨២៧- ដងនោះសម្តេចព្រះរាជា ស្តាប់កុកបក្សា
ជៀលត្រូវព្រះអង្គហើយនៃ ។

១៨២៨- ស្តេចត្រិះក្នុងព្រះហឫទ័យ ដោយប្រាជ្ញានៃ
នាពាក្យកុកនេះនៅពុំឆ្ងាយ ។

១៨២៩- ឆ្លាញកុកនេះឲ្យអន្តរាយ ពុំមានសព្វសាយ
សំដីនេះហោងឡើយណា ។

១៨៣០- ស្តេចវាតកៅទណ្ឌដល់ជា ញ័រដែនពសុធា
ពន្លូកពន្លឹកសព្វនៃព្រៃ ។

១៨៣១- បក្សីយល់ព្រះដេស្នជ័យ ឫទ្ធិព្រះលើសាក្រ
ភិតខ្លាចខ្លួនក្ស័យលុះជីវរ ។

១៨៣២- ក្រាបទូលព្រះបាទជីបវរ បពិត្រព្រះបាទភូធរ
អញខ្ញុំសុំណាទោសណា ។

១៨៣៣- ខ្លួននេះជាសត្វបក្សា ដូចខ្លៅឯងណា
ប្រមាថលោកមានបារមី ។

១៨៣៤- ទោះស្តេចនូវយកទោសក្តី ទុនថ្វាយសិរសី
ក៏យកជីវិតទទួលហោង ។

១៨៣៥- បើព្រះករុណាខ្ញុំផង ឋារខ្ញុំមាតាសង
គុណស្តេចទុកខ្ញុំរស់នៃ ។

១៨៣៦- នាអង្គអញខ្ញុំសព្វថ្ងៃ អនេកបីចនៃព្រៃ
ភាព្វទុបទ្រពណា ។

១៨៣៧- ព្រះអង្គនឹងចាប់លង្កា នាថ្ងៃណាៗ
ព្រះអង្គប្រមាណអញខ្ញុំ ។

១៨៣៨- អញខ្ញុំហើរជាបីជុំ បន្ទាយលង្កាធំ
នោះសូន្យលង្កាអន្តរាយ ។

១៨៣៩- ស្តេចស្តាប់កុកទូលអភិប្រាយ ហឫទ័យស្តេចរសាយ
ក៏ពុំចងទោសបក្សា ។

១៨៤០- ព្រេងកាលពួបរយុគា នារាយកាលណា
គឺរាមទេពចុះមកគង់ ។

១៨៤១- នូវសំដែងចេស្តាព្រះអង្គ ថ្វាញ់អសូរបង់
ជំរើនជីទេពឫសី ។

១៨៤២- ព្រះតីរព្រះអង្គនរបតី ប្រាសព្រះទេពី
ពិសោធពិសុទ្ធសុន្ទរ ។

# កណ្ឌ ទី១២

១៨៤៣- ព្រះបន្ទូលព្រះអនុជពនេចរ ឲ្យជ័ព្រៃពនន្តរ
នេះមានមហិង្សាយុទ្ធជ័យ ។

១៨៤៤- នាស្ពានហោមពានព្រះព្រៃ ជុំឯងដោយឈើងៃឈ
អធិកយោនយានសាយសម ។

១៨៤៥- ត្រៀកត្រាចតត្រៅក្តុលកើតឯងដ៏លាស់សម
ពោធិពៃតរបតីប្រណម្យ ដ៏ទេពាធិបតីហោង ។

១៨៤៦- មានជាតិបុស្សបុស្សនាគសូរតីអញ្ចាន់ផង
ក្រស្នានូវចន្ទមង - យុតឯងវល្លាដ៏លាយលាស់ ។

១៨៤៧- ក្រូចក្រាយបុស្គៀងស្ងៀវស្រគំគុយក្រសាំងក្រាស់
ពេកាក្តាជ័ស្លូកស្លាស់ រំដួលដោរពានាលី ។

១៨៤៨- អនេកព្រំក្បុកករក្បមុខអតិរេកអនេកដ៏ដោរភ្ញី
បក្សីពនានូវភុមរ ភុមរាពិលាសសៀង ។

១៨៤៩- បឹងបុងដ៏ជ្រៅជ្រោះជ្រលងជង់ភ្នូរជង្ហួរឈ្លង
សព្វសត្វដ៏ត្រំត្រែង បន្លឺងបណ្តើរដោយគ្នាហោង ។

១៨៥០- ៗព្រព្រះហោមពានលន្លង់[1] ជាទើយស្រណុកសាយសាន្ត
សាន្តអើយតំរេកសត្វឯង មនមាន[2] មហិង្សាភាជថ្លើសឈ្នង
ឞាកាពលឯង សាន្តអើយអនេកសំខ្យា ។

១៨៥១- ឯងនោះមហិង្សាភាជ ជាតិជាញនូវអំណាច
ពីរេទ្ធិនូវពលមហិមា ។

១៨៥២- រុំរក្ស[3] មហិង្សីដ៏តណាសា សល់សែនសំខ្យា

(1) RIB : anlaṅ'
(2) RIB : mun mān
(3) RIB : rīem raks

អនេកនូវពលបរិវារ ។

១៨៥៣- មានតេជជាញដល់ជ័នុតារ រកភានបំរោល
កជើង្រ្កនូវសារសិង្ហសីហា ។

១៨៥៤- ដើរត្រេចសឹងញញ្ញប្រែភារី សញ្ញសត្វប្រជាពី
រូបភ្លឹកអំណាចស្មប់ស្មែង ។

១៨៥៥- ខ្លាញ់អស់គានពាងង់ស្តែង តេជោជ័យដែង
មហាពន្លឹកមហិមា ។

១៨៥៦- នាមហៅមហិង្សាភាជមហា- ឃោរឃៅសោះសា
មនោមានះថ្ងៃសឃ្លង ។

១៨៥៧- ពោះកើតបុត្រឈ្មោលសព្វដង មហិង្សដនកលង
យកបៀនជីវិតបុត្រឯង ។

១៨៥៨- ដោយនៃផលកម្មនូវបង្វែង ហេតុលោភទង្វែង
នូវកាមតណ្ហា ។

១៨៥៩- ដង់នោះមហិង្សពានិតា កើតបុត្រមហិង្សា
គឺនាមបីហៅទូគី ។

១៨៦០- ជននីនាំសុខសព្វគិរី (1) ញូដ័ព្រៃពនាលី
ក្រវើនបំពួនបាត់ស៊ាំង ។

១៨៦១- នៅក្នុងព្រៃជ្រៅក្រាស់ក្រាំង ជំពេញកម្លាំង
លល្បៀបលលបភោគា ។

១៨៦២- បរិភោគអាហារមហិមា ដឹងដើមមាត្រា-
នុភាពរឹងឫទ្ធិបីប្រពៃ ។

១៨៦៣- ស៊ីស្មៅបីវាលមួយថ្ងៃ ដឹកទឹកបឹងបី
បីដឹករបូតយល់ជី ។

១៨៦៤- នាមហៅមហិង្សភាជទូគី ជង្គឹងភាជជននី
នុរូអំណាចព្រះតូជា ។

១៨៦៥- អញខ្ញុំនូវសូមបំពើព្រះបិតា នបបទបាទា-
រតិន (2) ជនកសព្វថ្ងៃ ។

១៨៦៦- សូមព្រះករុណាខ្ញុំនៃ ខ្ញុំនូវបង្គំសំពាប្រល័យ
ទទួលទម្ងន់ព្រះបិតា ។

១៨៦៧- ពោះបីមានសត្រូវពោធា ឋារខ្ញុំអាសា
ពាំប្រទុះយសព្រះតនូ ។

១៨៦៨- ជននីឆ្លើយដោយចិត្តភូ- ធរភាជតតួរ
មនោមានះថ្ងៃសឃ្លង ។

១៨៦៩- ពុំរក្សអនុកូលឡើយហោង បុត្រឯងនោះហោង

(1) RIB : jananī nām santagirī
(2) RIB : pādā rū bin

បីសីងបំបាត់និស្សល ។

១៨៧០- ទូភីគិតខ្លួនទុរពល ពីត្រអាលខ្វាយខ្វល់
បំពួនអាត្មាឯងហោង ។

១៨៧១- ទូភីទ្រើសធារ[1] ដំឃ្លង ដើយប្ដូយលោតលង
ក៏ឈោះកម្លាំងសោះសា ។

១៨៧២- ជ្រងជ្រួយធ្ងះឆ្អើសបញ្ចា ផ្លាក់ផ្លាយសិលា
រលើងទាំងព្រឹក្សាករ ។

១៨៧៣- ឮតេជតេជោជ័យខ្ញូរ ទូរទ័រខ្ទារខ្ទរ
កក្រើករំពើកប្រដពី ។

១៨៧៤- ឮដល់ជនកទូភី ដាលក្រោធដូចអគ្គី
មហាមហិង្សដើររក ។

១៨៧៥- ដើយប្ដូយដងខ្យល់ឆ្លួចថ្ងក សព្វសត្វដងជ្រក
ក៏ខ្លាចកម្លាំងមហិង្ស ។

១៨៧៦- មនគីអញនាមមហិង្ស - ស្វុរបានចេស្ដា
មហាពន្លឹកជ័ទុទារ ។

១៨៧៧- ក្សិណនោះមហិង្សភាជរុកភាន ដើរត្រេចត្រប់ស្ពាន
សំនៅនៃបុត្រអាត្មា ។

១៨៧៨- មេលយល់ទូភីមហិមា រូបរុងគិរិទ្រា
មហាពន្លឹកជ័ទុទារ ។

១៨៧៩- ដើរដោយដងញូរជ្រោះធារ[2] ដើយប្ដូយឆ្លួយថ្ងា
ជជ្រួយជជ្រងហិតដី ។

១៨៨០- ក្សិណនោះមហិង្សភាជឫទ្ធិ ធ្លុលផ្កានទូភី
បីពោលនូវពាក្យឃោរឃោង ។

១៨៨១- ឱហាបុត្រមឹងទុទារ[3] ទ្រើសឃ្លង លេះអាចមកលង
នូវឫទ្ធិអញនេះតិច្ឆូវ ។

១៨៨២- លេះពីងអួតអាងតនូ ឡើយកអាយុកូវ
មកជូនដល់ម្រឹត្យូវភាជ ។

១៨៨៣- មោះតីងតាំភ្លឹកព្រះអំណាច អញនូវក្តូលឲ្យខ្លាច
អំណាចនៃអញកុំបីលង់ ។

១៨៨៤- ក្សិណនោះទូភីគឺជ័ទ្រង់ - ឫទ្ធិក្រាបលុតដូង
បង្គំប្រណាម្យបិតា ។

១៨៨៥- ទូលក្រុងមហិង្សភាជមហិមា សូមព្រះទយា
ករុណានៃខ្ញុំនេះតិច្ឆូវ ។

(1) RIB : dāru(ṇ)
(2) RIB : ṭañ dhvā jroḥ dhvā
(3) RIB : dāru(ṇ)

១៨៨៦- ខ្ញុំជាបរិចារព្រះគ្រូ- ផងរាជនានា
បំរើព្រះបាទសព្វថ្ងៃ ។

១៨៨៧- សូមបានស្ថានមួយអាស្រ័យ ដោយពនាល័យ
ដ៏ព្រៃពានន្តរហោង ។

១៨៨៨- ក្បិលនោះមហិទ្ធិរាជរឹងជង ចិត្តខឹងរឹងស្អូង
ក៏ពោលនូវពាក្យអាស្រូវ ។

១៨៨៩- លេះមីងលបលាក់ខ្លួននៅ ចងជាសត្រូវ
នូវអញដ៏ជាបិតា ។

១៨៩០- មីងពីងពួនព្រៃព្រឹក្ស ព្រោះជ្រកបព្វតា
ដ៏ជាលំនៅសព្វថ្ងៃ ។

១៨៩១- លុះមីងរុងរូបស្គីមន្ស មីងផងលងជ័យ
ពិជ័យនៃអញមហិមា ។

១៨៩២- ពីងពាលពាលោមោហា លេះនាំអាត្មា
អាយុមកដូនព្រឹត្យូវ ។

១៨៩៣- អញនូវថ្លាញឲ្យអស់តន្ទ្រូ កណ្ដាលរណាគ្រូ
ឫទ្ធិនៃអញស្រួចស្រាប់ ។

១៨៩៤- ស្រែចក្រុងទូភីស្ដែងស្ដាប់ ជនកឃោរក្រៅឡាប់
នូវធម៌អសត្យមេត្រី ។

១៨៩៥- មកបៀតបៀនបុត្រឯងក្ដី មោះគឺអណ្ដឹ
រង្វៀងដោយពិសកាមកាច ។

១៨៩៦- ទើយទើយទូភី មិនស្លូតឫទ្ធិ
កន្លងលោកា អញនឹងពិឃាត
ឲ្យមីងមរណា កណ្ដាលព្រឹក្សា
ឥឡូវនេះហោង ។

១៨៩៧- ទូភីលេះក្រេវក្រោធ មានះរឹងសោត
ប្រែប្រាណត្រើសឃ្លង អាណាមានតុត
ឲ្យមរនេះម្ដង លែងឈ្មោះមានក្រង
តាំងពួងនេះណា ។

១៨៩៨- មហិទ្ធិរាជ មានឫទ្ធិអំណាច
មានះសោតសា តណ្ហាហោរាន
ប្រកួតពាធា កូនឯងសឹងជា
ជាធំត្រើសឃ្លង ។

១៨៩៩- មោហាផុះទុរជន កិលេសពេកពន់
តាំពោលពាក្យស្អង ផ្ដួចភ្លាំងរង្វៀង
ទារុណត្រើសហោង បណ្ដាលចិត្តចង
ពៀរភ័យឃោរឃៅ ។

១៩០០- ទូភីគិតខ្លួនទុរពល ជនកឥតជមិសល់

ស្រទីងដោយពិសកាមភាច ។

១៩០១- ពេញពាល[1] ពាណោអំណាច ពុំក្រែងពុំខ្លាច
ពុំអាចពុំអាសូរបុត្រ ។

១៩០២- អញនូវលាលង់ធ្វើយុទ្ធ[2] ពោះអស្ចារ្យទុ -
ត្បាតបទអំពើអ្នកហោង ។

១៩០៣- ទាំងពីរសឹងទ្រើសដារឃ្នង[3] មហិង្ស្រជនកលង
ឫទ្ធនូវទូតីបុត្រ ។

១៩០៤- ប្រតិរពា[4] ធ្លូលសមនូវប្រយុទ្ធ សឹងស្រីវដ្ដស្រួចមុត
គីពេជ្រនូវពេជ្រផ្កាញផ្កា ។

១៩០៥- រុងរូបធាត់ធំមហិមា រូបសុមេរគិរិន្ទ្រា
ដ៏ពីរកណ្ដាលប្រថពី ។

១៩០៦- ម៉ាំងម៉ាត់ពុំយល់រស្មី កក្រើកអស់ត
ស្ទូកសោម្បូសព្រហ្មដ្ឋៀល ។

១៩០៧- ព្រះចន្ទ្រព្រះអាទិត្យឈររមើល ឃ្លាតឫក្សដំណើរ
នាទីពុំដូចសព្វដង ។

១៩០៨- ប្រយុទ្ធពីប្រថមោទ័យហោង លុះប្រថមត្រង់ហោង
ក៏ផ្ដួលជនកនោះមរ ។

១៩០៩- ម្មានអស់មហិង្ស្សានិករ ទូភីម្លូតអរ
បីសេពានូវសុខបរិពារ ។

១៩១០- ខ្ចូនក្លោះខ្លាំងខែងងុទារ ដើរដោយនូវរម្មាល
ភដេន្ទ្រប្លូសារសិង្ហសិហា ។

១៩១១- ស្សូរសត្វរូវសែនអសនី ថ្ងាស់ប្រេះប្រថពី
កកឹកទាំងព្រៃព្រឹក្សា ។

១៩១២- ចតុជង្ឃ្យឈរឈានយាត្រា រូស្ដម្ភសិលា
មហាគិរិបតិត ។

១៩១៣- រីក្រចកដូចរត្នមរកត ម្មាមាច្រំច្រត់
រន្ធត់ទាំងមហាប្រថពី ។

១៩១៤- រីទ្វេស្រីវដ្ដស្រួចរូសូលី មេសក្ដិសូលពី[5]
សម្ដេចព្រះតស្សូរសារ ។

១៩១៥- ហិតហាជិវ្ហាព្រាយពណ៌ ច្រួចច្រួលអំពាល
អណ្ដាតព្រះភ្លើងភ្លឺក្រៃ ។

(1) RIB : bīṅ bāl
(2) RIB : dhvoe dhammayuddh
(3) RIB : dāru(ṇ) ghnaṅ
(4) RIB : pratibal
(5) RIB : rī dvār sriṅg sruoc sūlī
mer sak sal' bī

១៩១៦. នេត្រច្រាលដូចសុរិយោទ័យ រស្មីច្រាស់ថ្ងៃ
ពន្លឺកទាំងទសទិសា ។

១៩១៧. កកាយមុចមកវាគា ដូចព្យុះព្យោមា
ពន្លកពន្លឺកថ្កើងថ្កើង ។

១៩១៨. ខ្នុំង[1]កាមកាយយល់ស្បែង រូបរុងរូកំពែង
កំពស់កំពូលបព្វតា ។

១៩១៩. រុកភានរត់ដេញម្រឹគា ម្រឹគីព្រាត់គ្នា
គោគ្នាអាហារពុំបាន ។

១៩២០. ព្រាត់គូព្រាត់គោត្រព្រាត់ស្ថាន ព្រាត់សុខព្រាត់សាន្ត
សំនៅទីថៃព្រាត់បាត់ ។

១៩២១. ស្ថានគោហាសិង្ហសីហាស្ងាត់ ភាត់ភាយខ្វាយខ្វាត់
ក៏ដេញនូវតេជឫទ្ធិរឹង ។

១៩២២. ត្រេចត្រាច់បង់ម្រឹគដែលនឹង សំដៅទៅបញ្ចលិង្គ
មុនីមានឫទ្ធិសិទ្ធិសក្តិ ។

១៩២៣. ដល់ភ្នំត្រីច្រាការបាក់ ភ្នំជាថ្លាយថ្លាក់
រលំរលើងព្រឹក្សា ។

១៩២៤. អារក្សយក្សសិងអដ្ឋា ពាក់ពឹង[2]ព្រះមហា-
ឫសីសីលាសិំងឃាត់ ។

១៩២៥. ស្គាល់ស្តើយនូវក្តីសារសត្យ ថ្លែងជាទៅថ្វាត់
ថៃយាម្អាលកំហែងមហិទ្ធិ ។

១៩២៦. ថើងជាអ្នកស្វែងចរិយា ពីភ្នំនេះណា
ជាស្ថានគោហាប្រក្រតី[3] ។

១៩២៧. ចិរកាលកើតដំណាលប្រចតី ពីដំណាលគិរី
កៃលាសព្រះឥស្សរស្ថិត ។

១៩២៨. ពុំដ៏លែង[4]អាងអួតលងឫទ្ធិ ពុំដែលមានចិត្ត
ប្រទូសប្រទះសត្វផង ។

១៩២៩. ជាថៃយាទូតីមកពីងប់ង បើពីងចប់លង
ឫទ្ធិដងអ្នកដ៏មានចេស្តា ។

១៩៣០. អញ្ចេនូវថៃព្រះស្តែងលេណា ត្រង់ទេពដីតា
រក្សាមហាសាគរ ។

១៩៣១. អ្នកនោះឫទ្ធិមានប- រិពារពលវិករ
បករនូវនាគគណា ។

(1) RIB : dan' dāṃṅ
(2) RIB : buok biṅ
(3) RIB : gohā braḥ kuṭi
(4) RIB : laeṅ

១៩៣២- ទូភីស្លាប់ឫសីជា ត្រេចត្រង់អង្វា
ដល់ទេពធីតាសាគរ ។

១៩៣៣- ជ្រងជ្រួយគង្គាខ្វាយខ្វរ លាន់ឮដូចផ្គរ
រន្ទះទាំងទេសទិសា ។

១៩៣៤- រលកដលខ្ទាត់ដល់អា- កាសកងសុរិយា
ចន្ទ្រាតារាភ្លាំងភ្លាត់ ។

១៩៣៥- អស្ចារ្យទូរទ័រសព្វសត្វ មករនាគនាស(1)ស្លាត់
បំពាក់បំពួនអាត្មា ។

១៩៣៦- ខាប់ខះសាគរគង្គា ទាំងទេពធីតា
ក៏ភ្លឹកអាត្មាផ្ទាស់មរ ។

១៩៣៧- នាំអស់សត្វសិងសាគរ លោមលាសទេរ
នូវពាក្យពោលពីងប្រាស្រ័យ ។

១៩៣៨- ជាវៃឃាទូភីឫទ្ធិក្រៃ ពីងជាឯកឆ្ន-
សុភនូវសត្វយល់ឃ្លង ។

១៩៣៩- ថ្លាញ្ញអស់សារសិង្ហសីហជង តម្បូវពីងប៉ង
ប្រឡូងប្រយុទ្ធសាគរ ។

១៩៤០- ព្រះសមុទ្រមានគុណដ៏បវរ ក្រងនាគនូវមករ
អនន្តនូវនាគមដ្ឋា ។

១៩៤១- ជាតិស្ទូរអស់ឯគង្គា ស៊ីងបឹងជងណា
អនេកនៃកោដិសែនសល់ ។

១៩៤២- សត្វសព្វភូមិភពមណ្ឌល បានសេពសុខសល់
ដ៏កល់នៃលោកប្រធាន ។

១៩៤៣- ពីងឯងតោក្ដាហើយបាន តម្បូវពីងឈុកឈាន
នូវយើងដ៏មានគុណគាប់ ។

១៩៤៤- ជាវៃឃាទូភីពីងស្លាប់ អញ្ជើញលេណាប់
ទំរង់នគរបោមពាន ។

១៩៤៥- ពោះពីងស្ងាញ់អ្នកនោះបាន បីពីងមានស្ថាន
ប្រធានពពួកនូវទេវតា ។

១៩៤៦- សឹងសុខបោមពានជាអា- ស្រ័យស្រានអាត្មា
នូវទេពកញ្ញាដុំរដុក ។

១៩៤៧- ពីងយកស្ថានបោមពានទុក ជាបុរីស្ថានសុខ
បន្ទូលព្រះសុំមហាម្សី ។

១៩៤៨- ក្សិណនោះមហាម្សូរភាងនោះលី- ណាវៃលងដលដី
សំដេរទៅស្ថានបោមវា ។

(1) RIB : nāy

១៩៤៩. រុករានរត់លើបព្វតា ត្រេចត្រង់សិលា
កក្រើកកំរើងមហាប្រថពី ។

១៩៥០. អឺអឹងគគឹកកូរអគ្គី ដេះកល្បកលី -
យុគយល់ពន្លឺកមហាស្មែង ។

១៩៥១. ហោហៃហោហោមពានព្រះស្មែង ព្រះសមុទ្រអួតតាំងខែង
នូវឫទ្ធិរឹង[1] មហិមា ។

១៩៥២. ធូរចេញអញនឹងអាលយាត្រា ផ្លាញយសយក្សមហិង្សា
ដ៏រឹងស្រើមគ្គាពិសពន់ ។

១៩៥៣. ទេពារក្សាសិងមិលន់[2] ខ្លាចខ្លួនទុរជន
មហាមហិង្សពាធា ។

១៩៥៤. ខ្លាស់ផ្ញើយសារសូមករុណា ហៃហានពាជា
មហាតស្សូរសត្វដង ។

១៩៥៥. តាំងមកតប្បូវតើតាំងប៉ង យកសម្បត្តិត្រង
ឬមួយមកលងឫទ្ធ ។

១៩៥៦. វីសម្បត្តិដោយតាំងប្រាថ្នា វាំងចេស្តា -
នុភាពពីងនោះយើងខ្លាច ។

១៩៥៧. វ៉ាអំណាចតាំងគូនូវអំណាច យុទ្ធនូវពាលីភាជ
ទុរសសម្ដេចតត្រៃ ។

១៩៥៨. នាមពាលីភាជទេវា ចាប់ក្រុងភពណា
អសូរសហ័សចាប់ចង ។

១៩៥៩. សោយសុខបុរីរាស់ខិនហោង រក្សាពានរដង
អនេកដ៏សែនសំខ្យា ។

១៩៦០. មហិង្សាស្ដាប់ហោមពានថា រុករកយាត្រា
សំដៅទៅពានរនាយ ។

១៩៦១. អរអួតដោយចិត្តពាលពាយ បាយសោតសូចខ្យាយ
ព្រះបាទសម្ដេចសាគរ ។

១៩៦២. សៅស៊ូចហោមពានបវរ ពុំដឹងពានរ
ពន្លឺកគឺភ្លើងកល្បកិន ។

១៩៦៣. បុរីគឺដ៏ហៅខាស់ខិន ភិរម្យអចិន្ត[3]
ស្រណុកតតឯឧបមា ។

១៩៦៤. ពាលីសោយរាជ្យនូវពា - នរសែនសំខ្យា
នូវសក្តិនៃតេជោគុណា ។

១៩៦៥. មានពានពាមួយដ៏ទារុណ សេយ្យា[4] គឺគុណា

(1) RIB : ṛddhi dāru(ṇ)
(2) RIB : debā raksas siṅ mī lan'
(3) RIB : bhiramy aciṇṇ
(4) RIB : sayā

នូវកម្លាំងមហិទ្ធិស្ទារ ។

១៩៦៦- ហោមពានមេគិរីទូល ពានរទៃព្រមមូល

នូវសក្តិនៃតេជោពុត ។

១៩៦៧- មកថ្កានពាលីបីចំហុត បីដងហើយចេញយុទ្ធ

ក៏ពោលពាក្យខំខ្លាស់ហោង ។

១៩៦៨- វៃហានពតាំងស្រ៊ើសឃ្លង ពីងក្លូតចេះចង

មានះអងម្ចិស្ទូរ ។

១៩៦៩- ឈ្មោះអញគីក្រុងពានរ មានពូជពង្សស -

សក្តិសាយជ័ជំនាភ ។

១៩៧០- អញពុំនាំពលយោធា អញចេញមួយនា

សរិលជ័សមតីងជង ។

១៩៧១- អញហោងគីជ័ហៅទូភី ដោយសុមេរគិរី

សមុទ្រក៏ជ្រួយជ្រិងជល់ ។

១៩៧២- វៃពាលីខែងសោតសល់ ចេញមកយើងនឹងជល់

កម្លាំងតម្រូវកុំបីលង់ ។

១៩៧៣- វៃហានពតាំងក្រាំរង់ ពាលីហោងផ្ទង់

តីងខែងរូបព្រះភិមុខពាន (1) ។

១៩៧៤- លេះតីងបីមកឈុកឈាន ស្មើតីងនាំប្រាណ

មកជូនព្រះស្រីតម្រូវហោង ។

១៩៧៥- អាណា (2) ទើយមិញ ទូភីគីអញ

ជ័មហិមា អញជ្រួយសមុទ្រ

គិរីកាណ អះអញហោងណា

គីនាមបីហៅទូភី ។

១៩៧៦- អញជ្រួយសមុទ្រ ត្រីជងស្លាប់ស្លុត

មនគីជាជី (3) នគរខាស់ខិន

ជាមានពាលី ចេញមកស្រជី

បីប្រយុទ្ធជ័មួយជង ។

១៩៧៧- ជាទើយទូភី មនគីអញពាលី

ជ័ក្រៃខែលងហោង អញកាច់កតីង

បីជ្លួលមួយជង អញសោតកន្លង

កាច់ស្នែងក្រវី ។

១៩៧៨- ជាទើយក្របី មិនងពុំកាន់ៗ

តេជវៃពាលី អញយះខ្លួនតីង

(1) MBN et RIB : braḥ dhimukh bān
(2) RIB : ānāth
(3) RIB : mān gī ḍik jāti

អញលើកអញលី　　　　រលែងតីងពាលី
នោះដំរីរងពុំព្រែង ។

១៩៧៩- ជាទើយពាលី　　　　មនគីអញទូភី
ដីងជាប្រលែង(1)　　　　អញប្រែយសាច់ស្អួត
ពុំតាន់គិត(2)ស្នែង　　　　ស្វាស្លាប់ពុំរលែង
តប្បូវនេះហោង ។

១៩៨០- ជាទើយក្របី　　　　មីងពុំតាន់ឮ
ពុំដឹងវៃដបង　　　　អញកាច់កតីង
បីដូចមួយដង　　　　ទើបអញមកលង
កម្លាំងនាមាន ។

១៩៨១- ក្រុងពាលីភាដហៅបាន　　　　ស្អូតអង្គស្ដើងស្ដាន
ពុំភ្លឺកទូភីមហិមា ។

១៩៨២- ទើយទូភីតីងជាតិជា　　　　មហិង្សាសោះសា
ក៏ឆ្ពួលអាពុកក្បាលក្បួយ ។

១៩៨៣- តីងពុំដឹងដើមតេដៃដ　　　　ពង្សពានវៃន
ប្រាកដប្រកួតប៉ះបុណ្យ ។

១៩៨៤- អញឯងឲ្យអស់ជីពដន្ទ　　　　តីងពាលក្បួយក្បាល
នេះនៅតេដតេដោដិយ ។

១៩៨៥- ពាលីតាលោក្រោធក្រៃ　　　　ហោះហិចអង្គឲ្យ
មណ្ឌលមន្ទីរទីងថ្វាត់ ។

១៩៨៦- ឡើងលើប្រាង្គប្រាសាទសត្ត-　　　　រួតរម្យភាយរត្ន
កញ្ចាន់កញ្ចក់មាលមាស ។

១៩៨៧- តាន់ពាក់ពស្ត្រ(3)ពាពាស　　　　ក្រោងព្រាយដាំដាស
រលេចរលង់ឡើងរត្ន ។

១៩៨៨- ទ្រង់ព្រះខ័នពេជ្រហោះថ្វាត់　　　　ទូភីប្រយ័ត្ន
ប្រយោជន៍ប្រយុទ្ធជាញជ័យ ។

១៩៨៩- សឹងសាញសោះសាដ៍ទីវៃ　　　　ទូភីនិរភ័យ
លលេលលាំងរួសរង ។

១៩៩០- ភ្លៀកភ្លើសឆរណីប្រែយប្រែង　　　　វៃវាត់ភ្លៀងឈ្លួង
រលើងរលំព្រាំក្បូ ។

១៩៩១- ផ្ទាយផ្ទាក់បែកបាក់បញ្ចា　　　　ដើយប្ដួយងរងា
រណាស់ស្រួចស្រឹង្គម៉ាយបៀង ។

១៩៩២- រិលរេះវៃវាត់ខ្លាំងខ្លៀង　　　　ស្ទុះស្ទាសឆាបឆៀង
ក្រមៀកក្រឡាស់បាក់ហោះ ។

(1) RIB : gralaeṅ
(2) RIB : ṭit
(3) RIB : bhaktrā

១៩៩៣- ក្រុងពាលីលុះដាញស្ពោះ ខ្ទាត់ដូចគេបោះ
ពុំនឹកដល់អង្គមហិង្សា ។

១៩៩៤- ស្នែងស្និទ្ធពីរពេជ្រផ្លាញផ្លា ពះលើសិល្បាពា-
លីរាជពុំអាចបិទនូវមុខ ។

១៩៩៥- ដូចលំពែងពេជ្រមុតបីប្រាកដ អ្នកចាក់ជំហុត
ទំលុះលើមហាពេជ្រឯង ។

១៩៩៦- ព្រះខ័នពេជ្រពះពេជ្រស្នែង ពេជ្រនូវពេជ្រឯង
ប្រកួតប្រកីងចេស្តា ។

១៩៩៧- ពាលីវៃវេះជ័រវេហា ទូភីរង្វា
ទន្ទាំទន្ទ្រំយវិលវាត់ ។

១៩៩៨- ទូភីពាលីសឹងស្ទាត់ សឹងវែងវងដាញក្ដាត់
ប្រយ័ត្នប្រយុទ្ធកោះការ ។

១៩៩៩- ព្រោមព្រុតព្រេះប្រដិពាញ័រ កក្រើកវៃព្រៅទូរទីរ
អស្ចារ្យទាំងទេពសួគ៌ស្ថាន ។

២០០០- ហិចពោះចេញចាកវិមាន ពេញអាកាសស្ថាន
មកមើលសរសើរចេស្តា ។

២០០១- សែងសូរ្យចក្រចរឃ្លាតឃ្លា ពុំធៀងនាយា
ស្រឡប់ពុំដូចប្រក្រតី ។

២០០២- កាលណាហាលហោតុទូភី ពះលើពាលី
ពលានុពលដាញជ័យ ។

២០០៣- ពាលីដឹងឫទ្ធិជ័រទៃ ស្មោះស្មើតេជវៃ
មហិង្សារាជទូភី ។

២០០៤- នោះទើបក្រុងរាជពាលី ណាកវែងទូភី
ក៏រិះនូវប្រាជ្ញាឈ្វេង ។

២០០៥- ដាពោះបីអង្គអញឯង ប្រយុទ្ធនៅក្រៅក្រែង
ពុំឈ្នះនូវមហាមហិង្សា ។

២០០៦- រូបរុងត្រើសប្រង់នូវពណា នៅកណ្ដាលពសុធា
ទូលាយស្រលះអស់កល [1] ។

២០០៧- ទំនើងវិលវាត់ដាញដល់ ក្ដួរអញរកកល
បង្អោនបង្អស់ជន្មា ។

២០០៨- អញនូវនាំចរចូលគោហា ដានឹងយកជា
សុពណ៌មឈ្មួសរងអង្គ ។

២០០៩- ស្ពោះហើយទូភីលង្វង់ ឆាន់ចូលក្នុង
គោហាចង្អៀតអង្គឯង ។

(1) RIB : as' aṅg

២០៤៤. ព្រះគ្រាន្ធាទិញគ្រាផ្ទៃប្រុះ ស្តេចឡើយមកលុះនូវអំណាច
នៃមហាមហិង្សាភាព ទូទីភារភ័យកោលា ។

២០៤៥. ទាំងទេសមុខមារ ទាំងសព្វតាលនៃនាគា
សឹងបាញ់ព្រះជេស្តា ស្តេចបាប់លេងជាប្រក្រតី ។

២០៤៦. ឱស្តេចម្តេចឡើយមកសុគត អសារបទឫទ្ធិទូទី
ឱកើតកេរតិក្រុងពាលី លុះអំណាចមហិង្សាសល់ ។

២០៤៧. សុគ្រីពបន្ទោទុក្ខទល់ សោយសោកានល
រលីងរលាមនេត្រា ។

២០៤៨. សុគ្រីពក្រោកបន្ទូលជា នូវអស់សេនា
យោធាមុខមន្ត្រីផង ។

២០៤៩. អញតតចិត្តចេតនាត្រង់ សេពសោយរាជ្យស្នង
ក្រុងរាជពាលីជេស្ឋា ។

២០៥០. អញនូវតាមពិឃាតមហិង្សា ពាលោនូវពាលា
មកជាសត្រូវរុករាន ។

២០៥១. មន្ត្រីទូលតស់សូមទាន កុំព្រះអង្គមាន
ព្រះហឫទ័យចងពៀរ ។

២០៥២. បើស្តេចទៅតាមមហិង្សា ម្ដោះបង់សេនា
ប្រជានុរាស្ត្រពលនិករ ។

២០៥៣. សមសួស្តីទេវទាំងព្រះនគរ អស់អង្គពានរ
នេះតតតាំងនាក់ឡើយណា ។

២០៥៤. ប្រាសពៃព្រះរៀមសង្ការ ម្តេចព្រះអនុជា
ពាំក្រុងរាជរដ្ឋជ័យបុរី ។

២០៥៥. សុគ្រីពស្តាប់រាជមន្ត្រី ទូលទាស់នូវក្តី
ប្រយោជន៍ប្រពៃពណ៌ណា ។

២០៥៦. ស្តេចប្រាប់ប្រើអស់បរិពារ បរពលក្រាស់ក្រាល
ប្រញាប់នូវរាជសេនីយ ។

២០៥៧. គោះកៀរពលពានរតី ខាស់ខិនជ័យបុរី
ជញ្ជូនគិរីសិលា ។

២០៥៨. សន្ធប់ញូររត្នគោហា ម្ដោះបិតជិតជា
អនេកនូវត្នំជ័យប្រមាណ ។

២០៥៩. សន្ធប់ញូរគោហាឋាន សុគ្រីពទឹងផ្កាន
នគរខាស់ខិនជ័យបុរី ។

២០៦០. ទល់ទុក្ខនូវមុខមន្ត្រី តាភាភាជទេពី
នូវស្រីព្រះស្នំស្នេហា ។

២០៦១. សឹងសោយសោកសល់ជ័សោកា ផ្ទួញដើម[1] ក្រុងពា -

(1) RIB : duoñ paṇtoem ~ duoñ paṇtoer

សីរាជសន្ធឹកសព្វក្រៃ ។

២០៦២- ដងនោះពាលីនិរភ័យ ផ្លូលទូភ័ក្ត្រយ
នូវតេជអំណាចមហិមា ។

២០៦៣- ស្រែចដើរដល់ទ្វារគោហា យល់សឹងសិលា
គិរីសន្ធប់ជិតនៅ ។

២០៦៤- ពាលីស្រែកដង្ហោយហៅ ហោតុភ្នំក្រាស់ក្រៅ
ពុំឮពាក្យពាលីឡើយ ។

២០៦៥- ពាលីពុំឮសព្ទឆ្លើយ ជយទៅក្រោយហើយ
ក៏ស្រែកសីហនាទនូវឫទ្ធី ។

២០៦៦- កាត់កឈ្លួរយកសិរសី មហិមាឫទ្ធី
ក៏លើកស្ទួយស្មាសនូវពាណ ។

២០៦៧- បោះបាក់ផ្លាយផ្លាក់បព្វតា របើកទ្វារគោហា
នូវសិលាជាខ្ទាត់ខ្ទាយ ។

២០៦៨- ស្អិតអស់ភ្នាភ្នំផ្លាក់ផ្លាយ ផ្លាក់ទល់សមុទ្រនាយ
ដោយតេជក្រុងរាជពានរ ។

២០៦៩- ពាលីចេញពីគោហាជរ ចូលថ្កានព្រះនគរ
ក៏ឡើងលើប្រាសាទស្ថាន ។

២០៧០- ស្តេចខ្វាល់ពេកពន់នូវប្រមាណ ពុំបន្ទុលថ្កាន
ទេពីមន្ត្រីដងសោត ។

២០៧១- ទុំទាំងព្រះភក្ត្រក្រៃក្រោធ ក្រាស់ភាសពិរោធ
រូបហាននូវដេះហាឫទ័យ ។

២០៧២. ដងនោះសុគ្រីពភិតភ័យ គិតខ្លួនខ្លាចក្ស័យ
ក៏ឡើងផ្ទាត់ផ្ទាយបង្គំ ។

២០៧៣- ទូលថាបពិត្រអញខ្ញុំ ឯងឲ្យដំនុំ
វិវាទ(1)ពិតពិចារណា ។

២០៧៤- ឈាមនេះអស្តីឈាមមហិម្ហា យល់ជាក់ជាតិជា
ព្រះលោហិតហូរចេញមក ។

២០៧៥- នោះទើបខ្ញុំប្រាមប្រើយក អស់បពិតមក
បោះបិតសន្ធប់គោហា ។

២០៧៦- ពុំចេរនូវព្រះអាជ្ញា ទិញ(2)ទ្រង់ព្រះចិន្តា
ពិសេសព្រះករុណាឈ្វេង ។

២០៧៧- សូមទានស្តេចទៅទតឯង ដើលឈាមនោះក្រែង
កង្វៀលើយខ្ញុំពុំជាក់ ។

២០៧៨- មួយសោតយល់ស្តេចដំពាក់ ប្រយុទ្ធយល់ប្រត្យក្ស

(1) RIB : varavād
(2) RIB : doep

ៗសព្វពន្លឹកហើយផុត ។

២០៧៩. ខ្ញុំទៅតាមព្រះមហាក្សត្រ    អស់មន្ត្រីឃាត់
ខ្លាចឆ្ងើលកំលុងព្រះនគរ ។

២០៨០. ទូភីតិឃាតបរមប -    ពិត្រលុះជ័មរ
ក្រៃងកើតកោលាហលហោង ។

២០៨១. ដងនោះពាលីទ្រើសឃ្លង    ពុំមេត្រីនង
សុគ្រីពអនុជបីសំឡាញ់ ។

២០៨២. មឹងពុំដឹងគេដៃងអញ    មឹងជាដាធាញ់
ទូភីមហិង្សាសត្វ ។

២០៨៣. មឹងមោះមុសាវាទក្តាត់    ចង់ភាជសម្បត្តិ
រកកលពិឃាតជេស្ឋា ។

២០៨៤. មឹងឲ្យជញ្ជូនបព្វតា    ម្ដោះបិតគោហា
សន្ធប់ពុំឲ្យចេញបាន ។

២០៨៥. ហើយមឹងធ្វើស្លូតមកដ្ឋាន    មេត្រីសោះសាន្ត
ពុំដឹងអំពើពុតពាល[1] ។

២០៨៦. មឹងចង់ក្បួជបងសង្ហារ    ចិត្តចោរស្រើបស្រាល
កុហកកម្លៅមោហា ។

២០៨៧. ក្រុងពាលីក្រោធមហិមា    ទះទូវសិរសា
សុគ្រីពពុំអាចរប់បាន ។

២០៨៨. ស្ទុះបោះចេញចាកវៃលងស្ពាន    ផ្កាសាទពិមាន
ពាលីបោះតាមពុំវៃង ។

២០៨៩. ដោយដេញទៅទល់កំពែង    ចក្រវាលនូវកំហែង
កំហឹងនោះខ្លាំងឃោរទំ ។

២០៩០. ទាន់ទះបណ្ដើរដាល់ដំ    សុគ្រីពត្រូវដំណំ
ពន្លឹកថ្ងាស់នឹងមរណា ។

២០៩១. វិលទេះបោះចុះទេហា    ពុំឃ្លាតនឹងពា -
លីភាជក៏តាមជិតដោយ ។

២០៩២. ទាន់ទរទះទៅពីក្រោយ    ក្រៃក្រៃពុំឲ្យ
សុគ្រីពឃ្លាតនូវដំណំ ។

២០៩៣. សុគ្រីពនឿយណាស់ខាស់ខំ    ចុះធ្លុននឹងភ្នំ
ជ្រោះជ្រៃកលវង្កសិលា ។

២០៩៤. ពាលីបោះចុះបព្វតា    ដោយជិតជ័ប្រវា
ចាប់ជើង[2] ទាំងពីរជ័គ្រីវ ។

២០៩៥. នឹងដោកលើខ្នងគិរី    សុគ្រីពមានស្មារតី

(1) RIB : amboe but vā
(2) RIB : jāp' joeṅ

កន្ត្រោងកន្ត្រាក់បោកបោះ ។

២០៩៦- របូតពីដៃក្បិលានោះ　　　សុគ្រីពបោះស្ទោះ
ចូលវិស្សតំបពិត (1) ។

២០៩៧- ពាលីចូលពុំបានបទ　　　ស្ពាននោះសន្ធត
នៃព្រះវិស្សតំឥសី ។

២០៩៨- ស្តេចខ្លាល់កាលក្រុងពាលី　　　ពិឃាតទូទី
ឈាមហូរទៅលើអាស្រម ។

២០៩៩- វិស្សតំឥសីសន្សំ　　　សាបាលនៅភ្នំ
នោះពុំឲ្យពាលីជិត ។

២១០០- ដើរដល់លុះក្ស័យជីវិត　　　នោះពាលីគិត
ពុំអាចនឹងចូលទៅបាន ។

២១០១- ពាលីវិលវិញទៅស្ពាន　　　ប្រាសាទពិមាន
រូបមានទិព្វទេពសួគ៌ា ។

២១០២- សុគ្រីពពួននឹងបព្វតា　　　ទល់ទុក្ខសោកា
សម្រេចប្រយោជន៍បិន្នវរ ។

២១០៣- ខ្លួនព្រះរៀមរាជពានរ　　　ខ្លួនរាស្ត្រនិករ
កំលុងខាល់ខិនបុរី ។

២១០៤- ជលនេត្រដាជលនទី　　　ល្បែងហូរចេញពី
គិរីគីក្រោះគោឃា ។

២១០៥- មានពៃយានុមានឯងជា　　　ក្លួយក្មេងរក្សា
នូវដាកំដររសព្វថ្ងៃ ។

២១០៦- សុគ្រីពបដ្ឋស់ឃាប្តូរ័យ　　　ផ្ញើជីវិតនៃ
ព្រះយានុមានបុត្រភ្នា ។

(1) Sur la lecture "vissataṃ", voir R.I., p. 128, n. 1.

# កណ្ឌ ទី១៣

២១០៧- ដឹងនោះពាំរព្រះរាជា ត្រេចតាមសីតា
ទេពីស្រីរត្នដ៏បវរ ។

២១០៨- ពាំរព្រះអង្គត្រេចតានេចរ តតឈប់តតឈរ
សំរាកព្រះអង្គឡើយណា ។

២១០៩- ស្ដេចត្រេចលុះព្រៃបព្វតា ដួងត្រាញ់យាត្រា
ក៏លុះនាព្រៃពនាលី ។

២១១០- ពួសព្ធមហិង្សាសីហា ពាំងហ្វូងឈ្មោលញី
ស្រកុំស្រកាំងជ្រូចដូក ។

២១១១- អីអឹងពាំងព្រៃស្ពាំងស្ពក រមាំងរមាសរត់ជ្រក
បំពាក់បំពួនអាត្មា ។

២១១២- ស្ដេចពួស្សូរពាដមហិង្សា ជ្រូចឆ្កោះមាគ៌ា
ដាមយាស្ពុនសិង្ហីសក្ដិ ។

២១១៣- ស្ដេចឈប់ឈរប្រែព្រះភក្ត្រ បៀងទតព្រះលក្សណ៍
ព្រះអនុជនាជស្នេហា ។

២១១៤- ឱលក្សណ៍នាយើងយាត្រា ដល់ស្ថាននេះណា
ពួសព្ធមហិង្សាស្សូរ ។

២១១៥- ជ្រូចដូកស្មៀរស្មើរសព្ធជ្រូរ ស្ពុននេះបរិបូណ៌
ប្រសើរតតឯកលោនា ។

២១១៦- ចេរកាលនូវប្រទះអ្នកងា ទល់ទុក្ខវេទនា
នូវមកពឹងចេស្ដាយើង ។

២១១៧- នូវបំពេញលាភយសឲ្យថ្កើង ចំណោរទៅលោកយើង
នូវចាប់លង្កាបានងាយ ។

២១១៨- ស្ដេចបន្ទូលទិញដ៏ទំនាយ ឲ្យអនុជព្រាង្គព្រាយ
ទំនាយសម្ដេចដេស្នា ។

# កណ្ឌ ទី១៣

២១០៧- ដឹងនោះពីរព្រះរាជា ត្រេចតាមសីតា
ទេពីស្រីរត្នដ៏បវរ ។

២១០៨- ពីរព្រះអង្គត្រេចពានេចរ តតឈប់តតឈរ
សំរានព្រះអង្គល្ហើយណា ។

២១០៩- ស្ដេចត្រេចលុះព្រៃបញ្ចតា ជួបត្រាញ់យាត្រា
កំលុះនាព្រៃពនាលី ។

២១១០- ពួកព្រះមហិង្សាសីហា តាំងហ្វូងឈ្មោលញី
ស្រកុំស្រកាំងថ្លួចថ្លូក ។

២១១១- អឺអឹងកាំងព្រៃស្កាំងស្កុក រមាំងរមាសរត់ជ្រក
បំពាត់បំពួនអាត្មា ។

២១១២- ស្ដេចឮសូរពាជមហិង្សា ថ្លួចស្ដោះមាតា
ជាមហាស្ថានសិទ្ធិសក្តិ ។

២១១៣- ស្ដេចឈប់ឈរបែរព្រះភក្ត្រ ទៀងទតព្រះលក្ខណ៍
ព្រះអនុជនាជស្នេហា ។

២១១៤- ឃាលក្ខណ៍នាយើងយាត្រា ដល់ស្ថាននេះណា
ពួកព្រះមហិង្សាសូរ ។

២១១៥- ថ្លួចថ្លូកស្ទៀរស្ទើរសត្វថ្លៃ ស្ថាននេះបរិបូណ៌
ប្រសើរតតឯកណាសា ។

២១១៦- ពេលកាលនូវប្រទះអ្នកជា ទល់ទុក្ខវេទនា
នូវមកពឹងជេស្ឋាយើង ។

២១១៧- នូវបំពេញលាភយសឲ្យថ្កើង ចំណោរទៅសោតយើង
នូវចាប់លង្កាបានឆាយ ។

២១១៨- ស្ដេចបន្ទូលពិចដំណាល ឲ្យអនុជប្រាជ្ញប្រាយ
ទំនាយសម្ដេចជេស្ឋា ។

២១១៩. ស្ដេចពាយទំនាយមហិទ្ធិ ពីរព្រះយាត្រា
ស្រដាត់ដោយដងព្រៃព្រឹក្ស ។

២១២០. មានស្វាយមួយដំដ៏អធិក លូតលាស់នូវសន្លឹក
ត្រសុំត្រសាយសាខា ។

២១២១. ផុំក្លិនកេសរគន្ធា ផ្ទុំទាំងទិសា
បីដោយព្រះពាយផ្សាយទៅ ។

២១២២. ពុំសួរសពុំសគ្រៀវនៅ សួរសៀងក្រអៅ
ទទះសសិតស្លាបលេង ។

២១២៣. ខ្លះទំខ្លះហើរបីប្រពៃលេង សព្ទសូរខ្លួនភ្លេង
តន្ត្រីយចំរៀងស្នូគាំ ។

២១២៤. ស្ដេចផ្ទុំក្រោមមហាព្រឹក្ស ព្រឹក្សមានឆាយា
ស្រមោលអម្លប់សាន្តសឹង ។

២១២៥. ផ្ទុំផិតនិត្យនៅផ្ទុំទឹង ត្រជាក់នៅនឹង
ព្រះពាយត្រសៀកបីរំភើយ ។

២១២៦. ស្ដេចផ្ទុំព្រះសិរស្ដេចកើយ លើទំរូព្រះលក្ខណ៍ហើយ
ជាខ្នើយសម្ដេចភរិយា ។

២១២៧. កាលនោះហេតុបារមីតា រីព្រះសុរិយា
ពុំអាចអស្ដង្គតទៅ ។

២១២៨. ព្រះសូរ្យឈប់រជនឹងនៅ គ្រប់ព្រឹក្សាក្រៅ
សឹងមានអម្លប់សាយសាន្ត ។

២១២៩. ដូចអ្នកសង់ឆត្រដោយឆ្មាន ប្រជាប់នូវស្ពាន
មណ្ឌលព្រះអង្គផ្ទុំនិត្យ(1) ។

២១៣០. ដងនោះសុគ្រីពភជប់ពិត្រ យល់បុព៌និមិត្ត(2)
ប្រសើរអរតតគណនា ។

២១៣១. ជាឱឃាឃានុមានអើយថា ថាមើលសុរិយា
រសៀលអស្ដង្គតហើយ ។

២១៣២. ស្ដីកម្ដីស្រមោលត្រង់នៅឡើយ ឱឃាឃានុមានអើយ
សមអ្នកជ៏មានបុណ្យនៃ ។

២១៣៣. ត្រេចត្រង់តង់នៅនាព្រៃ នោះទើបស្រមោលថ្ងៃ
រសៀលរទៀលដុំទឹង ។

២១៣៤. គ្រប់ព្រឹក្សាក្រៅឈប់ឈឹង សឹងត្រង់នៅនឹង
អំពល់នូវផលផ្លែផ្កា ។

២១៣៥. មានរសផ្អែមប្លែកពិសា ឱឃាឃានុមានថា
ផ្លូវថាអាសាមា(3)ហោង ។

(1) RIB : phdaṃ nidr
(2) RIB : pūrbanirmitr
(3) MBN : āsā moel

២១៣៦. ជាទៅមើលសព្វស្ថានឯង អ្នកបុណ្យមកក្តង
ក៏លុះដល់ស្ថានយើងតាយ ។

២១៣៧. ក្បែរណានោះហនុមានឫទ្ធិសាយ ជាទបតន៍[1]ក៏ថ្វាយ
បង្គំលាភជ័យក្របី ។

២១៣៨. ហោះទៅជ័រដែនដីភូមិ យល់ព្រះនរបតី
សម្ដេចព្រះនារាយភារា ។

២១៣៩. ឆ្ពុំលើវិរូបរាជអនុជា ក្រោមអម្ពប់ព្រឹក្សា
ស្រងាត់អនាថពីរអង្គ ។

២១៤០. ហនុមានហោះឡើងលើចុង ស្វាយគន់មើលអង្គ
ត្រង់លាយព្រះហស្ដភារា ។

២១៤១. យល់លាយលក្ខណ៍វិលផ្លាស់ជា ចក្រសឹងជ័យក្រចា
សង្ខារព្រះហស្ដជ័យបវរ ។

២១៤២. ហនុមានត្រីប្រួចត្រេកអរ ជឿជាក់ព្រះភូធរ
សម្ដេចនារាយឫទ្ធិក្រៃ ។

២១៤៣. ហនុមានត្រេកត្រូវហឫទ័យ ជាអ្នកនេះនៃ
ជាតិជាតស្មូរអ្នកហោង ។

២១៤៤. រំពុកក្នុងសោកភាជសុគ្រីពឯង នូវណ្ដោះនេះម្ដង
ដោយតេជសម្ដេចនរបតី ។

២១៤៥. ហនុមានត្រិះរិះអស់ក្ដី បេះស្លឹកស្វាយខ្ចី
ស្លូតពីសម្ដេចភារា ។

២១៤៦. បេះបោះជ្រុះខ្ញុំខ្ទាប់ត្រា លើព្រះរាជា -
ដីរាជកាំងពីរព្រះអង្គ ។

២១៤៧. ព្រះអនុជស្ដេចតែងបោសបង់ ស្លឹកស្វាយពីអង្គ
សម្ដេចព្រះនារាយភារា ។

២១៤៨. ហនុមានរឹងសាចចុះណា នោះព្រះអនុជា
ស្ដេចបោសស្លឹកស្វាយរោយដៃ ។

២១៤៩. ព្រះអនុជស្ដេចឆ្ងល់ឡើងនៃ ដោយស្វាយឈឹងឯណៃ
ក៏ឃើញស្វាស[2]សោភា ។

២១៥០. ស្ដេចត្រេវក្រោធក្រៃតោះតា ចាប់សរសក្តិថ្លា
នូវដៃព្រួងនៃរាជជ័យក្របី ។

២១៥១. ហនុមានរឹងឫទ្ធិជ័យឫទ្ធី លោតដកខ្លួនពី
ហារិទ្រនៃលក្ខណ៍អនុជា ។

២១៥២. លោតឡើងសហ័សមហិមា ចូនដុំប់សាខា
ព្រឹក្សាឈើឯណៃបីត្រសាយ ។

(1) RIB : pādapaṅs
(2) MBN : svā chmār

២១៥៣- ព្រះលក្ស្មណ៍ចាប់ធ្នូសន្ធារាយ(1) បោះសរនូវទំលាយ
ទំលាក់នៃរាជក្របី ។

២១៥៤- ក្សិណនោះស្ដេចតើនឡើងខ្ចី ព្រះបាទនរបតី
ជល្ដីជនៃព្រះអនុជា ។

២១៥៥- ចាហៃបាលក្ស្មណ៍ហើយម្ដេចបា បាកោះសរធ្លា
បានូវរំថ្លងអ្វីនេះតម្លូវ ។

២១៥៦- ព្រះលក្ស្មណ៍ជាក់សរសិទ្ធធ្នូ ក្រាបទូលព្រះគូ-
ចរេន្ទ្រជិរាជជ័ចក្រី ។

២១៥៧- បពិត្រស្វាមួយអប្រិយ សស្រុទ្ធដូចសំឡី
អ្នកផ្ដេចបង្កើរពោះបង ។

២១៥៨- ទំលាក់ស្លឹកស្វាយលើព្រះអង្គ ខ្ញុំដាត់រឹងតែចង់
ទំលាយទំលាក់ច្រើនក្រៃ ។

២១៥៩- ខ្ញុំខឹងវាត់កោរក្ដាងដ័យ ថ្លែងថ្លាញឲ្យក្សួយ
នាស្វាកំណាចនោះណា ។

២១៦០- ស្វានោះមានឫទ្ធិដេស្ដា ក្រោកជជហិមា
ដក់ធ្នូតីនៃខ្ញុំបាន ។

២១៦១- លោតឡើងសាខាតួនពាន ប្ដូនផ្ទាប់លាក់ព្រាណ
នាខ្ញុំជព្រឹក្សានិត្យនៅ ។

២១៦២- ខ្ញុំថ្លែងតាមស្វាយកធ្នូ ទើសដើងព្រះភូ-
ចរេន្ទ្រជិរាជផ្ដុំយោជ ។

២១៦៣- ស្វានេះរុករានបីកន្លង លួចលាក់ធ្នូគ្គង
បំពាក់បំពួនពុំយល់ ។

២១៦៤- ក្សិណនោះនារាយរាមទសពល បារមីផ្ដិតផ្ដល់
បំពេញនូវព្រះដេស្ដា ។

២១៦៥- ទើបព្រះនរនាថភាសា ទុកឡើងយល់ពា-
នរ៉ានៃរាជដំក្របី ។

២១៦៦- សស្រុទ្ធរុងរឿងរស្មី សងកាំយានៃ
ក័ពាក់នូវកុណ្ឌលរត្ន ។

២១៦៧- នោះទើបព្រះពង្សហរិន្ទ្រក្សត្រ ស្ដេចស្ដាប់បន្ទូលថ្វាត់
ក័ឃាត់ទៅព្រះអនុជា ។

២១៦៨- ចាហៃបាលក្ស្មណ៍ហើយធូរបា កុំបីក្រេវក្រោធា
បាឡើលទៅស្វានោះយោជ ។

២១៦៩- ស្វានេះប្លែកនឹងស្វាឯង ពាក់កុណ្ឌលជង
កាំមាពិពណ៌សោភា ។

២១៧០- ហានុមានឫទ្ធិដេស្ដា ចុះពីព្រឹក្សា

(1) RIB : dhanū sar nārāy(ṇ)

មកថ្វាយបង្គំនរបតី ។

២១៧១- ស្រេចថ្វាយធ្នូព្រះចក្រី ទូនអង្គសិរសី
បង្គំប្រណាម្យបាទា ។

២១៧២- ក្រាបទូលតីរព្រះក្សត្រា ព្រះអង្គជាតិជា
ឥស្សូរប្រសើរខ្ញុំហោង ។

២១៧៣- ព្រះអង្គទ្រង់ជមិជ័ក្នុង លើសវិសេសក្សត្រផង
ប្រកបនូវព្រះបុទុតា ។

២១៧៤- បពិត្រម្តាយខ្ញុំផ្ដាំជា ទោះនូវអ្នកឯណា
អាចយល់កុណ្ឌលទិព្វខ្ញុំ ។

២១៧៥- អ្នកនោះឯងជាក់ជាតិ- ស្ទរបាឯងនៃ
អាចយល់កុណ្ឌលនេះណា ។

២១៧៦- ឥឡូវនេះនរេន្ទ្ររាជក្សត្រា រឹងឫទ្ធិជេស្ឋា
ជ័ជាឥស្សូរខ្ញុំហោង ។

២១៧៧- ខ្ញុំនូវរឯគុណអាសាសង ព្រះគុណជ័ក្នុង
ពិសេសនូវព្រះករុណា ។

២១៧៨- ក្បិណានោះព្រះលក្ខអនុជា ពុំចេញចរចា
ស្ងួចសើចឯងក្នុងហឫទ័យ ។

២១៧៩- បានុមានវៃអក្សាស្រ័យ យល់ព្រះលក្ខពុំជឿនៃ
នូវពាក្យអញទូលនេះណា ។

២១៨០- នោះទើបបានុមានឫទ្ធ ស្រេចស្ទាបឡើងបា
មាត់យល់រស្មីព្រោងព្រាយ ។

២១៨១- ភ្លូទសទិសទិព្វពន្លាយ ភ្លឺស្វរ្យសព្វសាយ
នៃដល់បាតាល(1) ទសទិស ។

២១៨២- ក្បិណានោះព្រះបារិន្ទ្រពារ្យតិស្ណ យល់អស្ចារ្យកិះ
ព្រះលក្ខស្ដេចអនុជា ។

២១៨៣- ទុស្សានេះប្លែកមហិមា ជាតិជានរា-
ធិរេន្ទ្រនៃរាជជ័ក្របី ។

២១៨៤- នោះទើបព្រះបាទនរបតី បើកព្រះទុស្សប្រិមប្រិយ
ជាស្ដាំងនៃរាជពានរ ។

២១៨៥- ជាវៃបាពានរនាមករ សំប្ញុទ្ធព្រះពរ
ព្រះស្ដែងនោះតើឈ្មោះអ្វី ។

២១៨៦- អញជាប់ដឹងដើមសេចក្ដី ព្រះស្ដែងកើតពី
ឫសីឫពីទេពតា ។

២១៨៧- បានុមានក្រាបទូលស្នងជា ខ្ញុំនខ្ញុំនេះណា

(1) RIB : nai traipātāl

គឺពាយុបុត្រ សុរបុត្រ (1) ។

២១៨៨- រីនាមករខ្ញុំប្រាកដ ព្រះជនកសន្ធត
ខ្ញុំឈ្មោះកំហែងហនុមាន ។

២១៨៩- នាខ្ញុំមកនៅនាស្ថាន នោះសោតឱ្យឥតមាន
ពានរពីររាជក្សត្រា ។

២១៩០- ជាកលពិភេទនូវគ្នា មួយឈ្មោះក្រុងពា-
លីនោះដ៏ល្អើសនូវឫទ្ធិ ។

២១៩១- មួយឈ្មោះសុគ្រីពរាជដ៏ក្របី ជាប្អូនពាលី
គឺឯកឧទរមាតា ។

២១៩២- អ្នកទាំងពីរនោះសឹងជា មាខ្ញុំឯងណា
អគ្គីអ្នកដៃរៃយោធ ។

២១៩៣- រីក្រុងពាលីរាជជាច្បង ស្ដេចក្រេវក្រោធខ្លង
ដ៏ក្រៅក្រីឥតមិបុរាណ ។

២១៩៤- ស្ដេចទីងតិះដៀលដេរថា បណ្ដេញព្រះអនុជា-
ធិរាជឲ្យដេញវែងស្ថាន ។

២១៩៥- នេះគម្ពុរសុគ្រីពស្ដេចមាន ទុក្ខទល់ប្រែះប្រាណ
រូហានបុគ្គលអ្នកបង់ (2) ។

២១៩៦- នៅព្រៃស្មសានឯកអង្គ ព្រួញយំលន្លង់
លន្លោចត្រមោចឯងនៅ ។

២១៩៧- ទើបព្រះបន្ទូលវិងទៅ ទុក្ខអញនេះហៅ
មហាទុក្ខនវៃព្រៃ ។

២១៩៨- ហនុមានប្រែះប្រាណថ្លាវៃ ដឹងអង្សាស្រ័យ
មាប្ញុំយសម្ដេចភមា ។

២១៩៩- ចាប់យល់សុគ្រីពរាជា ស្រេចហនុមានណា
ព្រះមាទសម្ដេចនរបតី ។

២២០០- ហិចមោះរួសដោយឫទ្ធិ ដល់រាជក្របី
សុគ្រីពក្របិន្ទ្ររាជា ។

២២០១- ហនុមានទូលព្រះបិតុណា បពិត្រព្រះមា
សម្ដេចប្រើខ្ញុំរកអ្នក ។

២២០២- ណាមានបុណ្យកបវិរលក្ខណ៍ ខ្ញុំយល់ជាតិជាក់
អ្នកបុណ្យនេះឯងហើយណា ។

២២០៣- សូមអញ្ជើញសម្ដេចព្រះមា ព្រះអង្គស្ដេចវេលា
ទៅថ្វាយបង្គំថ្វាត់ហោង ។

២២០៤- សុគ្រីពត្រេកអរប៉ុនប៉ង គិតទៅយោះថ្លង

(1) RIB : sūryaputr
(2) RIB : rū hān mak ṭal' anak p̈aṅ

សំណាក់សម្តេចភជា ។

២២០៥- ឯងនោះព្រះបាទរាមា ប្រើព្រះអនុជា
ដើរណាទៅរកជលធី ។

២២០៦- ថាវៃហាលក្សធូរបាលី - ណារកជលធី
មករៀមនូវបរិភោគស្រង់ ។

២២០៧- ព្រះអនុជបង្គំលុតជង្ឃ លើកករនូវកំបង់
ជុំលីព្រះរៀមយាត្រា ។

២២០៨- រកភានត្រេចព្រៃព្រឹក្ស យល់ស្ទឹងធារា
ទឹកថ្លៃកសុក្រីតានិរភ័យ ។

២២០៩- ព្រះអនុជស្តេចឯងជលស័យ រត់រួសវិញរៃ
មកថ្វាយព្រះរៀមនរបតី ។

២២១០- នោះព្រះអង្គស្មោយជលធី យល់ប្រែអង្គក្តី
ពុំដូចវិស័យជលសា ។

២២១១- ហៃលក្សបាឯងតីឯណា ឥឡូវជលសា
ប្រែរៃលេងរាវីដងៃ ។

២២១២- ជលនេះជាអស្ចារ្យក្រៃ ពុំដូចជលស័យ
ជលធីនីមួយឯងហោង ។

២២១៣- ហៃលក្សបាទៅរកលង ដើមទឹកនោះហោង
ក៏ហូរអំពីស្ថានណា ។

២២១៤- ព្រះលក្សបង្គំយាត្រា ត្រេចត្រង់ជលសា
គឺរកនូវដើមទឹកនៃ ។

២២១៥- យល់មានភ្នំមួយធំក្រៃ ហូរជ្រោះជលស័យ
ល្អងចេញអំពីនោះហោង ។

២២១៦- ពួសពុះពេញទំនួញដីកន្លង ស្តេចស្តាប់ជាក់ឯង
នូវសត្វយោបំសោកា ។

២២១៧- ព្រះលក្សវិលវិញយាត្រា ក្រាបទូលអភិវាទ
ព្រះរៀមជិរាជថ្លៃងផ្តាស់ ។

២២១៨- បពិត្រព្រះភជិតំភាស់ ព្រះអង្គស្តេចត្រាស់
ប្រើខ្ញុំរកឯងជលស័យ ។

២២១៩- នោះមានភ្នំមួយធំក្រៃ ហូរជ្រោះជលស័យ
អំពីភ្នំនោះហោងណា ។

២២២០- ហើយពួសពុះយោបំសោកា ពេញយំមហិមា
នូវសត្វកន្លែង(1)ទុរគម ។

២២២១- ទើបព្រះសារពេជ្ញឧត្តម បើកព្រះសារសម
ក៏ប្រើអនុជស្នេហា ។

(1) RIB : kanleṅ

២២២២. ហោលក្បូរដូរព្យាយាត្រា　　វាយភ្នំនេះណា
　　ក៏មើលជាអ្នកណាហៃ ។

២២២៣. ព្រះអនុជស្តាប់ព្រះបន្ទូលថ្លៃ　　ហើយចរទូលថ្លៃ
　　តាំរង់ភ្នំនោះឯងហោង ។

២២២៤. ក្បួនណានោះព្រះអនុជស្តេចថ្លឹង　　កៅទណ្ឌបីសិពង
　　ក៏វាយភ្នំនោះហោងណា ។

២២២៥. ពុំបែកពុំធ្លាយឡើយណា　　រឹងឫទ្ធិចេស្តា
　　សិរានក៏វាយប្រត្យក្ស ។

២២២៦. ភ្នំទល់រឹងព្រះពុំបាក់　　ស្តេចវាយប្រត្យក្ស
　　កក្រើកអំពើកធរណី ។

២២២៧. សព្វសត្វយ៉ាងឃ្លងផ្រីគី　　ភ្លឹកខ្លាចជ័ឫទ្ធិ
　　ក៏រត់បំពាត់ខ្ចាត់ខ្ចាយ ។

២២២៨. សុគ្រីពឆ្លាស់ឆ្លើយអភិប្រាយ　　បពិត្រស្តេចកុំបីវាយ
　　កុំព្រួយព្រះអង្គឡើយណា ។

២២២៩. ស្តេចយកជន្លួយកៅទណ្ឌថ្លា　　ឆ្កឹះមិញធ្លាយណា
　　កុំព្រួយព្រះអង្គវាយហៃ ។

២២៣០. ស្តេចស្តាប់ពានរនិរភ័យ　　ទូលថ្កានក្បូត្រថ្លៃ
　　ក៏ថ្លឹងនូវពាក្យនោះហោង ។

២២៣១. ស្តេចយកជន្លួយកៅទណ្ឌថ្លឹង　　ឆ្កឹះភ្នំនោះហោង
　　រលើងរលំរលោះសា ។

២២៣២. នោះក្រុងសុគ្រីពភរិយា　　ឱនក្រាបសិរសា
　　បង្គំព្រះលក្ស្មនរបតី ។

២២៣៣. ព្រះលក្ស្មណស្តេចនាំជ័គ្រីបី　　ដើរយកថ្វាយចក្រី
　　ព្រះរៀមធិរាជជ័ភូធរ ។

២២៣៤. ព្រះលក្ស្មនូវក្រុងពានរ　　ចាកព្រឹក្សាករ
　　លុះដល់សម្តេចនរបតី ។

២២៣៥. ព្រះលក្ស្មថ្វាយក្រុងជ័គ្រីបី　　ពានរាធិបតី
　　ក៏ថ្វាយបង្គំភាសា ។

២២៣៦. ក្បួនណានោះស្តេចទ្រង់បុត្តា　　មាសស្ងួនភរិយា
　　សុគ្រីពស្តេចរាជទុក្ខទល់ ។

២២៣៧. ស្តេចឈ្លងដោយព្រះយោបល់　　ពោះអ្នកទុក្ខទល់
　　ទម្ងន់នូវអញបានណា ។

២២៣៨. ដោះមានហេតុអ្វីក្រុងពា-　　លីក្រេវក្រោធា
　　បណ្តោញព្រះស្តែងបរាប់ ។

២២៣៩. សុគ្រីពទូញក្រាបលុតជង្ឃ　　នបបាទបីកំបង់
　　បង្គំសម្តេចនរនាថ ។

២២៤០. បពិត្រខ្ញុំនូវទូលដើមអាទិ៍　　ឲ្យជ្រាបវិរបាទ

សម្តេចជ័ទ្រង់ធរណី ។

២២៤១- មុនមាន[1] ភាគមហិង្ហាសីហា    អាងអួតឫទ្ធិ
កម្លាំងកម្លោះសោះសា ។

២២៤២- ទ្រង់នាមទុភីមហិមា    រាងរូបឫទ្ធ[2]
កន្សូរអស្រើគសារសីហា ។

២២៤៣- ត្រេចត្រង់ខាស់ខិនជ័បុរី    ហើយហៅពាលី
នូវចង់ប្រយុទ្ធលេងលាង ។

២២៤៤- ពាលីស្តេចហិចពោះដ្បូង    ចរចេញយុទ្ធផង
នូវក្រុងទុភីមហិមា ។

២២៤៥- ស្តេចប្រយុទ្ធនូវភាគមហិង្ហ    ពីប្រថមសុរិយា
លុះអស្តង្គតបាត់ថ្ងៃ ។

២២៤៦- សឹងជាញញើលោរង្គជ័ទីថៃ    ពុំលុះនាក្ស័យ
ជីវិតនោះមួយៗណា ។

២២៤៧- ពាលីនូវក្រុងមហិង្ហ    យុទ្ធយល់ចេស្តា
ប្រកឹងប្រកោះញើលោរង្គ ។

២២៤៨- ទុភីពាលីតីរអង្គ    សឹងនឿយពុំគង់
កម្លាំងកម្លោះចេស្តា ។

២២៤៩- ព្រះពាលីស្តេចមកនា    ខាស់ខិននូវមហា-
តិភពសំភានព្រះអង្គ ។

២២៥០- ស្តេចផ្តាំខ្ញុំឯងប្រើខ្ពង[3]    ពលពានររង់
នាក្រៅកំពែងព្រះសីមា[4] ។

២២៥១- ប្រើដកបព៌តសិលា    ថ្មជាជំជា
ជំពូកៗដោយងារ ។

២២៥២- ស្តេចឈ្មោងក្រាស្លាតិស្តារ    បបួលទុភីពាល
ប្រយុទ្ធក្នុងស្ថានគោហា ។

២២៥៣- គឺពោះស្តេចផ្តាំខ្ញុំជា    ពោះឈាមមហិង្ហ
នោះប្រាលប៊ីស្ទួចជាតិយង់ ។

២២៥៤- ឈាមផ្កានោះគឺឈាមអង្គ    បងស្មោយទិញ-
ង្គតកាលដោយកម្មទេវា ។

២២៥៥- ធុរបាយកអស់បញ្ចា    ថ្មពោះបិតនា
នៃទូរគោហារត្នស្ថាន ។

២២៥៦- ស្តេចផ្តាំខ្ញុំហើយពោះផ្កាន    ទុភីហៅបាន
ក័ចូលប្រយុទ្ធលេងលង ។

(1) RIB : mun mān
(2) RIB : rāṅ rū ṛddhā
(3) RIB : proe khbaṅ'
(4) RIB : kaṃbaeṅ braḥ vehā(s)

២៦៥៧. ក្នុងព្រះគោហានោះហោង មានដូចបំណង
សម្ដេចព្រះបរមបិតា ។
២៦៥៨. ស្ដេចផ្ដាច់ផ្ដួលរាជមហិង្ស មានដូចប្រាថ្នា
មហាពិសេសពិស្ដារ ។
២៦៥៩. កាលនោះអស់ទេពសួគ៌ា ស្រែកថ្វាយសាធុការ
បង្ហូរនូវផ្កាគន្ធជាភ ។
២៦៦០. ហេតុនោះឈាមក្រុងមហិង្ស ជាលផ្លាវឹងជា
ខ្ញុំស្មានឈាមក្រុងពាលី ។
២៦៦១. ទើបខ្ញុំនូវមុខមន្ត្រី នាំពលដំក្របី
យកថ្មបោះបិតព្រះគោហា ។
២៦៦២. ពាលីស្ដេចផ្ដួលមហិង្ស ស្រេចហើយក្រុងពា-
លីដាក់សិលាខ្ទាត់ខ្ទាយ ។
២៦៦៣. ថ្មរាំងគោហាធ្លាក់ធ្លាយ ស្ដេចដាក់ទំលាយ
ត្រទិព្រះចន្ទជ័យស្រី ។
២៦៦៤. ហោះមកខាស់ចិនជ័យបុរី ក្រេវក្រោធពូអគ្គី
ក៏ដេះទុភាភាជា ។
២៦៦៥. ស្ដេចខឹងតឹះដៀលដេរជា កណ្ដាលពោងសេនា
មន្ត្រីជំនុំពលជង ។
២៦៦៦. ថាខ្ញុំនូវជំណើមរាជក្រុង ផងភរិយាផង
ខ្ញុំខ្មាសជំនៀលនិន្ទា ។
២៦៦៧. ស្ដេចក្រោធក្រេវក្រីត្បៀតរាជា តាំងមានពិជារណា
ម្ដើយជល់បណ្ដោញខ្ញុំបង់ ។
២៦៦៨. ខ្ញុំខ្មាសទល់ទុក្ខឯកអង្គ ទើបខ្ញុំត្រេចត្រង់
ក៏មកនៅស្ថាននេះណា ។
២៦៦៩. ស្ដេចស្ដាប់សុគ្រីពរាជា ទូលថ្លែងអាត្មា
ដើមជាទុក្ខទល់ជូនក្រៃ ។
២៦៧០. ទើបស្ដេចបើកខុង្ហារថ្លៃ បន្ទូលថាហៃ
សុគ្រីពទុក្ខអញសោកមាន ។
២៦៧១. នេះតឡូវអញមកដល់ស្ថាន ព្រៃនេះអញបាន
ប្រសប់នូវព្រះស្ដែងជា ។
២៦៧២. ទុក្ខទល់សោកសោយអនិច្ចា ព្រាត់សំបាតអាត្មា[1]
ប្រដូចអញឯងរូខ្ញុំ ។
២៦៧៣. ថាហៃសុគ្រីពធិបតី នេះតឡូវកុំបី
ព្រះស្ដែងបារម្ភឡើយណា ។

(1) MBN : prās sampād ātmā

២២៧៤- ការអញបំពេញចិន្តា ព្រះស្តេចព្រាហ្មា
បីដោយជំណាប់ផាឯង ។

២២៧៥- ចូរមើលឫទ្ធិអញឯង នេះម្តងលងលេង
សំដែងនូវតេជឫទ្ធិ ។

២២៧៦- អញយកទាស់ខិនជ័យបុរី នូវតាភទេពី
នោះឲ្យព្រះស្តេចហោងណា ។

២២៧៧- សុគ្រីពស្តាប់សព្ទមុទុតា ព្រះបន្ទូលករុណា
ពិសេសពិសាលសារ ។

២២៧៨- ក្សិណនោះសុគ្រីពក្រោកអរ យកបាទជ័បវរ
សម្តេចទុកលើសិរសា ។

២២៧៩- នាខ្លួនខ្ញុំឯងហោងណា ថ្វាយព្រះភជា-
ធិភជជាបរិពារ ។

២២៨០- ពោះបីមានសត្រូវពីងណា(1) ចូលដោយភូវនាថ៍
ប្រយោជន៍នូវបៀតជ័ព្រះអង្គ ។

២២៨១- ខ្ញុំនូវយកពលពានរពាង្ស ដែងជាញញើណារង្គ
ទាំងចិតសិបអសង្ខេយ្យា ។

២២៨២- ឆ្នាំងឯងកុំបីឲ្យដល់នា ពីរព្រះភជា-
ធិភជស្តេចព្រួយជ័ព្រះអង្គ ។

២២៨៣- មួយសោតនាអញខ្ញុំចង់ ទូលឲ្យជ្រាបត្រង់
នាកិច្ចមួយនោះឯងណា ។

២២៨៤- ក្សិណហនុមានកីះព្រះភជា សុគ្រីពព្រះមា
ពុំឲ្យទូលទៀតឡើយហោង ។

២២៨៥- ខ្លាចក្រែងអាក់អន់ក្តាំក្តង(2) ពុំបានដូចបំណង
ជំណាប់នៃព្រះព្រាហ្មា ។

២២៨៦- សុគ្រីពហនុមានក្រាបណា ព្រះបាទភមា-
ធិភជបរមបពិត្រ ។

២២៨៧- ចេញមកនៅក្រៅស្ថានស្ថិត ហនុមានគន់គិត
ក៏ដឹងគំនិតព្រះមា ។

២២៨៨- នាមានក្តីមួយនោះណា សុគ្រីពភជា
ពុំទាន់ចរចាឆ្លាស់ឆ្លើយ ។

២២៨៩- ហនុមានជាបពិត្រអ្នកមាហើយ អញខ្ញុំដឹងហើយ
សម្តេចពុំជឿចេស្តា ។

២២៩០- ព្រះបាទសម្តេចភមា រីអ្នកនេះណា
គឺអង្គព្រះនារាយឯងហោង ។

(1) RIB : satrūv sāhas bāl
(2) RIB : gāk' gīoeṅ chgāṃ chgaṅ

២២៩១. ស្ដេចកុំជឿខ្ញុំនេះម្ដង សូមស្ដេចមើលលង
នាសងខាងព្រះអង្គ ។

២២៩២. មានណាយលក្ខណ៍វិលផ្លាស់ជា ចក្រសិងជ័ក្រា
មហិមាចេស្ដាបីក្រោកជ ។

២២៩៣. អ្នកនេះទិព្វទេពសន្ធត នារាយញុតជ័ក្រោកង
មកកើតជាព្រះរាមា ។

២២៩៤. ព្រោះឃើញចង់ដឹងចេស្ដា ប្រមាណកម្លាំងពា-
លីលើសជ័រិងឫទ្ធិ ។

២២៩៥. ឃើញនាំព្រះបាទនរបតី មើលក្រុងទូទី
វែងលតេជពាលីខ្លួលមរ ។

២២៩៦. មួយនឹងជង់ដឹងឫទ្ធិសរ សិល្បសក្តិព្រះភូធរ
នារាយភាមាតិស្ដារ ។

២២៩៧. ឃើញនាំទៅទតសប្តតាល ជុះលើនាគពាល
ជំណាលមហាប្រជតី ។

២២៩៨. ឲ្យស្ដេចថ្លៃងលងឫទ្ធិ ដឹងតេជនរបតី
នាកាលនោះឯងហោងណា ។

២២៩៩. មានុមាននូវសុគ្រីពជរជា ស្រេចហើយវេលា
ទៅគាល់សម្ដេចនរបតី ។

២៣០០. ក្សិណានោះព្រះបាទនរបតី នារាយជមចក្រី
ស្ដេចឈ្វេងព្រះញាណទិព្វថ្លៃ ។

២៣០១. ទើបស្ដេចបន្ទូលថាហៃ សុគ្រីពស្ពានណាលៃ
ពាលីក៏ខ្លួលមហិង្ស ។

២៣០២. អញចង់យល់តេជក្រុងពា- លីខ្លួលនោះណា
នៅក្នុងគោហានោះហោង ។

២៣០៣. សុគ្រីពក្រាបបាទទូលស្នង អញ្ជើញស្ដេចហោង
តាមព្រះដំណោះប្រាថ្នា ។

២៣០៤. ព្រះអង្គតីរពង្សក្សត្រា ស្រេចស្ដេចវេលា
អនុជនូវរៀមរូសីហា ។

២៣០៥. ទៅលុះនាសពទូទី មហិង្សរូគិរី
រលើងរលំស៊ីមវៃស្ក ។

២៣០៦. ស្ដេចកោះកៅទណ្ឌសរជ័យ សភាឫទ្ធិថ្លៃ
គឺអគ្គិវាសផ្លាញផ្លា ។

២៣០៧. ស្ដេចថ្លៃងរូបភាជមហិង្ស ជះដាប់មហិមា
ក៏សុះជាជេះធុយជង់ ។

២៣០៨. ហើយព្រះយកតិរុណាវាសច្រង់ ថ្លៃងទៅលត់បង់
នាភ្លើងសរសក្តិផ្លាញផ្លា ។

២៣០៩. ទើបព្រះនារាយភាមា យកពាយុវាសនា

បំពង់ព្រះអង្គទ្រង់វិវាទ ។

២៣១០- ថ្លែងទៅប្រមូលអស់ធាតុ ដោះទៅតាជាត
មហាសមុទ្រជលសា ។

២៣១១- ហនុមាននូវសុគ្រីពភាសា យល់ថ្លែងចេស្តា-
នុភាពព្រះអង្គលើសក្រៃ ។

២៣១២- លុតដង្ហែក្រាបបាទាទៃ នារាយរាមក្សត្រថ្លៃ
ប្រសើរពិសេសពិស្តារ ។

២៣១៣- ទូលថាបពិត្រភូវនាថ មានព្រឹក្សសប្តតាល
កើតកាលដំណាលប្រដតី ។

២៣១៤- សូមព្រះពីរពង្សស្តេចលី- ណាលងនូវឫទ្ធិ
អំណាចនៃសរសក្តិថ្លា ។

២៣១៥- ស្តេចស្តាប់សុគ្រីពទូលថា ជង់ដឹងចេស្តា-
ធិការព្រះអង្គក្សត្រថ្លៃ ។

២៣១៦- ទើបស្តេចបន្ទូលថាហៃ សុគ្រីពស្ពាននោះនៃ
តើនៅតំបន់ស្ពានណា ។

២៣១៧- ចូរព្រះថ្លែងនាំមាគ៌ា យើងពីរក្សត្រា
នូវទៅល្បងតេជឫទ្ធិ ។

២៣១៨- ក្សិណនោះសុគ្រីពរាជក្របី លើកករអញ្ជលី
សម្តេចព្រះស្រីសារពេជ្ញ ។

២៣១៩- អញ្ជើញពីរព្រះអង្គស្តេច លេណទៅតិច(1)
លេចថ្ងៃ នេះទៅយល់ហោង ។

២៣២០- នោះព្រះអនុជរៀមច្បង ស្តេចស្ទេចដោយដង
ដល់ថ្ងៃព្រឹក្សពនាស្នា ។

២៣២១- លុះដល់ស្ពានមហាសប្តតាល ដុះលើនាគពាល
មិនដូចដក្ររត្នភាយ ។

២៣២២- ក្សិណនោះនារាយរាមឫទ្ធិសាយ ប្រុះគ្រាប្រាគ្រាយ
ប្រសើរនូវទិព្វញាណយល់ ។

២៣២៣- ដើមតាលដុះគីដោយកល(2) ទើបព្រះទសពល
ស្តេចឈ្វេងនូវព្រះគ្រាហ្ន៉ា ។

២៣២៤- ស្តេចថាសប្តតាលព្រឹក្សា នេះសមដុះនា
លើខ្នងមហានាគរាជ ។

២៣២៥- ទើបស្តេចសំដែងព្រះអំណាច ឲ្យទេពអស្សូរខ្លាច
នូវឫទ្ធិតេជព្រះករ ។

២៣២៦- ស្តេចយាងព្រះបាទសុបវរ ស្តាំជាន់ខ្ជាប់ឈរ

(1) RIB : dau ṭāc'
(2) RIB : ṭuḥ aṅgṭ kal'

សង្កត់កន្ទុយនាគា ។

២៣២៧- នាគផ្អើលភិតនឹងព្រះចេស្តា ណាលូនអាត្មា
ពាំរួចសោតស្ងប់ស្ងៀមនៅ ។

២៣២៨- ដើមតាលណាជាស្ពានទៅ ទើបស្តេចបីសំដៅ
ផ្លែងសរព្រហ្មាស្មុតដ្ឋា(1) ។

២៣២៩- ត្រូវលេចសព្វតាលដ៏មហា- ព្រឹក្សបាក់ល្អិតជា
កំណាត់ៗខ្ចាត់ខ្ចាយ ។

២៣៣០- ឮសព្ទឫទ្ធិសរសន្ធាភាយ ទាល់ព្រហ្មលោកនាយ
រូបសែនរន្ធះគណនា ។

២៣៣១- អស់ទេពយមព្រហ្មឥន្ទ្រា សឹងថ្វាយមាលា
ភ្ញីស្គន្ធជាសាធុការ ។

២៣៣២- រីនាគភាជពិសពាល ទុកជ្រែកបាតាល
ទៅចូននាង្គិតសាគរ ។

២៣៣៣- ក្សិណានោះសុគ្រីពរាជវានរ លុតលើកទសករ
បង្គុំដាក់លើសិរសា ។

២៣៣៤- វាចារចូលទូលបទបាទ ស្រែចទូលព្រះករុណា
នារាយនរិន្ទ្រឫទ្ធិក្រៃ ។

២៣៣៥- ទូលថាបពិត្រក្សត្រថ្លៃ ជាតស្មូរភពត្រៃ-
លោកលើសនូវឫទ្ធិចេស្តា ។

២៣៣៦- ខ្ញុំយល់ច្បាស់ស្តែងនូវឫទ្ធា- នុភាពព្រះអង្គមហា-
ពន្លឹកពន្លឺដ៏កន្លង ។

២៣៣៧- លើសវិសេទេពអស្សូរផង អញ្ជើញស្តេចហោង
ទៅនាខាស់ខិនបុរី ។

២៣៣៨- សូមស្តេចថ្លែងថ្លាញពាលី នូវសរនរបតី
ប្រសើរឫទ្ធីដាញដ៏យ ។

២៣៣៩- ពោះពាលីចាញ់តេជថៃ លុះជន្មាក្ស័យ
នូវសរស្តេចរាជា ។

២៣៤០- ខ្ញុំនូវថ្វាយអស់ពលព្រឹន្ទស្វា ជិតសិបអសង្ខេយ្យា
មហាអក្ខោភិនី ។

២៣៤១- ស្នងគុណព្រះបាទនរបតី ស្តេចមានមេត្រី
ក៏ប្រែព្រះរាជបុត្តា ។

២៣៤២- ពិសេសលើសក្សត្រនានា ហោតព្រះអង្គជា
អំបូរនារាយពុទ្ធអង្គ ។

២៣៤៣- ដឹងនោះព្រះជ័យពិរពង្ស សម្តេចស្តេចត្រង់
បីលុះនៃខាស់ខិនហោង ។

(1) MBN : āriddhacand sar thlā

២៣៤៤. ព្រះប្រើសុគ្រីពទៅក្តង ហៅពាលីបង
ទទៃទចូលឲ្យទឹង ។

២៣៤៥. លៃឯបានពាលីឫទ្ធិរឹង ចេញមកប្រយុទ្ធនឹង
សុគ្រីពកណ្តាលវេហា ។

២៣៤៦. បានព្រះនូវខ្សែងសរថ្លា ភ្ជួលផ្តាច់ក្រុងពា-
លីល្មុះនូវសរព្រហ្មាស ។

២៣៤៧. សុគ្រីពថ្វាត់ថ្វាយអភិកាស បង្គំជ័ពិណាស
ក៏ណាសម្តេចយាត្រា ។

២៣៤៨. នោះទៅខាស់ខិនមហា- នគរហៅក្រុងពា-
លីភាងជ័ដាព្រះទៀម ។

២៣៤៩. តីរព្រះហរិន្ទ្រភាងឈរស្ងៀម កោះសរសំទៀម
សំរេចសំភាស់ព្រះជេស្ឋា ។

២៣៥០. ស្តេចតើនសុគ្រីពភជា ឲ្យហៅក្រុងពា-
លីល្មះកណ្តាលរណារង្គ ។

២៣៥១. សុគ្រីពបាបរទើសទ្រង់ ការខ័នបីទ្រនង់
តន្ត្រំបាទាបីលណាម ។

២៣៥២. ហៃយពាលីភាងជ័ព្រះទៀម សុខសោយរាជ្យស្ងៀម
តម្បូវអញមកហើយណា ។

២៣៥៣. តីឯបរអញតិតទោសា ស្ថិតនៅពនាន្តា
សំបាកនូវទុក្ខសព្វថ្ងៃ ។

២៣៥៤. តាំងចេញមកយុទ្ធតឯង វៃឯជិងពិជ័យ
វិជ័យនៃយើងតីរហៅង ។

២៣៥៥. ពាលីស្តាប់សព្ទា(1) ឃ្លង ក្រេវក្រោធកន្លង
រន្ធត់ទាំងឱភាវត្ថ ។

២៣៥៦. ករការព្រះខ័នជ័យថ្វាត់ វិលវៃវបីថ្វាត់
សញ្ញានូវ(2) ឫទ្ធិតេជះ ។

២៣៥៧. សព្ទដំសព្ទស្បូកសព្ទខ្ទះ សព្ទស្រែករូរន្ទុះ
ប្រទះនូវខ័នខាស់ខែង ។

២៣៥៨. សព្ទក្រេចត្រំភ្នំដាញវៃឯង នោះយាដាវៃឯង
ក៏ងាយកណ្តាលវេហា ។

២៣៥៩. ក្របិន្ទុភាងតីរពានរ ករការត្រឹក្សា
ត្រទិត្រវាសវាត់វាយ ។

២៣៦០. ពៃត្រត្រឹក្សបតិតផ្លាក់ផ្លាយ ឫទ្ធិរឹងវាត់វាយ
ប្រខាយនូវត្រឹក្សបាក់បែក ។

(1) RIB : stāp' sabd dāruṇ
(2) RIB : paṅhār nūv

២៣៦១. សត្វត្រេចត្រីភ្នំស្រៀវស្រែក ខេរខឹងខាំហែក
ក្រចកក្រះដៅដាប់ជីក ។

២៣៦២. បុកបែនបត់តតៃព្រៃព្រឹក្ស អឺអឹងដ៏អធិក
នូវឫទ្ធិរឹងព្រះសិហា ។

២៣៦៣. ក្របិន្ទុរាជក្រោធខ្ញូរ ឫទ្ធិរឹងអស្ចារ្យ
សំហាសំពើមនូវគ្នា ។

២៣៦៤. ក្រុងពាលីពេញនូវពាណ ដ៏ក្រៃវែងពា-
នរាអនុជទុរពាល ។

២៣៦៥. ហាត់ហាហិចហោះប្លូសដល់ នាភាយភាមស្តេចយល់
ក្របិន្ទុបងលើសនូវពាណ ។

២៣៦៦. សុគ្រីពពាលីដ៏ខែង មហិមាប្រឹងប្រែង
សំហាតាំងនោលនូវគ្នា ។

២៣៦៧. រូសីហាសោតសឹងមហិមា ឯណ្តើមជេស្តា
បីដូចប្រយុទ្ធយស់ហោង(1) ។

២៣៦៨. ប្រកឹងប្រកោះ ទុទារខ្លាំងក្លោះ
សោតសឹងទ្រើសឃ្នង ប្រទុះប្រទះ
ប្រយុទ្ធម្លួយជង តាំងនោលពាក្យសង
បីថ្លែងទៅរឹង ។

២៣៦៩. ព្រះរាមរមិល ពានរទាំងពីរ
រូរាជសីហាសិង្ហ ឯករូបបេះបិទ
ហិចហោះទៅរឹង ទើបព្រះរំពឹង
ពុំថ្លែងសភា ។

២៣៧០. សុគ្រីពចាញ់តេជដេស្នា រឹងលុតផ្ទាត
បង្គំសម្តេចហរិវង្ស ។

២៣៧១. បពិត្រស្តេចប្រើខ្ញុំត្រេចត្រង់ ខាស់ខិនបុរីវង់
ក៏ព្រះនូវថ្លែងព្រហ្មាស ។

២៣៧២. តប្បូវខ្ញុំហោះទេហាស ទៅដូចអភិកាស
សំដែងឯកណ្តាលអម្ពរ ។

២៣៧៣. ម្ល៉េះព្រះអង្គពុំថ្លែងសរ តប្បូវខ្ញុំផ្ទាស់មរ
ក៏មកបង្គំនរបតី ។

២៣៧៤. ស្តេចស្តាប់សត្វរាជក្របី ចាញ់រាជពាលី
ក៏វិលសំណាក់អាត្មា ។

២៣៧៥. ស្តេចដាតីរពានរា តីរអង្គដូចផ្កា
កុមុទដ៏ពេញពីរស្លោះ ។

(1) RIB : prayuddh yuddh hoṅ

២៣៧៦. ដូចគង់សារនូវគង់ស្មោះ ដូចបពិតស្មោះ
ទាំងពីរទន្ទឹមនូវគ្នា ។

២៣៧៧. ពុំនោះដូចព្រះសុរិយា ចាំងចែងទេវា
ទាំងពីរទន្ទឹមឥតសំគាល់ ។

២៣៧៨. ល្អល្អះស្រលះដ៏រចាល ពណាពលស្កល់ [1]
សំគាល់អីមួយពុំបាន ។

២៣៧៩. គួរឲ្យព្រះលក្ស្មដ៏ប្រធាន វាន់មាណបាន
សំគាល់នូវរៀមអនុជា ។

២៣៨០. បានអញនូវខ្លែងសរផ្កា ព្រហ្មាស្ដ៏មហា-
វិជិតវិជ័យ ដ៏ឫទ្ធិ ។

២៣៨១. ជងនោះព្រះលក្ស្មនរបតី ជាលដោះរួសខ្មី
ក៏វាន់មាណដ៏សុគ្រីព ។

២៣៨២. ក្រាបថ្វាយបង្គំសូមពរជីព ស្រេចហើយសុគ្រីព
ក៏ហោះវឹងថ្កានពាលី ។

២៣៨៣. ស្រែវស្រែកកំលុងភក្ត្រ ដាទ្រើយពាលី
បង់ចេញប្រយុទ្ធសង្គ្រាម ។

២៣៨៤. ពាលីក្រេវក្រោធដ៏កំរាម នេត្រប្រាលភក្ត្រដាម
ក្រញេវក្រញើញសោះសា ។

២៣៨៥. ចាប់ព្រះខ័នរត្នដ៏ក្រព ឈរឈានប្រឹងពា-
ហុករទាំងពីរខាស់ខ្វេង ។

២៣៨៦. រូបរុងរូពេជ្រដ៏កំពែង ពណាការស្ដែង [2]
អនេកអនន្តគណនា ។

២៣៨៧. ជងនោះទេពីតារា ថ្ងូលក្រាបអភិវាទ៍
បង្គំនៃក្រុងពានរ ។

២៣៨៨. បតិត្រកុំបីស្ដេចភ្លេចស្មារ រីសុគ្រីពនេះបង្ក [3]
បណ្ដាលនូវក្រោធានល ។

២៣៨៩. ពេលះចាញ់ហើយហោងអស់កល ស្ទឹកអ៊ីបកជល់
ទទែទទូចនូវប្រយុទ្ធ ។

២៣៩០. នេះយល់មនគឺកលហោង សមមានបើក្នុង
នៃអ្នកដ៏មានចេស្ដា ។

២៣៩១. សូមស្ដេចទ្រង់ព្រះពិចារណា កុំបីក្រេវក្រោធា
ដោយពាក្យអនុជនោះនៃ ។

២៣៩២. ឧបមាដូចភ្លើងឆេះព្រៃ រីកណ្ដាបជងក្ស័យ

(1) RIB : bal skār
(2) MBN : balā kāy staeṅ
(3) RIB : pañ-ar

និមិត្តមរណាជិតខ្ទឹង ។

២៣៩៣. កុំបីស្តេចក្រេវក្រោធរឹង ក្រោធនោះហោងនឹង
រមែងតែងបានក្តីធ្ងន់[1] ។

២៣៩៤. បង់សត្យបង់សីលបង់បុណ្យ ធ្វើសព្រុះទុរជន
និមិត្តបរក្រេវក្រោធា ។

២៣៩៥. សូមស្តេចកុំបីមានព្រះទយា ស្រើបស្រាលល្មើយណា
នូវឆុកអំពើពីរដាន់ ។

២៣៩៦. ក្រុងពាលីស្រៀវស្រែកខាន់ ពាក្យនាងតារាស្ទាន់[2]
កំត្បូកកណ្តាប់ដៃឯង ។

២៣៩៧. ជាព្រះអង្គអញតតក្រែង ពីកាលមុនព្រេង
ពុំដែលកន្លងចេស្តា ។

២៣៩៨. ទោះបីក្រុងភពដីឫទ្ធ ប្រាលប្រាបស្មូគាំ
កក្រើកជាកោលាហល ។

២៣៩៩. ក្រុងនោះឫទ្ធិរឹងអស់កល មិនតពុំអាចទល់
នូវទប់អំណាចអញបាន ។

២៤០០. មោះក្បូត្រៃក្រៃក្រែងនូវប្រមាណ បីអាចល្វានពាន
ប្រវៃងប្រឡងចេស្តា ។

២៤០១. ពាលីក្រោធក្រៃមហិមា ករកាន់ខ័នធ្លា
កំស្ទុះហោះចេញទៅខ្លាំង ។

២៤០២. ពះពានអនុជបីប្រណាំង ណោណោតនូវកន្លាំង
កំណោះដីពីរដាញដល់ ។

២៤០៣. ភ្លោះខ្លាំងពីរពេជ្រសាវសល់ យាចហោះទេះវល់
ប្រដំប្រដេញវិលវៃ ។

២៤០៤. ធ្ងូលយុទ្ធប្រតិរពាដៃងដឹយ ហោះឃ្លាសក្រួលជ្រៃ
ប្រផាប់ប្រជឹកនូវគ្នា ។

២៤០៥. ហៀវហោះដាដាយទេហា កាងករដីក្រទា
ក្រំខូសសន្ធាប់ស្រៀវស្រែក ។

២៤០៦. ក្តុំក្រោមព្រុតព្រោមដីសស្លែក បពិតធ្លាយបែក
រលើងរលុះជ្រោះជ្រេវ ។

២៤០៧. ជោកផាក់ធ្លុះធ្លាក់ធ្លាយទៅ ខ្ទាតខ្ទាយព្រុះក្រោ
ពន្លឹកពន្លុកក្រុះពាយ ។

២៤០៨. កេសរសីហាសិង្ហព្រាតព្រាយ កដសាររត់ខ្ចាយ
អម្រឹកពន្លឹកកិតភាំង ។

២៤០៩. គោកគោមហិង្សាខ្លាខ្លាំង ពាំងរមាសនូវរមាំង

(1) RIB : ravaeṅ nūv ktī nā dhṅan'
(2) RIB : tpān'

បំពាក់បំពួនរត់ខ្វាយ ។

២៤១០- បក្សីស្ដើលហើរព្រាត់ព្រាយ  សត្វសត្វសង្ហាយ
ពន្លកនូវតេជដេស្ឋា ។

២៤១១- មេឃមីអាប់សែងសុរិយា  អសនីអម្ពរា
ផ្ទុះខ្ទាត់នូវសែងឥន្ទធនូ ។

២៤១២- ស្រឡប់សព្វស្នូគឺសំភូ(1)  ឬសីព្រតត្រឹមនូវ
សឹងស្ពឺនូវស័ព្ទផ្ទាយពេទ ។

២៤១៣- អស្ចារ្យឫទ្ធិរឹងជាហេតុ  ក្របិន្ទុភពពិភេទ
ពិភិនពិភាល់ដងគ្នា ។

២៤១៤- ពាលីផ្ដោះផ្ដាក់អនុជា  ស្ដុះស្ដុយបព្វតា
ឥន្ទ្រដងឥន្ទ្រំករកាន់ ។

២៤១៥- សេណាជាសជាសល់ពាន់  ដោះជាឧសាឧស្សាន់(2)
ផ្ទុះខ្ទាត់នូវភ្លើងផ្លួលផ្ទាល ។

២៤១៦- ធ្លាក់ចុះលើប្រថពីតាល(3)  ល្អិតត្រឹមក្បាលជាល
ក្រឡប់ត្រលោមនូវធូលី ។

២៤១៧- សុគ្រីពតពះពាពាលី  ខាត់ខែងដីគ្រវី
សិខរ(4)ពន្លកត្រឹមក្បាល ។

២៤១៨- ដោះភ្នំប្រដំត្រូវគ្នា  ខ្ទាត់ខ្ទាយសិលា
រូបសព្វរន្ទះអសនី ។

២៤១៩- ភ្លឺគ្រោលផ្ញាលទាំងប្រថពី  រូបភ្លើងឆេះសម្បី
ផ្ទុះខ្ទាត់កណ្ដាលអម្ពរ ។

២៤២០- យុទ្ធយល់រូបរាជកេសរ  សីហាសឹង(5)តីរឈរ
កណ្ដាលដីជរណីណា ។

២៤២១- ពង្សតីររូបពេជ្រដីឥឃហា-  និព័ន្ធសោះសា
សន្ធាប់សំរៀរធូលជាប់ ។

២៤២២- ស្នូរស្រែកបីសញ្ចោករូបក្ដាប់  ប្រថពីដីក្រឡាប់
ពន្លឺកពន្លកឥឃហិង ។

២៤២៣- ប្រយុទ្ធប្រកឹងជេស្ឋា  រិលរៃរវេហា
សឹងដោះសឹងហិច(6)រូបយន្ត ។

២៤២៤- ណោណោតស្ដុះស្ដាន់ពេកពន់  ជោយតេជោមន្ត
អាគមកក្រួនបីងសំ ។

(1) RIB : sabd sarabhū
(2) RIB : tpān'
(3) MBN : prithabī bhā
RIB : prathabī kār
(4) RIB : siṅkhar
(5) Var. : siṅh
(6) RIB : saṅhār saṅhic

២៦២៥. ខេកខ្លួនខាស់ខែងទីងខាំ មាត់មុះបីលលំ
ក្រឡេកក្រឡោតនេត្រស្រាល ។

២៦២៦. អស្ចារ្យឫទ្ធីរដល់ផាតាល កក្រើកសព្វស្ថិតមារ
ក្រពាន់នូវខ័នឋាប្លយ ។

២៦២៧. ប្រដពីរន្ធត់បីសញ្ញាយ ព្រះសុមេរុទ្រុឡយ
សំពាង់ធុងដេគ្រោលបក់ ។

២៦២៨. ព្រះសមុទ្រពុះពោរនូវរលក បោកពាន់រូសណ្ដក
ប្រល័យទាំងស្លក់ស្លាប់ស្មែង ។

២៦២៩. ដោយមិន្ទ្ររលាន់ក្រឹកក្រេង ស្រឡប់ព្រះសូរ្យសែង
ស្រទុំទាំងដែនចក្រវាឡ ។

២៦៣០. ភាប់អស់ប៉ុទាំងភពភារ ស្រឡប់ទាំងទេវា
សន្ធឹកសន្ធាប់សព្វស្មៀរ ។

២៦៣១. ទេពតាទសទិសបីសស្ទៀរ ហិចហោះជីសសៀរ
មមាខាងខែត្រចក្រពាល ។

២៦៣២. ទេពាធិរាមារាល ឆ្ងាយសាធុការ
ស្លុតគីនូវសព្វឃោសនា ។

២៦៣៣. ស្ដើលដល់សោឡសព្រហ្មា ភ្លាំងភ្លេចភាវនា
ដោយឫទ្ធីរាជជ័យក្របី ។

២៦៣៤. ព្រះផាត់នារាយរាមចក្រី យល់ឫទ្ធិពាលី
នូវផ្ទាញ់អនុជតាប់ស្ដែង ។

២៦៣៥. ក្បិលលារាជពាលីស្លុះស្ដែង ផាប់សុគ្រីពខែង
ក៏ភាន់នូវត្បូងជ័យក្រវី ។

២៦៣៦. ផោះផោកភាត់រាយនូវឫទ្ធី ពាលីរាជជ័យក្របី
ក្រវីអនុជស្មុំរក្បួយ ។

២៦៣៧. នោះពានរអនុជភិតភ័យ ស្រែករកជេស្ឋជ័យ
សម្ដេចនារាយរាមា ។

២៦៣៨. បពិត្រឥឡូវខ្ញុំឃាត់ណា សូមព្រះរាជា-
ធិរាជស្ដេចថ្លែងសរសឹក ។

២៦៣៩. ស្ដេចផ្ទាប់ក្រោមដើមពោធិព្រឹក្ស- ក្បាលសាយនូវសន្ធឹក
អធិកនូវមេកសាខា(1) ។

២៦៤០. ស្ដេចកោះកោទណ្ឌមហា- ព្រហ្មាសមុតថ្លា
ក៏ថ្លែងនូវក្រុងពានរ ។

២៦៤១. សព្វកោទណ្ឌពាត់សក្តិសរ រូអសនីខ្ទរ
កក្រើកអំពើកពសុធា ។

(1) RIB : nūv truoy sākhā

២៤៤២. ពាលីប្រះព្រះអនុជា ដក់ជាប់សរថ្លា
សម្ដេចឃារិន្ទ្រប្រត្យក្ស ។

២៤៤៣. ក្រុងពាលីជាប់បានសរសក្តិ ស្រែចស្រែកអោះអ្នក-
ណាមានតបះចេស្ដា ។

២៤៤៤. សរឥន្ទ្រឬសរព្រហ្ម ឬសរអសុភ
ដ៏មានតបះកាយក្រៃ (1) ។

២៤៤៥. សរនេះក្រែងសរព្រះពៃ- ស្រពឬសរវៃន
សម្ដេចនារាយភាគា ។

២៤៤៦. គតអ្នកនាយសរបីនូវជា ឡើយទើបក្រុងពា-
លីរមិលមើលមុខកាំ ។

២៤៤៧. យល់លាយលក្ខណ៍អក្សរត្រាំ មានជាចំណាំ
មហាព្រហ្មសភា ។

២៤៤៨. ពាលីចាប់ព្រហ្មាសថ្លា ទូលនូកសិរសា
ហើយក្រាបទូលថ្លែងជាស្នង ។

២៤៤៩. បពិត្រអង្គខ្ញុំគិតគ្ដង គតទោសមួយហោង
នូវព្រះនារាយធិបតី ។

២៤៥០. ជាប្រុសថ្លាកជលោកីយ ណេះដូចសាកញី
មកធ្វើនូវកលកិច្ចកាច ។

២៤៥១. នេះហៅប្រុសតិតអំណាច ជាប្រុសណេះខ្លាច
ចាំបាំងកណ្ដាលវៀណារង្គ ។

២៤៥២. ផ្សរចេញមកឲ្យយល់អង្គ បាននូវដឹងដើមពង្ស
អំបូរបុរាណាចេស្ដា ។

២៤៥៣. ពាលីត្រូវសរសក្តិថ្លា ជាប់សរភជា-
ធិរាជនូវដៃស្ដាំទ្រង់ ។

២៤៥៤. ដៃឆ្វេងកាន់ខ័នជីទ្រនង់ (2) វិះរកជាក់អង្គ
នាស្លាបមួយទើបបាបា ។

២៤៥៥. ពៃហាអ្នករឹងឫទ្ធិចេស្ដា ពោះមកពាជា
សង្ហា (3) នូវសរថ្លែងថ្លាញ ។

២៤៥៦. នាយើងពិពណ៌ដែងជាញ វៀណារង្គក្រុងក្រាញ
ប្រកិតប្រកួតខេរទឹង ។

២៤៥៧. ណេះលបថ្នាប់ផ្ញៀវពួនពាំង នូវឫទ្ធិរឹង
ក៏ថ្លែងនូវសរព្រហ្មាស ។

២៤៥៨. រាំងកាលនោះព្រះបាទ ត្រាំត្រែកនូវនាង

(1) RIB : tapaḥ kāc krai
(2) RIB : kān' khăn tantraṅ
(3) RIB : sāhăs

បន្ទូលនូវព្រះភជា ។

២៤៥៩. ជាហៃហាពាលីរាជមហា ថ្វើសម្រុះអនុជា
សុគ្រីពជិតរាជជ័យក្របី ។

២៤៦០. តាំងកាត់ពាក្យសត្យមេត្រី អាចយកទេពី
តារានាដោយចិត្តចង់ ។

២៤៦១. ហេតុនោះអញខ្លែងថ្លាញបង់ បទេពីងពុំគង់
តាំងដង់នូវពាក្យមេត្រី ។

២៤៦២. ប្រជុំមកាលកើតជំពារមហិនី តារាទេពី
នូវឲ្យសុគ្រីពអនុជា ។

២៤៦៣. តាំងបង់ពាក្យសត្យសត្យា មកយកតារា
ទេពីជាភរិយាឯង ។

២៤៦៤. ទើរានុតៀរតពីព្រៃង មកខ្លិចថ្លាញតាំង
ឲ្យលុះនូវសរព្រហ្មាស ។

២៤៦៥. ពាលីបង្គំអភិវាទ វរវន្ទាបាទ
សម្ដេចនារាយណ៍រាមា ។

២៤៦៦. បពិត្រខ្ញុំគតទោសា នឹងព្រះភជា
នរិន្ទ្រជិតជិនរបតី ។

២៤៦៧. ស្ដេចទ្រង់ទូន្មានភពត្រៃ បួសជាឫសី
ប្រព្រឹត្តនូវសីលចរិយា ។

២៤៦៨. ពាក់ផ្កាទៀនសិល្បសាស្ត្រា កៀសពាក់ខ្សែកខ្លា
ជំពាយនូវផ្លាំងស្វែង(1) ។

២៤៦៩. ប្រតិទិនបូជាហោមស្វែង ផ្ទុំសង្ឃផ្ទើងផ្ទែង(2)
ពិធីនូវព្រតសាស្ត្រស្មូត ។

២៤៧០. ស្រុងស្មាធិខ្ទីងខ្ទួសជ័រស្លុត ដោយសាស្ត្រសៃយស្មូត
សង្វេគស្វាធ្យាយសព្វថ្ងៃ ។

២៤៧១. នេះតឡូវបោះបង់ព្រះវិន័យ ខូរព្រះបារ្ទ័យ
ពុំមានមេត្តាករុណា ។

២៤៧២. យល់ក្រោធក្រៅផ្សាប់ជីវ៉ុរ ផ្លែងសរសក្ដិថ្លា
បង្ហស់នូវជនជីពជាតិ ។

២៤៧៣. ជាព្រះតស្ទូរសូវតាដ ដោះមកពិឃាត
អង្គអញឯងគតទោសា ។

២៤៧៤. ស្ដេចស្ដាប់សព្ទពាលីជា ស្ដេចលោណអា-
នុជនូវព្រះរៀមរូបីហា ។

២៤៧៥. ជាទើយហៃហាក្រុងពាលី ពោះតាំងតឡូវខ្ញី

(1) RIB : jaṃbāy nūv phlāṃṅ svaet svaeṅ
(2) RIB : phgin phgaeṅ

នូវសូមជីវិតរស់រឹង ។

២៤៧៦- អញនូវយកព្រហ្មាសរឹង នោះវិលមករឹង
ជីវិតពីងនោះពុំក្ស័យ ។

២៤៧៧- ពាលីស្តាប់ព្រះបន្ទូលថ្លៃ ឱដព្រានសរជ័យ
បំភ្លាងក៏ក្រាបទូលស្នង ។

២៤៧៨- បពិត្រស៊ីស្លាប់ក្សួរយោង ត្រូវសរហើយយោង
ជាស្នាមពិភិនអាត្មា ។

២៤៧៩- មួយសោតក៏នូវឮទូព្រា - កងកេរតិក្រុងពា -
លីលុះនូវអបរាជ័យ ។

២៤៨០- ក្រែងឮទូកាំងភពត្រៃ ពាលីខ្លាចក្ស័យ
ក៏សូមជីវិតរស់រឹង ។

២៤៨១- សូវស្លាប់ទៅជាវែលងនឹង រស់នូវកំដឹង (1)
ពិភិនពិភេទអាត្មា ។

២៤៨២- បពិត្រខ្ញុំធ្វើសុគ្រីពអនុជា នូវអង្គតណា
ព្រះបាទទាំងពីរព្រះអង្គ ។

២៤៨៣- ទោះបីមានទុកទោសធ្ងន់ សូមព្រះបាទទ្រង់
បញ្ចើនៃខ្ញុំករុណា ។

២៤៨៤- ស្រេចពាក្យពាលីទូលជា ធ្វើសុគ្រីពអនុជា
ជិរាជនូវអង្គតនៃ ។

២៤៨៥- នឹងព្រះបាទដពាក្យត្រៃថ្លៃ ពាលីរួយនៃដ
រសាយកម្លាំងទុរពល ។

២៤៨៦- ព្រានសរព្រហ្មាសពុំទល់ មុតប្រាណលុះដល់
ក្របិន្ទុក៏លុះបាត់ជីវី ។

២៤៨៧- ព្រហ្មាសរឹងឫទ្ធិឫទ្ធី ឃ្លាលឃ្លាសអស់គ -
សូភានូវតន្ត្រិព្រហ្មស្ដែង ។

២៤៨៨- ហើរហិចទៅហាសស្ទូវសែង អុចទៅដល់កំពែង
សមុទ្រជ៏គម្ភិភ (2) ។

២៤៨៩- ណាងជ្រះសុទ្ធសព្វប្រការ វិលរឹងជ៏ត្រអាល
ក៏ផ្កានានាភយភាសា ។

២៤៩០- ពាលីដួលដោយសរថ្លា ទេពីតាភ
ប្រះប្រាណក៏រួញយំកង ។

២៤៩១- សោយសោកនូវស្រីង្គារនង រួតរត់ដោយដង
ដោយនូវគិរីត្រៃត្រាំក្ស ។

២៤៩២- ក្រាបវរបាទជ៏យំពន្លឹក ហាឫទ័យជ៏សន្ធឹក

(1) RIB : ras' nau kuṃ ṭiṅ
(2) RIB : samudr gambhīrabhāb

សង្វៀនរន្ធត់អង្គា ។

២៤៩៣- ទ្រព្រះអង្គរាជជ័យមហា    រឹងឫទ្ធិចេស្ដា
ពាំងារស្ដេចល្បើយក្បួណាក្បួយ ។

២៤៩៤- វែងឯបង់ជន្មជាតិក្សត្រថ្លៃ    ឆ្លួលដេកនាព្រៃ
មកសូន្យកណ្ដាលពសុធា ។

២៤៩៥- នេះអញឃាត់ព្រះរាជា    ជាសុក្រីពនេះណា
ឋនោមានៈនិរភ័យ ។

២៤៩៦- សមមានអ្នកជាតិជំរៃ    រឹងឫទ្ធិលើសក្រៃ
ពាំនឹងពាំនាក់អាត្មា ។

២៤៩៧- ស្ដេចក្រេវក្រោធក្រៃសោះសា    ជាអញសឹងជា
ឋកសមនឹងរាជជ័សត្រូវ ។

២៤៩៨- បាបភៀវព្រៀងព្រះតម្បូវ    អស់ជន្មជាតិនៅ
កណ្ដាលអង្គារុរគម ។

២៤៩៩- បង់អស់ស្រីស្រឹង្គាររស្មី    ភពរង្គរាជ្យរង្ស
មកសូន្យនាព្រៃព្រឹក្សស្ថាន ។

២៥០០- ឆ្លួលដេកឯកោប្រះប្រាណ    ប្រាសប្រាសាទស្ថាន
មកនៅកណ្ដាលពសុធា ។

២៥០១- លេះយកចន្ទ្រជាផ្កាណា    យកព្រៃបព្វតា
ជាខ្នល់នូវខ្នើយកើយយោង ។

២៥០២- លេះយកប្រជពីកន្លង    ជាវៃនទិព្វរង
មណ្ឌលបន្ទុំទិព្វសោយ្យាសន៍ ។

២៥០៣- លេះយកវេហាអាកាស    ជាតិតានជាស
រុងរឿងតារាផ្សព្វផ្សាយ ។

២៥០៤- លេះយកស្បូរសព្វព្រះកាយ    ជាតន្ត្រីយសាយ
ជ័យល្វេងបំរើសពណា ។

២៥០៥- ទុះទុរុងរូបសោភា    ល្ហៅល្អញភក្ត្រា
រុងរឿងនូវដោមពាលពង្ស ។

២៥០៦- អាចផ្ចាញ់សង្គ្រាមរឿណារង្គ    អស់ទេពក័ប-
ដុំផ្ងាយនូវភីស្មគស្វាច ។

២៥០៧- អាចបាប់ចងរាពនូវអំណាច    ផ្ចាញ់ផ្ចាលឲ្យខ្លាច
ពន្លឹកអស្សូរសោះសា ។

២៥០៨- មានឫទ្ធិជ័យតេជចេស្ដា    អាចផ្ចាញ់មហិង្ស
គបះនូវតេះជាជ័យ ។

២៥០៩- លេះព្រះមកមរនៅព្រៃ    បង់ពាំងារៃម-
ត្រីផុលីរត្នស្នូនភ្ជា ។

២៥១០- ជិងនោះទំនួញតាភ    ពិភពតន្ត្រា-
ជិរាជសញ្ញួយជីកក្រើក ។

២៥១១. ព្រះឥន្ទ្រនិន្ទ្រស្ដេចបើក ទិព្វចក្ខុស៊ើសើក
កំបង់ធុលីស្តុតី ។

២៥១២. ទ្រង់ស៊ីម្ពូននូវទឹកគន្ធី[1] ហោះថ្កានពាលី
ស្រែចស្រ្តូចនូវទឹកមេត្តា ។

២៥១៣. ឲ្យពរបន្តុះក្រុងពា- លីលុះស្នូកាំ
មកកើតពិមានទិព្វស្ថែង ។

២៥១៤. ឫសីព្រឹទ្ធព្រតសីលស្ដែង ពិធីលេះលែង[2]
ប្រយោជន៍មកសំស្ការសោត ។

២៥១៥. ឲ្យលុះមោក្ខមោះពិរោធ ស្ដុតិ៍ឲ្យពោ-
ធិញាណពិភពសាស្ត្រវៃសយ ។

២៥១៦. ស្រោចស្រប់គន្ធពិរោរវៃន ស្ទូតសាស្ត្រពរជ័យ
ដោយទិព្វញាណរិទ្ធ ។

២៥១៧. ពាលីលុះអំណាចសត្រូវ ថ្វាកងស្ដែងនូវ
ពិមានពិភពស្នូកាំ ។

២៥១៨. សោយសព្វសុខបរិបូណ៌ប្រា- កដជាទេពតា-
ធិរាជលុះដោយបារមី ។

(1) MBN : draṅ' sīl dịk ap' bidhī
(2) RIB : ṛsī briddh brat sīl svaeṅ bidhī luḥ laeṅ

# កណ្ឌ ទី១៤

២៥១៩- ស្រេចព្រះស្តេចថ្កូលពាលី អភិសេកក្របី
សុគ្រីពឲ្យសោយរាជ្យស្នង ។

២៥២០- រក្សារាស្ត្រប្រជាស្នង ពានរពលផង
បរិបូររាជបុរា ។

២៥២១- ព្រះតាំរព្រះអង្គវេលា ត្រេចព្រៃព្រឹក្សា
សឹងសត្វអម្រឹគឃឹកង ។

២៥២២- ផងជារស្រះស្រស់ផ្ការង មើលមយូរយ៉ាប្សរផង
ក៏ឃំផ្លាស់ផ្លើយកាន់គ្នា ។

២៥២៣- ព្រះដើរលេងផងម្រឹគា ជ្រាំគេទ្រុភាជា
បីនាំបុប្ផាផលផ្កាយ ។

២៥២៤- បុប្ផាផលាលេចលាយ ផ្កាត់ផ្កាយព្រះនារាយ
ស្តេចគង់នៅព្រៃពនាផ្កា ។

២៥២៥- សុគ្រីពក្របិន្ទ្រ រាជា ស្រេចសោយអស់អា-
ធិបតាន្ទូរដូចពាលី ។

២៥២៦- សោយសុខស្តេចគុណរបតី គាំរព្រះចក្រី
ទន្ទឹងឃល់សង់ពេកពោង ។

២៥២៧- ព្រះប្រើព្រះអនុជទៅផង ព្រះអនុជចរពោង
បីល្អះខាស់ខិនងឹបុរី ។

២៥២៨- ជាទើយសុគ្រីពដ៏ក្របី ស្តេចគុណព្រះចក្រី
ក៏ពុំរំពឹងឡើយណា ។

២៥២៩- រីក្រងមិងចង់ដួលដុចពា- លីផ្ការាជា-
ធិរាជស្តេចដោយជិត្តពីង ។

២៥៣០- ពីងស្តេចគុណពីងពុំក្រែង រាជាស្តេចឯង

កុំដួលកណ្ដាលពនាន្តា ។

២៥៣១- សុគ្រីពស្ដាប់ព្រះអាជ្ញា ទូលសាររឹងជា
បពិត្រសូមស្ដេចប្រណី ។

២៥៣២- នាខ្ញុំទើបសោយរាជ្យថ្មី ពានរមន្ត្រី
មកសូមនៃព្រះពរហោង ។

២៥៣៣- ខ្ញុំនូវត្រូតត្រាពលផង ឲ្យគ្រប់ជាផ្ដង
ទៅថ្វាយព្រះបាទចក្រី ។

២៥៣៤- ស្វាខ្លះនៅស្ថានគិរី ខ្លះនៅជលធី
សមុទ្រពុំទាន់មកហោង ។

២៥៣៥- ខ្ញុំនូវប្រមូលពលផង សព្វគ្រប់ហើយហោង
ហើយនៃទើបខ្ញុំយាត្រា ។

២៥៣៦- នាំទៅថ្វាយព្រះនរបា- ធិបតីគឺជ័យជា
ព្រះបាទតស្សូរខ្ញុំហោង ។

២៥៣៧- សូមព្រះករុណាខ្ញុំផង ទូលព្រះបាទបង
អម្ចាស់ពិសេសសារទ ។

២៥៣៨- ឈប់ថ្ងៃមួយខ្ញុំចេញចរ នាំពលពានរ
ទៅថ្វាយព្រះបាទបពិត្រ ។

២៥៣៩- ព្រះលក្សរំពឹងសុចរិត វិលទៅទូលពិត
ព្រះបាទសម្ដេចជេស្ឋា ។

២៥៤០- បពិត្រសុគ្រីពរាជា នូវផ្ដុំពលពា -
នរាបីមកថ្វាយក្សត្រ ។

២៥៤១- នាទៅដល់កន្ទលីបព៌ត[1] ស្ដិតហនុមានគាត់
នូវពុំទាន់មូលមកហោង ។

២៥៤២- សូមស្ដេចប្រណីគាត់ផង កុំបីអាលស្ដេចចង
ព្រះទ័យទ្រង់ព្រះក្រោធា ។

២៥៤៣- នាក្រោយព្រះលក្សអនុជា ស្រេចស្ដេចវេលា
ទៅហើយទើបរាជក្របី ។

២៥៤៤- ចេញវៃលងខាត់ខិនបុរី ស្រេចបិចហោះខ្ញុំ
ទៅលុះសំនៅហនុមាន ។

២៥៤៥- នាកន្ទលីពានព្រៃស្ថាន រូបរាជឧទ្យាន
តិមាននៃត្រៃត្រឹង្ស[2] ។

២៥៤៦- សុគ្រីពក្របិន្ទ្ររាជា ជួលទៅទៀបនា
បន្ទុំនៃរាជហនុមាន ។

២៥៤៧- យល់ឱរសរាជប្រធាន ដេកលក់ពុំបាន

(1) RIB : kandalī parbat
(2) RIB : ṭă mān nau traitriṅsā

នឹងចូលទៅឯងាសឡើយហោង ។

២៥៤៨. ឆ្នុំសំរឹងស្បូវត្រុតគឹកកង អស់ព្រឹកយប់ឃ្មង
សឹងខ្លាចពាំអាចមកក្បឹង ។

២៥៤៩. ហនុមានដោះឡើងបីដណ្តឹង មានប្រការផ្សឹង
បីមាឋកដល់ស្ពានអាយ ។

២៥៥០. សុគ្រីពថ្លែងដោយបរិយាយ មនគី[1] ព្រះនារាយ
សីហនាទស្ដេចថ្កូលពាលី ។

២៥៥១. ប្រើអញបរព្រឹន្ទុដ៍គ្របី ទើបអញឥឡូវឱ្យ
មកលុះនៃស្ពានផាហោង ។

២៥៥២. អញសូមអញ្ជើញផាទៅផង អញឥឡូវដាម្ដង
ទៅថ្វាយបង្គំនរបតី ។

២៥៥៣. ហនុមានស្រួចនូវឫទ្ធិ ឆ្មារ[2] ស្មើអង្គុលី
សុគ្រីពក៏ដក់ទៅហោង ។

២៥៥៤. ថ្វាយពលជិតសិបអក្ខោផង សឹងឫទ្ធិដ៏កន្លង
ជយានុភាពដ៏ទីទៃ ។

២៥៥៥. សុគ្រីពណាថ្នក់លួកនៃដ ស្ទួយហនុមាននៃ
មកដាក់ឯក្បែកអាត្មា ។

២៥៥៦. ទើបក្រាបទូលព្រះនរបា បពិត្រនាថ្វា
នេះជាក្មួយនៃខ្ញុំហោង ។

២៥៥៧. ខ្ញុំសូមថ្លៃព្រះអង្គផង ទោះខុសត្តំគ្គង
សូមមានសម្ដេចករុណា ។

២៥៥៨. ព្រះអង្គពីរពង្សក្សត្រា គង់លើព្រះពន្លា
ពិជ័យរត្នរូតបណី ។

២៥៥៩. ព្រះលើកព្រះទុស្សប្រិមប្រិយ ត្រេកត្រាស់រួសខី
បន្ទូលព្រះរាជអាជ្ញា ។

២៥៦០. ជាហៃហាសុគ្រីពភាសា រហោតុអ្វីឡើយពា-
នរណេះតូចលើសលន់ ។

២៥៦១. ញាំាឯមានតេជតេជោមន្ត ពាណាគឺអនន្ត
អនេកនូវអាធិកលម្ដេច ។

២៥៦២. លុះស្រេចបន្ទូលសារពេញ្ញ ត្រេកត្រាស់សំរេច
សមរសព្រះរាជសម្ភារ ។

២៥៦៣. សុគ្រីពស្ដាប់ព្រះឱង្ការ ខុនក្រាបវន្ទា
បង្គំប្រណាម្យភក្តី ។

២៥៦៤. បពិត្រនារាយរាមឫទ្ធិ ព្រតព្រះដ៍ឫសី

(1) RIB : mantrī
(2) RIB : tūc

ពិសេសពិសុទ្ធលោកា ។

២៥៦៥- នាគេងគេដោញជាពា- នរត្បូងនេះណា
ខ្ញុំនូវទូលក្សត្រពុំបាន ។

២៥៦៦- ខ្លាចខ្ញុំភូតភរជ័ស្លមពាន ស្តេចទ្រង់ព្រះក្សាន្ត
ចិញ្ចឹមបន្តិចមើលហោង ។

២៥៦៧- ព្រះបន្ទូលនូវសុគ្រីពទឹងស្លង តម្រូវយើងមកប៉ង
វំលាងវំលាយលង្កា ។

២៥៦៨- អញស្ទាញ់ផ្លែងផ្លាញអសុរា ឲ្យខ្មើសមិត្តា-
ទិដ្ឋិគឺរសម្ខហោង ។

២៥៦៩- អញស្ទាញ់ផ្ទាលកាលនេះម្តង ឲ្យអសុរផង
ដឹងដើមព្រះនារាយត្រាស់ហើយ ។

២៥៧០- នេះតម្រូវពឹងទូលទាស់ឆ្លើយ ប្រើនូវរក្សាហើយ
ទំពាំហនុមានធំណា ។

២៥៧១- ខ្លាចក្រែងនូវមាននិន្ទា អស់ទាំងទេវតា
កំជាសតិះដៀលនេះម្តង ។

២៥៧២- ពុំចាំចិត្តគិតប៉ុនប៉ង នូវប្រទះបីប្រឡូង
សឹកនោះពុំវែងឡើយណា ។

២៥៧៣- នេះតម្រូវគិតស្តេចខ្វែងជា នៅរង់រក្សា
ចិញ្ចឹមហនុមានធំ ។

២៥៧៤- ហនុមានផ្ទាត់ផ្ទាយបង្គំ ទសករប្រណម្យ
ព្រះបាទសម្តេចរាមា ។

២៥៧៥- ស្តាប់សារព្រះបន្ទូលភាសា ក្សិណហនុមានហា
មាត់ធ្វើជាស្លាបឡើងនៃ ។

២៥៧៦- យល់រស្មីសុរិយោទ័យ ពីរជណ្តប់ប្រៃពា
ប្រដូចនូវកែវសូរ្យកាន្ត ។

២៥៧៧- លេចចេញពីមាត់ហនុមាន ភ្លឺយល់សព្វស្ថាន
ពិមាននៃសុខស្ថិត ។

២៥៧៨- ភ្លឺទាល់អវគ្គព្រហ្ម ខាងទាល់ចក្រវាល
ក្រោមដល់ទុកបរិយន្ត ។

២៥៧៩- ស្រេចស្តេចត្រេកអរពេកពន់ យល់ហនុមានមន[1]
សំដែងផ្ទាយឫទ្ធិចេស្តា ។

២៥៨០- ស្តេចត្រាស់នូវព្រះអនុជា ហៃលក្ស្មណ៍ខ្ញុំ
បាមើលឫទ្ធិហនុមាន ។

២៥៨១- វីលង្កាក្រុងរាជស្ថាន យើងចាប់ពែនបាន[2]

(1) RIB : mant
(2) MBN : yoeṅ cāp' pīen pān

ទាំងឯងាយពុំក្រញើយហោង ។

២៥៨២. នេះតម្បូរិទ្ធូរបាទៅក្នុង ត្រួតត្រាពលឯង
បីដោយជំពូកឆ្វេងស្តាំ ។

២៥៨៣. ឲ្យសុគ្រីពជាខុនពលនាំ ពលត្រីនុធូលចាំ
ប្រយុទ្ធប្រយ័ត្នចេស្តា ។

២៥៨៤. ក្សិណនោះព្រះលក្ស្មណ៍ក្រាបលា វិរបាទដេស្ដា
ដំនុំបញ្ចាន់ស៊ីវស្ថាន ។

២៥៨៥. ហៅហៃសុគ្រីពរាជប្រធាន ព្រះអង្គស្តេចមាន
ព្រះបន្ទូលលើសិរសា ។

២៥៨៦. ប្រើអញមកគ្គំគ្គូ ពា- នរត្រឹន្ទុយោធា
នូវព្រះស្តែងស្តេចពានរ ។

២៥៨៧. ក្សិណរាជសុគ្រីពក្រោកអរ សូមសិទ្ធិព្រះពរ(1)
ទទួលព្រះរាជអាជ្ញា ។

២៥៨៨. ស្រែចខ្វាយខ្វល់គ្គំគ្គូ ពា- នរត្រឹន្ទុយោធា
បីជាចតុព្យូហយុទ្ធ ។

២៥៨៩. ស្លូចស្រាលកាយហានមុះមុត លើកឲ្យអង្គទ
ជាខុនពលប្លូងឯងណា ។

២៥៩០. ទាំងយានុមានមហិមា លើសវៃឯជាពា-
នរានរេន្ទ្រមន្ត្រី ។

២៥៩១. ឲ្យនៅនៃបព្រះចក្រី ពីរព្រះនរបតី
ស្រដីអស់ទាំងទ័ពប្លូង ។

២៥៩២. រីសុគ្រីពរាជនាថទាំងពួង ពលត្រឹន្ទុតាមប្លូង
ជាទ័ពតាមស្តេចឯងហោង ។

២៥៩៣. ស្រាប់ស្រែចព្រះលក្ស្មណ៍ធូលក្នុង ទូលព្រះបាទបង
ព្រះរាជព្រះវៀមជីបតិត្រ ។

២៥៩៤. នាបើកព្រះឱស្ឋឧក្រិដ្ឋ(2) តិសេសព្រះគំនិត
ក៏ស្តេចនូវចរលេលា ។

២៥៩៥. ព្រះបន្ទូលជម្ពូពានរោភ គូររឫក្សពេលា
មហាជំហុតនាទី ។

២៥៩៦. លុះបានឫក្សពាររតិត្តី ឧត្តមយោគយាយី(3)
ត្រាកជនូវព្រះពេលា ។

២៥៩៧. ស្តេចឲ្យគោះគងជ័យជា ទុតិយាតតិយា
មហាមហាតង្កើងក្រៃ ។

(1) RIB : sūm ṛddhī braḥ bar
(2) RIB : nā poe braḥ poek braḥ osṭh krit
(3) MBN et RIB : uttam yug yāyī

២៥៩៨. ទើបស្ដេចលើកទ័ពពិជ័យ　　ចេញដោយវិស័យ
　　នាផ្លាំងព្រះរាជសង្គ្រាម ។

២៥៩៩. អស់ពានររត់បែកតាម　　កំណត់ប្រុងប្រាម
　　បីដោយសង្កាត់សេនា ។

២៦០០. មើលយល់ដូចរលកជលសា　　ដីជោរខ្ទឹមគ្នា
　　ទាំងប្អូនពាន់កោតសាគរ ។

២៦០១. ស្រេចស្ដេចដល់គន្ធមាទប-　　ព៌តពិតដ៏បវរ
　　ប្រសើរពិសេសមានជ័យ ។

២៦០២. ស្ដេចបោះទ័ពនៅនាច្លូ　　ស្ពាននោះពិប្រពៃ
　　ប្រកបនូវដំណាមាន ។

២៦០៣. រសផ្អែមពិសាសាយសាន្ត　　ច្រើនគ្រប់គ្រាន់មាន
　　ពានរដងសឹងអាស្រ័យ ។

២៦០៤. ស្រេចស្ដេចសង់ព្រះពន្លាជ័យ　　វិញទៀបឆ្នេរនៃ
　　សមុទ្រឆ្ពោះត្រង់លង្កា ។

២៦០៥. ពីរអង្គពង្សពីរក្សត្រា　　គង់លើព្រះពន្លា
　　អធិកនូវចេស្ដាការ ។

២៦០៦. អស់មុខមន្ត្រីបរិវារ　　ពានរជាសជា
　　ក៏គាល់សម្ដេចក្សត្រា ។

២៦០៧. រលកគគ្គីរជលសា　　បែកក្ដាត្រែងត្រា
　　ក៏មកបង្គំនរបតី ។

២៦០៨. ឯងនោះព្រះបាទភូមី　　ស្ដែងស្ដេចនូវឫទ្ធិ
　　បន្ទូលព្រះរាជឱង្ការ ។

២៦០៩. ដាវៃហាសុគ្រីពដ៏ឧទារ　　ពីងជានាយនា
　　តស៊ូរអស់ពានរហោង ។

២៦១០. ចូរពីងស្រាលពានរឯង　　អញនូវទៅក្ដង
　　ឲ្យស្ពូរលំនៅសីតា ។

២៦១១. គាប្បីអញប្រើអ្នកឯណា　　អាចទៅលង្កា
　　វិលមកតប្លូវថ្វាត់បាន ។

២៦១២. សុគ្រីពក្រាបទូលសូមទាន　　បពិត្រអញខ្ញុំមាន
　　តែឧនជីពញូរឯងណា ។

២៦១៣. សូមព្រះត្រាស់ប្រើអាជ្ញា　　ទុកលើសិរសា
　　គាត់នាំព្រះសំនូរហោង ។

២៦១៤. ឧនជីពញូរទូលវឹងស្នង　　បពិត្រខ្ញុំបោះផ្លង
　　សមុទ្រនេះទៅបានណា ។

២៦១៥. ណោះនូវវិលមកដូចព្រះអាជ្ញា　　ព្រះបាទក្សត្រា
　　ខ្ញុំមួយពុំបានមកហោង ។

២៦១៦. ខ្ញុំទូលបាក់ដូចគំគង　　បទនាស់ដោយហោង

កម្លាំងក៏ថយហើយណា ។

២៦១៧- រីខុននន្ទនៃមហិមា គាត់អាចងាងា
អាស្លាព្រះបាទភូធរ ។

២៦១៨- ខុននន្ទក្រញ៉ូញក្រាបកាយករ អញ្ជលីថ្វាយពារ
បង្គំប្រណម្យទូលថា ។

២៦១៩- បពិត្រខ្ញុំពោះផ្លូវសា - គរទៅលង្កា
វិលមកតម្រូវថ្វាត់បាន ។

២៦២០- គឺមោះខ្ញុំនូវនិរមិតប្រាណ ដូចរាជហនុមាន
ពុំបានដូចចិត្តចិន្តា ។

២៦២១- បន្ទូវនោះទៅលង្កា មានប្អូនរាពណា
មួយឈ្មោះនាងវិកតាសី ។

២៦២២- ជាឆ្មាំចាំរាជបុរី លង្កាភូមិ
ជណ្តាលនៃទសមុខមារ ។

២៦២៣- នាងនោះមាមាត់នៅទ្វារ មាត់ឯស្មើជាសជា
ក៏ពាសអាកាសនភី ។

២៦២៤- រីផ្កាក្រោមពាសមហាប្រថពី សព្វសត្វបក្សី
នូវហើរវិលងពុំបាន ។

២៦២៥- បទវិកតាសីដ៏សាមាន្យ ចាំមាគ៌ាស្ពាន
ដោយមានដំណើរនេះណា ។

២៦២៦- ពោះយក្សកន្ទតូអសុរា ផ្តោះទៅលង្កា
សឹងចូលក្នុងមាត់នាងនោះ ។

២៦២៧- វង្វេងវិលវល់ស្ងួនស្មោះ ស្លាប់បាត់ក្នុងពោះ
ពុំដែលនូវរួចយាត្រា ។

២៦២៨- បពិត្រពីមុនមកណា ផ្លូវទៅលង្កា
ពុំដែលកម្រជល់ម្ល៉េះ ។

២៦២៩- ពីដូចរាពណាបានទេពីនេះ រាពរិងរួតរិះ
ប្រយ័ត្នសព្វមាគ៌ាស្ពាន ។

២៦៣០- មានតែឫទ្ធិរាជហនុមាន ហនុមាននៃមាន
គាត់នាំព្រះរាមអាស្លា ។

២៦៣១- ស្តេចស្តាប់ខុននន្ទទូលថា ផ្លូវទៅលង្កា
នោះត្រូវអ្នកមួយទៅបាន ។

២៦៣២- ទើបព្រះបន្ទូលវិញថ្កាន ចៅហាហនុមាន
កម្លាំងឫទ្ធិមហិមា ។

២៦៣៣- បាទៅសួររាជសីតា វររាជជាយា
មហាមហេសីស្នូគិ ។

២៦៣៤- ព្រះបើកព្រះខ័ស្សអាក់អួល ហនុមានយខ្សឹកខ្សួល
បារម្ភព្រះរាជទេពី ។

២៦៣៥. ព្រះនេត្រឆ្មៀតស្រៀបតាំងទី ភ្លុសរាជក្របី
ក៏ជាត់ពុំទាន់ឲ្យយល់ ។

២៦៣៦. ខំប្រឹងព្រះភក្ត្រនិមល ដូចចន្ទ្រពេញបូណ៌
ស្រលះពពកថ្លាថ្លៃ ។

២៦៣៧. ហនុមានវៃអក្សរាស្រ័យ ដឹងដើមជាប្រស័យ
ថារម្ភព្រះរាជទេពី ។

២៦៣៨. ក្រែងពុំគង់ក្រឹត្យក្រមស្រី មារមកយាយី
ប្រលួងប្រលោមកាមករ ។

២៦៣៩. ហនុមានក្រាបបាទភូធរ សូមឫទ្ធិព្រះពរ
ទទួលព្រះរាជអាជ្ញា ។

២៦៤០. បពិត្រខ្ញុំទៅលង្កា ក្រែងព្រះពនិតា
ពុំជឿនៃអញខ្ញុំកូវ ។

២៦៤១. ខ្ញុំនាំពតិមានព្រះភូ- ធរទៅតិច្បូរ
ឥតអ្វីដួយជាបន្ទាល់ ។

២៦៤២. ឲ្យសម្តេចព្រះទេពីស្គាល់ សោះទេពីខ្វាល់
ជាក្រោងព្រះរាជអាជ្ញា ។

២៦៤៣. មកល[1] ក្រែងក្រុងភពណា ប្រែប្រាណជាស្វា
មកលួងសម្តេចក្សត្រី ។

២៦៤៤. ស្តេចស្តាប់ហនុមានទូលពី- ភេះសារសេចក្តី
កំនាប់ដោយធម៌សុចរិត ។

២៦៤៥. ស្តេចបូតព្រះទំរង់រត្ន ស្បូងពិទូរ្យឥត
តម្លៃពីព្រះហស្តហោង ។

២៦៤៦. ឲ្យហនុមាននាំទៅគ្គង ថ្លែងសារសព្វផង
ទេពីប្រសើរស្សួរសារ ។

២៦៤៧. ថាទៅទាល់ទសមុខមារ មើលសព្វប្រការ
នូវអស់អំពើកិច្ចកល ។

២៦៤៨. វែងបាបរិបូណ៌បានយល់ សព្វស្ថានដណ្តាល
មន្ទាគិរីភពណា ។

២៦៤៩. ថាមើលអស់ពលយោធា មើលអស់អសុរា
ឯណានៅចាំទេពី ។

២៦៥០. ថាចូលដល់ស្ថានមហោសី ឲ្យបានស្រដី
សំណោះសំណាលថ្លែងថា ។

២៦៥១. ថាថ្វាយអង្គុលីយមួយណា មណីនេះជាយ៉ា
ធ្លាកដក៏ស្គាល់ជាក់ហោង ។

(1) RIB : mar kal' (pas.)

២៦៥២- ហនុមានក្រញូញក្រោបរាបរង ទំរង់រត្នកន្លង
ដឹកល់មណ្ឌលសិរសា ។

២៦៥៣- ស្រេចស្ទុះស្ទាញខ្លួនបញ្ឆោត គន្ធមាទនហិមា
កណ្ដាំងនៃហនុមានត្រែត ។

២៦៥៤- ស្ទុះលោះឡើងលើបពិត ល្អិតចុះប្រាកដ
រាបដូចព្រះធរណីយោង ។

២៦៥៥- លោះឃ្លាឃ្លាសទៅហាឆ្នួង ពានរផ្ការផង(1)
ក៏ដិតដោយរាជាក្របី ។

២៦៥៦- លុះកណ្ដាលប្រិវាលដល់ធី ដល់ផាធិបតី
រលករំពើងខ្ទរខ្ទាយ ។

២៦៥៧. ដើលនាគនូវមកររៀងកាយ ស្វាផ្ការកាំងឡាយ
មហាភយាភិតភ័យ ។

២៦៥៨- ហនុមាននាំទៅទុកក្នុងព្រៃ ហើយលោះគ្រៀវក្នុងព្រៃ
ប្រុះលើសិង្ហអសុរា ។

២៦៥៩- រាត់ឲ្យធរធាំរក្សា នៅឆ្មេរគង្គា
ត្រង់ត្រើយសម្ប៉ាជណ្ដាល ។

២៦៦០- សិង្ហាសួរសោតយក្សយល់(2) ហនុមានលោះដល់
ក៏ទាស់ប្រយុទ្ធដ៏ទៃហា ។

២៦៦១- ហនុមានប្រយុទ្ធសោះសា ដួលសិង្ហអសុរ-
សុរេន្ទ្រក៏លុះមរណោ ។

២៦៦២- ទៅយល់សព្ទតាលនាគផង ទាស់តុំឲ្យផ្លង
ក៏លើកតពារបីកំសួល ។

២៦៦៣- ហនុមានហាចលោះចក់ក្ដួល ដាប់សិរសាដួល
ទំលាក់ទៅក្នុងជលសា ។

២៦៦៤- ហើយលោះរំលងលង្កា វិញ្ញូងមាតា
ទៅជួនលើស្ពានអាស្រម ។

២៦៦៥- យល់ទេពឫសីដ៏ឧត្ដម សាងសីលក្រិត្យក្រម
ក៏ថ្វាយបង្គំភក្ដី ។

២៦៦៦- ទូលថាយតិត្រព្រះមុនី ទេពវិញ្ញូឫសី
វិសេសវិសុទ្ធសីលា ។

២៦៦៧- សូមមានទ្រង់ព្រះករុណា ជួយទៅលង្កា
ត្រង់ណាបង្គាញខ្ញុំផង ។

២៦៦៨- ឫសីសិទ្ធិឆ្លើយឆ្លង ថាម្នាលោះថ្លង
រំលងលង្កាហើយណា ។

(1) RIB : bānar nāṃ phaṅ
(2) RIB : siṅh suor tesāy yaks yal'

២៦៦៩- ហៃហាណាន[1] ក្រែងឃ្លានអាយុ　　អាមកភោគ្គា
　　អាហារធំអែតតគ្រើយ ។

២៦៧០- ក្បួនណានោះព្រះឫសីមុនី　　អ្នកតូចអាយបី
　　តាំងតែកំហុជមានុមាន ។

២៦៧១- មានុមានទទួលអាយុបាន　　បរិភោគដោយឃ្លាន
　　កំស្មានតុំក្រាន់ឡើយណា ។

២៦៧២- ក្បួនណាសើចអំភ្លាងភោគ្គា　　ដូចនឹងនិន្ទា
　　ព្រះមហាឫសីដ៏មុនី ។

២៦៧៣- ដោយតេជតេជះព្រះឥសី　　បរិភោគអាយុបី
　　តាំងតែតុំអស់ឡើយណា ។

២៦៧៤- មានុមានអស់អៀនខ្មាសមហា-　　ឫសីក្រាបណា
　　បៀមអាយុអំភ្លាងពោះទៅ ។

២៦៧៥- ស្រេចដល់វិកតាសីនៅ　　ចាំផ្លូវជិតក្រៅ
　　កំពែងបុរីលង្កា ។

២៦៧៦- មានុមានគិតស្ងួតស្ងៀមថា　　បើអញឲ្យវា
　　ដឹងខ្លួនវាឃ្លាំងនឹងអញ ។

២៦៧៧- ពីព្រោះនេះលុះត្រឹកវិញ　　នោះនៃវាចាញ់
　　ដៃអញពិឃាតបង់បាន ។

២៦៧៨- គឺបោះព្រះអាស្នាប្រើប្រាណ　　ស្ដេចក៏ខុសខាន
　　តុំបានទៅដល់វាំងថ្កាត់ ។

២៦៧៩- ជួយសោតអញនូវដើរក្នុងមាត់　　ក្រែងព្រះទំរង់រត្ន
　　អង្គះអសោចតុំស្អាត[2] ។

២៦៨០- មកលយល់យក្សដូជាតិ　　សាមាន្យប្រមាទ
　　បានបៀមចិញ្ចៀនព្រះទំរង់ ។

២៦៨១- មានុមានរិះតុំស្ងួតស្ងៀង　　ក្បួនណាបោះព្រះទំរង់
　　វាំលងឯអាកាសថ្កាត់ ។

២៦៨២- និម្មិតអង្គឯងឆ្មារក្ដាត់　　ចរចូលក្នុងមាត់
　　ក៏លេចទៅដោយកាយា ។

២៦៨៣- ហើយហិចបោះឃ្លាសទេវហា　　ស្លឹកស្លោះសោះសា
　　ទទួលព្រះទំរង់រត្ន ។

២៦៨៤- ទូលទុកលើសិរសាថ្កាត់　　ហិចបោះនាប់ក្ដាត់
　　ស្រេចដល់កំពែងលង្កា ។

២៦៨៥- នូវចូលដល់ផ្លូវបុតាំ　　យល់យក្សអសុរា
　　កម្រនឹងចូលតុំបាន ។

(1) MBN et RIB : lān̄
(2) RIB : krai braḥ damraṅ' răt(n)
　　aṅg āsoc buṃ s-āt

២៦៨៦- ទៀលទិលទៅទិសល្អសាន  ឆ្មៀងមើលសព្វស្ថាន
រំពៃរំពឹងនូវលង្វែក ។

២៦៨៧- ក្សិណនោះហនុមានយល់មែក  ឪជ្រមួយជ្រៀតជ្រែក
រហៃងកំពែងសិលា ។

២៦៨៨- ហនុមានតឹងតានសាខា  ស្មៀរស្ទូរសោះសា
លុះទៅលេចកំពែងដែកធូល ។

២៦៨៩- ទៅយល់ក្តួយភពណាសួរ  អសុរីបុត្របួរ
គឺនាមយោកាមពាលី ។

២៦៩០- ចេញរោងរៀបមុខមន្ត្រី(1)  សក្តិសែងនូវស្រី
សុភាក្តខុនណាងបីប្រពៃ ។

២៦៩១- ពុំយល់រត្នសីតាថ្លៃ  ឮលេចធូលៃន
កំពែងសំរិតរិះរក ។

២៦៩២- យល់ឯអតិកាយចេញមក  រៀបរោងយក្សយក
នូវសារពើយុទ្ធបីសំពៀង ។

២៦៩៣- ហនុមានពះពានកំពែង  បន្ទាយទស់ដែង
ក៏ធូលទៅយល់មហាកាយ ។

២៦៩៤- កំពស់ដួយយោជយល់ឆ្ងាយ  ចេញរោងរៀបភាយ
នូវអស់អាវុធអសុភា ។

២៦៩៥- ពុំយល់រត្នភជសីតា  ហនុមានវេលា
លុះលេចកំពែងបញ្ចាលោហ(2) ។

២៦៩៦- យល់មន្ត្រីពលយក្សនោ  ទសមុខមានោ
ឲ្យចាំអស់ស្រីស្នំកា ។

២៦៩៧- សុទ្ធសឹងទេពីទេវតា  ទិព្វទេពកញ្ញា
គឺភពណាល្អចយោង ។

២៦៩៨- ពុំយល់សីតាស្ថិតផង  ហនុមានរំលង
លេចដល់កំពែងពេជ្រា(2) ។

២៦៩៩- ទៅតួរឧត្តរទិសា  យល់កូនភពណា
គឺឥន្ទ្រជិតជ័យកុមារ ។

២៧០០- ចេញរោងរស្មីប្រាស់ប្រាល  ព្រោងព្រាយបីស្វាល
តន្លឹកតន្លឺឆោមឆាយ ។

២៧០១- រៀបរោងគិតការអធិប្បាយ  បរិពារពលនាយ
យោធាទាហានយក្សា ។

២៧០២- ពុំយល់រត្នភជសីតា  ហនុមានវេលា

(1) RIB : roṅ rīem mukhamantrī
(2) MBN et RIB : pañcalo(r)
(3) MBN : bejj ṭār
RIB : bejratā

២៦៦៩- ហៃហាណាន(1) ក្រែងឃ្លានបាយបា    បាមកភោក្តា
អាហារដំអែតឥតត្រើយ ។

២៦៧០- ក្បែរណានោះព្រះឫសីមុនី    អ្នកតូចបាយបី
តាំងតក៏បុចហនុមាន ។

២៦៧១- ហនុមានទូលបាយបាន    បរិភោគដោយឃ្លាន
ក៏ឆ្អានពុំគ្រាន់ឡើយណា ។

២៦៧២- ក្បែរណាសើចអំភ្លាងភោក្តា    ស្លូតនឹងនិន្ទា
ព្រះមហាឫសីដ៏មុនី ។

២៦៧៣- ដោយតេជតេជះព្រះតសី    បរិភោគបាយបី
តាំងតពុំអស់ឡើយណា ។

២៦៧៤- ហនុមានអង់អៀនខ្មាសមហា-    ឫសីក្រាបណា
បៀមបាយអំភ្លាងបោះទៅ ។

២៦៧៥- ស្រេចដល់វិកតាសីនៅ    ចាំចូរដិតក្រៅ
កំពែងបុរីលង្កា ។

២៦៧៦- ហនុមានគិតស្ស្រូវស្សូងថា    បើអញឲ្យវា
ដឹងខ្លួនវាឃ្មាំងនឹងអញ ។

២៦៧៧- ពីថ្ងៃនេះលុះព្រឹកវិញ    នោះនៃវាចាញ់
ដៃអញពិឃាតបង់បាន ។

២៦៧៨- គឺមោះព្រះអាជ្ញាប្រើប្រាណ    ស្តេចក៏ខុសខាន
ពុំបានទៅដល់វឹងចាត់ ។

២៦៧៩- មួយសោតអញនូវដើរក្នុងមាត់    ក្រែងព្រះទំរង់រត្ន
អង្គះអសោចពុំស្អាត(2) ។

២៦៨០- មកលយល់យក្សរដ្ឋជាតិ    សាដាន្យប្រមាទ
បានបៀមជិតញៀនព្រះទំរង់ ។

២៦៨១- ហនុមានរិះពុំស្រួវស្រូង    ក្បែរណាបោះព្រះទំរង់
រំលងឯអាកាសច្បាត់ ។

២៦៨២- និម្មិតអង្គឯងគ្មារក្តាត់    ចរចូលក្នុងមាត់
ក៏លេចទៅដោយកាមា ។

២៦៨៣- ហើយហិចបោះឃ្លាសវេហា    ស្ទើកស្ទោះសោះសា
ទទួលព្រះទំរង់រត្ន ។

២៦៨៤- ទូលទុកលើសិរសាច្បាត់    ហិចបោះផាប់ក្តាត់
ស្រេចដល់កំពែងលង្កា ។

២៦៨៥- នូវចូលដល់ចូរបុតា    យល់យក្សអសុរា
កម្រនឹងចូលពុំបាន ។

(1) MBN et RIB : lāñ
(2) RIB : krai braḥ damraṅ' rat(n)
aṅg āsoc bum s-āt

២៦៨៦. ឡើលរិលទៅទិសឦសាន ផ្ទៀងមើលសព្វស្ថាន
រំពៃរំពឹងនូវលង្វែក ។

២៦៨៧. ក្បែរណានោះហនុមានយល់មែក ព្រៃមួយព្រឿតព្រែក
រហែងកំពែងសិលា ។

២៦៨៨. ហនុមានពឹងពានសាខា ស្ទៀរស្នួរស្នោះសា
លុះទៅលេចកំពែងដែកធុល ។

២៦៨៩. ទៅយល់ក្បួយភពណាសួរ អសុរីបុត្របួរ
គឺនាងយោកាមពាលី ។

២៦៩០. ចេញរោងរៀបមុខមន្ត្រី[1] សក្តិសែងនូវស្រី
សុភក្ដខុនណាងបីប្រៃតា ។

២៦៩១. កុំយល់រត្នសីតាថ្លៃ ឮលេចធូលៃន
កំពែងសំរិតរិះរក ។

២៦៩២. យល់ឯអតិកាយចេញមក រៀបរោងយក្សយក
នូវសារពើយុទ្ធបីសំពៀង ។

២៦៩៣. ហនុមានពះពានកំពែង បន្ទាយទង់ដែង
ក៏ចូលទៅយល់មហាកាយ ។

២៦៩៤. កំពស់ដួយយោជយល់ឆ្ងាយ ចេញរោងរៀបរាយ
នូវអស់អាវុធអសុរា ។

២៦៩៥. កុំយល់រត្នរាជសីតា ហនុមានវេលា
លុះលេចកំពែងបញ្ចលោហ[2] ។

២៦៩៦. យល់មន្ត្រីពលយក្សនោ ទសមុខមានោ
ឲ្យចាំអស់ស្រីស្នំកា ។

២៦៩៧. សុទ្ធសឹងទេពីទេពតា ទិព្វទេពកញ្ញា
គឺភពណាល្អជយោង ។

២៦៩៨. កុំយល់សីតាស្ថិតនង ហនុមានរំលង
លេចដល់កំពែងពេជរ[2] ។

២៦៩៩. ទៅតួរឧត្តរទិសា យល់កូនភពណា
គឺឥន្ទ្រជិតដ៏ឧទារ ។

២៧០០. ចេញរោងរស្មីប្រាស់ប្រាល ព្រោងព្រាយបីស្វាល
ពន្លឹកពន្លឺឆោមឆាយ ។

២៧០១. រៀបរោងគិតការអធិប្បាយ បរិវារពលនាយ
យោធាពាហានយក្ស ។

២៧០២. កុំយល់រត្នរាជសីតា ហនុមានវេលា

(1) RIB : roṅ rīem mukhamantrī
(2) MBN et RIB : pañcalo(r)
(3) MBN : bejj ṭār
RIB : bejratā

ទៅទ្វារឯបូព៌ទិសទី ។

២៧០៣. យល់ព្រះលោកាធិបតី          គួរគ្រោះត្រុកត្រៃ -
លង្កានូវលង្កេស្សូរ ។

២៧០៤. មានុមានកម្របីនឹងធូល          ធរធៀសពីបូព៌
ទៅទិសទក្សិណាសោះសា ។

២៧០៥. មានុមានយល់ព្រះកុម្ភការ          អស្សូរភាជា
នូវយក្សយោធាបរិពារ ។

២៧០៦. មានុមានទៅបស្ចិមទ្វារ          យល់សមាសកុមារ
រក្សាអសោកឯលិច ។

២៧០៧. គន់មើលបណ្ដើរទៅតិច          យល់មានបន្លិច
ចន្លោះមួយខាងព្រះផ្សារ ។

២៧០៨. មានុមាននិម្មិតខ្លួនផ្ការ          រំជើករំជៀតទៅទាល់
មណ្ឌលឆ្ងាយទិសកោសា ។

២៧០៩. ឃ្លាំងជ័យជនផានរតនា          ពុំយល់សីតា
កន្លងកំពែងមាសទៅ ។

២៧១០. យល់ផ្កាសារទកែវបីសន្ធៅ          ភ្លើករត្នឆ្លុះឆ្លៅ
សុវណ្ណវៃភោជរចនា ។

២៧១១. មែនទិញទសមុខមហិមា          សុទ្ធសឹងកញ្ញា
នូវអសុរិន្ទ្របរិពារ ។

២៧១២. អកយាយសាវៃដស្រីការ          ស្រីស្រស់ស្រីង្គារ
សុភក្តខុនណាឯកក្រាស់ ។

២៧១៣. ប្រទីបស្វាណជ្រើនជ្រាស់          ភ្លើងភ្លឺយល់ច្បាស់
ក៏មានុមានមើលយល់ ។

២៧១៤. ទសមុខដុំដុំមសុខស្កល់          រួមឯកមណ្ឌល
មន្ទោគិរីភពណា ។

២៧១៥. មានុមានគិតស្មានសីតា          លបល្បួចខ័នថ្លា
ពីក្រោមព្រះកេសកើយលោង ។

២៧១៦. ហួតហើយលើកឡើងដីសំពង          លលើសុរង
វៃក្រុងមហាទសមុខ ។

២៧១៧. មានុមានពួសពុងដីងចក់ (1)          ជាក់ជាវចុះមុក
ទើបគិតគន់មើលនរលក្ខណ៍ ។

២៧១៨. យល់នាងមន្ទោគិរីជាក់          ជាភរិយាយក្ស
នូវប្រាសនិភាសវៃលងបី ។

២៧១៩. ហើយនៅជាមេម៉ាយអប្រិយ          ពុំដួ (2) លក្ខណ៍ស្រី

(1) RIB : sabd pī cacuk
(2) RIB : bum̩ juo

សីតារូបរត្នដ៏ពិសេស ។

២៧២០- ហនុមានឯបមន្តឧបទេស (1) ក្បិណាក្បួចព្រះកេស
មស្នោគិរីភពណា ។

២៧២១. ហនុមានសរសោរខ្លាំងថា រិញមន្តមាយា
កម្រែរសាយកេសី ។

២៧២២. ប្រើយកដៃឆ្វេងឯស្រី ទះពោធិសិរសី
នៃទសមុខបានបីដង ។

២៧២៣. នោះទើបរលាយជំណាង ពុំឆ្ងើដូចឈ្មោះហោង
ជំពាក់លុះស្លាប់និងគ្នា ។

២៧២៤. ស្រេចហើយហនុមានយាត្រា ចេញចរយល់នា
ឯក្រៅកំពែងមាសហោង ។

២៧២៥. យល់នាងទាំងដៃភមួយ (2) ហោង ជរជាស្នេហាស្នង
សំណោះសំណាលនូវគ្នា ។

២៧២៦. ជាឱ្យទសមុខមហិមា តស្នូរសក្ដា
សម្បត្តិសំបូណ៌បរិពារ ។

២៧២៧. សឹងស្រីស្នំស្រស់ស្រីស្ការ សេពសមក្រមការ (3)
អនេកអស្សូរដ៏កញ្ញា ។

២៧២៨. ក្សូរឆ្វិងពូស្គាល់ស្គប់ម្លោះភ៉ា ម្ដេចឡើយមោហា
ពុំត្រានូវចេះផ្លែតផ្លូន ។

២៧២៩. ឆ្លៀតល្អដសីតារត្នគន់ មោហោលន់ពាន់
ពុំគិតដំនៀលនិន្ទា ។

២៧៣០. ពុំប្រណីព្រះភាមា មានភាងសីតា
តែមួយបំរើសពៅថ្លៃ ។

២៧៣១. ក្សូរគិតបារម្ភឯដៃ – ក្រោមកំពែងក្រកៃក្រ
ប្រល័យប្រលង់លង្កា ។

២៧៣២. ក្បិណានោះនាងមួយឆ្លើយថា រីភាងសីតា
ណោកជាប្រសើរសល់ស្រី ។

២៧៣៣. អញពុំដែលយល់កលអ្វី ក្រុងយក្សល្អពី
នោះតើមកទុកស្ថានណា ។

២៧៣៤. នាងមួយលោតឆ្លើយវិញថា ណោកទុកនៅនា
អសោកឧទ្យានដ៏ឧត្តរ ។

២៧៣៥. ក្បិណានោះក្រុងពាល្យូពានរ ពួសព្ធអប្សរ
ក៏អរក្សុំឯចិត្តចិន្តា ។

(1) RIB : appades (pas.)
(2) RIB : nāṅ dāṃṅ mbhai muoy
(3) RIB : sāc' sam kramakār

២៧៣៦. នាក្នុងរាត្រីនោះណា នាងនាជនិទ្រា
ទ្រង់ព្រះសុបិនសួស្ដី ។

២៧៣៧. យល់ដូចព្រះបាទជ័យក្រី គង់លើដំរី
មហាសុមេរជ័សមាន[1] ។

២៧៣៨. ស្ដេចទ្រង់ព្រះពស្ត្រស្វេតពណ៌ បរិពារផ្ទុំផ្ទារ
ក៏គាល់សម្ដេចជេស្ឋា ។

២៧៣៩. ហើយយល់ដូចស្ដេចវេលា គង់គជេន្ទ្រា
ប្រសើរសជំស្កឹមវៃស្ក ។

២៧៤០. សីហានាទបីគគាតជើងក្រៃ មមួរ[2] ជើងវែង
បំរេចកំពែងលង្កា ។

២៧៤១. បែកបាក់ធ្លាយធ្លាក់សោះសា ដេញយក្សយោធា
ពន្លឹកពន្លូកខ្វាយខ្វាត់ ។

២៧៤២. ក្សិណនោះទេពីស្រីរត្ន តើនឡើងគង់ផ្ទាត់
ក៏ប្រាប់នៃស្រីសុជាតា ។

២៧៤៣. ជាទេពីព្រះពិភេក្សា កាយឡើងទូលថា
នាព្រះសុបិនបរិបូណ៌ ។

២៧៤៤. អ្នកនូវបានពតិមានបន្ទុល សារសព្ទមធុរ
ពីស្ទួរសម្ដេចភាសា ។

២៧៤៥. ស្រេចស្រីសួតិសុជាតា កាយឡើងទូលថា
នាក្នុងរាត្រីកាលស្ងាត់ ។

២៧៤៦. ក្សិណនោះបានុមានបោះផ្ងាត់ ស្រេចដល់រួតរត្ន
ប្រាសាទពិមានឧទ្យាន ។

២៧៤៧. នូវផ្កូលដោយគូរពុំបាន ក្រៃក្រៃហោតុមាន
អសូរកញ្ញាច្រើនគាល់ ។

២៧៤៨. បានុមាននិម្មិតខ្លួនធ្ងារ សៀរស្ទួរទៅពាល់
កំពូលប្រាសាទឯលើ ។

២៧៤៩. ក្សិណបេះបួតបានស្លឹកឈើ ប្រាយភាយរុះលើ
ក្រណាបន្ទំក្សត្រី ។

២៧៥០. ក្សិណនោះវិរភាជក្សត្រី ភ្ញាក់ឡើងដើលទី
លវៃងករគាយពិតាន ។

២៧៥១. នាងគិតក្នុងចិត្តស្មោះស្មាន ក្រុងរាពព្រៃប្រាណ
កាណាជាស្ទាមកដល់ ។

២៧៥២. ជក្ខ្លឹង អះអង្គឹកល ពុំដែលលេចខ្យល់
មណ្ឌលប្រាសាទសោភា ។

(1) MBN : mahāsūr ṭe sām̈ār
(2) RIB : mukh mūr

២៧៥៣- ស្វានេះធូលធុះត្រង់ណា ក្រែងក្រុងយក្សា
កាណាមកល្បងកិច្ចកល ។

២៧៥៤- ហនុមានស្រេចស្រូតធុះដល់ ទេពីនិមិល
មហាក្របីក្រាបក្រួញ ។

២៧៥៥- ថ្វាត់ថ្វាយករកាយបីកណ្ដួញ លុះលុតជង្ឃរជួញ
ប្រណម្យបង្គំទូលថា ។

២៧៥៦- បពិត្រវររាជជាយា ខ្ញុំឯងជាតិជា
អមាត្យជំនិតភក្តី ។

២៧៥៧- ខ្ញុំឈ្មោះហនុមានមកពី វរបាទចក្រី
សម្ដេចនារាយរាមា ។

២៧៥៨- ឲ្យសួរព្រះប្អូនថ្លៃថ្លា ព្រះរៀមរិះបា -
រម្ភរាជាទេពីក្ដាត់ ។

២៧៥៩- ក្បួនណានោះទើបទេពីរត្ន បន្ទូលរឹងថ្វាត់
កំនិតសន្និះសង្កា ។

២៧៦០- ពាក្យពានរនេះមុសា អញពុំជឿបា
កុំបាស្រដីកិច្ចកល ។

២៧៦១- នាកាលព្រះបាទទសពល ចេញចាកមណ្ឌល
នគរក៏ស្ដេចយាត្រា ។

២៧៦២- អញឯងបាទបរិចារិកា[1] នូវព្រះលក្ខអនុជា
ស្ដេចត្រេចព្រះព្រៃពនចរ ។

២៧៦៣- ពុំយល់ឯងអង្គពានរ តាមព្រះភូធរ
អីជាអមាត្យស្នេហាស្និទ្ធ ។

២៧៦៤- ហនុមានទូលថាបពិត្រ មហេសីសុចរិត
ក្សត្រីត្រកូលពន្លក ។

២៧៦៥- នាកាលទសមុខលួចយក ព្រះអង្គឯងមក
ក៏ស្ដេចត្រេចរកពុំយល់ ។

២៧៦៦- ព្រះរៀមព្រះអនុជសោកសល់ សោកសោះទុក្ខទល់
អំពល់អំពើក្សត្រស្ដាយ ។

២៧៦៧- ពីរពាល្យព្រះអង្គដើរដោយ ដងព្រៃពីជស្ដាយ
ហោរកន្ទុំសោកានល ។

២៧៦៨- ហនុមានទូលអស់កិច្ចកល ពុំឲ្យមានខ្វល់
ហឫទ័យសម្ដេចទេពី ។

២៧៦៩- ទូលថ្លែងអស់អាជ៏សេចក្ដី សុគ្រីពពាលី
ជាភេទប្រយុទ្ធជង្គា ។

(1) RIB : añ eṅ paricārikā

២៧៧០. សុក្រីពពីងព្រះជេស្ឋា សម្ដេចភាមា
ស្ដេចច្បាញ់ពាលីលុះមរ ។

២៧៧១. សុក្រីពគ្រប់គ្រងពានរ ខាស់ខិននគរ
ជិតសិបអក្ខោភិនី ។

២៧៧២. មកថ្វាយព្រះបាទចក្រី ហនុមានថ្លែងពី-
រោះសូរមធូរធ្លូរឈ្មោង ។

២៧៧៣. សុក្រីពនោះជាខ្ញុំឯង ព្រះរៀមគតក្រែង
ជាស្ដេចគស្នួរសិរសី ។

២៧៧៤. ម្ដាយខ្ញុំឈ្មោះអញ្ជនទេពី អាពុកខ្ញុំគឺ
ព្រះពាយោនាយនរនាថ(1) ។

២៧៧៥. ខ្ញុំពុំពោលមុសាវាទ ក្រាបទូលព្រះបាទ
ពុំឃ្លាតនូវពាក្យសត្យស្មោះ ។

២៧៧៦. ក្សត្រីស្ដែងស្ដាប់ពាក្យនោះ យល់ពិតពិរោះ
តាមដោយគន្លងសេចក្ដី ។

២៧៧៧. ព្រួយព្រះហឫទ័យទេពី ត្រេកត្រាស់ស្រដី
សំណោះសំណាលថ្លែងថា ។

២៧៧៨. ហៃហាហនុមានអញជឿជា ម្ដោះមានសង្កា
ឲ្យជាសន្និះពិភាល់ ។

២៧៧៩. ជាបានអ្វីជាបន្ទាល់ មកឲ្យអញស្គាល់
ជាពីព្រះបាទពង្សក្សត្រ ។

២៧៨០. ក្សិណនោះហនុមានស្រេចថ្វាត់ យកព្រះទំរង់រត្ន
អំពីលើង្វែកសិរសី ។

២៧៨១. ថ្នមថ្វាយវរភាគទេពី សីតាក្សត្រី
ទទួលជំនៀនព្រះទំរង់ ។

២៧៨២. នាងស្គាល់ជាក់ពីព្រះអង្គ ដែលព្រះបាទទ្រង់
គិតមានសន្និះខ្វល់ឡើយ ។

២៧៨៣. ទូលទុកលើសិរសាហើយ ជលនេត្រគតស្បើយ
សស្រាក់លើព្រះឱរា(2) ។

២៧៨៤. នាងទ្រង់ព្រះកន្សែងសោភា ជូតព្រះភាជា
ពិលាបពុលន់ពន់ក្ដាត់ ។

២៧៨៥. ក្សិណាស្រីសុជាតាទូលឃាត់ ក្នុងរាត្រីស្ងាត់
នោះខ្លាចអសូរឯងភ្ញាក់ ។

២៧៨៦. ក្រែងពួដល់ទសមុខយក្ស ដឹងដើមមានអ្នក
មកទូលក្នុងប្រាសាទស្នូត ។

(1) RIB : braḥ bāyo chāy naranāth
(2) MBN : loe braḥ bhaktrā

២៧៨៧- ទេពីខំទប់អាក់អួល　　យំស្លាងខ្សឹកខ្សួល
　　បន្ទូលបន្ទោសហនុមាន ។

២៧៨៨- ថាវៃហាហនុមានយោធាន　　អញបានពាក់មាន
　　សំនួរព្រះអង្គមកដល់ ។

២៧៨៩- ព្រះឧស្សាទិព្វថ្លៃមង្គល　　គឺនោះអញឆ្ងល់
　　មកលបាស្លាយសេចក្តី ។

២៧៩០- ពីបាទើបមកដល់ថ្មី　　មិញតើបទអ្វី
　　ក៏បានមិនថ្វាយព្រះទំរង់ ។

២៧៩១- បាមកធ្វេសធ្វើថ្លើរថ្លង　　សសោះអន្ទង
　　ហើយនៃទើបថ្វាយឯក្រោយ ។

២៧៩២- ហនុមានបង្គំទូលដោយ　　បពិត្រខ្ញុំស្លាយ
　　ឲ្យព្រួយព្រះរាជហឫទ័យ ។

២៧៩៣- គឺនោះអាជ្ញាក្សត្រថ្លៃ　　ពីព្រះឧស្សានៃ
　　ព្រះបាទអ្នកជាអម្ចាស់ ។

២៧៩៤- ព្រះទំរង់នេះពីព្រះហស្ត　　រីព្រះតម្រាស់
　　ឃូរពីព្រះឧស្សាក្សត្រថ្លៃ ។

២៧៩៥- ព្រះទំរង់នេះមានតម្លៃ　　ព្រះឧស្សាទិព្វថ្លៃ
　　នឹងកាត់តម្លៃពុំបាន ។

២៧៩៦- ហេតុនោះខ្ញុំថ្វាយពាក់មាន　　មុនហើយទើបបាន
　　ថ្វាយព្រះទំរង់ឯក្រោយ ។

២៧៩៧- មកលថ្វាយអំពីដើមដោយ　　ព្រះបន្ទូលស្លាយ
　　ពុំត្រែងបារម្ភសេចក្តី ។

២៧៩៨- ស្គាល់ជាក់ពីព្រះចក្រី　　ហើយព្រះមហេសី
　　សូវសោកពិលាបប្រះប្រាណា ។

២៧៩៩- ទំរាំស្បើយព្រះសោកស្រាន　　ហើយនៃទើបបាន
　　ព្រះមានសំនួរសារសត្យ ។

២៨០០- ខ្ញុំមកនេះជាការស្ងាត់　　វិលវិញទៅថ្វាត់
　　ដល់ដូចព្រះរាជអាជ្ញា ។

២៨០១- ខ្ញុំធ្វើឲ្យមានសញ្ញា　　ឈ្មោះទើបបានជា
　　ក្រាបទូលសព្វសេចក្តីគ្រប់ ។

២៨០២- ឥឡូវមិញ[1] យល់ខ្ញុំទប់　　ព្រះបន្ទូលទាំងដប់
　　អាក់អួលខ្សឹកខ្សួលក្សត្រី ។

២៨០៣- ទោះទ្រង់ព្រះកន្សែងក្រោយក្តី　　មានកំដឹង[2] អ្វី
　　លែងបានពាក់មានដឹងឆាប់ ។

(1) RIB : iḷūv mitr
(2) RIB : kuṃ ṭiṅ

២៨០៤- ក្សិណនោះទេពស្ដេចស្ដាប់ ពាក្យពិរោះគាប់
សរសើរហនុមានក្រាបថ្វាយ ។

២៨០៥- ហនុមានក្រួញក្រាបថ្វាត់ថ្វាយ អញ្ចលីករកាយ
ប្រណម្យបង្គំទូលថា ។

២៨០៦- បពិត្រវររាជជាយា ភស្តុអ្វីមួយជា
ជំនឿពីព្រះអង្គឯង ។

២៨០៧- ទៅថ្វាយព្រះរៀមស្ដេចឈ្មោង សោះសង្កាក្រែង
ថាខ្ញុំពុំដល់ព្រះអង្គ ។

២៨០៨- ក្សិណនោះទេពីវរវង្ស ស្ដេចបូតព្រះទំរង់
សុវណ្ណពិរោជរង្សី ។

២៨០៩- ពីកូនព្រះហស្តក្សត្រី ហុចហនុមានពី-
ណាបលប់បន្ទូលថ្លាំថា ។

២៨១០- ហៃហនុមានណើយយាត្រា ទៅទូលព្រះមហា-
តស្សរពន្លកជ័សំឡាញ់ ។

២៨១១- បើព្រះអង្គអាសូរអញ ដូចដើមនោះមិញ
តម្រូវសូមព្រះករុណា ។

២៨១២- ស្ដេចមានព្រះរាជចិន្ដា ទ្រង់ព្រះករុណា
ស្នេហាដូចដើមនាយហោង ។

២៨១៣- កុំគិតអង្គអញមានហ្មង[1] នូវយក្សយង់ឃ្លង
គីដាបន្ទិលអាត្មា ។

២៨១៤- អញទន្ទឹងព្រះរាជា ទាល់ទសមាសា[2]
ពុំយល់ព្រះភក្ត្រស្ដេចឡើយ ។

២៨១៥- នោះដឹងដើមអញដល់ត្រើយ ព្រះស្រីត្រូវហើយ
សោះសូន្យលើលង្កាហោង ។

២៨១៦- ក្រុងពង្សពានរត្រេកត្រង ព្រះបណ្ដាក្រប់ក្រង
វតីងរំពៃយាត្រា ។

២៨១៧- ឯឯនោះហនុមានក្រាបលា វររាជជាយា
សំដៃឯនូវតេដបីពន្លឹក ។

២៨១៨- ចេញចាប់ចុងអសោកត្រីក្ស សាខានូវសន្លឹក
អជិកនូវត្រួយផ្លែផ្កា ។

២៨១៩- លុះឯលង់អសោកពនិតា[3] ដកដើមដូងស្លា
ប្រវាងណើមអម្រឹតដល ។

២៨២០- ផលផងច្រើនពណ៌ច្រើនកល ទាំងបរិមណ្ឌល

(1) RIB : kuṃ git aṅg m̈atth hmaṅ
(2) MBN : dāl dasavāssār
(3) RIB : laḥ laeṅ asok banatā

ទំលាក់ទំលាយរុះរោយ ។

២៨២១- ផ្លែឈើបេះបានខាងឆ្ពោយ ដើមឯរប្រែក្រោយ
ក្រឡេកក្រឡាស់ទៅវិញ ។

២៨២២- ឯកអង្គមហិមាប្រែប្រឹង ប្រែប្រាណខេរខឹង
លលោលលំលោតឯល ។

២៨២៣- កាច់កំពែងមាសជំមណ្ឌល កើតកោលាហល
រវល់ទាំងយក្សកុម្ភណ្ឌ ។

២៨២៤- ជ្រោមប្រែងបីសំពែញឯករកាន់ គ្រឿងគ្រប់ខែលខ័ន
ផ្គូផ្គានូវជាវតោមរ ។

២៨២៥- ឆ្វះកាន់កៅទណ្ឌកោះសរ នាយយក្សប្អូនឈរ
កណ្តាលនៃយក្សរូសភាន់(1) ។

២៨២៦- រទស់យក្សាសួរប្អូនកាន់ ជ្រោមប្រែងឯករកាន់
កន្ទុយទីទៃទន់ទាញ ។

២៨២៧- មានុមានធ្វើជាគ្រូញក្រាញ ហើយលោតកាក់ផ្លាញ
អសុរវិនាសនាភា ។

២៨២៨- ដូចគ្រុឌខាបស្នួរនាគា ដូចរាជសីហា
សហ័សក៏ចាប់គជសារ ។

២៨២៩- អសុរសហ័សអន្តពាល មិនមកជាសជា
វនាបរនេលលើគ្នា ។

២៨៣០- លុះត្រូដល់រាជសីតា ភិតភ័យមហិមា
ក៏ស្រែកឃាត់មានុមានឯង ។

២៨៣១- ជាឲ្យមានុមានឥតក្រែង ស្តេចបាពុំឈ្លេង
បានាំបណ្តាំមហាក្សត្រ ។

២៨៣២- បាមកនេះនឹងជាស្លាត់ វិលវិញទៅជ្ងាត់
ដល់ដូចអាស្ងាស្តេចប្រើ ។

២៨៣៣- ស្តេចឡើយបាមកធ្វេសធ្វើ ដោយឈ្មោះគ្មោះតើ
ជាគាប់ឯណាសោតហោង ។

២៨៣៤- មានុមានពុំស្តាប់ឡើយហោង លាទេពីស្បង
ក៏ចាប់អសុរអសនិ ។

២៨៣៥- ឆក់ស្នួរឈ្លួរជ័ប្រដពី ប្រះសិង្ហប្រះសីហា
ក៏ប្រះអង្រឹកក្រាត់ព្រោយ ។

២៨៣៦- ជកដើមដូងស្លាវាត់វាយ អសុរខ្ទាត់ខ្ចាយ
ពុំអាចនៅចាំទេពី ។

២៨៣៧- យក្សជាសេនាបតី តៀបទៀបសេនី
រូបមានរលកសាគរ ។

(1) RIB : kanṭāl nai yaks rukkhachand

២៨៣៨. យក្សរោមជួលជោមពានរ ពានរប្រឹងឈរ
រំលាងឧទ្យានសោះសា ។

២៨៣៩. ហនុមានទ្រើសទ្រង់ពេជ្រថ្លា ដោះត្រូវយោធា
ពាហានអសុរស្លាប់ស្លុត ។

២៨៤០. កាច់កកាត់កបីកំបុត ធ្លាយពោះបីរពាត់
រពាយរពូនលើគ្នា ។

២៨៤១. ដេញពលដេញខុនយក្សា ដេញវាយយោធា
ទៅតល់សហាសកុមារ ។

២៨៤២. គប់លើរាជរថឧទារ ទឹមសិង្ហជ័ប្រហារ
រន្ទះសំទៀរស្រែកខ្លាំង ។

២៨៤៣. ផ្គឹងផ្គែងតន្ត្រីយត្រែស័ង្ខ ឆត្រឆាយាកាង(1)
រំយោលក្លឹងក្លស់ឆាសឆាន ។

២៨៤៤. មុះបរគជសារហៅហាន(2) ប្រុះប្រឹងប្រែប្រាណា
មមូមមាមហិមា ។

២៨៤៥. នាយសិង្ហជិះសិង្ហសោះសា នាយសិង្ហនាយមហា
ពន្លឹកសឹងបីសំរេក ។

២៨៤៦. រៀបពលរាយពលជេះចែក ចរចេញក្រោយភ្នែក
នូវ៥សជ័យោធាពល ។

២៨៤៧. សឹងដាញដងជិះដោយកល សឹងមុះមុតជល់
ប្រកួតប្រកាប់នូវកំណាំង ។

២៨៤៨. ជិះសិង្ហជិះសីហាជ័ប្រណាំង ជិះកញ្ជាវខ្លាំង
ក៏ជិះឧសភនាគនា ។

២៨៤៩. ជិះសៀងភាដាបីប្រហារ ញូប្រែតន្ត្រីពាល
ក៏ជិះមហិង្សាជ្រើង ។

២៨៥០. ជិះគោជិះគោរមាសភ្លើង ហាសហ្លួសហោះឡើង
ក៏ច្រាលច្រវាត់ទេវហា ។

២៨៥១. រាយរៀបពលពោរមហិមា រូហានតក្កា
ក៏ជោរជំនោរមួយជង ។

២៨៥២. មារមុះឈលើកបីជំបង ដែកដោមបីសិពាង
កញ្ជូនសន្ធាប់ជ័ក្របី ។

២៨៥៣. ហនុមានជក់ពេជ្រជ័គ្រវី ដោះត្រូវសេនី
រនាបរនៀលពាសុធា ។

២៨៥៤. ឈាមហូរជួចស្ទឹងយមុនា ជោរជលជ័នារា
រលករជុំជ័រំដែង ។

(1) MBN : kaṃṅ
RIB : kāṃṅ
(2) RIB : poḥ par gajasār hāv hān

២៨៥៥- អស់ពលអសុរទំនែង យានុមានដាញដែង
ក៏ដាច់ត្រឡប់រថដួល ។

២៨៥៦- ដៃមួយកាប់រថយ៉ះយួរ ដៃមួយចាក់ដួរ
នៃអង្គសហាសកុមារ ។

២៨៥៧- វាយសិង្ហ វាយគជ អស្សពាហា ពោះពោកពលមារ
រនាបរនៀលដារា ។

២៨៥៨- វាយគោ វាយគោមហិង្សា រមាសខ្លាធៀងកា
នូវសេះសារជីបីស្លាប់ ។

២៨៥៩- ធុលដាច់ឥន្ទ្រីផុរនាប់ ផ្លូវឥន្ទ្រីខ្ជាប់
សម្លាប់ឥន្ទ្រីមរណា ។

២៨៦០- គជសីហរាជសីហជីមហា ដាច់ប្រះជីដារា
ប្រឡាក់នូវឈាមហូរផ្លង់ ។

២៨៦១- កាត់រថបង់រថពះអង្គ សហាសកុមារទ្រង់
ក៏ដាច់ជ្រះបាច់មរណា ។

២៨៦២- ទាំងពលផ្កាំសែនសោះសា សេនាយោធា
និងយានជំនិះសឹងក្ស័យ ។

២៨៦៣- សល់តែអសុរតិរនៃ រស់រួចវៀងភ័យ
ក៏រត់ទៅទូលរាពណា ។

២៨៦៤- រាពស្តាប់ទំនូលអសុរា ជាដើមមានតា-
នរេន្ទ្រមួយមកភារី ។

២៨៦៥- ផ្លាញរថផ្លាញរាជពាជី ផ្លាញយក្សសេនី
ក៏ផ្លាញទាំងទសយោធា ។

២៨៦៦- ផ្លាញទាំងអសុរបុត្រភ្វា សហាសកុមារមរណា
មហាទសមុខក្រោធក្រៃ ។

២៨៦៧- ពុំដើមព្រះរាជបុត្រក្ស័យ រាពណ៍ក្ដៅបារម្ភ័យ
នូវសោកានលពេកពោរាង ។

២៨៦៨- ហៅឥន្ទ្រជិតបុត្រច្បង តេជវៃកន្លង
កំណោះកំណាចមហិមា ។

២៨៦៩- ហៅឥន្ទ្រជិតចូរមា ស្ដាប់ពតិមានណា
ដំណើរនៃរាជជីក្របី ។

២៨៧០- ចូរមាតាំពលជីសេនី ផ្លាញស្វាបាបី
ក៏មករំលាយឧទ្យាន ។

២៨៧១- ឥន្ទ្រជិតទូលឆ្លើយទឹងផ្កាន នាខ្ញុំយកបាន
ដោះស្វាណាមាន្យត្រើសឃ្នង ។

២៨៧២- ខ្ញុំជាព្រះរាជបុត្រច្បង តេជវៃជ័យកន្លង
ប្រាកដបង្កើតកេរតិច្បាស់ ។

២៨៧៣- ត្រែងដូចអាជានេយ្យចាស់ នឹងជជកដាល់

ក៏មកប៉ះប៉ុននូវគ្នា ។

២៨៧៤- សូមទានព្រះរាជអាជ្ញា ស្រោលយកយោធា
វង្សានូវស្មើពានរ ។

២៨៧៥- ខ្ញុំទូលបាក់ខ្ញុំពុំអរ អាសាព្រះភូធរ
ពុំថេរនូវព្រះករុណា ។

២៨៧៦- ក្រុងរាពណបន្ទូលថៃបាថា ពោះពីបាផ្កាញាត្វា
នះមួយឲ្យដឹងតេដដៃដ ។

២៨៧៧- នូវដឹងជើងបាមានជ័យ ជ័យបាជ័យត្រៃ
ពិជ័យសម្ដេចភមា ។

២៨៧៨- ជងនោះឥន្ទ្រជិតក្រាបលា នាំយក្សយោធា
ចាបាននូវពលពាណោ ។

២៨៧៩- សឹងហៅបានភ្លាជ័យនោ ទាំងព្រំអក្ខោ-
ភិនិពិនិត្យសិល្បសាយ ។

២៨៨០- តែងនាំងខុនពលពន្រាយ គីអង្គអតិកាយ
មហាឫណាជ័សេនី ។

២៨៨១- រៀបរថទឹមទៀមពាជី សេះសោតរស្មី
រូបានមហាមរកត ។

២៨៨២- ឥន្ទ្រជិតឡើងលើរាជរថ រស្មីបីជំហុត
ប្រឌុជនូវសុរិយោទយា ។

២៨៨៣- រស្មីផ្លុះអង្គអស្សពាហា មើលម្តងដូចកាល
ខៃតន្ទុជនូបីជំភាស់ ។

២៨៨៤- យក្សយ៉ងឯកអង្គខែងខ្លាស់ នាមហៅប្រហាស្ត(1)
ជំនិះជំនាញសារថី ។

២៨៨៥- មានមហាយក្សត្រីទ្វី នាមហៅព្រះដី(2)
ក៏ស្ទិតកន្សៃរថជង ។

២៨៨៦- ត្បូងត្រឡឹយនូវសង្ហគង ដើរដេរដោយដង
កក្រើកអំពើកពសុធា ។

២៨៨៧- ដូចពាយពន្លូកត្រីក្ស ញាប់ញ័រក្រលា
មហាពសុធាខ្លាយខ្ចរ ។

២៨៨៨- អាប់អស់ឫទ្ធសុរិយាករ ងងិតអន្ធការ
ស្រឡប់ទាំងស្បូវរាជ្ជ ។

២៨៨៩- ខ្លះកាន់ខែលខ័នជ័ត្រទ្វី រៀបពលពាជី
ប្រកិតអាវុធស្នៀងស្តាំ ។

២៨៩០- ខ្លះកាន់នាគាវេភាំ ខេវខឹងមាត់ខាំ

(1) RIB : braḥ hăst
(2) RIB : nām hau bājī

សំញើញសំញៀងកាណា ។

២៨៩១- លុះលើកទ័ពទៀបព្រឹក្សា    ភពទៀបយោធា
នូវពោធនៃភពជ័យក្របី ។

២៨៩២- ឯងនោះក្របិត្រនាភាយធិបតី    យល់យក្សអសូរវៃ(1)
សំបើងសំបាក្រោធក្រៃ ។

២៨៩៣- នោះក្រុងពានរនិរភ័យ    និរភិតជាញជ័យ
ដយានុភាពឫទ្ធិខែង ។

២៨៩៤- ពៃពានពាន់នគ្គជិបីសំដែង    ជិតជាកំពែង
គឺពេជ្រកំពាត់ផ្កល់ជើង ។

២៨៩៥- ទៃងវាន់ជ្រើនជាន់ខ្លួងជើង    អង្គអាត្មាផ្តើង
ជ័រលើសអសោកសាខា ។

២៨៩៦- ឈរណោងបេះបានផលា    បៀមបរិភោគ្គា
អង្គ្លាឯកនិរភ័យភ្លឹក ។

២៨៩៧- ដូចភពសីហាជ័អធិក    ចាប់គជជ័អង្រឹត
រភាក្តាអង្គ្លាឯនិរភ័យ ។

២៨៩៨- និរភិតអង្រឹតជ័ទីវៃ    និរាសសង្ស័យ
ភយានុភ័យដ្ឋួចជល់ ។

២៨៩៩- ឯងនោះបានុមានមើលយល់    តន្ត្រជិតនិមិល
កស្ទិតលើរថអស្សូពាហា ។

២៩០០- រុងរឿងរស្មីផ្រាស់ផ្រាល    ដូចសុរិយមាល(2)
បីផ្រាលជំរាស់បូពាំ ។

២៩០១- ក្រុងពាទ្ធូពានរគិតថា    នេះអង្គភពណា
ឬ(3)អង្គអសូរទៀតដៃ ។

២៩០២- យោធាយក្សាក្រាស់ក្រៃ    ដោមពានរវៃ
អសោកពន្លឹកសព្វសាយ ។

២៩០៣- ទៅទៀបពានរពន្រាយ    យល់អង្គអតិកាយ
ក៏ស្រែកឯស្តីងពុំខ្លាច ។

២៩០៤- ថាទើយវាយក្សបីកំណាច    អ្នកឯណាឯងអាច
កស្ទិតលើរថអស្សូពាហា ។

២៩០៥- នោះជាអង្គអសូរផារ    ភពឯងអនួពាល
ឬ(4)អង្គអសូរទៀតដៃ ។

២៩០៦- ឯងនោះអតិកាយក្រោធក្រៃ    មហិមានិរភ័យ
ក៏ពោលនូវពាក្យប្រាយប្រាប់ ។

(1) RIB : yal' yaks asanī
(2) RIB : ṭūc suriyā bāl
(3) RIB : ṙī
(4) RIB : rī

៧៩០៧. ហើយពាន់ព្រះស្តែងស្តាប់ ពីងពុំដឹងសព្វ
នូវតេជតបះឫទ្ធិក្រៃ ។

៧៩០៨. អ្នកនេះឯងមានថ្លៃដៃ ធ្វើសឹកមានជ័យ
ពីជ័យសង្គ្រាមច្រើនគ្រា ។

៧៩០៩. ជរាជាប់ទាំងទេពសួគ៌ា ទាំងព្រះឥន្ទ្រា
លុះនូវអំណាចបីប្រាកដ ។

៧៩១០. ហេតុនោះឥន្ទ្រាទេវបុត្រ ទើបលោកសន្មត
ព្រះនាមករពរហោរាង ។

៧៩១១. ហៅឥន្ទ្រជិតជីកន្លង ជាភាជបុត្រច្បង
ព្រះបាទឥស្សូរលង្កា ។

៧៩១២. ស្តេចទុកស្មើបណ្តូលថ្លើមថ្លា ស្មើព្រះនេត្រា
ពន្លកពន្លឺពន្រាយ ។

៧៩១៣. រីអញឯងឈ្មោះអតិកាយ៍ បរប្រែរូបកាយ(1)
ការណ៍នូវកលអតិរេក ។

៧៩១៤. ដុំជាតិស្មិងស្មាធិឯងឯក ហើយវរវិវេក
វិសេសវិសុទ្ធសាស្ត្រា ។

៧៩១៥. ជឯនោះមានុមានមហិមា សើចសងនិន្ទា
ចំអកចំអន់ពុំកោត ។

៧៩១៦. ហើយវាយក្សតិរិច្ឆានតោត ស្តេចដឹងមិនកោត
ប្រកួតប្រឡងជេស្តា ។

៧៩១៧. មិនតិះដៀលពលឃ្លាណា មិនកមហិមា
សឹងស្ពានអញត្រីប្រញ៉ាអង្គ ។

៧៩១៨. អញមើលមុខដឹងពីលម្អង ដូចមុសនូវមមង
មកពោមរៃនដើងតិសារ ។

៧៩១៩. ហើរហោងផ្កាណាប្រួតក្រាស់ក្រាល ទំខាំគងសារ
សម្លាប់ជីបាននេះតិច្ឆូវ ។

៧៩២០. ស្រើបស្រុះមោហាមុះមកត្រូវ តែខ្យល់ខាងបូវ
ក៏មរវិនាសអន្តរាយ ។

៧៩២១. ខ្លះត្រូវសង្ហានិកាយ - វដ្ឋាសុទ្ធសាយ(2)
បីខ្ចាយជលាស្លាប់ស្លុត(3) ។

៧៩២២. មិនងមិនដឹងមានុមានបុត្រ អស់រូបភោមសុទ្ធ
សឹងពេជ្រមហាពេជ្រថ្លា ។

៧៩២៣. ទោះដឹងមកនឹងពាធា ស្មើយកអាត្មា

(1) MBN : mut prae rūp kāy
(2) MBN : vatthā suddhāy
RIB : vudha suddhāy
(3) RIB : pī khcāy jalā slāp' slut

មកមរកណ្តាលឧទ្យាន ។

២៩២៤- មីងដូចខ្មោចខ្មួយសាមាន្យ ពីងមកពះពាន
ប្រកួតប្រឡងចេស្តា ។

២៩២៥- ឯងនោះអតិកាយមហិមា ក្រេវក្រោធសោះសា
នូវពាក្យនៃពានរពោល ។

២៩២៦- ខេវវិងប្រាណប្រឹងឈរឈោរ រូបរុងបីត្រសោល
ទីយោមយាកាណ ។

២៩២៧- កំពាស់បីយោជកណានា អតិកាយកាណ
នូវរូបស្កឹមស្កៃបីសំបើម ។

២៩២៨- ប្រាណប្រឹងទះពាហុដើម (1) នេត្រឥឯនូវធិញ្ចើម
ក្រញូវក្រញើញបីកក្លុន ។

២៩២៩- កំភាមគ្រើមក្រាមបីក្រនួន ភ្នែកប្រាលជំងួន
ក្រឡេកក្រឡោតនេត្រា ។

២៩៣០- បានុមានមើលយល់យក្ស អតិកាយកាណ
នូវរូបដ៏រុងបីពន្លឹក ។

២៩៣១- ណោណោតពីអសោកព្រឹក្ស ដោយគេឯបីអធិក
អំណាចនៃរាជពានរ ។

២៩៣២- ស្ទុះទៅផាក់ទាំងជំពារ យក្សរដួលផ្ទាស់មរ
កំផ្ទារកណ្តាលប្រឋពី ។

២៩៣៣- ញូសញូដូចសញូអសនី ឲ្យតព្រោមប្រឋពី
កក្រើករន្ធត់ស្ទើបស្ទប់ ។

២៩៣៤- អតិកាយញ័រខ្លួនបីជំប្រប់ ប្រឹងប្រាណស្ទួន្យសញ្ញ
សន្លប់ត្រឡប់នេត្រា ។

២៩៣៥- ខាស់ខំស្ទាញស្ទុះផ្ទុះផ្ទា ឈរឈោងបីប្រភា
បំពេនបំពាត់រូតរត់ ។

២៩៣៦- ផាក់ពៃព្រឹក្សាបពិត បាមាត់ប៉ះធុត
ខ្នុំខ្នុងជ្រែងជ្រុល ។

២៩៣៧- ផ្ដើលនោកឯកោលាហល អតិកាយរត់ដល់
នៃឥន្ទ្រជិតជាញដ័យ ។

២៩៣៨- ថ្លែងប្រាប់ដោយដំណើរនៃ ឥន្ទ្រជិតក្រោធក្រៃ
រន្ទះប្រហាស្តសារធី ។

២៩៣៩- ឥន្ទ្រជិតតាំងលើរថពាជី ក្រោធដូចអគ្គី
កំដេះកំលុងនិភា ។

២៩៤០- ឯងនោះប្រហាស្តទូលជា សូមព្រះករុណា
អាស្សូរនៃខ្ញុំស្មើសត្វ ។

(1) RIB : prāṇ priṇ̇ baḥ bāhu ṭoem

២៩៤១. ខ្ញុំទូលបាក់ដូចខ្ញុំឃាត់ ដោះសូមប្រយ័ត្ន
ប្រយុទ្ធនៃពានរនេះ ។

២៩៤២. តតក្លឹកការសឹកសោតជេះ អង្គុតតរពេះ
របឹងរបាញទ្រើសទ្រង់ ។

២៩៤៣. ទោះនូវស្ដីមពណារីងរុង ភឺរ៉ង្គូរព្រះអង្គ
ព្រះបាទអម្ចាស់ឯងឯនៃ ។

២៩៤៤. ទោះព្រះអង្គទឹងទំឲ្យក្ស័យ ពានរនេះក្រៃ
ផ្ទាំងនឹងប្រទះទាស់បាន ។

២៩៤៥. ឯងនោះតន្ត្រិជិតឆ្លើយថ្កាន អរប្រិយាស្តុបាន
កំនិតកំនាប់គួរយក ។

២៩៤៦. នាកាលយើងនូវណាស្ដេចមក ប្រយោជន៍បីនូវរក
ប្រទុស្តប្រទះរឿងណារង្គ ។

២៩៤៧. កុំជាពានរឯកអង្គ មហិមាទ្រើសទ្រង់
ពណាទ្រនង់ជ័តិភោជ ។

២៩៤៨. ទោះពានរនេះសែនកោងិ ពុំគួរបីនូវកោត
កំណាំងក្របីសោះសា ។

២៩៤៩. កាលមកយើងក្រាបទូលថា ទោះបីអ្នកឯណា
ដ៏មានតបះការក្រៃ ។

២៩៥០. យើងផ្សាំងឲ្យអស់តេជៃង លុះជីវិតក្ស័យ
ទីទៃពុំលៃងល្បើយណា ។

២៩៥១. ទោះជយឲ្យអាប់អាជ្ញា អាប់ព្រះចេស្ដា
នឹងជាជំនៀលនេះតឡូវ ។

២៩៥២. យល់យើងខ្លៅខ្លាជ័សត្រូវ(1) ស្លាដួយមកកូវ
រលះរណាំងរត់ហោង ។

២៩៥៣. ៗដល់ព្រះបាទទ្រើសឃ្លង ស្ដេចក្រេវក្រោធឯង
ចំណោរនូវរស់បានសោត ។

២៩៥៤. ឯងនោះតន្ត្រិជិតក្រេវក្រោធ ភារភ័យបីតិភោជ
រន្ទុះទាបានហូរឆូល ។

២៩៥៥. បាទុមានយល់យក្សាស្សូរ រត់ធូលបីរម្សូរ
កន្ត្រៀយក្រអែសលើយឯរ ។

២៩៥៦. ឯងនោះក្រុងភាជជ័ពានរ ក្របិន្ទ្រាជ័បវរ
ពន្លូកពន្លឹកបីប្រតិហារ(2) ។

២៩៥៧. ពានរទះទរពលមារ មរជាគេក្រាល

(1) RIB : khlau khlā ṭă satrūv
(2) RIB : krapindr rapin pavar
banlūk banlịk prātihāry

កណ្ដាលមហាប្រថពី ។

២៩៥៨- លោលោតផ្លូវផាប់សិង្ហសីហា សេះសារដំរី
ក្រឡុកក្រឡាស់ក្រោយ ។

២៩៥៩- ជោកជាក់រាងរងខាងម្ដាយ ដើយដេរប្រែក្រោយ
លលោលលាំងរងរា ។

២៩៦០- លោតឡើងផាប់ផុងព្រឹក្សា អសោកសាខា
បំពេននូវនគ្គជិផ្ទាត់ ។

២៩៦១- ដូចកលនាគបាសពេនពាត់ ផ្លាយច្រើនពាន់ក្លាត់
ដីកល់ដំកើងអាត្មា ។

២៩៦២- យក្សបាញ់បាចសរសោះសា ដូចភ្លៀងពេញមហា
មហាវេហាសឆ្ងាយឆ្ងូរ ។

២៩៦៣- ពុំព្រឺព្រួញអង្គពានរ ឯកដោតអស់សរ
នោះដាបន្ទាយជុំជិត ។

២៩៦៤- មើលទៅអស់ពលហើយគិត អាតន្ត្រជិត
ក៏មកប្រឡងចេស្ដា ។

២៩៦៥- នោះបីអញខឹងវំពាងា ផ្លាញអស់យក្សា
ក៏លុះមរវិនាសនៃ ។

២៩៦៦- កាប់ផែតន្ត្រជិតពុំក្ស័យ ពុំលុះតេជនៃ
នៃអញពិឃាតពុំបាន ។

២៩៦៧- អញនូវឃ្លាំងក្រែងយូរពាតិមាន ពុំនាប់វីងផ្កាន
ព្រះបាទនារាយពង្សក្សត្រ ។

២៩៦៨- នេះតម្លូវស្ដេចមន្ត្រីដ៏ក្លាត់ ស្លុះអញទៅផ្ទាត់
ផ្ទាត់ដូចព្រះរាជអាជ្ញា ។

២៩៦៩- ឯងនោះក្រុងត្រើនួយក្សា នាំព្រះបីដា
ដំនិតនៃតន្ត្រជិតឯង ។

២៩៧០- មរដាដាស់ទុំត្រើនូព្រោង បារម្ភក្រក្រែង
ប្រយោជន៍ប្រយ័ត្នកេរតិឆ្ងាយ ។

២៩៧១- ក្លូនផ្លូវអស់អាជិអតិប្រាយ អញ្ជាស្រីយស្រាយ
ពាហុលពហោស្រែងស្រាប់ ។

២៩៧២- ថ្លែងជាស្មូមព្រះអង្គស្ដាប់ អញខ្ញុំនូវប្រាប់
ដំណើរដំណាលជុំជាតិ ។

២៩៧៣- ដើមឡើយព្រះពាយោនាថ សិទ្ធិសក្តិសល់ខ្ពាត
នូវតេជតបះបារមី ។

២៩៧៤- មានភរិយានាមនាងស្រី អញ្ជានទេវី
ពិសេសសពិស្ដុក្រល្យាណា ។

២៩៧៥- បង្កើតជាអង្គបាននាម មហិមាហោមាន
ច្រាកនិប្រកបលក្ខណា ។

២៩៧៦. មានរត្នកុណ្ឌលកំដា មានព្រះសុរិយា
ទាំងពីរដណ្ដាប់មណ្ឌល ។

២៩៧៧. ក្នុងមាត់ហនុមានមង្គល ពោរពារទៀងយល់
ព្រះសូរ្យចន្ទ្រ ចះ ចន្ទ្រថែង ។

២៩៧៨. ឬទាំងទិសានុទិសស្ដែង(1) តេជោជ័យវែង
កំបែងកំហឹងហនុមាន ។

២៩៧៩. បើព្រះអង្គពិឃាតបាន ព្រះអាទិត្យស្ថិតស្ថាន
ទាំងពីរដណ្ដាប់នោះនៃ(2) ។

២៩៨០. ទើបព្រះអង្គអាចឲ្យភ័យ ហនុមាននោះក្ស័យ
នូវតេជអំណាចព្រះបាទ ។

២៩៨១. គាត់បុត្រព្រះពាយោនាថ ពុំដែលពិឃាត
ព្រះពាយនូវពលលុះមារ ។

២៩៨២. ព្រះអង្គឯងអាចឲ្យបរ ភពរជមកឈរ
ក៏មរវិនាសពលយក្ស ។

២៩៨៣. ជោកជោះភពរជបែកបាក់ ខាងម្ខាយផ្លាយផ្លាក់
ទាំងគ្រឿងអាវុធខ្ចាត់ខ្ចាយ ។

២៩៨៤. ស្លុះធាក់ទាំងអង្គអតិកាយ ដួលផ្ងាស់អន្តរាយ
សន្លប់ជំប្រប់ជ្រុលជ្រក ។

២៩៨៥. ទាំងសហាសកុមារម្ទះមក ភពបុត្រជ័ពន្លក
គាត់ជាប់ច្របាច់អន្តរាយ ។

២៩៨៦. សូមទានកុំព្រះអង្គគិតងាយ ឱ្យខ្លាចរិះថ្ងាយ
ពុំជេរនូវព្រះជិន្ដា ។

២៩៨៧. ឯងនោះឥន្ទ្រជិតឆ្លើយថា អរព្រះដ៏ជា
កំនិតគំនាប់គួរគិត ។

២៩៨៨. នេះឥឡូវមោះឈើងតាំងចិត្ត ស្លាប់រស់ពុំគិត
កំលាំងក្របីឫទ្ធិសាយ ។

២៩៨៩. ឥន្ទ្រជិតជាតិជាអសុរកាយ(3) យក្សាសម្លាយ
កំក្រែវបីក្រោធសោះសា ។

២៩៩០. ដូចភ្លើងឆាក់កល្បមហិមា ឆេះក្នុងគុភ
ទ្រះទុះរទុននៃ ។

២៩៩១. ខុនបរិពាររពលក្រាស់ក្រៃ ដើមកពេញពួ
កណ្ដាលដំរង្គពសុធា ។

២៩៩២. ឥន្ទ្រជិតកោះសារសក្ដិថ្លា ថ្លែងជានានា

(1) MBN : dāṃṅ dvār dissādis staeṅ
(2) RIB : daṃṅ sām sip bīr noḥ nai
(3) RIB : isūrakāy

អនន្តអនេកវិតក្កត ។

២៩៩៣- មានុមានអស់ឲ្យស្មៀមស្ងួត ប្រួញឲ្យយក្សព្រួត
នាគាអនេកច្រើនជាន់ ។

២៩៩៤- ពលយក្សាស្ទូរប្អូនពាន់ ជ្រោមជ្រែងធូលការ
ក៏ជាប់ប្រមាញ់រត់ទៅ ។

២៩៩៥- មានុមានក្រួញក្រាបនិត្យនៅ ណោណោតដាក់ភ្លៅ
អស្សូរក៏ដួលបីរនាប ។

២៩៩៦- យក្សប្រែប្រាណាវឹងបីក្រឡាប់ ដាលដោះម្បើងងាប់
ក៏ជាប់ប្រមាញ់រត់ទៀត ។

២៩៩៧- ខ្លាន់ស្ទូរសត្វជីតក្រាត រឹងទំសង្កៀត (1)
សន្ធ្ងងសិរសាទើបបាន ។

២៩៩៨- ទៅដល់មណ្ឌលរាជស្ថាន ថ្វាយរាពប្រធាន
សំដែងនូវគេជជេស្តា ។

២៩៩៩- ទសមុខមារអារមហិមា សរសើរឫទ្ធា
នៃតន្ត្រដិតជាញជ័យ ។

៣០០០- ក្រុងរាពត្រេកអរពេកក្រៃ បន្ទូលជាវៃបា
ម្នាលអស់យក្សាយោធា ។

៣០០១- ចូរគ្នាយើងយកនូវិត្យា ជតៃប្រៃនេះណា
ចេញទៅសម្លាប់ឲ្យងាប់ ។

៣០០២- ខ្លះនោតយកដឹងក្លូវក្តាប់ ខ្លះនោតព្រួតចាប់
ឲ្យខ្ទាប់ហើយខ្លះពុះច្រូង ។

៣០០៣- ខ្លះដំក្បាលនឹងអន្លូង ខ្លះគ្រាសច្រំឡូង
ខ្លះយកអង្រែត្បាល់ដែក ។

៣០០៤- មកបុកក្បាលនោះឲ្យបែក ថ្វាយខ្លួរបីសញ្ញែក
ហើយហែកដញ្ញែកភោក្តា ។

៣០០៥- ក្សិណនោះពេញ្ញឃាតអសុរា ទាំងដតុសហស្សា (2)
ក្រមក្រតើនខ្មីខ្មាន់ ។

៣០០៦- មាញ្ញរត់ទៅទាំងប្អូនពាន់ ជ្រោមជ្រែងធូលការ
ក្រញ៉ីកកន្ត្រាក់មានុមាន ។

៣០០៧- រត់ទៅគាល់ក្រោរាជស្ថាន យក្សខ្លះគោះគាន
សំពាងដំបងដែកដំ ។

៣០០៨- ផ្តេកផ្តាក់ខ្លះដាក់ខ្លះច្រំ ខ្លះដួងងឹងងំ
គ្រវៃងក៏ពុះសិរសា ។

៣០០៩- ពុំព្រឺមានុមានមហិមា ច្រឹងប្រាណាសោះសា

(1) MBN et RIB : saṅghīet
(2) RIB : dāṃṅ dasasahassā

ក្រឡាប់ក្រឡាស់វិលវៃ ។

៣០១០- ដក់ដំបងដែកពីដៃ ដាលដេញនិរភ័យ
ក្រទូសត្រីវាយយក្ស ។

៣០១១- ខ្លះធ្លុះធ្លាយត្បូងខ្លះបាក់ ភ្លៅធ្លាត់នូវសន្លាក់
រង្គាប់រង្គើគ្រប់គ្នា ។

៣០១២- ខ្លះស្លាប់រស់រងវេទនា ហនុមានធ្វើជា
សំងំសំងួតស្ងៀមនៅ ។

៣០១៣- យក្សស្រែកពេបពេបពោបចូលទៅ សោកាន់នឹងនៅ(1)
ក៏យកអង្រែត្បាល់បុក ។

៣០១៤- ហនុមានឥតភ័យឥតទុក្ខ ដើរលេងបីស្រណុក
ស្រដីនឹងពាក្យពាលោ ។

៣០១៥- ដាវៃហាអស់យក្សមូម្លោ មិនបកពេបនោ
វិវល់រចល់ឥតការ ។

៣០១៦- ស្ដីជាតិខ្លួនខ្លៅអន្ធពាល ស្ដីធ្វើអាគមមារ
មិនយកឯងដែកជាស់ពេជ្រ ។

៣០១៧- កំហាល់តុំដឹងកលកិច្ច គំនិតមិនតិច
កម្លៀលមួរឥតត្រើយ ។

៣០១៨- វាខ្ជិលព្រួយចិត្តអញហើយ អញ់ណាក់អ្វីល្មើយ
តិបាកកម្រស្លាប់ឆាប់ ។

៣០១៩- បើមិនជប់ឲ្យអញស្លាប់ មិនទៅទូលប្រាប់
អស្សូរឥតសូរលង្កា ។

៣០២០- ឲ្យយកកាសាយមណា(2) ខ្សែនព្រៃជាៗ
ជ្រលក់នូវប្រេងព្រួតរុំ ។

៣០២១- ជួយសៃនសមាស្សដាក់ដុំ ខ្លួនហើយមិនដ្ឋំ
អគ្គីមកដុតតុរនេះ ។

៣០២២- នោះនៃអញស្លាប់ឯងអេះ មារមិនមិនធេះ
លណាក់លលើលោយោ ។

៣០២៣- មិនព្រួតម្តេចដោយតេដោ ដ៏យជាញឯកោ
ជយានុភាពដ៏កន្លាំង ។

៣០២៤- ក្បែណានោះហនុមានភើចលាំង ត្បាល់ដែកខ្ទេចខ្ទាំង
ក៏ខ្ទប់ទំណក់បែកបាក់ ។

៣០២៥- ដាប់អង្រែដែកដេញវាយយក្ស ពលយក្សបែកបាក់
ពន្លូកពន្លឹកព្រាត់ព្រាយ ។

(1) RIB : sar bǎndh niṅ nau
(2) MBN : oy yak kāsā yaṃmanār
RIB : oy yak kāsāvǎy munā

៣០២៦- អស់យក្សាសូរសម្ពាយ គក់ទ្រូងពីប្រញាយ
រន្ធត់ហឫទ័យពីជំប្រប់ ។

៣០២៧- ស្រែកស្រាបក្រួញក្រាបពីសញ្ជប់ ភិតភ័យស្មែងស្លប់
ក៏រត់ទៅទូលទសកណ្ឋ ។

៣០២៨- អស់យើងខ្ញុំទាំងប្អូនពាន់ ស្រើងរោមធូលកាន់
អង្រែដែកបុកពានរ ។

៣០២៩- ពានរឈរប្រឹងកាងករ កែក្រោយងាងរ
បវរគីកេសរសីហា ។

៣០៣០- សីហានាទរូបរុងនូវឫទ្ធិ សើចស្រួលពីស្រដី
តិរភោះនូវស្នូរសារសព្ទ ។

៣០៣១- ពានរប្រែរឹងពីបង្គាប់ បើចង់ឲ្យស្លាប់
សម្លាប់នូវគេឯអគ្គី ។

៣០៣២- ប្រើយកសំពត់តន់ជ្រី ជ្រលក់នូវប្រេងនៃ
មករុំរុំអង្គហានុមាន ។

៣០៣៣- រុំរួចអស់អង្គាប្រាណ ច្រើនជាន់កុំពីមាន
ចន្លោះទំនេរនូវសំពត់ ។

៣០៣៤- ស្រេចហើយឲ្យដុំភ្លើងដុត ឆេះឆាប់ប្រាកដ
រលត់រលាយអាត្មា ។

៣០៣៥- ភាពស្ដាប់ទំនូលយោធា ត្រេកសោមនស្ស
ក្សេមក្សាន្តព្រះរាជហឫទ័យ ។

៣០៣៦- ហានុខ្លាំងពោរពាក្រាស់ក្រៃ ពុំដឹងនូវប្រល័យ
ប្រលង់ពិភពលង្កា ។

៣០៣៧- ដាគាប់ដូចពាក្យវាចា ត្រាស់ប្រើអសុរា
អមាត្យប្រសាចរត់ថ្ងាត់ ។

៣០៣៨- ដញ្ជូនសំពត់ច្រើនក្ដាត់ ពីឃ្លាំងសែនសុខ
សហាស្បូមករុំអង្គា ។

៣០៣៩- ហានុមានប្រែប្រាណកាណា រូបរូបពន្លា
នូវមាយាទិព្វពីបំបាំង ។

៣០៤០- សំពត់ទាំងទូទសឃ្លាំង ពុំគ្រាន់ឡើយទាំង
ព្រះស្ទឹមួយម៉ឺនហុកពាន់ ។

៣០៤១- យកសំពត់គ្រប់ករកាន់ មកជួយពុំគ្រាន់
ដោយតេជទិព្វមន្ដមាយា ។

៣០៤២- រឹងប្លួតរឹងរុំរូបា ច្រើនជាន់មហិមា
យល់ជាពុំគ្រាន់ជងឆោត ។

៣០៤៣- ហានុមានថាទើយយក្សឆោត[1] មិនទុកជ្ញីឆោត

(1) MBN : thā ṭoy yakkh chot
RIB : thā tāy yaks chot

សំពត់មន្ទោគិរី ។

៣០៤៤. ទាំងស្បៃថ្ងៃនៃទេពី　　　　នោះតើទុកថ្មី
　　　　មិនយកមកករិឲ្យពេញ ។

៣០៤៥. អមាត្យរត់ទៅទូលវិញ　　　　នាងមន្ទោគិរីមិញ
　　　　ពុំអាចនូវពាស់ឡើយហោង ។

៣០៤៦. ហេតុនាងឈឺបុត្រក្នុង　　　　ឲ្យទៅបរចង់ (1)
　　　　សម្លាប់ពានរឲ្យក្សួយ ។

៣០៤៧. អមាត្យបានសំពត់ស្បៃ　　　　រួតរត់ឆាប់ក្រៃ
　　　　កម្លាំងនៃអមាត្យមារ ។

៣០៤៨. ស្រេចរុំផ្លុំភ្លើងដុតដាល　　　　នេះទៅច្រាស់ច្រាល
　　　　រន្ទាលរន្ទះលេចឡើង ។

៣០៤៩. ហនុមានបហិមារឹងជើង　　　　រេរាំទាំងភ្លើង
　　　　ហោះឡើងកណ្ដាលវេហា ។

៣០៥០. ស្រែកគ្រាមទ្រើយក្រុងភាពណា　　　　ប្រយ័ត្នលង្កា
　　　　នឹងមានបង្អើលភ្លើងឆ្លាត់ ។

៣០៥១. ក្បួរណាហោះលើប្រាសាទបាត់　　　　រុងរឿងរូវត្ន
　　　　សុវណ្ណពិចិត្រគ្រោងស្រួច ។

៣០៥២. នេះតុរបីក្រដួរ (2) ដាលដួច　　　　ដាលដោយដីត្រដួច
　　　　ក្រលួចគគឹកបីត្រឡប់ ។

៣០៥៣. ខ្ទាំខ្លួលដង្ហួលថ្ងៃហ្វូង　　　　អោរអាវឡើងឡប់
　　　　គគ្រឹកគគ្រែងផ្លាក់ផ្លាយ ។

៣០៥៤. ផ្ទុះផ្ទាត់បែកខ្ចាត់ខ្ចរខ្ចាយ　　　　ផ្កាភ្លើងព្រាត់ព្រាយ
　　　　កំព្រាលព្រវាត់វេហា ។

៣០៥៥. ដូចដាលភេលកាលមហិមា　　　　គ្រប់គ្រឹះយក្សា
　　　　រំដួលហាហាវនូវជំហាយ ។

៣០៥៦. អគ្គភ្លើងភ្លឺឡើងព្រោលផ្ទាយ　　　　ទៅទាល់សួគ៌នាយ
　　　　ត្រដួចត្រដះបីសន្ធោ ។

៣០៥៧. ដាលដល់មណ្ឌលសិនោ　　　　ភពណាសូរស្ដោ
　　　　ក៏ឈោតរត់ចេញភិតភ័យ ។

៣០៥៨. នេះទាំងមែនអែខទិញថ្ងៃ　　　　នេះក្រណាបន្ទុំនៃ
　　　　មណ្ឌលមន្ទោគិរី ។

៣០៥៩. គក់ស្លុតស្លាំងកាំងដំរីស្រី　　　　ភិតតតស្មារតី
　　　　រវល់រជល់ច្រាស់ច្រាល ។

៣០៦០. គគ្រាំខ្ទុះខ្ទាំបីញញ័រ　　　　រួតរត់ដ៏បដា

(1) RIB : oy dau putr caṅ
(2) RIB : traṭūr

បង្ហាបបើបពោរពួន ។

៣០៦១. ខ្លះរត់រកទ្រព្យបីជញ្ជូន ខ្លះទៀងពាកូន
រវើយករយាយធ្លាក់ស្បៃ ។

៣០៦២. លុះណាញមណ្ឌលទីទៃ អស់ទ្រព្យធននៃ
ប្រល័យវិនាសអន្តរាយ ។

៣០៦៣. អស់ព្រះស្នំស្និទ្ធសម្លាយ គក់គរទ្រូងស្តាយ[1]
ទ្រហោទ្រហឹងបីធំប្រប់ ។

៣០៦៤. ទាំងទេសមុខមាត្រស្គល់ស្គប់ អៀនឯងបីសញ្ជប់
ជញ្ជីងពុំចេញធរជា ។

៣០៦៥. ហនុមានឯកអង្គមហិមា រឹងថ្កានភាជា
សំដែងនូវប្រាជ្ញាពល ។

៣០៦៦. ដោយមោះមាយាធ្វើកល ភាតាខ្លៅពុំយល់
អំពើនូវកិច្ចអន្តរាយ ។

៣០៦៧. ទៀបទូលអស់អាជីអភិប្រាយ ព្រះមារព្រះនារាយ
ស្តេចស្តាប់ទំនូលហនុមាន ។

៣០៦៨. ត្រាស់ត្រេចទើបទ្រង់ព្រះក្សាន្ត ជាវៃហាហនុមាន
គំនិតគំនាប់អញអរ ។

៣០៦៩. អញឲ្យមកុដកែវកងករ ផ្ទឹមពាស្ត្រាភរណ៍
រង្វាន់នៃភាជជ័យក្របី ។

៣០៧០. ហនុមានទិនអង្គសិរសី បង្គំនរបតី
ទទួលរង្វាន់ភាជា ។

៣០៧១. អស់មន្ត្រីនូវយោធា គាល់ព្រះភាជា
បង្គំប្រណាម្យអភិវាទ ។

(1) RIB : gak' gar druṅ vāy

# កណ្ឌ ទី១៥

៣០៧២. ដឹងនោះព្រះនារាយនរនាថ ស្តេចគង់គន្ធមាទ
ដ៏ផ្ទើងលើព្រះពន្លាជ័យ ។

៣០៧៣. ព្រះរាមព្រះអនុជក្សត្រថ្លៃ ពីរពង្សឫទ្ធិក្រៃ
ជំនុំក្របិន្ទ្រយោធា ។

៣០៧៤. ប៉ុនប៉ងបីបំណាច់នូវយា- ត្រាត្រេចលង្កា
ពិភេក្សរក្សសនាយនៃ (1) ។

៣០៧៥. នេះតម្រូវយើងនូវលើកទ័ពជ័យ ដាក់ដល់ឆ្នេរឡ
សាគរគីគង្គីរោ ។

៣០៧៦. មានតែអស់ពលពាលិយា ចិតសិបអក្ខោ-
ភិនីនូវប្រុងដ៏ប្រមាណ (2) ។

៣០៧៧. យើងនូវចងថ្នល់ឆ្លងរួចបាន លុះលង្កាស្ថាន
បីប្រាបពិឃាតយក្សា ។

៣០៧៨. សមស្តេចពលតិចគណនា ម្រាងរិះពន្ធា
សេលានូវឆ្លងជលធី (3) ។

៣០៧៩. ជាវៃឃាសុគ្រីពរាជដ៏ក្របី ឃ្លាឯងជាតិ
ត្រកូលក្របិន្ទ្រសិទ្ធិពារ ។

៣០៨០. ញ៉ាំងបាជំងំដើមនាមករ ក្សត្រពង្សពានរ
នគរដៃវេទ្រង់ឫទ្ធិ ។

៣០៨១. យើងនូវឲ្យនាំសារសុចរិត ស្នេហាស្នាលស្តែកក្តិត

(1) RIB : bidakkh rakkhā nāy nai
(2) RIB : pruṅ ṭa bramān
(3) MBN : mrāṅ riḥ bhasadhā
selā nūv dhuon jaladhī

ជាមិត្រមេត្រីស្នេហា ។

៣០៨២. យើងឲ្យនូវអញ្ជើញក្សត្រា ចូលមកតាំងពារ
សេនីមុខមន្ត្រីពល ។

៣០៨៣. រួសរិះគន់គិតជងថ្កល់ រិះប្រការកល
ប្រយោជន៍ប្រយ័ត្នសឹកសារ ។

៣០៨៤. សុគ្រីពស្ដាប់ព្រះឱង្ការ ព្រះបាទភូវនាថ៍
នារាយរាមាធិបតី ។

៣០៨៥. សុគ្រីពទូនអង្គអញ្ជលី ក្រួញក្រាបសិរសី
បង្គំប្រណម្យទើបទូល ។

៣០៨៦. បពិត្រព្រះបាទឥស្សូរ មានរាជត្រកូល
អំបូរក្សត្រពង្សពានរ ។

៣០៨៧. ឯកអង្គទ្រង់សទ្រង់នាមករ ជំទើនឫទ្ធីពារ
មហាជម្ពូរាជា ។

៣០៨៨. កបកាយសោមសាយសោភា រូបរាងអង្គា
ពណាពន្លឺករឹងឫទ្ធិ ។

៣០៨៩. រោមផ្ការរវៃលមកុះស្និទ្ធ ក្រាស់ក្រៃជុំជិត
រលើបរលង់ក្រាស់ក្រាល ។

៣០៩០. រុងរឿងរស្មីបរិត្រកាល ដូចសូរ្យដែងដាល
សាយាក៏សាយយល់មក ។

៣០៩១. ដូចសែងសូរ្យចែងចាំងពពក ដាលជិតដោយត្របក
ស្រពាប់មេឃមិនស្អិនស្មៅ ។

៣០៩២. ជក្ខុរូបបានទតទៅ តោះនូវក្រោមបរិក្រឡៅ
ក្រឡេកក៏ដេះបាត់បង់ ។

៣០៩៣. តោះនូវស្ទឹមពណាពលពង្ស ពានររាជស្មើអង្គ
នៃក្រុងពាលីមហិមា ។

៣០៩៤. ស្ទឹមកាលសប្ដតាលនាគា ឡូយមានឫទ្ធា
កំស្លួលនូវពិសជ៍ពិរោជ ។

៣០៩៥. នៅក្នុងសមុទ្រសាយសោត មែនមានដើមត្នោត
ក្រាំតាំរក៏ជះលើខ្នង ។

៣០៩៦. តោះនាគពេននៅសព្វជង់ ដើមតាលសោតហោង
ក៏វិលជង្គុំជុំនៅ ។

៣០៩៧. តោះបីនាគនោះនឹងបាចចោលទៅ ត្នោតតាំនឹងនៅ
ល្មើយណាដាដួររៀងរាយ ។

៣០៩៨. ដោយប្រវែងនាគវែងបីគប្បាយ ជំទឹកខ្វរខ្វាយ
ជញ្ជួយនៃដើមសប្ដតាល (1) ។

(1) RIB : trajuor nai ṭoem saptatāl

៣០៩៩- ពាលីបោះទៅចាប់ក្បាល នាគលើកតពារ
ក៏ស្រួលនូវពិសពីក្រាកង ។

៣១០០- ពាលីចាប់សិរនគ្គផង ស្វាយបត់បីបំពាត់
បំពានជាក្អែននាគបាន ។

៣១០១- ទោះបីនាគនោះនិត្យនៅស្ថាន ពាលីបោះស្បាន
ក៏ចាប់សន្ធឹងរុំដ៏ចេញ ។

៣១០២: ដើមតាលរាយជាជួរវិញ នាគនោះចាលចាញ់
រអានឹងពាលីលើង ។

៣១០៣- ពាលីគាត់យកជាខ្សែង ស៊ើជត្រួលអរឯង
ពាំក្រែងពាំកោតប៉ុនល្អង ។

៣១០៤- រីមហាជម្ពូរាជទ្រើសឈ្មង បោះទៅលើងលង
និងសម្តតាលនាគា ។

៣១០៥- សឹងបានដូចគេជក្រុងពា- លីលើងបីលណា
លលេញដោយអស់អំពើ ។

៣១០៦- ក្សត្រតីរពាលពង្សស្ថានស្មើ យកគ្នាជាភ្លើ
សម្លួតសំម្លាញ់តតឃ្លង ។

៣១០៧- រីមហាជម្ពូរាជសោតហោង មានមន្ត្រីច្បង
ពាហុឆ្វេងស្តាំអតិរេក ។

៣១០៨- អង្គអគ្គនាហ៊ីនឯងឯក ក្រុងពលបីអនេក
រក្សាពិភពមណ្ឌល ។

៣១០៩- ដួយឈ្មោះខុននីលអាស្វរ្យ[1] ដួយឈ្មោះខុននល
និមិលមានៈសីហនាទ ។

៣១១០- នៃបនិត្យជិតនឹងព្រះបាទ ពុំដែលឃ្លាឃ្លាត
នឹងមហាជម្ពូរាជា ។

៣១១១- រីរាជមណ្ឌលក្សត្រា ឥស្សរសក្កា-
ធិការអធិករុងផ្កាន ។

៣១១២- នៅខាងខែត្រខែមហោមពាន សោយរាជក្សេមក្សាន្ត
សម្បត្តិសំបូណ៌បរិពារ ។

៣១១៣- បន្ទាយពេជ្រពាត់ពិស្ដារ មណ្ឌបដោយទូរ
កំពែងក្រាំពីរជាន់ជិត ។

៣១១៤- គូរគោកផ្លាក់ផ្ទល់ពិពិធ សឹងពេជ្រពិចិត្រ
រជីវិជីសោតស្ដែង ។

៣១១៥- ផ្កាធូលផ្កាជងខ្វាត់ខ្វែង ផ្កាពាត់ផ្កាពេង[2]

(1) RIB : ascal. (Il s'agit en fait de : ascāry)
(2) RIB : dhlā sūr dhlā jaṅ khvāt' khvaeṅ
dhlā bar sakkh saeṅ

កំពែងកំពស់ព្រះនគរ ។

៣១១៦- រុងរឿងក្បូនក្បឿងសត្តប - វិភណ្ឌាសីទន្តរ
កំពាត់(1)ស្មុមេរុភាង ។

៣១១៧- ប្រាសាទប្រាំប្រាការ(2)ស្ពាន ព្រោងព្រាយបីជញ្ជាំង
ជិញ្ចៀងនូវរូតសត្តខណ្ឌ ។

៣១១៨- តែកវកែមកញ្ចក់នូវកញ្ចន់ ដីកាយរត្នពន់
សុវណ្ណវិភោជវង្សី ។

៣១១៩- ស្បូវកាន្តកាប្បមុក្តាមណី បុស្សបូរជាតិ
ពិទាយពិទូរ្យរឹកវិល ។

៣១២០- បទុមភាគរត្នមហានិល ទទឹមស្រស់ស្រិល
មហាមរកតកែមមាស ។

៣១២១- ភ្លឺរដ្ឋករូលោហិតជាលងាស មិស្សា(3)អភិភាស
ពាពាលនពារត្នដីរេខា ។

៣១២២- គាងឃ្វាយដើតដាយដាយា បទុមមាសមាលា
ត្រដិងត្រដូជដោយដង ។

៣១២៣- ទែនទិញពិមានមាសដួង កែ្រក្រុឌុច្ចទ្រង់
ពិជិត្រនូវរូបយក្សយស ។

៣១២៤- ជង្កាជង្គូមបីប្រិកាស់ ទាញទល់ទែងខាស់
រូបមានវិញ្ញាណប្រឹងប្រែង ។

៣១២៥- ភ្ញីវល្លិពេនពាត់ភ្លាត់ផ្លែង បុះបិតមាសទែង
ត្របកបទុមភាយភាល់ ។

៣១២៦- លាស់លេចក្នុងពេជ្រពិពណ៌ ស្លាស់ស្លុះពព្រាល
ពព្រាយពពោងបីសន្ធៅ ។

៣១២៧- លលាមពញ្លាមពន្លៅ(4) រុងរឿងផ្លុះផ្លៅ
រលមរលង់ស្មើស្រក់ ។

៣១២៨- ទែនកែវកោមលទែនទុក(5) ប្រាង្គប្រាសាទសុខ
មន្ទីរមណ្ឌលផ្លៅផ្លាក់ ។

៣១២៩- ស្លិតសើសងខាងខាត់សាក់ ខ្ពស់ខ្ទើយជ្រុងជ្រាក់
កក្រាលនៃក្រោមពិតាន ។

៣១៣០- ពួកព្រៃព្រាំព្រុយមាសមាន សក្តិសមភាងស្ពាន
រូបមានទិញទេពបីបន្ទំ ។

៣១៣១- តូបតន្ត្រីយត្រៃស័ង្ខសម ស្គរសត្តបីរងំ

(1) RIB : kǎ sbāt
(2) MBN et RIB : prakār
(3) MBN et RIB : maṅsā
(4) RIB : balhau
(5) RIB : rjṅ thkoeṅ thkal' kos daen duk

ប្រតិបំរេរភរិយា ។

៣១៣២. ច្រៀងច្រួចក្រលួចសោះសា សូរសោកសមគ្នា
ត្រសាក់ព្រះពាយបីរំភើយ ។

៣១៣៣. ត្រឹះត្រិចកាព្យកិច្ចឆ្លាស់ឆ្លើយ ឮសេចល្មេងល្មើយ
ស្របងាត់មធុរសូរសារ ។

៣១៣៤. ប្រាសាទមីមួយមានហួរ ប្រាំពីរជាន់វិជិតជា
កុំព្យូសោភសព្វសត្តខណ្ឌ [1] ។

៣១៣៥. ស្រីស្រឹង្គារគាល់ណាណាន់ មុខមន្ត្រីតាន់
កំណាន់កំណត់គង់គាល់ ។

៣១៣៦. ពលពានរសួរពោមជារ បរិវើជុំទ្វារ
អនេកអនន្តគណនា ។

៣១៣៧. រីមហាជម្ពូរាជឫទ្ធា ជុំសើក្រណា-
បន្ទំទិព្វរត្នឯកអង្គ ។

៣១៣៨. ស្តេចស្តាប់សុគ្រីពវិរវិញ្ញូ ទទួលសារសើរក្រុង
មហាជម្ពូមហិមា ។

៣១៣៩. ទើបស្តេចទ្រង់ព្រះចិន្តា បន្ទូលត្រាស់ថា
អ្នកណានូវនាំរាជសារ ។

៣១៤០. គួរប្រើមានុមានជំនួតារ ទ្រើសទ្រង់ពណា
កន្លោះកន្លាំងនិរភ័យ ។

៣១៤១. ខ្ជន់ខ្ជួរមានអធ្យាស្រ័យ មោះចិត្តខ្លាំងពៃក្រ
ប្រទះប្រទូសតាំអត់ ។

៣១៤២. ក៏ក្រែងគេធ្វើឲ្យខុសចិត្ត មានុមានរិង្សឫទ្ធិ
តាំគិតអំពើឆ្ងន់ត្រាល ។

៣១៤៣. ជម្ពូតាអ្នកនាំរាជសារ ពាក្យពេចន៍ឆ្ងន់ស្រាល
អត់ទនដោយចរិសុចរិត ។

៣១៤៤. នឹងយោងយកគេជាមិត្រ ល្អិកគេឲ្យខុសចិត្ត
ក៏ឲ្យមានុមានអត់យោង ។

៣១៤៥. គួរឲ្យអង្គទទៅជង ទោះទោសក្តាំក្តង
គំនិតកំនាប់ខ្ជាប់ខ្លួន ។

៣១៤៦. គាត់ចេះក្តីក្តាំសក្តិសួន សក្តិសែងស្មើខ្លួន
នៃអង្គមានុមានស្នេហាស្និទ្ធ ។

៣១៤៧. ទោះបីអង្គតគាត់គិត មានុមានចូលចិត្ត
គំនិតនៃអង្គទគាប់ ។

៣១៤៨. ស្រេចស្តេចបន្ទូលសារសព្វ អស់ជំនុំស្តែងស្តាប់
ក៏ព្រមព្រះរាជឧង្ការ ។

(1) RIB : sattaṭṭhān

៣១៤៩. ប្រើពីរពង្សពានរនាថ នាំនៃរាជសារ
ត្រូចត្រង់ព្រះត្រៃលោមពាន ។

៣១៥០. ចរចូលទៅតាល់ទៀបស្ថាន ជម្ពូរាជជ័ពិមាន
ប្រាសាទប្រសើរថ្កើងថ្កៃ ។

៣១៥១. ពីរពង្សពានរនិរភ័យ ចូលជូនទៅនៃ
អង្គអគ្គមហាសេនា ។

៣១៥២. ដំណឹងថាហៃក្រុងពា- នរអ្នកយាត្រា
ពីណាមកដល់ទិព្វស្ថាន ។

៣១៥៣. ក្បីណានោះអង្គហនុមាន ថ្លាថ្លែងទឹងថ្កាន
ថាហៃមហាមន្ត្រី ។

៣១៥៤. យើងនាំរាជសារសរវិនិយ សារសព្វមេត្រី
មកពីព្រះបាទរាមា ។

៣១៥៥. ធុរអ្នកនាំយើងយាត្រា ដោយព្រះអាជ្ញា
ដល់មហាជម្ពូរាជតាប់ ។

៣១៥៦. ជងនោះមន្ត្រីថ្លែងស្តាប់ ស្រេចនាំសារសព្វ
ទៅទូលក្របិន្ទ្ររាជា ។

៣១៥៧. ស្តេចឮសារសព្វវាចា ស្តេចប្រាប់ប្រើថា
នូវអស់កំណាន់ភ្នាក់ងារ ។

៣១៥៨. ប្រដាប់ទៀមត្រីព្រះក្រាល វិស័យរាជសារ
និងឡើងទៅថ្វាយបង្គំ ។

៣១៥៩. រៀបភោជមុខមន្ត្រីធំ តូរ្យតន្ត្រីយធំ
សំរាប់សំរៀបភ្លេងសំ ។

៣១៦០. ស្រេចទើបទទួលសារនាំ ឡើងគាល់ដោយចំណាំ
នៃរាជសារសព្វដង ។

៣១៦១. អង្គហនុមានទើសឃ្លង តតភ្លឹកប៉ុនល្អង
ដំណើរវេលាបីគគាត ។

៣១៦២. ព្រះប្រុងស្មារតីសីហនាទ ឡើងលើប្រាសាទ
សីមានៃអង្គអាត់ទូ ។

៣១៦៣. ក្រុងមហាជម្ពូពង្សក្សត្រ បើកបង្អួចរត្ន
ទង់ដៃងនូវតូរ្យតន្ត្រីយ ។

៣១៦៤. ស្តេចត្រាស់ថាហៃជ័ក្របី នាំសារមកពី
បុរីនគរស្ថានណា ។

៣១៦៥. អង្គហនុមានទូលថា យើងឯងអាជ្ញា
ព្រះរាជសារបីសុន្ធរ ។

៣១៦៦. ពីព្រះរាមទេពជ័បវរ ត្រាស់ប្រើយើងចរ
មកយកព្រះអង្គនេះតម្រូវ ។

៣១៦៧. ដ្បិតស្តេចចេញនាំពលព្យូហ ទៅផ្ចាញសត្រូវ

